មៀច ប៉ុណ្ណ






# កម្រងឯកសារស្ដីពី ប្រពៃណី និង ទំនៀមទម្លាប់ខ្មែរ

បញ្ញា ជាតិពន្ធុវិទ្យា និង នរវិទ្យា
ជំនួយដល់ការស្រាវជ្រាវ

ការផ្សាយរបស់អ្នកនិពន្ធ

ព.ស.២៥៥៥ **ភាគ ៤** គ.ស.២០១២

ដើម្បីដាក់ផ្សាយក្នុង elibrary of cambodia

# កម្រងឯកសារស្តីពី

# ប្រពៃណី និង ទំនៀមទម្លាប់ខ្មែរ

## ភាគទី ៤

បញ្ហា **ជាតិពន្ធុវិទ្យា និង នរវិទ្យា**

**និពន្ធ**


ចងក្រង និង រៀបរៀងដោយ

សាស្ត្រាចារ្យ **មៀច ប៉ុណ្ណ** មន្ត្រីនៅក្រុមជំនុំទំនៀមទម្លាប់ខ្មែរ

នៃ **ពុទ្ធសាសនបណ្ឌិត្យ**


ជំនួយដល់ការស្រាវជ្រាវ


**ការផ្សាយរបស់អ្នកនិពន្ធ**





ចាត់ចែងបោះពុម្ពផ្សាយ ដោយ

គ្រឹះស្ថានបោះពុម្ពផ្សាយ **អង្គរ**

Editions Angkor

២០១២

កម្រងឯកសារស្តីពី

# ប្រពៃណី និង ទំនៀមទម្លាប់ខ្មែរ ភាគទី ៤

រៀបរៀង និងចងក្រងដោយសាស្ត្រាចារ្យ

**មៀច ប៉ុណ្ណ**

ទូរស័ព្ទ : ៨៥៥ ២៣ ៧៣៥

លេសរឧ-១៣ : ៩៧៨-៩៩៩៥០-២-១៦៩-៦

ISBN-13 : 978-99950-2-169-6

# មាតិកាអត្ថបទ

# អារម្ភកថា

ក៏ដូចភាគមុនៗ ផងដែរ ភាគនេះ ខ្ញុំបានលើកយកមកពណ៌នា នូវអត្ថបទផ្សេងៗ ពាក់ព័ន្ធទៅនឹងប្រពៃណី ទំនៀមទម្លាប់ខ្មែរយើង ខុសប្លែកពីភាគមុនៗ ។ ការខិតខំកកាយសើរើយករបៀបរបបពីអតីតកាល យកមកលាតត្រដាងជូនអស់លោកអ្នកអាននៅពេលនេះ គឺជាការរំលឹកឡើងវិញ នូវស្រមោលអត្តសញ្ញាណរបស់ជាតិខ្មែរយើង ក្នុងគោលបំណងធ្វើឱ្យមនុស្សខ្មែរជំនាន់ក្រោយ បានដឹងបានយល់អំពីរបត់ អំពីដំណាក់កាល អំពីផ្នត់គំនិត អំពីបច្ចេកទេស អំពីដំណើរជីវិតរបស់បុព្វជនខ្មែរ ដែលមានរបៀបរស់នៅមួយសមស្របទៅនឹងយុគសម័យ ។ សេចក្ដីត្រូវការប្រចាំថ្ងៃ តម្រូវឱ្យបុព្វបុរសយើងចេះច្នៃប្រឌិត ចេះលៃលកយកសមត្ថភាព, បញ្ញាញាណទៅគួបផ្សំនឹងធាតុភូតធម្មជាតិ ដើម្បីប្រឌិតឡើងជាសម្ភារៈ បរិក្ខារ អាចបម្រើបានសំណូមពរនៃតម្រូវការជីវិត ។

ម្យ៉ាងទៀត ការវិវត្តិពពានឡើងរបស់គំនិតច្នៃប្រឌិត នៃមនោគមវិជ្ជា បានជំរុញឱ្យគាត់បង្កើតឡើងនូវសម្ភារៈកាន់តែល្អជាងមុន និងធ្វើឱ្យផ្នត់គំនិតគាត់កាន់តែជឿនលឿនជាងមុន ។ នៅក្នុងភាគនេះដែរ ក្មួយៗ និស្សិតអាចបានអាននូវអត្ថបទមួយចំនួន ឆ្លើយតបបានទៅនឹងការស្រាវជ្រាវ ពាក់ព័ន្ធនឹងជំនឿសាសនា, វប្បធម៌, ប្រពៃណី និងរបត់ទស្សនៈសង្គម ដែលក្មួយៗ កម្រនឹងបានឃើញបានអាន ។ អត្ថបទទាំងនេះអាចធ្វើជាជំនួយដល់ការសរសេរសារណា ឬនិក្ខេបបទ ដែលត្រូវដាក់ឱ្យធ្វើ ។

ពិសេសជាងនេះទៅទៀត អស់លោកអ្នកអាន និងក្មួយៗ បានពើបពះ
ះនឹងអត្ថបទតាមរយៈ របាយការណ៍របស់ទូតគោចរជនជាតិចិនម្នាក់ឈ្មោះ
តាក្វាន់ (Chéou Ta Quan) ។ កំណត់អាថ៌កំបាំង ដែលកន្លងទៅជិត
០០ ឆ្នាំនេះ នឹងធ្វើឱ្យអស់លោកអ្នកអានបានភ្ជាប់សង្គមខ្មែរបច្ចុប្បន្ន ទៅ
រព្វបុរសសម័យអង្គរ ដែលមានការខុសប្លែកគ្នារកហៅមិនត្រូ ។

បានអានសៀវភៅប្រពៃណី ទំនៀមទម្លាប់ខ្មែរ ភាគទី ៤ នេះ អស់
កនឹងមិនខកបំណងឡើយ ។

ដោយបានការគាំទ្រពីអស់លោកអ្នកអាន ដ៏ច្រើនសន្ធឹកសន្ធាប់ដូច្នេះ
ទជាអ្នកនិពន្ធ ពិតជាមានការលើកទឹកចិត្តខ្លាំងណាស់ ។ ដូច្នេះ ឆ្លើយតប
រឹងការចង់ចេះ ចង់ដឹងរបស់អស់លោក ទោះបីកំពុងមានជំងឺជាប់ខ្លួន (ជំងឺ
ងណោម ស្ពឹកពិការមួយចំហៀងខ្លួនយ៉ាងណាក្ដី) ក៏ដៃស្ដាំខ្ញុំអាចនៅកាន់
វាប់. អាចសរសេរ អាចស្រាវជ្រាវបាន ដើម្បីនឹងចេញផ្សាយនូវលេខ
យៗ ទៀតជាបន្តបន្ទាប់ ឱ្យតែទេវតាលោកទុកជីវិតឱ្យរស់នៅយូរដល់ពេ
នៅតែសរសេរ និពន្ធ រហូតដល់របេះបិចពីដៃ ។

ដោយមនោសញ្ចេតនា គោរពរាប់អានដ៏ស្មោះពីអ្នកនិពន្ធ ។

មៀច ប៉ុណ្ណ

# ឧទ្ទិសកថា

សូមឧទ្ទិសស្នាដៃ ដ៏តិចតួចស្តួចស្តើងនេះ ជូនចំពោះ :

- លោកឪ មៀច អ៊ូច អាចារ្យវត្ត និងជាអ្នកប្រពៃណីនិយម
- លោកម៉ែ អ៊ុង នាង អ្នកចាត់ចែងបណ្ណាការ និងជាអ្នកសម្ពាងការ
- បង ៧ ប្រុសស្រី ដែលបានបីពរខ្ញុំ បញ្ចុកអាហារខ្ញុំ ថ្នាក់ថ្នមខ្ញុំជាប្អូនពៅ
- លោកគ្រូ ធូ ចាន់, ព្រាក់ នេត, គង់ កប, ជូ ម៉ុក, សម នួន ..... ។

ដែលបានយកចិត្តទុកដាក់បង្ហាត់បង្រៀនខ្ញុំ រហូតទាល់តែចេះអាន ចេះសរសេរ តែងនិពន្ធ ។ ខ្ញុំសូមរំលឹកគុណ បុព្វទេវាទាំងអស់ និងសម្តែងនូវកតញ្ញូតា កតវេទី ចំពោះអស់លោក ដែលបានរួមចំណែកអប់រំ ទូន្មានរូបខ្ញុំ ឱ្យបានក្លាយជាមនុស្សដូចសព្វថ្ងៃ ..... និងសូមវិញ្ញាណក្ខន្ធអស់លោក បានទៅកើតនៅសុគតិភព កុំបីឃ្លៀងឃ្លាតឡើយ ។

មួយចំណែកទៀត សូមសំដែងនូវការដឹងគុណចំពោះជាតិ សាសនា ព្រះមហាក្សត្រ ដែលផ្តល់នូវកន្លែង និងទីតាំងដ៏សមគួរសម្រាប់រូបខ្ញុំ ធ្វើសកម្ម-ភាពលើកស្ទួយអត្តភាពសង្គម និងជាតិ សាសនា ព្រះមហាក្សត្រ ឱ្យបានថ្កុំថ្កើងរុងរឿង ។

ខ្ញុំសូមប្តេជ្ញាយកអស់កម្លាំងកាយ កម្លាំងប្រាជ្ញា បម្រើជាតិ ឱ្យបានកាន់តែល្អតលាស់ រីកចម្រើន រហូតបានក្លាយជាអារ្យប្រទេសរហូតអវសាន ។

ពីអ្នកនិពន្ធ

**មៀច ប៉ុណ្ណ**

# បណ្ដាំអ្នកនិពន្ធ

តើអស់លោកស្រឡាញ់ការវិវឌ្ឍន៍ ការអភិវឌ្ឍន៍ឬទេ ? តើអស់លោកចង់បង្កើនសមត្ថភាពខ្លួន ឱ្យកាន់តែដុះដាលរីករាលខ្លាំងក្លាជាងមុន ខ្ពង់ខ្ពស់ជាងមុន ភ្លឺស្វាងជាងមុនឬទេ ? ឃ្លាំងបញ្ញាញាណ ឃ្លាំងចំណេះវិជ្ជា នៅជុំវិញអស់លោកមានច្រើនឥតឧបមា ..... វារង់ចាំតែអស់លោកឈោងចាប់យកមកអាន. មកសិក្សា រៀងរាល់ថ្ងៃនោះ អស់លោកនឹងក្លាយទៅជាអ្នកចេះដឹង. មានប្រាជ្ញា មានសមត្ថភាព លើសមុនដោយមិនដឹងខ្លួន ។ កាលនៅពីក្មេង អស់លោកយកលោកគ្រូអ្នកដឹកដៃនាំមុខ ទូន្មានពត់ដំឱ្យអស់លោក ក្លាយទៅជាអ្នកមានសញ្ញាបត្រគ្រប់កម្រិត តាំងពីថ្នាក់បឋមភូមិ មធ្យមភូមិ ដល់ថ្នាក់ឧត្តមសិក្សា ..... ក្រោយពីបានសញ្ញាបត្រគ្រប់កម្រិតទាំងនោះមក អស់លោកមិនទាន់អាចក្លាយជាអ្នកចេះដឹងបានទេ គឺអស់លោកមានឈ្មោះត្រឹមអ្នកមានសញ្ញាបត្រប៉ុណ្ណោះ ។ បើចង់ក្លាយខ្លួនជាអ្នកចេះដឹង ត្រូវព្យាយាមអានសៀវភៅឱ្យបានយ៉ាងតិច ១០០០ ក្បាល ដល់ ៥០០០ ក្បាល ទើបក្លាយទៅជាអ្នកចេះដឹងបានត្រឹមថ្នាក់មធ្យម ឬបង្គួរប៉ុណ្ណោះ ..... ចង់ក្លាយទៅជាអ្នកចេះពិតប្រាកដនោះ សូមឧស្សាហ៍ព្យាយាមអានបន្តឥតឈប់ឈរ នោះអស់លោកនឹងក្លាយខ្លួនជាអ្នកចេះដឹងពិតៗ ។ (ពហុស្សូត្រ ឬ Erudit) ។ សម្រាប់ខ្ញុំ សញ្ញាបត្រគ្រាន់តែជាមោទនភាពរបស់បុគ្គល សម្រាប់យកមកបង្អួតគ្នាលេង សម្រាប់យកមកធ្វើការវាស់កម្ពស់កម្រិតសិក្សាប៉ុណ្ណោះ ។ ប្រសិនបើការប្រមូលបានសញ្ញាបត្រច្រើនហើយ ស្រាប់តែមានអំណួតអួតអាង

បង្ហាញនូវវង្វាស់ការចេះដឹងទទេនោះ ប្រហែលមិនមែនជាការពិតទេ ..... ។ ព្រោះក្រៅពីការបង្ហាញនូវស្នាដៃសរសេរ និពន្ធ ដល់មហាជនក្នុងសង្គមនោះ ពុំមានទឡ្ហីករណីឯណាក្រៅទៀតសម្រាប់យកមកអះអាងឡើយ ។ មានកញ្ចក់សញ្ញាបត្រច្រើន យកមកដាក់តាំងបង្ហាញ នៅបន្ទប់ទទួលភ្ញៀវនោះ ក៏វាជាមោទនភាពមួយហើយ ។ ប៉ុន្តែរឹងរឹតតែល្អជាងនេះទៅទៀតនោះ គួរតែមានការដាក់តាំងបង្ហាញក្នុងទូកញ្ចក់នៅបន្ទប់ទទួលភ្ញៀវ នូវសៀវភៅស្នាដៃរបស់ខ្លួនឱ្យបានច្រើន ។ និយាយយ៉ាងនេះ មិនមែនខ្ញុំមិនឱ្យតម្លៃទៅលើសញ្ញាបត្រនោះឡើយ តែខ្ញុំសង្កត់ធ្ងន់ទៅលើស្នាដៃនិពន្ធច្រើនជាង ព្រោះការសរសេរសៀវភៅ វាមានកម្រិតជម្រៅមួយខ្លាំងជាងការសរសេរសារណា ឬ និក្ខេបបទ ១០០ ឬ ២០០ ទំព័រ ទៅទៀត ។ បើសរសេរសៀវភៅបានកាន់តែច្រើននោះ គោមីខ្លួនអាចមានមោទនភាពកាន់តែខ្លាំងក្លា ។ បានជាខ្ញុំហ៊ានអះអាងយ៉ាងដូច្នេះ, ព្រោះខ្ញុំមានសញ្ញាបត្រតិច, ទាប ប៉ុន្តែអាស្រ័យដោយការព្យាយាមអានសៀវភៅរបស់អ្នកប្រាជ្ញបានយ៉ាងច្រើននោះ ខ្ញុំក៏បានបង្កើនចំណេះ ប្រាជ្ញា ពហុស្សុតភាព ..... ហើយអាចក្លាយទៅជាអ្នកនិពន្ធ សរសេរសៀវភៅជូនសាធារណជន ក្នុង និងក្រៅប្រទេស បានអាន បានយល់ដឹង និងបានបង្កើនចំណេះមនុស្សភាគច្រើន។ បន្ទាប់ពីបានអានសៀវភៅ គេក៏ក្លាយទៅជាអ្នកសរសេរសៀវភៅឱ្យគេអានវិញ បង្កើតបានជាចលនាប្តូរចំណេះដឹងយ៉ាងសំខាន់ក្នុងសង្គម ។

ខ្ញុំយកបទពិសោធន៍ផ្ទាល់ខ្លួននេះ មកជម្រាបអស់លោកអ្នកអាន មក [illegible]ព្រោះតែខ្ញុំតស៊ូអាន ប្រវត្តិអ្នកនយោបាយធំៗ ដូចយ៉ាងលោក បរុកវ៉ាស៊ីន-

តោន លោក អាប្រាហាំលិងកិន លោក អ៊ុតខ្មែរ ..... ដែលក្លាយពីជនសាមញ្ញធម្មតាទៅជាវីរៈជននយោបាយ អ្នកដឹកនាំដ៏ធំក្នុងប្រវត្តិសាស្ត្រសកលលោក ។ អាស្រ័យដោយយកសៀវភៅធ្វើជា "**គ្រូ**" ។ ប៉ុន្តែ ដើម្បីនិយាយកុំឱ្យចាក់ជ្រុងទៅម្ខាងនោះ គប្បីជម្រាបផងដែរថា មានអ្នកប្រឡងជាប់បានសញ្ញាបត្រធំៗខ្ពស់ៗ មួយចំនួនដែរ ដែលបានក្លាយទៅជាអ្នកនិពន្ធ ហើយផ្ញើរចំណេះដឹងទូទៅដល់សាធារណជន .....។

សូមអភ័យទោស ដោយខ្ញុំរវល់តែប៉ាចប៉ៃ និយាយប៉ាចបាចពីរឿង "សញ្ញាបត្រ" និង "ស្មាដៃ" ។ ខ្ញុំគិតថា មុខជាមានរស់លោកអ្នកអានជាច្រើន និង "**ជឿខ្ញុំ**"

សូមអភ័យទោសពីររស់លោកអ្នកអាន!

ដោយកំពេងល្អពីអ្នកនិពន្ធ ។

**បណ្តាំ** "សូមអានឱ្យច្រើន អានកុំឆ្អែតឆ្អន់ឱ្យសោះ"

ភ្នំពេញ, ថ្ងៃទី ២២ - ១០ - ២០១១

**មៀច ប៉ុណ្ណ**

# ជំនឿបែបសំយោគក្នុងសង្គមខ្មែរ

នៅក្នុងសង្គមខ្មែរយើង គេតែងតែបានសង្កេតសម្គាល់ឃើញមានពិធីជាច្រើន ប្រព្រឹត្តទៅនៅវត្តអារាមខ្លះ, នៅតាមគ្រួសារខ្លះ, និងនៅតាមទីកន្លែងផ្សេងៗ ទៀត, ទៅតាមកាលវេលាសមស្រប ។ តើពិធីទាំងនោះ ធ្វើឡើងដើម្បីអ្វី ? ហើយតើវាមានប្រភពចេញពីណាមក ?

ប្រពៃណីទំនៀមទម្លាប់ គឺជាដំណែលស្មារមលម្អាន, ធ្វើឡើងតៗ គ្នា, តាមផ្នត់គំនិត និងតាមការត្រួសត្រាយរបស់មនុស្សជំនាន់មុនៗ, និងជំនាន់បន្តបន្ទាប់ ។ ប្រពៃណីទំនៀមទម្លាប់របស់ខ្មែរយើង មានប្រភពចេញមកពីទម្រង់ប្លែកៗ នៃសាសនា និងជំនឿរបស់បុព្វបុរសពីអតីតកាល បូរបែបលំដាប់លំដោយតរៀងមក ។ គួរគប្បីជ្រាបថា តាំងពីច្រើនពាន់ឆ្នាំមកហើយ, បុព្វបិតារបស់យើងធ្លាប់បានប្រតិបត្តិសាសនាបីគឺ :

## I. ជំនឿតាមបែបលទ្ធិព្រលឹងនិយម (បុគ្គលនិយម)[1] (ANIMISM)

ជនជាតិខ្មែរប្រកាន់ និងគោរពប្រតិបត្តិជំនឿនេះ តាំងពីរាប់ម៉ឺនឆ្នាំមកហើយ គឺមុនការនាំចូលនៃសាសនាពីរ[2] មកពីប្រទេសឥណ្ឌានោះទៅទៀត ។ តើលទ្ធិព្រលឹងនិយមនេះមានអត្ថន័យយ៉ាងណា ? ។ គួរគប្បីជ្រាបថា បុព្វបុរស

---

[1] អ្នកស្រាវជ្រាវខ្លះហៅថាជំនឿបែបលទ្ធិ ជីវចលនិយម បារាំងហៅថា (Animisme)

[2] ព្រាហ្មណ៍សាសនា និងព្រះពុទ្ធសាសនា

ជាដូនតាយើង តែងតែគោរព និងឱ្យតម្លៃយ៉ាងខ្ពស់ ក៏ដូចជាជឿជាក់ទៅលើគុណធម៌ សមត្ថភាព សីលធម៌របស់មេកន្ទ្រាញ, មេកុលសម្ព័ន្ធ, ឬចាស់ព្រឹទ្ធាចារ្យ ជាអ្នកដឹកនាំក្នុងសហគមន៍ ។ ចំណែកឯមេដឹកនាំវិញសោត ក៏តែងតែអាណិតស្រឡាញ់កូនចៅនៅក្នុងសហគមន៍វិញយ៉ាងប្តូរផ្តាច់ផងដែរ ។ ការប្តូរមនោសញ្ចេតនារវាង **មេ** និង **កូនចៅ** បានតភ្ជាប់ចរន្តនៃក្តីអាណិតស្រឡាញ់, និងការគោរពលើកស្ទួយ ឱ្យវេញព្រួតញ់បញ្ចូលគ្នាជាខ្សែជីវិតតែមួយ ។ ពេលមានសង្គ្រាមវាតទឹកដី ឬការពារទីតាំងភូមិសាស្ត្ររបស់គេ, មេ និងកូនចៅតែងតែរួមកម្លាំងយ៉ាងប្តូរផ្តាច់ ដើម្បីសម្រេចឱ្យបាននូវជ័យជម្នះ ។ ជោគជ័យដ៏ត្រចះត្រចង់ តែងតែយកបានមកដោយសារលទ្ធផលនៃការអាណិតស្រឡាញ់ និងការគោរពកោតខ្លាចគ្នាទៅវិញទៅមក របស់ **មេ** និង **កូនចៅ** នេះឯង ។ ដូច្នេះហើយ, កាលណា **មេ** ស្លាប់ទៅ អ្នកកាន់ជំនឿលទ្ធិនេះ កំណត់ថា **ព្រលឹងមេ** នឹងនៅតាមគ្រប់គ្រងថែរក្សាមើលការខុសត្រូវលើកូនចៅដូចកាលនៅរស់ដែរ ។ ព្រលឹងរបស់មេតែងតែមកចាប់កំណើតជា អារក្ស អ្នកតា នៅទីជិតខាងភូមិកំណើត ហើយតាំងទីស្នាក់អាស្រ័យនៅលើដើមឈើធំៗ ជុំផ្កូខ្ពស់ៗ ឬក៏នៅដោយដំបូក ទីទួល ..... ជាដើម ។ ការចាប់កំណើតរបស់ព្រលឹងមេនេះ, ច្រើនតែឱ្យដឹងពីងតាមការបកពន្យល់សប្តិ ប្រាប់ដល់អ្នកស្រុកអ្នកភូមិ, ឬក៏តាមការចូលរូប ។

ក្នុងសង្គមខ្មែរពីជំនាន់បុព្វកាល, ពិភពខ្មោច, ពិភពព្រលឹងបុព្វបុរសតែងតែមានការឆ្លងឆ្លើយទាក់ទងគ្នា (ក្រៅពីការយល់សប្តិ) តាមរយៈអន្តរការី (MEDIUM) ដែលជននេះ (ស្រីក៏មានប្រុសក៏មាន) សុទ្ធតែបានទទួល

បញ្ហាពីពិភពខ្មោច ឬពិភពព្រលឹងឱ្យទទួលភារកិច្ចធ្វើជាស្ពានកណ្ដាលឋិតនៅចន្លោះពិភពខ្មោច និងពិភពមនុស្ស ។ មនុស្សប្រភេទនេះមានលក្ខណៈពិសេសតាំងពីកំណើតមក, សក្តិសមនឹងបំពេញតួនាទីនេះ ហើយដែលពិភពខ្មោចតម្រូវជ្រើសរើសឱ្យដើរតួជា **រូប** ជាមេ **ស្នង** សម្រាប់នាំយកដំណឹង និងបំណងប្រាថ្នាពីពិភពមួយទៅពិភពមួយ ។

## II- និមិត្តរូបនៃលទ្ធិព្រលឹងនិយម

តើគេសម្គាល់លទ្ធិព្រលឹងនិយមតាមរូបភាពអ្វីខ្លះ ?

### ១- តាមរូបភាពអ្នកតា

នៅតាមភូមិខ្មែរនានា, តាមវត្ត, តាមទីឋានដីស្រែចម្ការ[៣], ព្រៃព្រឹក្សា, ជ្រោះជ្រងជ្រលងដងអូរ, បឹង, ទន្លេ, ស្ទឹង, ត្រពាំង, សមុទ្រ[៤] រហូតដល់សាលាឃុំ សាលាស្រុក សាលាខេត្ត ឬតាមសាលាកាត់ក្តី ប្រាសាទមន្ទីររាជឋាន វាំងព្រះមហាក្សត្រ សុទ្ធតែមានវត្តមានរបស់អ្នកតា ។ អ្នកតាខ្លះមានលំនៅជាខ្ទមធ្វើពីឥដ្ឋប្រក់ក្បឿង, ខ្ទមធ្វើពីឈើប្រក់ស្លឹកត្នោត ខ្លះនៅតាមដោយដើមឈើធំៗ, តាមដំបូក ឬដុំថ្ម ។ អ្នកតាខ្លះ មានរូបសំណាកជាតំណាងកសាងដោយអ្នកស្រុក, ខ្លះមានតែដុំថ្មមួយដុំជាតំណាង, ខ្លះពុំមានអ្វីជាតំណាងទេ, ប៉ុន្តែគេប្រាប់តៗគ្នាពីជំនាន់មួយទៅជំនាន់មួយ, ឱ្យបានដឹង សម្រាប់ជា

---

[៣] អ្នកតានៅតាមវាលស្រែចម្ការ ហៅថា "អ្នកតាព្រះភូមិ" "Génie foncier" មានភារកិច្ចការពារលរក្សាភោគផលដំណាំកសិកម្មមិនឱ្យខូចខាតដោយប្រការណាមួយ ។

[៤] អ្នកតានៅតាមត្រពាំង បឹង បួរ ស្ទឹង ទន្លេ សមុទ្រ ហៅថា "អ្នកតាប្រយ៉ាប"

ទាំងការគោរពបូជារបស់អ្នកមានជំនឿ ។ មិនមែនតែសង្គមមនុស្សប៉ុណ្ណោះទេ ដែលមានឋានានុក្រម លំដាប់ថ្នាក់ និងឋានៈតាមបែបរបៀបគ្រប់គ្រងផ្នែករដ្ឋបាល សូម្បីតែអ្នកតា ក៏គង់មានឋានៈជាន់ថ្នាក់, លំដាប់ លំដោយពីតូចទៅធំដែរ ។ ឧទាហរណ៍ : នៅតាមភូមិនីមួយៗ មានអ្នកតា ប្រចាំភូមិ ដែលមានភារៈមើលសុខទុក្ខ, គ្រប់គ្រងថែរក្សាមនុស្សលោកក្នុងភូមិ, ឱ្យមានវិន័យ, មានសណ្ដាប់-ធ្នាប់, ឱ្យរង្វាន់ដល់អ្នកយល់ចិត្តគោរពបូជាអ្នកតា, និងដាក់ទោសទណ្ឌដល់មនុស្សឥតជំនឿប្រព្រឹត្តល្មើស ឬប្រមាថមាក់ងាយបារមីអ្នកតា ។ ឧទាហរណ៍:

**ក. ការឱ្យរង្វាន់ :** ផ្ដល់លទ្ធភាពឱ្យបានសុខសប្បាយទាំងមនុស្សក្នុងគ្រួសារ, ទាំងសត្វពាហនៈ គោក្របី, ដំរីសេះ, ជ្រូកមាន់ទា .... ការពារកម្ចាត់រោគជំងឺផ្ដាសផ្សេងៗ កុំឱ្យមកបៀតបៀន ការពារជំងឺរាតត្បាត, ការពារចោរខ្មាំងមិនឱ្យមកយាយីព្យាបាទ អ្នកជឿស្មោះ និងគោរពបូជា, ឱ្យរកស៊ីកាក់កបបានចំណេញ, ចម្រើនលូតលាស់ក្នុងមុខរបរ .... ។

**ខ. ការដាក់ទោសទណ្ឌ :** ចំពោះជនឥតជំនឿ ព្រហើន កោងកាច ហ៊ានប្រមាថមាក់ងាយអ្នកតាវិញ ការពោលពាក្យប្រមាថមាក់ងាយ, ប្រមាថប្រទូស្ត, ល្បួងពាលទៅលើទីតាំង អាសនៈ ដូចជាកាប់បំផ្លិច, លោបប្រវ៉ាណ, ពោលពាក្យប្រឆាំងស្អប់ខ្ពើមរបស់អ្នកតា ចំរីងច្រូង, លេងសើច, ច្រើនតែបានទទួលរងគ្រោះ បើបរស្លូជាត, ក្ដៅសន្ធំ ប្រកាច់ប្រកិន វៀចមាត់ វៀចក, ពុកពោះ ឈឺក្បាល, រលួតរលើក, រត់ចេញពីផ្ទះចូលទៅក្នុងព្រៃ ។ល។ ប្រការដែលគួរកត់សម្គាល់នោះគឺ បើមានគ្រោះថ្នាក់ ឈឺថ្កាត់ វិបល្លាសផ្សេងៗ ដែលបណ្ដាលមកពី "អំពើរបស់អ្នកតា" នោះគាមីជនកម្រ មានអាការៈឈឺ

ផ្កាត់ធ្ងន់ធ្ងររហូតដល់ស្លាប់ណាស់ ។ អ្នកតាហាក់ដូចជាមានការអាណិតអាសូរ អនុគ្រោះដល់ជនល្មើស ទុកឱ្យគេកែខ្លួននៅពេលក្រោយ បន្ទាប់ពីបានទទួលស្គាល់ការខុសឆ្គងរបស់ខ្លួន ហើយចេះមានការភ្ញាក់រលឹកលន់តួចុះញ៉មលោកតា, ដោយមានការបែបន់អង្វរករទទួលកំហុស, និងធ្វើពិធីសែនព្រេនជាចំណីគាប់ប្រសើរ មានពែ (ទម្រង់ផ្សេងៗ), មាន់ស្ងោរ, ក្បាលជ្រូក, ស្រា, នំចំណីចេកទុំ ។ល។ គួរជម្រាបផងដែរថា, អ្នកតាក៏មាននាទីមើលការខុសត្រូវទៅតាមទីតាំងភូមិសាស្ត្រដែលខ្លួនតាំងនៅដូចរាជ្យាធរមនុស្សដូច្នោះដែរ ។ លោកតា នៅភូមិណា ឃុំណា, ស្រុកណា, ខេត្តណា, គឺមានដែនទទួលខុសត្រូវ និងធ្វើសកម្មភាពទៅតាមមុខនាទីរបស់ខ្លួន ។

## III- ពិធីកម្មចំពោះអ្នកតា

ពិធីកម្មផ្សេងៗ ដែលតែងធ្វើជាទម្លាប់តៗ គ្នា គឺអាចពណ៌នាបានដូចខាងក្រោមនេះ :

ក្រៅពីពិធីសុំអភ័យទោសពីអ្នកតានៅពេលដែលមនុស្សខ្លះបានប្រព្រឹត្តអំពើមិនគប្បីចំពោះអ្នកតានោះ នៅមានពិធីបួងសួង, បន់ស្រន់សុំទឹកភ្លៀង, ពិធីបួងសួងបន់ស្រន់សុំសេចក្ដីសុខសប្បាយ, ពិធីឡើងអ្នកតារតាមរដូវកាល និងតាមទម្លាប់ក្នុងតំបន់ ។ ក្នុងពិធីនីមួយៗ វត្ថុជាតង្វាយដែលពុំអាចខ្វះបាននោះមានដូចជាពែ, សំណែនជាម្ហូបអាហារ, ផ្លែឈើ, ភេសជ្ជៈ (ស្រា ទឹក តែ ...) ជូនកាលមានមាន់ឆ្អិន, ក្បាលជ្រូក, មាន់ស្ងោរ ..... ។ ឯគ្រឿងតង្វាយក្រៅពីម្ហូបចំណី មានពែ, ជមចារ, ស្លាធម៌, លាជ, ទៀនធូប, ផ្កា ជាដើម ។ លោកតាក៏មានតួនាទីបញ្ចៀសទុក្ខភ័យប្រជាករក្នុងភូមិ, ឃុំ, ស្រុក, ឬតំបន់

នៅពេលដែលមានជំងឺរាតត្បាត ដូចជា អាសន្នរោគ, អ្នកតាធំចូលមកបង្ការ ឃ្លាំរង្គាលនៅតាមទីតាំងភូមិសាស្ត្រដែលគាត់ទទួលខុសត្រូវផងដែរ ។ ការធ្វើពិធីកម្មជាប្រពៃណីចំពោះអ្នកតា សុទ្ធតែធ្វើឡើងដោយមានរូបសំណើងជាអន្តរ-ការី ធ្វើជាអ្នកនាំសារ ជាការបែបន់ , ជាសំណូមពរពីប្រជាករមនុស្សលោក ចង់បានអ្វី ចង់ឱ្យអ្នកតាសម្រេចបំណងអ្វីខ្លះដល់ខ្លួន ក៏ដូចជាអ្នកនាំពាក្យពីលោកតា, ពាក់ព័ន្ធនឹងពាក្យទូន្មាន ពីការអនុគ្រោះ ការផ្តល់ផ្សេងៗ, និងពីប្រាមដែលអ្នកតាបានដាក់កំហិតដល់មនុស្សលោក ។ យើងក៏មិនត្រូវភ្លេចដែរ, អំពីសេចក្តីត្រូវការរបស់លោកតាក្នុងកិច្ចសុំយាង, សុំទិមន្ត, និងការម្សាន្តសប្បាយរបស់អ្នកតា គឺក្រុមភ្លេងដែលជាធម្មតា មានអ្នកផ្លុំប៉ីពកប៉ីអ, អ្នកកូតទ្រខ្មែរខ្សែបី, អ្នកដេញចាប៉ី, អ្នកវាយស្គរពីរ ឬបីនាក់ ។ ជួនកាលអ្នកតាក៏ត្រូវការអ្នកភ្លេងពិណពាទ្យផងដែរ ដែលរួមមាន អ្នកវាយគង, រនាត, អ្នកផ្លុំស្រឡៃ, អ្នកវាយស្គរធំ, ស្គរសំភោ ..... ។ នៅ ពេលចូលរូប អ្នកតាច្រើនតែជួតក្បាលដោយក្រណាត់ក្រហម ។ ជួនកាល អ្នកតាពាក់អាវ វែងដៃខ្លីពណ៌ស ស្លៀកសំពត់ឬស កាន់ដាវត្រីរាំតាមសង្វាក់ភ្លេង ។

## V. អ្នកតាល្បីល្បាញ

នៅកម្ពុជាយើង អ្នកតាធំៗ ក្នុងកម្រិតថ្នាក់ជាតិ មានតែបីអង្គប៉ុណ្ណោះ គឺ :

**១. អ្នកតាដងកើ** : មានទីតាំងនៅក្បែរដំណាក់ផែ មុខព្រះ

---

ពាក្យកើនេះជាពាក្យចិន ប្រែថា "ទង់" ដងកើ គឺ ដងទង់

បរមរាជវាំង បានជាគេឱ្យឈ្មោះថា **"អ្នកតាដងកើ"** ព្រោះអ្នកតានេះជ្រើសរើសទីលំនៅ នៅដងទង់ក្បែររាជដំណាក់ផែ ។ ដងទង់នេះ សម្រាប់បង្ហូតទង់ជាតិ នៅពេលដែលព្រះមហាក្សត្រមិនគង់នៅក្នុងប្រទេស ។ នេះជាទម្លាប់ដែលបានអនុវត្តតាំងពីអតីតកាលរៀងមក ។

នៅពេលជាខាងក្រោយមក ព្រលឹងរបស់អ្នកតា លែងនៅនឹងដងទង់ទៀតហើយ ប៉ុន្តែដោយមានកូនវិហារយ៉ាងស្អាតមួយត្រូវបានសាងសង់ឡើងនៅខាងជើងដងកើ ជិតព្រះដំណាក់ផែ ព្រលឹងអ្នកតាក៏ផ្លាស់មកនៅក្នុងទីតាំងនៃកូនវិហារថ្មីនេះវិញ ដោយមានរូបតំណាងសាងពីឥដ្ឋស៊ីម៉ង់ត៍ ហើយត្រូវបានមហាជនបំពាក់គ្រឿងស្បង់, អង្គុំក[1], កម្រងផ្កាផ្សេងៗ ទៅតាមជំនឿ និងសទ្ធាជ្រះថ្លារៀងៗខ្លួន ។ នៅរៀងរាល់ថ្ងៃសីល, នៅទីស្នាក់ការរបស់អ្នកតាដងកើ, មានសភាពឧឡារិក អ៊ូអរជាងថ្ងៃធម្មតា, ព្រោះមានមហាជនស្រីប្រុសដែលជំពាក់បំណន់ ឬជាអ្នកមានជំនឿ ដែលឮល្បីតពីគេថាអ្នកតានេះ សក្តិសិទ្ធិណាស់, បើបែបន់ចង់បានអ្វី, នឹងបានសម្រេចដូចបំណង, ក៏បាក់ភ្លុកមកធ្វើពិធីបន់ស្រន់ ក្នុងបំណងចង់ឱ្យក្តីប្រាថ្នារបស់ខ្លួនបានសម្រេចដូចគេមុនៗ ។ ដូច្នេះគេឃើញមានទិដ្ឋភាពអ៊ូអរ, លាយឡំដោយសម្លេងភ្លេងពិណពាទ្យ, ព្រមទាំងក្លិនធូបក្រអូបឈ្ងុយឈ្ងប់, ហើយថែមទាំងមានផ្សែងហុយទ្រុបទៅលើអាកាសផង ។ អ្នកលាបំណន់, និងអ្នកមកបន់ស្រន់, ដើរប្រជ្រៀតគ្នា, ខ្លះកាន់ផ្កា, ទៀនធូប, ផ្លែដូងខ្ចីឡាវ, ដែលជាតង្វាយចំពោះអ្នកតា ។

យើងហ៊ានត្រឹមតែសន្និដ្ឋានថា អ្នកតាដងកើនេះ អាចជាព្រលឹងព្រះ

---

[1] ហៅក្លាយមកជា ហង់សាក់

មហាក្សត្រខ្មែរអង្គណាមួយ, ឬវីរជនខ្មែរណាមួយដែលមានហឫទ័យស្រឡាញ់ជនជាតិសាសន៍ខ្មែរ. ហើយចង់នៅតាមថែរក្សាអភិបាលការពារប្រជាជាតិឱ្យនៅគង់វង់ និងរីកចម្រើនថ្កុំថ្កើងរុងរឿង ។ រីឯប្រជាជាតិខ្មែរ, នៅតែគោរពស្រឡាញ់ព្រះមហាក្សត្រ ឬវីរជននោះ, ដោយទឹកចិត្តគោរពភក្តី, ហើយនៅតែមានជំនឿជឿជាក់ទៅលើដួងព្រលឹងរបស់បុព្វបុរសរបស់ខ្លួន, ថានឹងជួយដោះទុក្ខធុរៈ និងបំពេញសេចក្ដីត្រូវការរបស់ខ្លួនដូចកាលដែលលោកមានជីវិតរស់នៅដូច្នោះដែរ ។

## ២. អ្នកតានៅភ្នំឈើកាច់[១] (ឃាភ្នំ)

តាមអ្នកប្រវត្តិសាស្ត្រខ្លះ, តំបន់ភូមិសាស្ត្រភ្នំឈើកាច់ត្រកួនភ្នំ, គឺជាវត្តីតរាជធានីខ្មែរ ដែលមានឈ្មោះថា "**ទ្វារចម្បុះ**" ឬក្រុងទាក់ដី ។ ប៉ុន្តែតាមមតិរបស់អ្នកស្រាវជ្រាវប្រវត្តិសាស្ត្រខ្លះទៀតថា ក្រុងវ្យាធបុរៈ នេះតាំងនៅ **អង្គរបុរី** ក្នុងខេត្តតាកែវវិញ ។ ពិធីឡើងអ្នកតានៅបាភ្នំនេះ ជារៀងរាល់ឆ្នាំតែងមានសភាពអ៊ូអរអ៊ឹកធឹកអស្ចារ្យណាស់ ។ គេឃើញមន្ត្រីធំៗ នៃក្រសួងវប្បធម៌ មន្ត្រីសំខាន់ក្នុងខេត្តព្រៃវែង, អ្នកសិល្បករ, អ្នកកាសែត, ទូរទស្សន៍បានចូលរួមនៅក្នុងកម្មវិធីដែលប្រព្រឹត្តទៅក្នុងរយៈពេល ៣ ថ្ងៃ, ហើយដែលបងប្អូនជននៅតំបន់ជិតខាងតែងតែទៅចូលរួមបន់ស្រន់រៀងរាល់ឆ្នាំ ។ ការរៀបចំរណ្ដាប់រណ្ដា, តង្វាយ និងគ្រឿងសក្ការៈបូជាចំពោះអ្នកតា, ការប្រគំភ្លេងផ្សេងៗខាងតន្ត្រីបុរាណ សម្រាប់កំដរបួងសួងអ្នកតា ដែលជួយការពារក៏តម្រូវឱ្យបានរស់ភ្ញៀវពីគេកោះទូទាំងទាក់ទាញផងដែរ ។

[១] នៅតំបន់ការវែងភ្នំឈើកាច់ក្នុងដែនដីខេត្តព្រៃវែង

ពិធីបែបនេះសរបញ្ជាក់ឱ្យយើងឃើញថា ជំនឿខាងលទ្ធិព្រលឹងនិយម នៅតែដើរតួនាទីយ៉ាងសំខាន់នៅក្នុងសង្គមខ្មែរ ដែលសព្វថ្ងៃកំពុងប្រតិបត្តិពុទ្ធសាសនា យ៉ាងសកម្ម ។ នៅក្នុងទ្រឹស្តីនៃព្រះពុទ្ធសាសនាទាក់ទងនឹង **ត្រៃសរណគម** នោះមានចែងថា : "វត្ថុដទៃក្រៅពី**ព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃ**" នោះមិនមែនជាវត្ថុជាទីពឹងទីរលឹករបស់ពុទ្ធបរិស័ទឡើយ ។ ប៉ុន្តែ. ចុះហេតុអ្វីក៏ពុទ្ធបរិស័ទខ្មែរនៅតែមានជំនឿលើលទ្ធិព្រលឹងនោះទៀត ?

## ៣. អ្នកតាឃ្លាំងមឿង

នៅខេត្តពោធិ៍សាត់. មានអ្នកតាធំមួយមានលំដាប់ថ្នាក់កម្រិតជាតិមួយផងដែរ ។ តាមព្រឹត្តិការណ៍ប្រវត្តិសាស្ត្រ នាសតវត្សទី ១៦. ក្នុងរជ្ជកាលព្រះបាទ **ចន្ទរាជា** មានវរជនស្នេហាជាតិម្នាក់ឈ្មោះ **តាពេជ** ស្ម័គ្រចិត្តបម្រើព្រះអង្គចន្ទ ក្នុងនាមជាមេទ័ព ។ ក្នុងការតស៊ូប្រយុទ្ធដ៏ខ្លាំងក្លាជាមួយទ័ពជេដ្ឋាធិរាជនៅបន្ទាយខេត្តពោធិ៍សាត់ លោកតាពេជឃើញសេនាទាហានស្លាប់ច្រើនពេក ដោយទ័ពខាងចៅពញាកៅមានទាហានច្រើនដ៏លើសលុប នោះ **តាពេជ** ក៏ទូលសុំព្រះអង្គចន្ទរាជាទៅកេណ្ឌទ័ពខ្មោចមកជួយច្បាំង ។ នៅក្នុងពេលធ្វើបោយពិធីដ៏ឧឡារិក. លោកតាពេជក៏លោតចុះទៅក្នុងរណ្តៅហើយក៏ស្លាប់បាត់បង់ជីវិត ដោយសារបុតនឹងចុងដាវ លំពែង ដែលដាំត្រង់ច្រាងនៅក្នុងរណ្តៅនោះទៅ ។ បន្ទាប់ពីនោះ នៅថ្ងៃពេញបូណ៌មីខែពិសាខ ភាពប្រយុទ្ធដ៏សម្បើមអស្ចារ្យក៏ប្រព្រឹត្តឡើង. រវាងទ័ពព្រះចន្ទរាជា និងទ័ពស្តេចកន ។ ក្នុងពេលយប់ងងឹតនោះ ស្រាប់តែគេបានឮសន្ធឹកក្តុងក្តាំងគ្រាំគ្រេងដូចហោបរលំក្រុងរង្វើង ធ្វើឱ្យទ័ពដែលចោមព័ទ្ធបន្ទាយត្រូវបាក់បែករត់ខ្ចាត់ខ្ចាយ ស្លាប់អស់

នេះបើយោងទៅតាមរឿងព្រេងនិទាន ។ ជ័យជម្នះដ៏កក្រើកទឹកកក្រើកដីនេះ, ត្រូវបាន រាជបំពេញព្រះចន្ទរាជាសន្មតថា បានមកដោយសារមានទ័ពខ្មោចបិសាចដែល លោកតាពេជ[៧] បានទៅកេណ្ឌឱ្យមកជួយ ។ គេលុបរណ្ដៅត្រង់កន្លែងដែលចៅ ពញាមឿងស្លាប់, ហើយក្រោយមកព្រលឹងអ្នកតាឃ្លាំងមឿងក៏បានមកសណ្ឋិត នៅត្រង់រណ្ដៅនោះ ។ ពីជំនាន់មួយជំនាន់មួយ គេនាំគ្នាប្រារព្ធធ្វើពិធីឡើង អ្នកតាដ៏អធិកអធម តក្រឹកតគ្រេង ដើម្បីរំលឹកគុណរបការរបស់ពញាមឿង នៅខែពិសាខជារៀងរាល់ឆ្នាំ ។

នៅត្រង់ចំណុចនេះ, យើងអាចសន្និដ្ឋានបានថា, ជំនឿបែបព្រលឹង និយម នៅតែរស់រវើកក្នុងសតិអារម្មណ៍ខ្មែរ, តំណទៅមុខ គ្មានអ្នកណាអាច អះអាងបានថា ជំនឿនេះនឹងសាបរលាបអស់ទៅនៅឆ្នាំណា ? សតវត្សទីប៉ុន្មាន ឡើយ ។ យើងគ្រាន់តែដឹងថា ជំនឿសាសនា-ទំនៀមទម្លាប់នេះ, ឆ្លាក់មុត ជ្រៅពេកស់ទៅក្នុងខួរក្បាលខ្មែរ ។

## ៤. អំពីឈ្មោះអ្នកតា[៨]

ក្រៅពីមានទីស្នាក់អាស្រ័យ, ធំនៅវាំង, ខ្ទម ឬដើមឈើ, ដំបូក, ដុំថ្ម ..... អ្នកតាក៏នៅមានឈ្មោះ ដូចជាមនុស្សលោកដែរ ។ តើអ្នកណាជា អ្នកដាក់ឈ្មោះអ្នកតា ? តាមពិតឈ្មោះអ្នកដែលជំនាន់ក្រោយៗ តែងហៅត១

---

[៧] ឯកសារខ្លះ (ឯកសារមហាបុរសខ្មែរ កំណត់ថា មេទ័ពដែលគេសុំខ្លួនទៅកេណ្ឌទ័ពខ្មោចបិសាច នោះមានឈ្មោះថា **ពញាមឿង** ស្ដេចប្រទានងារជាចៅហ្វាយខេត្តពោធិ៍សាត់ និងជាមេទ័ពផង (ឯកសារមហាបុរស ទំព័រ ៩២-៩៣-៩៤-៩៥

[៨] ក្នុងចំណោមអ្នកតា ក៏គប់មាន អ្នកតាជាស្ត្រីដែរ ដូចជា យាយម៉ៅ នៅពេជ្រនិល យាយទេព នៅផ្សារក្រោមកំពង់ឆ្នាំង .....

គ្នារាប់សតវត្សមកហើយនេះ, គឺហៅតាមឈ្មោះដើមមួយ, ដែលនៅពេលអត្ថិភាពរបស់អ្នកតា, នៅទីណានោះ, ព្រលឹងរបស់បុព្វបុរសដែលមានគុណបំណាច់, មានឥទ្ធិពល, មានសមត្ថភាពធ្វើជាអ្នកដឹកនាំដ៏ល្អ ចេះយល់ដឹងទុក្ខធុរៈ ចេះជួយយកអាសារ និងណែនាំទូន្មាន បង្ហាញផ្លូវល្អឱ្យអ្នកស្រុកអ្នកភូមិដើរតាម, ក្នុងន័យស្វែងរកសេចក្ដីសុខឱ្យសហគមន៍ ។ ឈ្មោះអ្នកតាអាចជាឈ្មោះព្រះគ្រូចៅអធិការវត្ត ឈ្មោះអាចារ្យ ឈ្មោះគ្រូហ្មមើលជំងឺ ឈ្មោះមេទ័ព ..... ។ ខ្ញុំសូមអនុញ្ញាត រៀបរាប់ឈ្មោះអ្នកតាមួយចំនួនទុកជាឧទាហរណ៍ : អ្នកតាឃ្លាំងមឿងនៅពោធិសាត់, អ្នកតាក្រហមកនៅកំពង់ធំ, អ្នកតាដំបងដែក, អ្នកតាកងចក្រកងជុំ, អ្នកតាតាសុខ, អ្នកតាតាស អ្នកតាទ្វារ ..... ។ ក្រៅពីអ្នកតាជាបុរស ក៏គង់នៅមានអ្នកតាជាស្ត្រីដែរ ដែលមានឈ្មោះជា "អ្នកដូន, យាយទេព ..... " ដូចជា យាយម៉ៅនៅភ្នំពេជ្រនិល, យាយទេពនៅកំពង់ឆ្នាំង ..... ។ គួរកត់សម្គាល់ថា ឈ្មោះអ្នកតាទាំងប៉ុន្មានដែលធ្លាប់ដឹង ធ្លាប់ហៅជាយូរមកហើយនេះ, មិនដែលប្ដូរឈ្មោះទាល់តែសោះ, គឺឈ្មោះដើមយ៉ាងណា តែងនៅរក្សាឈ្មោះដើមដដែលរាប់រយពាន់តំណមកហើយ ។ ត្រង់នេះសរបញ្ជាក់ថា, ព្រលឹងអ្នកតា, ឈ្មោះអ្នកតាទាំងប៉ុន្មានគឺមានចរិត "**អមតៈ**" អចិន្ត្រៃយ៍ មិនចេះស្លាប់ មិនផ្លាស់ប្ដូរ មិនមានអ្នកជំនួស ។

## V. **តាមរូបភាពអារក្ស**

តើអ្វីទៅជាអារក្សនោះ? អារក្សគឺជាទម្រង់មួយនៃលទ្ធិព្រលឹងនិយម,

ដែលមានការខុសប្លែកបន្តិចពី **"អ្នកតា"** ។ នៅពេលដែលអ្នកតាជាតំណាងព្រលឹងបុព្វជន, ដូនតា, មេកុលសម្ពន្ធ, អ្នកដឹកនាំប្រចាំភូមិ, ឃុំ, ស្រុក, ខេត្ត តំបន់, ប្រចាំទីឋានដីភូមិ, ស្រែចម្ការ ព្រៃព្រឹក្សា បឹង ស្ទឹង ទន្លេ សមុទ្រនោះ, **អារក្ស** គឺជាព្រលឹងតំណាងគ្រួសារខ្មែរ ។ ព្រលឹងអារក្សនេះចែកចេញជាពីរសាខា, ដែលខ្មែរមានពាក្យពិសេសមួយហៅថា **"ជំបូរ"** ។ ជំបូរនេះក្លាយមកពីពាក្យ **"ជួរ"** (Lignée) ពោលគឺជំបូរខាងឪពុក និងជំបូរខាងម្តាយ ។ ជំបូរម្ខាង១ មានឈ្មោះ ខ្មោចតិចឬច្រើនខុសគ្នាទៅតាមការកំណត់របស់គ្រួសារនីមួយ១ ដែលមានប្រវត្តិយូរអង្វែងរាប់រយពាន់ម៉ឺនឆ្នាំមកហើយ ។ ឈ្មោះព្រលឹងអារក្សនេះ មានប្រុស, មានស្រីដូចឈ្មោះអ្នកតាដែរ ។ តើឈ្មោះព្រលឹងអារក្សប្រុស និង អារក្សស្រី ដែលមានប្រចាំគ្រួសារខ្មែរនីមួយ១ នេះ, ជាឈ្មោះរបស់អ្នកណា ? អ្នកនោះមាននាទីជាអ្វី ? ។ ប្រហាក់ប្រហែលនឹងឈ្មោះអ្នកតាដែរ ឈ្មោះព្រលឹងអារក្ស គឺជាឈ្មោះរបស់បុព្វជនដែលជាប់សាច់ញាតិ, ជាឪពុក, ម្តាយ, ជីតា, ជីដូន, ជាគ្រូហ្មព្យាបាលជំងឺ ជាមេបា, ជាមេទ័ព, ជាអ្នកសិល្បៈ, មានឈ្មោះល្បីនៅក្នុងវង្សត្រកូលគ្រួសារ ។ ជនប្រភេទនេះមានមនោសញ្ចេតនាស្រឡាញ់ជាប់ចិត្តនឹងកូនចៅ ។ ពេលស្លាប់ទៅព្រលឹងរបស់គាត់មិនដាច់ចិត្តទៅចាប់កំណើតនៅភពថ្មីឡើយ, គឺនៅវារែកហិចហើរអណ្តែតត្រសែតទៅមកតែនៅ ទីក្បែរ១ កូនចៅ, រួចក៏ប្រាប់ដំណឹងទៅដល់កូនចៅតាមរយៈការពន្យល់សប្តិ ។ តាមរបៀបនេះ, កូនចៅក្នុងត្រកូលក៏កត់ចំណាំចងចាំទុក, រួចហើយប្រាប់ជាដំណឹងត១ ឱ្យបានដឹងគ្រប់គ្នាក្នុងត្រកូលគ្រួសារ ។ ជួនកាលទៀត, ការផ្តល់ដំណឹងអំពីវត្តមាន នៃព្រលឹងដូនតាមកក្នុង

ជួរជំបូរ, ក៏អាចធ្វើបានដែរ, តាមរយៈការចូលរូប ប្រសិនបើនៅក្នុងវង្សត្រកូល គ្រួសារនេះ មានរូបជាតំណាងព្រលឹងខ្មោចរួចហើយ ។ ប្រការដែលមិនគួរភ្លេច ជម្រាបនោះ គឺគ្រប់គ្រួសារវង្សត្រកូល, គ្រប់ជួរជំបូរខ្មែរទាំងអស់, សុទ្ធតែមានរូប[៩] (សំណើង) (Médium) ដូចខ្ញុំបាននិយាយពីខាងដើមរួចហើយថា ជាអន្តរការី ឈរនៅចន្លោះពិភពខ្មោច និងមនុស្ស, សម្រាប់សម្រួលការទាក់ទង, បំណងប្រាថ្នា, ឬសេចក្ដីត្រូវការខាងសេវ៉ាយ៉ាងណា ១ ពីពិភពមួយទៅពិភពមួយទៀត ។ រូបអារក្សតំណាងជួរជំបូរទាំងនោះជាចម្មតា, ពោលគឺសមាជិកជួរជំបូរតែងគោរព ស្រឡាញ់កោតខ្លាចរូប, ដោយគេចាត់ទុករូបដូចជាជនពិសេសមានតេជះបារមី អាចផ្ដល់សេចក្ដីសុខ, អាចជួយយកអាសាគេរាល់ពេលមានភ័យអាសន្ន ។ រូបអារក្សនៅក្នុងជំបូរនីមួយ១ តែងតែផ្លាស់ប្ដូរថ្មី, កាលណារូបចាស់ស្លាប់ ឬក៏ចាស់ជរាទ្រុឌទ្រោមកម្លាំង ។ អ្នកដែលត្រូវមកជំនួសរូបចាស់គឺ មនុស្សបិតក្នុងជួរជំបូរតែមួយ, ជាមនុស្សនៅមានវ័យក្មេង[១០] មានឋាមពលកម្លាំងខ្លាំងក្លា, ហើយត្រូវជាមនុស្សដែលមានលក្ខណៈសម្បត្តិសម្រាប់ធ្វើជារូបអារក្ស ។ គេអាចនិយាយបានថា ជាមនុស្សដែលទទួលបានការជ្រើសរើសពីព្រលឹងខ្មោច ទាំងឡាយប្រចាំជំបូរ ។ គប្បីជ្រាបផងដែរថា ទោះបីអ្នកនោះមិនចង់ក៏ពុំអាចគេចបាន, ផ្ទុយទៅវិញ បើជនណាមួយចង់ធ្វើ

---

[៩] មកដល់សម័យបច្ចុប្បន្នដែលវិទ្យាសាស្ត្រ, វេជ្ជសាស្ត្រ, បច្ចេកទេសវិវត្តរីកចម្រើនមួយកម្រិតទៅហើយនេះជំនឿទៅលើអារក្សអ្នកតា ក៏ធ្លាក់ចុះអន់ថយច្រើន ហើយរីឯរូបអ្នកតា ក៏មានកាន់តែតិចទៅ១ ..... ។

[១០] ជាប់ពីអាយុ ១២ ឆ្នាំឡើងទៅ ។

រូប ដោយពុំមានការជ្រើសរើស ក៏មិនអាចសម្រេចបំណងគេបានដែរ .....។

## ១. ឈ្មោះខ្មោចជួរជីដូន

យើងអាចឆ្ងល់ថា ឈ្មោះខ្មោចតំណាងជួរជីដូននៃត្រកូលគ្រួសារនីមួយៗ តើយកមកពីណា ហើយតើឈ្មោះនោះ ជាឈ្មោះអ្នកណា ? ដូចខ្ញុំបានជម្រាបពីខាងដើមរួចហើយ, ខ្មោចជួរជីដូនតំណាងព្រលឹងគ្រួសារនីមួយៗ, ទោះបីយើងមិនដែលឃើញរូប ក៏សុទ្ធតែមានឈ្មោះ ។ ឈ្មោះខ្មោចនេះ ពេលចូលសណ្ឋិតក្នុងរូប, តែងតែបង្ហាញខ្លួនឱ្យកូនចៅក្នុងជីដូនបានដឹង ដោយប្រាប់ត្រង់ៗ ថា យើងឈ្មោះ សម្ដេចព្រះគ្រូ ឬតាស្រាខ្លោច ..... ។ ខ្ញុំសូមអនុញ្ញាតជម្រាបថា នៅក្នុងសៀវភៅដែលមានចំណងជើងថា "**កម្រងឯកសារ ស្ដីពីប្រពៃណីនិងទំនៀមទម្លាប់ខ្មែរ**" ភាគទី I, អត្ថបទទី ១៤, ទំព័រពី ១៥៨ ដល់ទំព័រ ១៧៤ លោកបាននិយាយយ៉ាងពិស្ដារអំពីឈ្មោះខ្មោចជីដូន និងគ្រឿងប្រចាំខ្មោចនីមួយៗ ។ នៅពេលនេះ ខ្ញុំសូមលើកឡើងត្រួសៗ អំពីឈ្មោះខ្មោចជីដូនទាំងនោះ ដើម្បីសម្រាប់ការចង់ដឹងខ្លះៗ មុនទៅធ្វើការស្រាវជ្រាវ នៅភាគទី I ។ សូមជម្រាបផងដែរថា ឈ្មោះខ្មោចជីដូនក្នុងវង្សត្រកូលគ្រួសារ តែមួយ ប៉ុន្តែជីដូនខាងឪពុក, និងជីដូនខាងម្ដាយ, ក៏ឈ្មោះខ្មោចមិនដូចគ្នា[១] ដែរ ។

ឧទាហរណ៍ : ជួរខាងឪពុក (Lignée paternelle)

ខ្មៅ, និរន្ត, កាច់ផ្កា, ព្រះវរស្ដេចព្រាយ សំពោងសក់ធំ ព្រះវរសទឹក, កងអាកាស, ខ្មៅបង, តាស្រាខ្លោច, កែ, ទូកវែង, ស្រីមាយា, តាសេង, តាបង្វង

---

[១] មានដូចគ្នាខ្លះៗ ប៉ុន្តែមានតិចបំផុត ។

ជំបូរខាងម្ដាយ (Lignée maternelle)

ខ្មោ, និមន្ត, បំរេ, សំពោង សក់ធំ, តីសព្រេង, ក្រសាំងទាប, ជំទាវ ចន្ទស្ដេចព្រាយ, កៃ, ដូនគង់, ជ័យជម្ពុះ, តាសោម ..... ។ល។

តាមការសន្និដ្ឋាន ឈ្មោះទាំងប៉ុន្មាននេះ ខ្លះជាឈ្មោះមនុស្សសាមញ្ញ ដូចយ៉ាងតាសោម តាគង់, តាសេង, តាប្លុង ។ ឯខ្លះទៀត អាចជាឈ្មោះព្រាយបិសាច ល្បាក់សាដែលបុព្វជនដូនតាយើងទៅយកកំណើត ដើម្បីបាននៅជិតកូនចៅ, ជួយថែរក្សាមើលសុខទុក្ខ, ដូចជា ខ្មោ, ព្រះវរស្ដេចព្រាយ, សំពោងសក់ធំ, កងអាកាស, ជំទាវចន្ទស្ដេចព្រាយ ..... ។ល។ ខ្លះទៀតមានឈ្មោះជាគ្រូ ឬសម្ដេចព្រះគ្រូធំ ដូចយ៉ាង **"និមន្ត"** ជាដើម ។ គួរកត់សម្គាល់ថា នៅក្នុងចំណោមឈ្មោះព្រលឹងខ្មោចទាំងអស់នេះ, មានខ្មោចខ្លះជាមេទ័ព ធ្លាប់មានតេជដៃក្នុងសង្គ្រាម ។ ឯខ្មោចខ្លះទៀតជាចាស់ព្រឹទ្ធាចារ្យ, មានទស្សនៈប្រកបដោយគតិបណ្ឌិត, មានវិចារណញ្ញាណជ្រាលជ្រៅ ដើរតួនាទីជាទីប្រឹក្សាអស់ខ្មោចតូចធំទាំងប៉ុន្មាន, ខ្មោចទាំងនេះ ច្រើនចូលមកសណ្ឋិតក្នុងរូបចុងក្រោយគេបង្អស់, ហើយបើមនុស្សលោកមានភ័យ មានភិតមានគ្រោះអាសន្នម្ដេចក្ដី, តែងតែពឹងឱ្យខ្មោចព្រឹទ្ធាចារ្យទាំងនេះ ជួយធ្វើអន្តរាគមន៍ទៅខ្មោចធំៗ មានអានុភាពខ្លាំងក្លា ឱ្យជួយសម្រួល, ជួយអត់ឱនអធ្យាស្រ័យឱ្យគ្រួសារ និងសាមីខ្លួនអ្នកជំងឺ ។ ខ្មោចទាំងនេះ ច្រើនមានឈ្មោះថា តាសោម, តាសេង, តាប្លុង ..... បើខ្មោចស្រីវិញ ច្រើនមានឈ្មោះថា ដូនគង់, ស្រីមាយា ...... ។

**២. ពិធីកម្មក្នុងរូបភាពអារក្ស**

ពិធីកម្មដែលប្រព្រឹត្តទៅសម្រាប់ជំនឿទៅលើអារក្ស មានទម្រង់ប្លែកៗ ដូចជា :

**ក. ការប្រគំខ្មោច**[១២] ធ្វើឡើងក្នុងករណីប្រញាប់បន្ទាន់ ដោយជំងឺមានអាការៈធ្ងន់ធ្ងរខ្លាំង. មិនអាចរង់ចាំបាន ទោះបីក្នុងពេលថ្ងៃ ក៏ត្រូវតែធ្វើភ្លាមៗ

**ខ. ការលៀងអារក្ស** (លៀងមេមត់) ក្នុងទម្រង់ធម្មតា

**គ. ការលៀងឱ្យចំណី**[១៣] គឺលៀងមេមត់ជាលក្ខណៈពិសេស មានធ្វើនៅលើផ្ទះផង នៅឯដីផង មានរណ្តាប់រណ្តា គ្រឿងសំណែនពិសេសៗ ជាទ្រង់ទ្រាយធំ ។

**ឃ. ពិធីហៅព្រលឹង** នៅពេលដែលអ្នកជំងឺមានអាការៈធ្ងន់ធ្ងរ បាត់បង់ការចងចាំ សន្លឹកសន្លៃ

**ង. ពិធីសែនចាស់ឆ្នាំ**[១៤] មានកំហុសចាស់ទុំ ៣ ប្រភេទ គឺ : ចាស់ទុំក្រមុំកំលោះ. ចាស់ទុំពំនាក់បំពង់ , ចាស់ទុំមាត់ពាក្យ

**ច. ពិធីឡើងរោង**[១៥] : គឺជាប្រភេទមហាសន្និបាតរបស់ជួរជំបូរអារក្សក្នុងវង្សត្រកូលមួយប្រចាំឆ្នាំ ។

---

[១២] សូមមើលសៀវភៅប្រពៃណី ទំនៀមទម្លាប់ខ្មែរ ទំព័រ ១៤៨. អត្ថបទទី ១១

[១៣] សូមមើលសៀវភៅដដែល ទំព័រ ១៣២

[១៤] សូមមើលសៀវភៅដដែល. អត្ថបទទី ១៣ ទំព័រ ១៥៥

[១៥] សូមមើលសៀវភៅដដែល អត្ថបទទី ១០ ទំព័រ ១៤៣

## VI. ជំនឿបែបលទ្ធិព្រាហ្មណ៍និយម

ក្នុងរវាងសតវត្សទី ១ នៃគ្រិស្តសករាជ. លទ្ធិព្រហ្មនិយមបាននាំចូលមកក្នុងស្រុកខ្មែរយើងជាមួយនឹង **ព្រាហ្មណ្ឌសាសនា** ។ នៅសម័យនគរភ្នំ ប្រទេសឥណ្ឌាមានការទាក់ទងជាមួយប្រទេសកម្ពុជាយើង ខាងផ្លូវជំនួញយ៉ាងមមាញឹក. ជាមួយនឹងមហាអាណាចក្ររ៉ូម៉ាំង ។ អ្នកជំនួញពួកឥណ្ឌាមួយចំនួនបានមកតាំងទីនៅនគរភ្នំ. ព្រមទាំងបើកហាងជំនួញថែមទៀត ។ ក្នុងន័យនេះពួកគេបាននាំយកវប្បធម៌ប្រពៃណីសាសនាយកមកជាមួយផង ។ ការប្រតិបត្តិពិធីកម្មខាងព្រហ្មញ្ញសាសនា. បានចម្លងមកដល់ប្រជារាស្ត្រខ្មែរ អាស្រ័យដោយមានសម្ពន្ធភាពរវាងព្រាហ្មកោណ្ឌញ្ញម្នាក់ ជាមួយនឹងមហាក្សត្រីខ្មែរព្រះនាមលីវយី (តាមឯកសារចិន) និងព្រះនាមព្រះនាងសោមា (តាមសិលាចារឹកចាមនៅមីសឺន គ.ស. ៦៥៨) ។

### ១. និមិត្តរូបនៃលទ្ធិព្រាហ្មណ៍និយម

#### ក. តាមរយៈសំណង់ប្រាសាទបុរាណ និងបូជនីយដ្ឋាននានា

ប្រាសាទបុរាណរាប់ពាន់ ដែលមាននៅស្ទើរគ្រប់ខេត្តខណ្ឌនៃព្រះរាជាណាចក្រកម្ពុជា. សុទ្ធសឹងតែកសាងឡើងដើម្បីឧទ្ទិសចំពោះ ព្រហ្មញ្ញសាសនាដែលគោរពចំពោះ ទេវៈ ៣ អង្គ គឺ :

- ព្រះសិវ ឬព្រះឥសូរ
- ព្រះវិស្ណុ ឬព្រះនារាយណ៍
- ព្រះព្រហ្ម

នៅក្នុងប្រាសាទនីមួយៗ គេឃើញមាន **សិវលិង្គ** និង **យោនិ** ។ សិវលិង្គ ជួនកាលតំណាងតែព្រះសិវៈមួយប៉ុណ្ណោះ ។ សិវលិង្គប្រភេទនេះ មានរាងមូលទ្រវែងតាំងពីគល់ដល់ចុង ។ ជួនកាលតួសិវលិង្គមួយតំណាងទេវៈ ទាំង ៣ ព្រះអង្គគឺ :

- រាងមូលទ្រវែងផ្នែកខាងចុង តំណាង ព្រះសិវៈ

- រាង៨ ជ្រុងភាគខាងក្រោមរាងមូលទ្រវែង តំណាងព្រះនារាយណ៍ ។ ឯនៅខាងគល់រាងបួនជ្រុង តំណាងព្រះព្រហ្ម ។

គប្បីជ្រាបថា លិង្គរាង ៨ ជ្រុង ឬ ៤ ជ្រុង តំណាងព្រះនារាយណ៍ និងព្រះព្រហ្មនោះ, កម្រមានធ្វើទោលដាច់តែឯងណាស់ ។ ក៏ប៉ុន្តែ ជួនកាល គេបានសាងរូបព្រះនារាយណ៍, គង់ឈរ, មានព្រះហស្ត ៤, ខ្លះកាន់ចក្រ, កាន់ផ្កាឈូក, កាន់ផែនដី ..... និងសាងរូបបដិមាតំណាងព្រះព្រហ្មជាទេវៈ, មានព្រះភក្ត្រ ៤ បែរចេញទៅរកទិសទាំង ៤ ។ រីឯប្រាសាទឧទ្ទិសចំពោះ ព្រះសិវៈ, ព្រះវិស្ណុ និងព្រះព្រហ្ម ជួនកាលជាប្រាសាទភ្នំ សាងលើដីលើកខ្ពស់, ជាតំណាងភ្នំកៃលាស, ដែលជាទីលំនៅរបស់ព្រះសិវៈ ។ ជួនកាលជាប្រាសាទ សាងលើដីរាបជាទីទំនាប, មិនលើកដីពូនឱ្យខ្ពស់ទេ ។ នៅតាមជញ្ជាំងប្រាសាទ គេឃើញមានរូបចម្លាក់ពណ៌នាពីឃុតឆាកសង្គ្រាម, ពីរឿងរ៉ាវពាក់ព័ន្ធនឹង ទេវកថាផ្សេងៗ ដូចជារឿងរាមកេរ្តិ៍, រឿងមហាភារតយុទ្ធ ..... ជាដើម ។

**ខ. តាមរយៈពិធីកម្មផ្សេងៗ :** ពិធីផ្សេងៗ ជាកិច្ចសម្តែងការ គោរព និងរបៀបប្រតិបត្តិដែលបង្កើតទៅជាប្រពៃណី និងទំនៀមទម្លាប់ ឆ្លាក់ ជាប់ក្នុងសង្គមខ្មែរ យើងទុកពណ៌នាជូននៅទំព័រខាងមុខ ..... ។

## ២. គម្ពីរជាគ្រឹះមូលដ្ឋាននៃលទ្ធិព្រាហ្មណ៍និយម

គ្រប់តែលទ្ធិសាសនា តែងតែមានគម្ពីរក្បួនច្បាប់សម្រាប់ទុកជាគោល ក្នុងការប្រតិបត្តិ ។ ចំណែកឯលទ្ធិព្រហ្មញ្ញសាសនាមានក្បួនគម្ពីរបួនជាសំខាន់គឺ:

- ឫគ្វេទ ឬឥរុវេទ: សម្រាប់សូត្រសរសើរទេវតា

- យជុរវេទ ឬយជុរវេទ: សម្រាប់សូត្របូជា ឬបួងសួង

- សាមវេទ: សម្រាប់សូត្រក្នុងពិធីថ្វាយទឹកសោម (ដែលជាទឹកអម្រឹត របស់ពួកទេវតា) ។ គួរគប្បីជ្រាបថា ជាដំបូង គម្ពីរក្បួនវេទមានតែបីទេ ដូច្នេះហើយបានជាគេមានទម្លាប់ហៅថា **"គម្ពីរត្រៃវេទ"** ដែលពួកព្រាហ្មណ៍ (ព្រហ្មបរិស័ទ) ប្រកាន់ជឿថា **មហាព្រហ្ម** ជាអ្នកប្រសិទ្ធិឱ្យកើតឡើង មិនមែនមនុស្សរៀបរាតាក់តែងឡើងទេ ។ លុះពេលជាខាងក្រោយមក ដោយពួកព្រហ្មបរិស័ទ មានសេចក្តីត្រូវការខាងកិច្ចប្រតិបត្តិសាសនារបស់ខ្លួនឱ្យកាន់តែមានលក្ខណៈពិសេសឡើងនោះ គេក៏បន្ថែមក្បួនគម្ពីរវេទថ្មីមួយទៀតឱ្យឈ្មោះថា :

- អថិពវេទ ឬ អថព្វវេទ: សម្រាប់សូត្របោរ ឬបណ្តេញខ្មោច ។ ប៉ុន្តែ ទោះបីក្បួនគម្ពីរវេទមានរហូតដល់ទៅ (បួន) ក្តី ក៏គេនៅតែហៅរត់មាត់ថា **"គម្ពីរត្រៃវេទ"** ដដែល ។ គួរជ្រាបផងដែរថា ក្បួនវិជ្ជាមន្តអាគមរបស់ខ្មែរយើងតាំងពីបុរមបុរាណមក ក៏តែងតែប្រើបញ្ចូលសេចក្តីដកស្រង់ខ្លះពីក្បួនវេទទាំងបួនរបស់លទ្ធិព្រាហ្មណ៍និយមយកមកកូរឡាយផ្សំនឹងអាគមគាថា បាលីព្រះពុទ្ធមន្តផងដែរ ។ ក្បួនត្រៃវេទទាំងបី ឬបួនប្រភេទនេះ សុទ្ធតែប្រើភាសាសំស្ក្រឹតទាំងអស់ ។ រីឯក្បួនមន្តអាគមដែលអ្នកសិល្បនិយមខ្មែរយកមកចងក្រង

សំយោគ ធ្វើជារបស់ខ្មែរ, ទើបប្រើភាសាបាលីខ្លះ សំស្ក្រឹតខ្លះ, តែយកតួអក្សរ "មូល" ខ្មែរមកកត់ត្រា ។

## VII. ជំនឿតាមបែបពុទ្ធនិយម

ឯកសារប្រវត្តិសាស្ត្រមួយចំនួន, អះអាងថា, ព្រះពុទ្ធសាសនាបានត្រូវ ផ្សព្វផ្សាយចូលមកក្នុងប្រទេសកម្ពុជា នៅអំលុង ៣ សតវត្សមុនគ្រិស្តសករាជ[១៦] ។ ចំពោះឯកសារខ្លះទៀតបានចែងថា, ព្រះពុទ្ធសាសនា និងព្រហ្មញ្ញសាសនានៅកម្ពុជាវិញ ក៏ពុំទាន់មានឯកសារណាមួយបញ្ជាក់ច្បាស់ថាសាសនាណាមកមុន, ណាមកក្រោយនោះឡើយ, យើងគ្រាន់តែដឹងថា, នៅសម័យនគរភ្នំក្តី ចេនឡាក្តី សាសនាទាំងពីរមានវត្តមានទន្ទឹមគ្នា, គ្រាន់តែមានពេលខ្លះ សាសនាមួយបានទទួលការនិយមពីព្រះមហាក្សត្រ ឬពីមហាជន, លើសសាសនាមួយទៀតតែប៉ុណ្ណោះ ។ ហើយចំពោះបញ្ហានេះ, យើងក៏មិនត្រូវភ្លេចទេថា, ទន្ទឹមនឹងការនាំយកព្រហ្មញ្ញសាសនា, ដោយឈ្មួញសំពៅឥណ្ឌា និងដោយវរជនឥណ្ឌាមកកាន់កម្ពុជានៅសម័យនគរភ្នំ និងចេនឡានោះ, អ្នកដើរសំពៅទាំងឡាយតែងតែនាំយក ព្រះពុទ្ធរូបដាក់ក្នុងសំពៅដើម្បីគោរព បែបន់បញ្ចៀសភយន្តរាយដែលកើតមកអំពីខ្យល់ព្យុះសមុទ្រ, ពេលដែលសំពៅពួកគេឆ្លងកាត់មហាសាគរដ៏ធំធេងពីឥណ្ឌាមក កំពង់ផែសមុទ្រខ្មែរនៅ **"អូរកែវ"** នោះ ។ ត្រង់នេះបញ្ជាក់ឱ្យយើងដឹងថា, សូម្បីឥណ្ឌាដែលជាអ្នក នាំសាសនាពីរពីប្រទេសខ្លួនមកដែនដីខ្មែរនៅសម័យជាមួយគ្នានោះ, មានជនជាតិ ឬវរជន

---

[១៦] ប្រពុទ្ធសាសនវត្សរ៍ ៣ ។

ឥណ្ឌាខ្លះក៏កាន់ជឿ និងគោរពព្រះពុទ្ធសាសនាផងដែរ ។ ប៉ុន្តែ ព្រះពុទ្ធសាសនាពីសម័យនោះ, មាននិកាយពីរគឺ **"ហីនយាន និងមហាយាន"** ។ ពិតមែនតែព្រះពុទ្ធសាសនាមានតែមួយ ក៏ប៉ុន្តែ គោលទ្រឹស្តី វិន័យ និងវិធីប្រតិបត្តិតែងខុសគ្នាខ្លះៗ, រវាងនិកាយទាំងពីរ ។

## VIII. និមិត្តរូបនៃលទ្ធិពុទ្ធសាសនា

### ១. តាមរយៈវត្តមាននៃវត្តអារាម ដែលមានពាសពេញប្រទេសកម្ពុជា :

វត្តអារាមបែបពុទ្ធសាសនា, គឺជាមជ្ឈមណ្ឌល, ជាទីស្នាក់ការ, ជាអង្គភាពរបស់ព្រះពុទ្ធសាសនា ។ ឯព្រះវិហារក្នុងវត្តនីមួយៗ, គឺជាគោលដែនសីមារបស់អង្គភាពសម្រាប់ព្រះសង្ឃក្នុងវត្តធ្វើ **"សង្ឃកម្ម"** ផ្សេងៗ, មានសម្តែង **បាដិមោក្ខ**, ធ្វើពិធី **"បំបួស"** កុលបុត្រ និងពិធី ញត្តិ អង្គកឋិនទានជាដើម ..... ។

### ២. ពិធីកម្មក្នុងពុទ្ធសាសនា :

**ក. ការបំបួស :** ដើម្បីបន្តនិរន្តភាព នៃវត្តមានព្រះពុទ្ធសាសនាមិនឱ្យដាច់រយៈ ពីជំនាន់មួយទៅជំនាន់មួយ, តាមពុទ្ធបញ្ញត្តិ, តម្រូវឱ្យមានពិធីបំបួសកុលបុត្រឱ្យក្លាយខ្លួនទៅជាព្រះសង្ឃ ទោះជាសាមណេរក្តី, ភិក្ខុក្តី ។ គឺព្រះសង្ឃនេះហើយ ដែលជាសាវ័កនៃព្រះពុទ្ធបរមគ្រូ, មានតួនាទីចម្បងសម្រាប់ទ្រទ្រង់ព្រះពុទ្ធសាសនាឱ្យអត្ថិភាពនៅរហូតគម្រប់ ៥០០០ ព្រះវស្សា, ទៅតាមការកំណត់ទុករបស់ព្រះពុទ្ធបរមគ្រូ ។

បើគ្មានព្រះសង្ឃទេនោះ នឹងគ្មានអ្នកអនុវត្តគោលវិន័យ, និងផ្សព្វ-ផ្សាយព្រះធម៌របស់ព្រះពុទ្ធឡើយ ។ លោកជាអ្នកទ្រទ្រង់សាសនា ក៏ដូចជាស្រែបុណ្យជាទីដាំបណ្ដុះនៃពូជសទ្ធា និងជំនឿចំពោះព្រះត្រៃរតនៈ ។

**ខ. បុណ្យវិសាខបូជា** : គឺជាពិធីបុណ្យដែលប្រព្រឹត្តទៅរៀងរាល់ថ្ងៃពេញបូណ៌មី នៃខែពិសាខក្នុងឆ្នាំនីមួយៗ ។ គឺជាពិធីបុណ្យដ៏សំខាន់ក្នុងព្រះពុទ្ធសាសនា, ធ្វើឡើងដើម្បីរំលឹកដល់ថ្ងៃដែលព្រះពុទ្ធទ្រង់ប្រសូត, ថ្ងៃដែលព្រះពុទ្ធទ្រង់បានត្រាស់ដឹងនូវព្រះប្រាជ្ញាសម្មាសម្ពោធិញ្ញាណ, និងរំលឹកថ្ងៃដែលព្រះពុទ្ធជាម្ចាស់ទ្រង់យាងចូលបរិនិព្វាន ។

**គ. បុណ្យចូលព្រះវស្សា** : គឺជាបុណ្យដែលកំណត់កាលបរិច្ឆេទអនុញ្ញាតឱ្យព្រះសង្ឃទាំងឡាយពង្រឹងការបដិបត្តិធម៌វិន័យ បង្កើនចំណេះដឹងខាងវិបស្សនាធុរៈ និងគន្ថធុរៈ ។ ពិធីបុណ្យនេះក៏ជាការសាកល្បងកាត់ពត់បេតជីអត្តចរិត, ជាវិធានបង្ហាត់ព្រះសង្ឃឱ្យបានទៅជាបុគ្គលដែលជាទីជ្រះថ្លាជឿជាក់នៃពុទ្ធបរិស័ទ, ក៏ដូចជាកំណត់ព្រំដែននៃសកម្មភាពអ្វីធ្វើបាន, អ្វីធ្វើមិនបាន, ធ្វើបានត្រឹមណា, ធ្វើមិនបានត្រឹមណា ។ ការសាកល្បងបកត់ពត់បេតជីនេះ, មានរយៈពេលបីខែ គឺពីថ្ងៃ ១៥ កើត ខែអាសាឍ, រហូតដល់ថ្ងៃ ១៥ កើត ខែអស្សុជ ។ ទោសទណ្ឌ ឬរង្វាន់ខាងខៅរបស់ព្រះអង្គ, តែងតែស្តែងចេញពីមេរុភាពនៃការបដិបត្តិ បានឬមិនបានក្នុងរយៈពេល ៣ ខែ ជាកំណត់នេះឯង ។

**ឃ. បុណ្យកឋិនទាន** : ក្នុងព្រះពុទ្ធសាសនា, គេហៅបុណ្យនេះថា "**កាលទាន**" ព្រោះធ្វើបានតែក្នុងរយៈពេល ២៩ ថ្ងៃ គឺចាប់ពីថ្ងៃ ១

រោច ខែអស្សុជ រហូតដល់ថ្ងៃពេញបូណ៌មី ខែកត្តិក ។ គឺជាពិធីបុណ្យដែលព្រះបរមគ្រូទ្រង់បញ្ញត្តិ និងអនុញ្ញាតឱ្យធ្វើដើម្បីបង្កឱកាសឱ្យពុទ្ធបរិស័ទបានធ្វើទាន ថ្វាយចីវរ និងគ្រឿងបរិក្ខារនានាចំពោះព្រះសង្ឃដែលទ្រទ្រង់ព្រះពុទ្ធសាសនា. មានសេចក្តីត្រូវការជាចាំបាច់. ក្នុងការញុំាងអត្តភាពក្នុងភារៈជាសង្ឃឱ្យប្រព្រឹត្តទៅបានស្រួល ។ ជាលក្ខណៈពិសេសគឺវត្តនីមួយៗ អាចទទួលកឋិនទាន បានតែម្តងគត់ប៉ុណ្ណោះ ឬ ១ ថ្ងៃ ទោះក្នុងថ្ងៃនោះមានកឋិនប៉ុន្មានម្ចាស់ក៏ដោយ ។ កឋិនទានមានផលានិសង្សវិសេសវិសាលណាស់ គឺអ្នកធ្វើកឋិនទោះជាដើមបុណ្យក្តី. ជាអ្នកជំនួយក្តី. តែងបានទទួលនូវអានិសង្សដូចជា :

- មានរូបរាងកាយសមល្អឥតខ្ចោះ ពណ៌សម្បុរស្បែកល្អសោភា
- មានទ្រព្យសម្បត្តិជាស្តេចចក្រពត្រាធិរាជ
- មានប្រាជ្ញាភ្លឺថ្លាអាចចាក់ធ្លុះយល់ជ្រួតជ្រាបគ្រប់បញ្ហា ហើយអាចដោះស្រាយរាល់ការលំបាកស្មុគស្មាញផងទាំងពួង
- លុះទម្លុះកាយទម្លាយខន្ធពីជាតិនេះទៅ នឹងបានទៅកើតនៅឋានសួគ៌ ឋាននិព្វានជាទីបរមសុខ ..... ។ ដូច្នេះហើយបានជាពុទ្ធបរិស័ទទូទៅមានសទ្ធាជ្រះថ្លា ជឿជាក់ចំពោះបុណ្យនេះយ៉ាងមុតមាំ ។

**ខ. បុណ្យមាឃបូជា :** គឺជាប្រភេទបុណ្យ ធ្វើឡើងរៀងរាល់ថ្ងៃពេញបូណ៌មី ខែមាឃ ក្នុងគោលបំណងគោរព រំលឹកចំពោះ ទិវាមួយដែល :

- ព្រះសាវ័កជាអរហន្ត ចំនួន ១២៥០ អង្គបានមកជួបជុំឥតបានណាត់ទុកជាមុន នៅសំណាក់ព្រះពុទ្ធបរមគ្រូ នៅថ្ងៃពេញបូណ៌មី ខែមាឃ
- ព្រះពុទ្ធបានតែងតាំងព្រះសារីបុត្រជាសាវ័កស្តាំ, និងព្រះមោគ្គលាន

ជាសាវ័កឆ្វេង

- ឆ្លៀតឱកាសដែលព្រះអរហន្តទួអង្គសំខាន់ៗ មកជួបជុំគ្នា ព្រះអង្គកំណត់អាយុសង្ខារទុកថា, នៅរយៈពេល ៣ ខែទៀត, គឺនៅថ្ងៃពេញបូណ៌មីខែពិសាខ ព្រះអង្គនឹងយាងចូលបរិនិព្វាន ។

**ច. បុណ្យចេញព្រះវស្សា** : បុណ្យចេញព្រះវស្សាតម្រូវធ្វើនៅថ្ងៃ ១ រោច ខែអស្សុជ ។ គឺជាបុណ្យកំណត់នូវកាលបរិច្ឆេទរយៈពេល ៣ ខែ នៃការចូលវស្សា ។ តាមទម្លាប់តាំងពីបុរមបុរាណមក, នៅថ្ងៃនេះពុទ្ធបរិស័ទនៅទីជនបទ, នាំគ្នាព្រួតព្រួតធ្វើពិធីបណ្តែតប្រទីប ។ គេធ្វើសំប៉ុក ដោយយកដើមចេកជាច្រើនមកដោតភ្ជាប់គ្នាធ្វើជាក្បូនបណ្តែតអាសនៈមួយដើម្បីតុបតែងគ្រឿងសក្ការៈបូជាជាច្រើនមានកម្រងផ្កា, ទៀនធូប, ពោតលីងលាស ដុតភ្លឺព្រោងព្រាត ។ ក្រៅពីនេះ, នៅលើសំប៉ុកបណ្តើរលើក្បូនដើមចេក, មាន ភោគផលកសិកម្មគ្រប់មុខផ្សេងៗ ដូចជា ចេក, ដូង, ក្រូច, អំពៅ, ចង្រុត, ល្មុតសេដា, ខ្នុរ, ល្ហុង, ។ល។ និង ។ល។ ដាក់រៀបរៀងដោយឡែកៗ តាមប្រភេទ, គួរឱ្យគយគន់ ។ ការតាំងបង្ហាញនូវផលិតផលកសិកម្មទាំងនេះ, អាចជាការសម្តែងឱ្យឃើញផលបរិបូណ៌ ដើម្បីបានអះអាងប្រាប់ថាជនបទតំបន់នេះ សុទ្ធតែជាកសិករឧស្សាហ៍ព្យាយាម, បាននាំគ្នាបង្កបង្កើនផលកសិកម្មបានសម្បូរហូរហៀរ, បានបរិភោគគ្រប់គ្រាន់ហើយ អាចលក់យកកម្រៃចិញ្ចឹមគ្រួសារ ចំពោះផលិតផលដែលលើសពីសេចក្តីត្រូវការ ។

នៅតំបន់ខ្លះ ដែលនៅជិត បឹង, ស្ទឹង, ទន្លេ, គេនាំគ្នាប្រណាំងទូកង ដែលមានខ្លះៗ នៅតំបន់នោះ, ជាកិច្ចសមដែរណ្ណើរ ១ មុននឹងទៅចូលប្រឡូក

ក្នុងពិធីបុណ្យអុំទូក ជាលំដាប់ថ្នាក់ជាតិនៅឯរាជធានីភ្នំពេញនៅចុងខ្មែត ខែកត្តិកខាងមុខ ។

អែបជាមួយនឹងពិធីបុណ្យចេញវស្សានេះផងដែរ. ពពួកពុទ្ធបរិស័ទដែលមានលំនៅនៅជិតតំបន់បឹងធំ ៗ និងទីទំនាបលិចទឹក. គេមានធ្វើពិធីមួយហៅថា "**និទាននំផ្កាស្មោ**" ពិធីបុណ្យចេញព្រះវស្សាធ្វើឱ្យព្រះសង្ឃមានហឫទ័យសាទររីករាយ ព្រោះបានទទួលនូវលាភសក្ការៈពីបុណ្យកឋិនទានផង និងបានធូរស្រាលពីពិធីសង្ឃកម្មដ៏មហាញឹកផង ។ អាចចាត់ទុកថាជាឱកាសសម្រាកកាយ-ចិត្ត និងជាការបន្ធូរអារម្មណ៍ផងដែរ ។

**ឆ. និទាននំផ្កាស្មោ** : លោកអាចារ្យ បានប្រកូកប្រកាសជូនដំណឹងដល់ឧបាសកឧបាសិកា ប្រុសស្រី. ក្មេងចាស់មួយថ្ងៃ ឬពីរថ្ងៃមុន. ឱ្យត្រៀមទូកចែវ. ត្រៀមម្សៅ និងខ្លាញ់ . ឧសចង្ក្រាន. ឱ្យបានគ្រប់មុខ ។ លុះថ្ងៃកំណត់មកដល់. ព្រះសង្ឃក្នុងវត្តត្រូវបាននិមន្តឱ្យគង់ទូកង ប្រចាំវត្ត ឬប្រចាំភូមិ ។ សំឡេងគង-ស្គរបានបន្លឺជាសញ្ញាឱ្យអ្នករូបដំណើរមកជួបជុំគ្នានៅទីកំពង់មុខវត្តហើយ ក៏ឱ្យសញ្ញាចេញដំណើរ ទៅទីបឹងដែលមានស្មោដុះច្រើនក្រៃក្រាស់ ។ ទូកនារីក្មេងចាស់. ដែលមានចង្ក្រាន ម្សៅនិងខ្លាញ់. ជាអ្នកចេញដំណើរទៅមុនទូកព្រះសង្ឃ និងឧបាសក-ឧបាសិកា ចាស់ៗ ។ ពេលចូលដល់ចម្ការស្មោ. នាងៗ ឧបាសិកា និងឧបាសិកាចាស់ៗ បានទាញយកកញ្ចុំផ្កាស្មោណាដែលបានសំពោធំ ៗ មកជ្រលក់ក្នុងជើងម្សៅ[១៧] . រួចជ្រលក់ទៅក្នុងខ្ទះ

[១៧] ដើម្បីឱ្យនំផ្កាស្មោកោមរសជាតិឆ្ងាញ់ ឧបាសិកាខ្លះគេដាំបាយលាយកំពិស ស្ទើរក្ដិចជាមួយអង្ករម្សៅ ។

ខ្លាញ់ពុះ ទុកឱ្យឆ្អិនជាស្រេចបានចំនួនច្រើនគ្រប់គ្រាន់ល្មមនឹងព្រះសង្ឃព្រមទាំងឧបាសកឆាន់-បរិភោគបានហើយនោះ, ទូកង ក៏ចេញដំណើរឆ្ពោះទៅកាន់ព្រៃស្មោដែលមាននំចម្អិនរួចស្រេច ។ លោកអាចារ្យនិមន្តព្រះសង្ឃដែលគង់នៅខ្ទង់ទូកខាងមុខឱ្យ **"ឆាន់"** មុន ដោយមានទឹកគ្រឿងដ៏ឆ្ងាញ់សម្រាប់ជ្រលក់នំ ។ រីឯឧបាសកចាស់ក្មេងដែលជិះនៅខ្ទង់ទូកខាងក្រោយ, ក៏សម្រាកអុំ-ចែវ ហើយបរិភោគនំស្មោ ដ៏មានរសជាតិឆ្ងាញ់ពិសានៅទីវាលបឹងដែលមានខ្យល់អាកាសល្អបរិសុទ្ធ លាយឡំនិងសម្រែកបក្សាបក្សី, កុក, ស្មោញ, ផ្ទុំ, ប្រវឹក, ប្រវែក ក្រសា ..... ខ្លះហើរ, ខ្លះទុំលើចុងរាំង ។ ទិដ្ឋភាពដ៏ត្រកាលនាដើមរដូវរំហើយនេះ, បានផ្តល់នូវផ្ទាំងទេសភាពដ៏សុខក្សេមដល់ព្រះសង្ឃ និងពុទ្ធបរិស័ទ, ដែលស្វះស្វែងរកការលំហែអារម្មណ៍ នៅកណ្តាលវាលបឹងធំពោរពេញដោយទឹកល្អល្អាច ។ ពេលឆាក "ឆាន់" និងពិសារនំផ្កាស្មោនេះ, ចេះតែប្រព្រឹត្តទៅរហូតដល់ឆ្អែតស្កប់ស្កល់, ទាំងព្រះសង្ឃទាំងគ្រហស្ថ ។ លុះព្រះសង្ឃ, ឧបាសក, ឧបាសិកា, ឆាន់នំផ្កាស្មោឆ្អែតស្កប់ស្កល់ហើយ, ក៏គោះរគាំង ឱ្យសញ្ញាទៅឧបាសិកាចាស់ក្មេងដែលជាអ្នកផលិតនំឱ្យដឹង និងឈប់ធ្វើនំតទៅទៀតចុះ ។ សូមបញ្ជាក់ប្រាប់ថា នំផ្កាស្មោដែលនៅសេសសល់ពីចង្ហាន់ព្រះសង្ឃ និងពីឧបាសក ឧបាសិកាទាំងប៉ុន្មាន, ត្រូវបានបេះប្រឡោះចេញពីដើមស្មោទុកយកមកផ្ញើអ្នកដែលមិនបានទៅចូលរួមក្នុងពេលឆាក ឆាន់-ពិសានំផ្កាស្មោនេះ នៅឯស្រុកភូមិ ។ នេះជាពិធីមួយដែលធ្វើឡើងបានតែនៅតំបន់បឹងធំប៉ុណ្ណោះ ។ ចំណែកឯនៅទីផ្សេងដែលជាតំបន់ភ្នំ-តំបន់ខ្ពង់រាបឆ្ងាយពីបឹងវិញនោះ ទោះនៅក្នុងពេលជាមួយគ្នាក្តី ក៏ពុំអាចធ្វើពិធីនេះបាន អាស្រ័យដោយទីតាំងភូមិសាស្ត្រ

មិនអំពោយផល ។

## ឆ. ពិធីបុណ្យខាងពុទ្ធសាសនាផ្សេងៗ ទៀត :

* **បុណ្យផ្កាប្រាក់** : យើងអាចរាប់បញ្ចូលផងបានដែរ. នូវបុណ្យផ្កា. គឺផ្កាប្រាក់ដែលឧបាសក-ឧបាសិកា ពុទ្ធបរិស័ទដើងវត្តធ្វើឡើងដើម្បីប្រមូលបច្ច័យសម្រាប់កសាងទីសេនាសនៈផ្សេងៗ ឱ្យមានគ្រប់គ្រាន់ទៅតាមសេចក្ដីត្រូវការក្នុងទីអារាមនីមួយៗ ។

* **បុណ្យផ្លូវ** : គឺជាទម្រង់បុណ្យធុនតូចតាច ដែលពុទ្ធបរិស័ទនៅភូមិឋានណាមួយ. មើលឃើញការខ្វះខាតនឹងជីវភាពអត្តខាត់របស់វត្តអារាមណាមួយ. ដែលគេបានទទួលពត៌មានតាមរយៈការឱ្យការណ៍របស់សាមីវត្តនោះ. អំពាវនាវសសោះអន្ទងរកការឧបត្ថម្ភពីមជ្ឈដ្ឋានផ្សេងៗ បណ្ដាឧបាសកដែលមានសទ្ធាជ្រះថ្លាក៏បានរួបរួមគ្នា ស្វែងរកទេយ្យវត្ថុផ្សេងជាគ្រឿងឧបភោគបរិភោគយកទៅវេរប្រគេនវត្តដ៏ "**កម្សត់**" នោះ ។ យើងអាចរាប់រៀបបាននូវគ្រឿងឧបភោគបរិភោគដែលត្រូវប្រមែប្រមូល ហើយដង្ហែទៅវេរប្រគេនវត្តដែលមានសេចក្ដីត្រូវការនោះ. មានដូចជា : អង្ករ ដំឡូងត្រាវ. អំបុក. កន្ទេល ខ្មៅ. កុលកាក់ និងចង្ហាន់ ១ ពេល ។

## ជ. បុណ្យបញ្ចុះសីមា :

គឺជាប្រភេទបុណ្យធំក្នុងព្រះពុទ្ធ-សាសនា ដែលតែងតែប្រព្រឹត្តទៅក្នុងសភាពឧឡារិក អធិកអធមជាងគេ. លើសអស់បុណ្យសាសនាផ្សេងៗ ទៀត. ហើយច្រើនតែធ្វើក្នុងរយៈពេល ៣ យប់ ៤ ថ្ងៃ ។ ក្នុងពិធីបុណ្យនេះផងដែរ. ច្រើនតែបានការចូលរួមពីសម្ដេចព្រះសង្ឃរាជ. ឬសម្ដេចព្រះសង្ឃនាយក. គង់ជាអធិបតី. ចំណែកខាងគ្រហស្ថវិញ.

ច្រើនតែសម្តេចនាយករដ្ឋមន្ត្រី, ចូលរួមនិងកាត់ឫសសីមា, ជាកិច្ចទទួលស្គាល់ពីខាងផ្លូវលោក និងផ្លូវធម៌ អំពីអត្ថិភាពនៃព្រះវិហារជាគោលសីមានៃវិហារថ្មីមួយទៀត, ឱ្យដំណើរការសកម្មភាពនៃពុទ្ធសាសនាបានកាន់តែសស្រាក់សស្រាំថែមទៀត ។

ក្នុងរយៈពេល ៣ យប់ ៤ ថ្ងៃ នៃពិធីបុណ្យ តែងបានទទួលការចូលរួមពីពុទ្ធបរិស័ទជិតឆ្ងាយដែលមួយភូមិៗ ឬពីរបីភូមិ, ចូលរួមកម្លាំងសទ្ធាគ្នាកាន់ទិសណាមួយក្នុងចំណោមទិសទាំង ៨ ។ រោងទិសនីមួយៗ ត្រូវទទួលខុសត្រូវខាងចង្ហាន់[illegible] និងភេសជ្ជៈ, ប្រគេនចំពោះព្រះសង្ឃទាំងប៉ុន្មានដែលបាននិមន្តចូលរួមក្នុងពិធីបុណ្យបញ្ចុះសីមានេះ, គ្រប់ទាំង ៣ យប់ ៤ ថ្ងៃ ។ វាល់ពេលរាត្រី អបអរបជាប់ទិវាបុណ្យ តែងតែមានឃុតរាកទស្សនីយភាពសិល្បៈ អាយ៉ៃឆ្លងឆ្លើយ, ចាប៉ីដងវែង យីកេ, ឬល្ខោនបាសាក់, ក៏ដូចជាការបញ្ចាំងខ្សែភាពយន្តចល័ត ជូនពុទ្ធបរិស័ទរាប់ពាន់នាក់ បានទស្សនាកម្សាន្តគ្រប់រាត្រី ។ អ្វីដែលជាទីចាប់អារម្មណ៍នោះគឺ :

**ក- ការបូជាចំពោះសីមា ដោយវត្ថុផ្សេងៗ នៅតាមបំណងប្រាថ្នារបស់អ្នកមានជំនឿ ៗ**

**ឧទាហរណ៍** : បើអ្នកណាក្រាថ្នាចង់បានចិត្តស្លូតក្លាហានមោះមុតនោះ,គេអារសាច់ក្រោមដៃ ឬកំភួនដៃឱ្យហូរឈាមស្រក់ចុះទៅក្នុងរណ្តៅនោះ, គេជឿថា, ដល់ជាតិក្រោយ គេនឹងមានចិត្តក្លាហាន. ប៉ាានកាប់ចាក់ធ្វើឱ្យសត្រូវខ្លបខ្លាច ។ បើគេចង់ឱ្យទៅជាមនុស្សមានប្រាជ្ញារៀនសូត្រឆាប់ចេះ, គេដាក់សៀវភៅធម៌ ប៊ិច ខ្មៅដៃ ទៅក្នុងរណ្តៅហើយធ្វើការសំបូងសស្រូងឱ្យបាន

ក្លាយទៅជាពហុស្សូត. មានចំណេះជ្រៅជ្រះលើសគេ ។បើចង់ឱ្យជាតិក្រោយ មានសក់ខ្មៅក្រាស់ល្អនោះ. គេកាត់សក់ដាក់ទៅក្នុងរណ្ដៅសីមា ។ បើគេចង់ក្លាយជាអ្នកមានមាសប្រាក់កែវកង នៅក្នុងអនាគតជាតិនោះ. គេដាក់ចិញ្ចៀនមាស. ខ្សែដៃមាស. ខ្សែកមាស. ប្រាក់សុទ្ធ. ឬប្រាក់ក្រដាសទៅក្នុងរណ្ដៅសីមា ។ល។ និង ។ល។ នៅថ្ងៃចុងបញ្ចប់ដែលត្រូវកាត់ឫសសីមានោះ. វរជនដ៏សំខាន់ដែលត្រូវទទួលភារកិច្ចកាត់ឫសសីមានោះ. ច្រើនតែជាប្រមុខរដ្ឋាភិបាល ឬតំណាង ។ ឯការកាត់ឫសសីមានេះទៀតសោត. ត្រូវមានមនុស្សម្នាក់ប្រចាំសីមានីមួយៗ ជាអ្នកត្រូវកាត់ឫសសីមា ។ បើគិតទាំងសីមាកិលឬសីហោ **"ឥន្ទ្រគីល[១៨]"** ត្រូវមានសីមាទាំងអស់ ៩ ។ ដូច្នេះពេលកាត់ឫសសីមាត្រូវមានមនុស្ស ៩ នាក់ ដែលក្នុងនោះ វរជនសំខាន់ជាងគេ ត្រូវមានភារកិច្ចកាត់ឫសសីមាឥន្ទ្រកិល ។ តាមប្រពៃណីក៏ដូចជាតាមពុទ្ធប្បញ្ញត្តិ ការកាត់ឫសសីមា ត្រូវធ្វើឡើងព្រមៗ គ្នា មិនឱ្យមានមុនក្រោយឡើយ ។ ដូច្នេះ. ជាការហោត់គ្នាឱ្យបានស្រុះស្រួលនោះ. គេសន្មតយកសំឡេងគងស្គរទី ៣. ជាពេលដែលត្រូវយកអន្លូងទៅវាយពេញទំហឹងដោយដៃពីរ. ទៅលើពូថៅ ឬកាំបិត ដែលគងមុខមុតទៅលើរបុំអំបោះនៅ. ដែលជាឫសសីមាឱ្យឮស្គរតែមួយ ហើយឱ្យឫសសីមាដាច់ព្រមគ្នា. ធ្វើឱ្យដុំថ្មជាឫសសីមាធ្លាក់ដល់បាតសីមាព្រមគ្នា. ឮស្គរសំឡេង **"គ្រឹប"** ព្រមគ្នា. គឺឮសំឡេងតែមួយ ។ កាលពីជំនាន់ដើម. ចាស់ៗ មានជំនឿថា. ប្រសិនបើចៅអធិការវត្តនោះ កើតត្រូវនឹងឆ្នាំដែលគេធ្វើបុណ្យបញ្ចុះសីមានោះ. កាលហោដល់ពេលកាត់ឫសសីមា. ព្រះ

---

[១៨] សីមាកិល

គ្រូចៅអធិការវត្តនោះត្រូវតែនិមន្តចេញទៅឱ្យឆ្ងាយពីវត្ត, ធ្វើយ៉ាងណាកុំឱ្យស្នូរ ថ្មសីមាដែលធ្លាក់ទៅលើដីបាតសីមានោះ, ឮទៅដល់ព្រះអង្គ ។ បើពុំនោះទេ ព្រះអង្គត្រូវមានគ្រោះដល់សុគតជាមិនខានឡើយ ។ សព្វថ្ងៃ, ជំនឿបែបនេះ, ប្រហែលជាសាបរលាបហើយមើលទៅ ។ រីឯពុទ្ធបរិស័ទក្មេងចាស់ដទៃទៀត, ក៏គេមានជំនឿបែបនេះដែរ, ពោលគឺអ្នកមានឆ្នាំកំណើតត្រូវនឹងឆ្នាំបញ្ចុះសីមា នោះ, ក៏គេដើរឱ្យឆ្ងាយចេញពីវត្ត, ដើម្បីចៀសវាងកុំឱ្យឮសូរឫសសីមាធ្លាក់ ដល់បាតសីមា, ជាហេតុធ្វើឱ្យគេរងគ្រោះដល់ស្លាប់ដោយប្រការណាមួយ ។ លោកអ្នកអានអាចដឹងអំពីខ្លឹមសារលម្អិតនៃបុណ្យបញ្ចុះសីមានេះនៅក្នុងគម្ពីរ ព្រះត្រៃបិដក ឬក្នុងសៀវភៅណាផ្សេងទៀត ដែលពណ៌នាអំពីពិធីបុណ្យបញ្ចុះ សីមានេះយ៉ាងពិស្តារ ។

## ឈ. បុណ្យភ្ជុំបិណ្ឌ

នៅរដូវភ្លៀងពាក់កណ្ដាលរដូវវស្សា, ជាងពីរខែបន្ទាប់ពីពិធីបុណ្យ ចូលវស្សា, បុណ្យកាន់បិណ្ឌបានចាប់ផ្ដើមឡើងតាំងពីថ្ងៃ ១ រោច ខែភទ្របទ, ហើយបន្តរហូតដល់ថ្ងៃទី ១៤ រោច, ដែលគេសន្មតថាជារដូវ "**កាន់ បិណ្ឌ**" ។ ឯថ្ងៃទី ១៥ រោច ខែភទ្របទ ត្រូវចាត់ជាថ្ងៃ **ភ្ជុំបិណ្ឌ** ។ ខ្មែរយើង ចាត់ទុកបុណ្យកាន់បិណ្ឌ-ភ្ជុំបិណ្ឌនេះ ជាបុណ្យប្រភេទណា ? ធ្វើដើម្បីអ្វី ?

នៅក្នុងជំនឿបែបលទ្ធិព្រាហ្មណ៍និយម ពុំទាន់មានរូបភាពជាបុណ្យកាន់ បិណ្ឌ-ភ្ជុំបិណ្ឌដូចសព្វថ្ងៃនេះនៅឡើយទេ ។ គេធ្វើបុណ្យនេះក្រោមរូបភាពជា ពិធីសែនព្រេនចំណីផ្លែឈើ សាច់ជ្រូក ក្បាលជ្រូក មាន់ ឬទាស្ងោរ, ព្រមទាំង ស្រា ដែលក្នុងចំណោមចំណីអាហារទាំងនេះ, អាហារពិសេសប្រចាំពិធី គឺបាយ

បិណ្ឌ, ផ្សំពីបាយដំណើបលាយល្ងខ្មៅ បុកឱ្យម៉ត់ ។ សូមអស់លោកអ្នកអាន មេត្តាអធ្យាស្រ័យដោយខ្ញុំពុំបានដឹងកាលបរិច្ឆេទច្បាស់លាស់ ពាក់ព័ន្ធនឹងពិធីសែនភោជនាហារជូនដល់បុព្វជន, ដែលជាអ្នកមានគុណបំណាច់ធំធេងមកលើជំនាន់ក្រោយ, ព្រោះពុំអាចរកឯកសារមកអះអាងបាន ។ ខ្ញុំគ្រាន់តែសន្និដ្ឋានថា ពិធីសែនព្រេននេះអាចនឹងធ្វើក្នុងពាក់កណ្ដាលរដូវវស្សា ដែលមានភ្លៀងជោគជាំ, មេឃមានពពកខ្មៅមីរដេរដាស ព្រមទាំងមានស្គរផ្គរលាន់គ្រហឹមក្នុងក្ដារ ។ គឺនៅរដូវនេះ, ដែលមានស្លឹកឈើលាស់ខៀវខ្ចីទ្រុបទ្រុលស្រស់បំព្រង ធ្វើឱ្យបរិដ្ឋានមានធាតុអាកាសត្រជាក់ក្សេមក្សាន្ត និងញ៉ាំងឱ្យអារម្មណ៍មនុស្សទូទៅសប្បាយរីករាយ ។ គឺក្នុងបរិយាកាសអំណោយផលល្អបែបនេះហើយ, ដែលបុព្វជនខ្មែរយើងពីជំនាន់នោះសន្និដ្ឋានថា, ប្រលឹងបុព្វការីជនតែងតែមករកកូនចៅ, ដើម្បីបានទទួលនូវអាហារភោជនឆ្ងាញ់ៗ ដែលលោកធ្លាប់ពេញចិត្ត, កាលពីពេលដែលការរស់នៅ, ក្នុងភាពជាមនុស្ស ពីអតីតជាតិ ។ គឺអាស្រ័យដោយមនោសញ្ចេតនាយោគយល់ចិត្តគ្នាទៅវិញទៅមក, ស្រឡាញ់ស្មោះស្ម័គ្រគ្នា ដូចអតីតកាលនេះហើយ, ដែលនាំឱ្យសង្គមខ្មែរជំនាន់នោះឯកភាពគ្នាកំណត់ពេលធ្វើពិធីសែនព្រេនភោជនាហារ ជូនចំពោះដួងព្រលឹងបុព្វការីជនរបស់ខ្លួននេះឯង ។ ទម្លាប់បែបនេះ អូសបន្លាយរហូតមកដល់ដើមសម័យអង្គរ, ដែលព្រះមហាក្សត្រខ្មែរ[១៥] ដឹកនាំធ្វើពិធីសែនព្រេនអាហារភោជន មិនចំពោះតែបុព្វការីជនរៀងៗ ខ្លួនប៉ុណ្ណោះទេ, ប៉ុន្តែថែមទាំងសែនព្រេនឧទ្ទិសទៅយុទ្ធជនជាអ្នកមានគុណបំណាច់មកលើប្រទេសជាតិ, បានពលី

[១៥] ក្នុងរជ្ជកាលព្រះបាទយសោវរ្ម័ន ( ៨៨៩-៩១០ )

ជីវិត ដើម្បីបម្រើមូលហេតុការពារទឹកដី ក៏ដូចពង្រីកទឹកដីឱ្យកាន់តែមាន វិសាលភាពធំទូលាយថែមទៀត ។ ព្រះអង្គក៏ទ្រង់មានព្រះហឫទ័យសន្ដោស មេត្តាដល់ព្រលឹង ខ្មោចដ៏អភ័ព្វដែលគ្មានញាតិមិត្តសាច់សាលោហិត, សែន ព្រេនចំណីអាហារបញ្ជូនទៅឱ្យនោះ, ដោយព្រះអង្គត្រាស់បង្គាប់ឱ្យរាជវង្សា-នុវង្ស មន្ត្រីធំតូចក្នុងរាជវាំង សែនព្រេនឧទ្ទិសភោជនាហារទៅដល់ព្រលឹងខ្មោច កំព្រាកំព្រាទាំងនោះ, ឱ្យបានអាហារចំណីបរិភោគឆ្អាញ់ និងឆ្អែតស្កប់ស្កល់ ដូច ព្រលឹងខ្មោចដទៃៗ ទៀតផងដែរ ។

## ញ. បុណ្យភ្ជុំបិណ្ឌតាមបែបពុទ្ធសាសនា

ក្រោយសម័យអង្គរ, ខ្មែរយើងទាំងព្រះរាជា ទាំងមហាជន ក៏បែរមក កាន់ព្រះពុទ្ធសាសនាយ៉ាងមុតមាំ ។ ពីចាប់តាំងពីពេលនោះហើយ, ដែលពិធី បុណ្យខាងសាសនាទាំងឡាយ បានទម្រង់បុណ្យបែបពុទ្ធនិយម, តាមលំនាំ គម្ពីរព្រះត្រៃបិដកខ្លះ, តាមពុទ្ធប្បញ្ញត្តិខ្លះ និងតាមការកែទម្រង់ស្ថាបត្យកម្មពី សាសនាព្រហ្មញ្ញសាសនា និងព្រហ្មញ្ញនិយមខ្លះ, បកប្លែងបញ្ចូលឱ្យទៅជាបុណ្យបែប ព្រះពុទ្ធសាសនា, ដោយផ្អែកតាមគម្ពីរ **ធម្មបទអដ្ឋកថា**, គម្ពីរ **បេតវត្ថុ** និងសាស្ត្រា **អានិសង្សបិណ្ឌ** ។ មកដល់រជ្ជកាលព្រះបាទអង្គដួង, ពិធីបុណ្យ កាន់បិណ្ឌ-ភ្ជុំបិណ្ឌ ត្រូវបានក្រសួងធ្វើឡើងវិញជារាជពិធី, ដោយមានសូត្រធម៌ ហៅ **មហាសមយសូត្រ** ជារៀងរាល់យប់នាពេលទៀបភ្លឺ ។ បុណ្យកាន់បិណ្ឌ-ភ្ជុំ បិណ្ឌ តាមបែបពុទ្ធសាសនា នៅតែប្រព្រឹត្តធ្វើក្នុងរដូវវស្សាដដែល, ដូចកាល បុព្វបុរស ធ្វើពិធីសែនព្រេនភោជនាហារជូនព្រលឹងដូនតាកាលពីបុរាណសម័យ ដែរ ។ ប៉ុន្តែនៅពេលនេះ, ពុទ្ធមាមកជនជំនាន់ក្រោយសម្រេចកាលបរិច្ឆេទទៅ

នឹងសម័យមុន ដោយយកមូលហេតុជួយសម្រួលជីវភាពព្រះសង្ឃដែល គង់ចាំព្រះវស្សាអស់ត្រីមាស ។ម្យ៉ាងទៀត. នៅរនោចខែភទ្របទនេះ ភ្លៀងធ្លាក់ជញ្រាំទាំងយប់ទាំងថ្ងៃ. ធ្វើឱ្យលិចផ្លូវគោចរពីវត្តទៅភូមិរបស់ពុទ្ធបរិស័ទ។ ជួនកាលកន្លែងខ្លះ មានបែកភក់ជ្រាំពិបាកដល់ព្រះសង្ឃក្នុងការត្រាច់ចរនិមន្តបិណ្ឌបាតគ្រប់ច្រកល្ហក. តាមស្រុកភូមិ. ធ្វើឱ្យស្បង់ចីពរទទឹកកក្លិកកក្លាក់ . រំខានដល់ព្រះសង្ឃយ៉ាងច្រើន ។

ដូច្នេះនៅរដូវកាន់បិណ្ឌ-ភ្ជុំបិណ្ឌ ដែលមានរយៈពេលទាំងអស់ ១៥ ថ្ងៃ ព្រះសង្ឃគ្រប់វត្តមានចង្ហាន់ឆ្ងាញ់ និងត្រៀមបម្រុងទុកជាស្រេចសម្រាប់ប្រគេនព្រះអង្គឆាន់យ៉ាងគ្រប់គ្រាន់. អាស្រ័យដោយការដាក់វេនតាមភូមិនានាជាបន្តបន្ទាប់គ្នា. តាំងពីថ្ងៃបិណ្ឌមួយរហូតដល់បិណ្ឌទី ១៤ ។ រីឯថ្ងៃទី ១៥ រោជ គឺជាថ្ងៃប្រជុំបិណ្ឌទាំង ១៤. មកសរុបគ្នាតែ ១ ថ្ងៃ នៅថ្ងៃចុងបញ្ចប់ ។ ដូច្នេះហើយបានជាគេហៅថ្ងៃនេះថា ថ្ងៃភ្ជុំបិណ្ឌ ឬ ថ្ងៃ ប្រជុំបិណ្ឌ ។

## * របៀបឧទ្ទិសជូនព្រលឹងដូនតា ‑ មេបា :

ខុសប្លែកពីរបៀបឧទ្ទិសរបស់អ្នកកាន់លទ្ធិព្រលឹងនិយម ដែលយកអាហារភោជនពិសេសៗ ទៅសែនផ្ទាល់ជូនព្រលឹងដូនតា-មេបា. ហើយពោលពាក្យសំបូងសង្រួងអញ្ជើញព្រលឹងបុព្វការីជនឱ្យមកទទួល និងបរិភោគចំណីអាហារដែលគេសែនព្រេនជូនទៅនោះ. របៀបរបបពិធីកម្មរបស់ខ្មែរអ្នកកាន់ពុទ្ធសាសនាវិញនោះ. ពួកគាត់មិនឧទ្ទិសជូនផ្ទាល់យ៉ាងនេះទេ. តាមទ្រឹស្តីពុទ្ធ-សាសនា. កូនចៅទាំងឡាយដែលដឹងគុណឧបការៈរបស់បុព្វការីជន មានមាតាបិតា. ជីដូនជីតា. ញាតិកាទាំង ៧ សន្តាន. បានទឹករលឹកឧទ្ទិសភោជនាហារ

ទៅបុព្វការីជន, តាមរយៈព្រះសង្ឃ, គឺព្រះសង្ឃទទួល ភោជនាហារទាំងនោះ, ព្រះអង្គឆាន់រួចទើបសូត្រធម៌ ឧទ្ទិសបញ្ជូនទៅបុព្វជន-មេបាឱ្យលោកអនុមោទនាទទួលយកអាហារភោជននេះ តាមរយៈព្រះសង្ឃផងចុះ ។ ពិធីកម្មដទៃពីនេះទៀត, មាននិមន្តព្រះសង្ឃសូត្រធម៌បង្សុកូលឧទ្ទិសជាផលានិសង្ស ជូនទៅព្រលឹងមេបាដូនតា ។ ការផ្ទេរពិធីកម្មពីសែនផ្ទាល់, មកឧទ្ទិសប្រយោលតាមរយៈព្រះសង្ឃនេះ, មានអត្ថន័យប្រហាក់ប្រហែលគ្នា ដែលអ្នកមានទស្សនៈព្រលឹងនិយម និងអ្នកមានជំនឿបែបពុទ្ធនិយម មានឈាមជ័រជាខ្មែរតែមួយដូចគ្នានោះ សុខចិត្តព្រមផ្ទេរជំនឿដែលមិនជាខុសគ្នាឆ្ងាយប៉ុន្មាននោះឡើយ ។ ប៉ុន្តែ សូមជម្រាបថា យូរៗ ម្តងលទ្ធិព្រលឹងនិយមក៏ឆ្លៀតបញ្ចូលបញ្ជៀតពិធីកម្មខ្លះៗ លាយឡំនឹងរបៀបរបបពុទ្ធនិយមផងដែរ ។ អស់លោកអ្នកអាននឹងបានជ្រាបនៅទំព័រខាងមុខ ។

## * សំណល់ស្រមោលលទ្ធិព្រលឹងនិយម

មកដល់ពេលនេះ, កន្លងរយៈពេលជាច្រើនពាន់ឆ្នាំមកហើយ, ក៏ប៉ុន្តែស្លាកស្រមោលលទ្ធិព្រលឹងនិយម (មេបានិយម) ក៏នៅតែជិតដាបជាប់នៅក្នុងជំនឿខ្មែរ, ពុំទាន់រលុបរលាយនៅឡើយ, ហើយស្រមោលស្លាកស្នាមនេះនៅតែមានឱកាសបញ្ចេញឱ្យឃើញម្តងៗ តាមពិធីផ្សេងៗ, ដើម្បីឱ្យអ្នកវិភាគស្រាវជ្រាវបានកត់សម្គាល់ឃើញ និងកំណត់ចំណាំសម្រាប់បកស្រាយ និងឆ្លុះបញ្ចាំងមើលអំពីការវិវឌ្ឍន៍នៃជំនឿរបស់សង្គមខ្មែរ ។

គ្រាន់តែក្នុងពិធីបុណ្យកាន់បិណ្ឌ-ភ្ជុំបិណ្ឌតាមបែបព្រះពុទ្ធសាសនា, ក៏មានពិធីបែបលទ្ធិព្រលឹងនិយមចូលមកលាយឡំបានខ្លះៗ ដែរ ។

**ឧទាហរណ៍ :** ក្នុងចំណោម ភោជនាហារជាចង្ហាន់ផ្សេងៗ នោះ, មាន **"បាយបិណ្ឌ"** មួយមុខ, ដែលធ្លាប់បានដើរតួជាសំណែនដ៏ជាទីពេញចិត្ត របស់ព្រលឹងបុព្វជនរបស់ខ្មែរពីសម័យដើម ។ នាពេលយប់រៀងរាល់ថ្ងៃកាន់បិណ្ឌ, ពុទ្ធបរិស័ទស្រីប្រុស, ក្មេងចាស់, បានយកទៅបាច-បោះនៅជុំវិញព្រះវិហារវេលាទៀបភ្លឺ, ក្នុងបំណង ចែកជូនព្រលឹងជូនតា-មេបាពិសាឱ្យបានឆ្អែតផងដែរ ។ ពិសេសជាងនេះទៀត, នៅថ្ងៃ ១៥ រោជ ខែភទ្របទ, ដែលជាថ្ងៃភ្ជុំបិណ្ឌថ្ងៃបញ្ចប់, ថ្ងៃបុណ្យយ៉ាងឧឡារិកអធិកអធមនោះ, នាវេលាល្ងាចចាប់ពីម៉ោង ៥ តទៅ, នៅគ្រប់គ្រួសារខ្មែរ[១០] មានរៀបចំពិធីសែនព្រេនយ៉ាងអធិកអធម តក្កឹកតគ្រេង ។ ភ័ស្តុភារ, ភោជនាហារ, ដែលរៀបចំតាក់តែងសម្រាប់ធ្វើជាគ្រឿងសំណែននោះ រួមមាន :

**ក. ផ្នែកចម្អាប :** សម្លទឹក, សម្លគោក, ឆា, ផាក់ឡូវ, ចៀន, មាន់ឬទាស្ងោរ, ពី ៤ មុខដែលឡើងទៅ, សុទ្ធតែជាមុខម្ហូបដ៏ឆ្ងាញ់ពិសេស, ធ្វើយ៉ាងសប្រិតសប្រាំង .....

**ខ. ផ្នែកបង្អែម :** មាននំគម, ចេកខ្ទិះ, ល្ពៅ, ខ្នុរ, សេដា, ទ្រាប, នំកន្ទ្រាំ .....

**គ. ផ្នែកភេសជ្ជៈ :** ស្រាច្រើនប្រភេទ, ទឹកក្រូច, ទឹកតែ

**ឃ. ផ្នែកនំចំណីជាទីគាប់ចិត្ត :** នំអន្សម, នំគម, បាយដំណើបលាយល្ងខ្មៅ ( បាយបិណ្ឌ)

* **ការសែនព្រេន :** ជាទំនៀមតំ ៗ គ្នារាប់ពាន់ឆ្នាំមកហើយ,

---

[១០] ពិសេសគ្រួសារខ្មែរនៅតំបន់ខ្លះៗ នាខេត្តទិសនិរតី ដូចជា កណ្តាល, កំពត, កំពង់ស្ពឺ តាកែវ

ពេលវេលាដ៏សមស្របសម្រាប់ធ្វើពិធីសែនព្រេន, គឺ "ពេលគោចូលក្រោល" ប្រមាណជាម៉ោង ៥ កន្លះ ទៅម៉ោង ៦ ល្ងាច, ដែលគេគិតថា ពេលស្មើនេះ ព្រលឹងមេបា, ដូនតាមកជួបជុំនៅគ្រប់ផ្ទះរបស់កូនចៅទាំងអស់, ហើយក៏ជាពេលដែលគាត់ **"ឃ្លាន"** ផង ។

ចាស់ទុំដែលមានសម្ដីថ្មីមាត់ ប៉ិនប៉ាប់ខាងវោហាសាស្ត្រ, ត្រូវអ្នកភូមិអញ្ជើញឱ្យមកជួយដឹកនាំពិធីសែនព្រេន, ព្រោះគាត់ដឹងច្បាស់អំពីរបៀបរបបនៃការចាត់ចែងសំណែន ដែលមានជាអាទិ៍ : **អាហារនិមិត្តរូប** = ចង្ហាប ៥ ចាន, បង្អែម ៥ ចាន, នំនែក, ផ្លែឈើ, ភេសជ្ជៈ, សុទ្ធតែរៀបចំដាក់តុ, ដាក់ចាស យ៉ាងត្រឹមត្រូវ ។ របៀបពាក្យពេចន៍ដែលត្រូវពោលដឹកនាំពិធីសែន, គេបានចារពិស្តារនៅក្នុងសៀវភៅ **"កម្រងឯកសារ ស្ដីពីប្រពៃណីនិងទំនៀមទម្លាប់ខ្មែរ" ភាគ** I ទំព័រ ២៧០ និងសៀវភៅ **អានិសង្សពូនភ្នំខ្សាច់, ភាន់បិណ្ឌ-ភ្ជុំបិណ្ឌ ..... ទំព័រ ៥២** (សូមអញ្ជើញអានដោយសេចក្ដី) ។ ជាតំណាងព្រលឹងដូនតា, មេបា, បុព្វជន, គេយកក្រដាសមកកាត់ជាទង់ក្ដាតតូចៗ ។ ទង់ក្រដាសនេះគេសម្រេចរាងជា ដូចទង់ពេកដែរ, គ្រាន់តែខ្នាតតូចជាង ។ ទង់តំណាងនេះ, ត្រូវការ ៧ ដែលតំណាងញាតិកាទាំង ៧ សន្ដាន, គឺ ពុកម្ដាយ, ជីដូនជីតា, ជីដូនទួត ជីតាទួត (ឡើងលើ) កូន, ចៅ, ចៅទួត, (ចុះក្រោម) ។ គេដោតទង់នៅលើនំ ចំណី, ផ្លែឈើ, នៅជួរខាងមុខត្រង់កន្លែង, ដោត ១, ខាងឆ្វេង ៣, ខាង ស្ដាំ ៣, ។ ក្រោយពីចាស់ទុំដឹកនាំពិធីសែនព្រេនអស់រយៈពេល **"មួយធូប"** ដោយអំពាវនាវ ពៅព្រលឹងដូនតា, មេបាទាំងពីរខ្សែ, និងក្រុមគ្រួសារទាំងខាងប្ដី,

ទាំងខាងប្រពន្ធនៃគ្រួសារ, ឱ្យអញ្ជើញមកពិសារសំណែនដ៏ពិសេស ដែលកូនចៅសែនឧទ្ទិសជូន ..... ។ ក្នុងរយៈពេលមួយធូបនេះ, គេសន្មតថា ដូនតាមេបា ពិសារឆ្អែតហើយ, តេក៏បន្ថយ (គ្រាស) បាយសម្ល, អាហារ ចំណីទាំងប៉ុន្មានមកដាក់នៅឯតុ, ឬលើកន្ទេលក្រាលផ្ទាល់ដី, រាតវង់ធ្វើជា ១ ស្លក ឬ ២ ស្លក ទៅតាមចំនួនអ្នកចូលរួមបរិភោគ ។ គួរជ្រាបថា ពិធីសែនព្រេនអាហារភោជន ជូនព្រលឹង ដូនតា, មេបានេះ, ពុំមានចែងក្នុងគម្ពីរបើកខាងព្រះពុទ្ធសាសនាឡើយ ។

## IX. សេចក្តីសន្និដ្ឋាន :

ជាច្រើនទំព័រកន្លងមកនេះ, ខ្ញុំបានធ្វើអត្ថាធិប្បាយអំពីជំនឿសាសនាទាំងបី ដែលជាប្រភពបង្កើតឡើងនូវប្រពៃណីរបស់ខ្មែរយើង, ក្នុងនោះខ្ញុំបានលើកឡើងអំពីនិមិត្តរូប និងពិធីកម្មផ្សេងៗ ពាក់ព័ន្ធទៅនឹងជំនឿសាសនាអស់ទាំងនោះផង ។ គួរកត់សម្គាល់ថា, ជំនឿសាសនាទាំងបីប្រភេទដែលសង្គមខ្មែរយើងបានឆ្លងកាត់រួចមកហើយ, និងកំពុងប្រតិបត្តិទៅមុខទៀតនេះ, នៅមិនទាន់រលុបរលាយបាត់ស្រមោលទាំងស្រុងនៅឡើយ ។ ស្លាកស្នាមលម្អានដានស្រមោលនេះ, នៅតែជាប់ស្អិតជិតជាប្រទាំងប្រចើសក្នុងសតិ-អារម្មណ៍ខ្មែរ, ឱ្យនៅតែស្រពិចស្រពិល ប្លង់ស្ទើរឱ្យឃើញរូបភាពត្រង់ពិធីនេះ ឬលួចជ្រៀតចូលមកបង្ហាញបញ្ចេញឱ្យឃើញក្នុងពិធីណាមួយទៀត, តាមរបៀបដូចស្រមោលអតីតកាលតាមលេង, តាមលេងដូចកលមាយា ។ ដើម្បីងាយស្រួលយល់ ខ្ញុំសូមលើកឧទាហរណ៍មួយដូចតទៅនេះ :

មុនដំបូងសិល្បករម្នាក់យកខ្មៅដៃមកគូររូប "**អ្នកតា**" នៅលើក្រដាស-ស-មួយផ្ទាំង ។ យូរបន្តិចក្រោយមក, ជាងគំនូរដដែលនោះ, លុបរូបអ្នកតានោះចេញ តែលុបមិនបានជ្រះល្អប៉ុន្មានទេ, រួចហើយក៏គូររូប "**ព្រះសិវៈ**" (ព្រះឥសូរ) ពីលើស្រមោលរូបមុន ..... ។ យូរក្រោយមកទៀត, ជាងគំនូរដដែលនោះ ក៏លុបរូបព្រះសិវៈនោះចេញដូចមុន, រួចក៏ទឹកចង់គូរ "រូបព្រះពុទ្ធ" ត្រង់ស្នាមដាន រូបព្រះសិវៈ នោះជាជំនួសវិញ ។ ពេលនោះ, បានមនុស្សម្នាក់ យកក្រដាសគំនូរដែលសិល្បករបានគូរបីលើករួចមកហើយនោះ, យកមកពិនិត្យមើល ។ ជារឿងចម្លែកអស្ចារ្យណាស់, បុរសអ្នកពិនិត្យរូបលើក្រដាសនោះ, ឃើញស្នាមស្រមោលដំណែលជារូបអ្នកតាខ្លះ, រូបព្រះសិវៈខ្លះ, និងរូបព្រះពុទ្ធខ្លះ, ពោលគឺមើលឃើញរូបទាំងបីនៅជិតព្រាងៗព្រាលៗ នៅលើក្រដាសនោះ ។ ទោះគាត់ខំសង្កេតបំបែកគំនូរនោះ, ឱ្យចាកចេញជារូបរៀងខ្លួនច្បាស់លាស់ក៏មិនបាន ។ យ៉ាងណាមិញ, ជំនឿរបស់សង្គមខ្មែរ, ក៏មានសភាពប្រហែលដូចស្នាមតំណគំនូររូបទាំងបី នៅលើក្រដាសនោះយ៉ាងដូច្នោះដែរ ។ ដូច្នេះ, ជាលក្ខណៈទ្រឹស្តី, អស់លោកបានជ្រាបសព្វគ្រប់ហើយ ។ តទៅនេះ, ខ្ញុំសូមលើកយកមករៀបរាប់ជូននូវការពាក់ព័ន្ធគ្នារវាងដំណែល លម្អាននៃជំនឿទាំងបីប្រភេទ, នៅក្នុងពិធីខ្មែរនានាទៅតាមហេតុការណ៍ជាក់ស្តែង ឥតមានបំភ្លៃបន្ថែមបន្ថយពីការពិតឡើយ ។

ខ្ញុំសូមអនុញ្ញាតលើកយកពិធី "**ចម្រុះ**" ដែលតែងឡើងនៅក្នុងពិធី "**អាពាហ៍ពិពាហ៍**" ខ្មែរ តាំងពីមុនៗ រហូតមកទល់សព្វថ្ងៃ : ។

ក- នៅល្ងាចថ្ងៃចូលរោង, វេលាប្រមាណជាម៉ោង ៣ រសៀល,

អាចារ្យការប្រាប់អ្នកសាមីដើមការ. ជាគ្រួសារខាងកូនស្រីឱ្យរៀបចំពិធីសែន ក្រុងពាលី. ដោយបង្គាប់ឱ្យរៀបរណ្ដាប់រណ្ដាកំប៉ិកកំប៉ុកជាច្រើនដូចជា. អង្ករ. ស្រូវ. ពោត. សណ្ដែក. ល្ង ..... ដាក់កញ្ជើ ឬតុជាគូៗ. ព្រមទាំងជមចារ. ស្លាចមិ. ទៀនធូប. ផ្កាភ្ញី. មាន់ស្ងោរ. ក្បាលជ្រូក បន្លែបង្ការ លាជ ផ្លែឈើ ។ល។ និង ។ល។ រួចហើយលោកអាចារ្យ អំពាវនាវ សេពសូត្រ អញ្ជើញ អស់ទាំងគង្វើងព្រះធរណី ព្រះភូមិ. ទេពនិករ អមរមេឃ. ទេវតាទូទាំង ចក្រវាឡ ព្រះឥន្ទព្រះព្រហ្ម អារក្សអ្នកតា. ព្រះភូមិបាយាប. ម្ចាស់ទឹកម្ចាស់ដី. ក្រុងពាលី. អញ្ជើញមកទទួលក្រយាបូជានំនែកផ្លែឈើ. គ្រឿងរណ្ដាប់រណ្ដា. និងភោគផល. រួចហើយប្រសិទ្ធីពរជ័យសិរីមង្គលឱ្យដល់ម្ចាស់ដើមការទាំងសង ខាង និងកូនប្រុសកូនស្រីជាគូស្វាមីភរិយាឱ្យបានសុខដុមរមនា រហូតដល់ចាស់ ព្រឹទ្ធាចាស់ព្រេងតទៅ ..... ។ ពិធីនេះឆ្លុះបញ្ចាំងនូវជំនឿបែបព្រហ្មនិយម ព្រោះ មានបញ្ចេញតួអង្គ **"ក្រុងពាលី" "ព្រះឥន្ទព្រះព្រហ្ម"** ដែលមាននិទានក្នុង លទ្ធិព្រាហ្មណ៍សាសនា ។ រីឯការរំលឹកឡើងអំពីតួអង្គ **"អារក្ស អ្នកតា"** នោះ គឺជាការរំលឹកឡើងជំនឿក្នុងលទ្ធិព្រលឹងនិយម-អេបានិយម ។

ខ- នៅប្រហែលម៉ោង ៥ ល្ងាច. បន្ទាប់ពីលោកអាចារ្យបានបញ្ចប់ ពិធី **"សែនក្រុងពាលី"** រួចមក. លោកអាចារ្យ (មុខដដែល. ឈ្មោះ ដដែល) បានជម្រាបទៅម្ចាស់ផ្ទះជាសាមីដើមការ. មាតាបិតាទាំងខាងកូន ប្រុសកូនស្រី. និងប្រាប់ទៅអ្នកសម្ពាងការ. ឱ្យត្រៀមរៀបចំ :

- រណ្ដាប់រណ្ដា ស្លាធម៌ ម្លូបារី ភេសជ្ជៈ ទៀនធូប សាដក ឬ ស៊ង .....
- តាក់តែងសម្លៀកបំពាក់ឱ្យកូនក្រមុំ-កូនកំលោះ សម្រាប់ប្រារព្ធពិធី

ស្វាធ្យាយធម៌ ចម្រើនពុទ្ធជ័យមង្គល, ចំពោះគូស្វាមីភរិយា, ឱ្យមានសិរីសួស្តី សុភមង្គល ..... ។

គួរជ្រាបថា ៖ ពិធីសូត្រមន្តចម្រើនពុទ្ធជ័យមង្គលដែលតែងតែមានព្រះសង្ឃ ៤ ឬ ៥ អង្គ មកសូត្រធម៌រលាស់ទឹកមកស្រោចស្រប់គូស្វាមីភរិយានេះ, គឺជារូបភាពនៃពិធីស្តែងឡើងអំពីជំនឿខាង **"ព្រះពុទ្ធសាសនា"** ព្រោះមានព្រះសង្ឃខាងព្រះពុទ្ធសាសនាជាតួអង្គ, ហើយមានព្រះធម៌ជាពុទ្ធវចនៈរបស់ព្រះពុទ្ធបរមគ្រូ ។ បន្ថែមពីលើនេះទៀត, គេឃើញមានវត្តមាននៃ **"ព្រះពុទ្ធរូប"** ព្យួរនៅជញ្ជាំងខាងក្រោយរណ្តាប់រណ្តាជាគ្រឿងសក្ការៈបូជាផង ។ គ្រាន់តែមួយពណ៌កផ្ទៃមួយរោងការនោះ យើងឃើញពិធីចម្រុះញុះដល់ទៅបី បក អត្ថិភាពជាអត្តប្បន្នាប់ក្តា ..... ។

គ- នៅក្នុងពិធីអាពាហ៍ពិពាហ៍ផងដែរ នៅភាគពេញជាអ្នកកទៀតគឺ **"ពិធីសែនព្រេនចងដៃ"** ដែលតែងឱ្យឃើញនូវរូបភាពនៃជំនឿពីព្រហ្មញ្ញនិយមផងទៀត, ព្រោះមុនដំណើរពុកក្រោយ ញាតិមិត្តទាំងសងខាងចូលចងដៃ ឬ ក្លួនដែលកាត់ខ្លួនប្រុសស្រីនោះ, លោកអាចារ្យបង្ហាត់ទៅអ្នកមបាឱ្យចាត់ចែងពិធីសែនព្រេន ។ រណ្តាប់រណ្តាភស្តុភារដែលពិធីនេះតម្រូវឱ្យមានជាចាំបាច់ គឺ ៖ បាយស្ករ, សម្លស្ករ, កន្ទោង ៤, ចង្កាក់ ៤[illegible], ពងមាន់ស្ងោរ, ក្បាលជ្រូក, កាន ស្រាទឹកក្រូច, ទឹកដែលជាដើម, ស្លាម្លូ ទៀនធូប ផ្លែឈើគ្រប់មុខ..... ។ល។ នៅពេលនោះ ទាំងបងប្អូនដោយមាស ដែលចាស់ទុំញាតិមិត្ត ដែលចូលរួមនាំគ្នាក្រោយពិធីសែនព្រេន អំពាវនាវ អញ្ជើញព្រលឹងមេបា, បុព្វជនឱ្យអញ្ជើញមក

[illegible] នៅតំបន់ខ្លះ គេត្រូវឱ្យរៀបកន្ទោង ៩, ចង្កាក់ ៩.

ចូលរួមក្នុងពិធីចងដៃកូនប្រុសកូនស្រីឱ្យបានទៅជាប្តីប្រពន្ធស្របតាមប្រពៃណីពីបុរាណ. សូមព្រលឹងមេបា-បុព្វជនទទួលដឹងឮ និងទទួលស្គាល់ថាគូស្វាមីភរិយានេះ ត្រូវបានមាតាបិតា ញាតិសន្តានទាំងសងខាង ព្រមព្រៀងគ្នារៀបការឱ្យទៅជាប្តីប្រពន្ធស្របច្បាប់. ហើយរៀបអាពាហ៍ពិពាហ៍ពញ្ញមុខ. សូមព្រលឹងមេបា-បុព្វជនមេត្តាជួយប្រសិទ្ធិពរជ័យឱ្យគូនេះមានសុភមង្គលសិរីសួស្តី និងរួមរស់នៅជាប្តីប្រពន្ធ អស់កាលជាអង្វែងរហូតដល់ចាស់ព្រឹទ្ធចាស់ព្រេង ចាស់ស្មេងវង្វេងស្មុង. ខាំចេករហូតខាំស្លូត្ររបេះ, ខ្មោចចាញ់តម្រិះធ្វើមិនត្រូវ ..... ។ល។

សូមជម្រាបបញ្ជាក់ថា ពិធីសែនចងដៃ-កូចដៃដដែល មានគ្រឿងភ័ស្តុភារ ភោជនាហារយ៉ាងបរិបូណ៌ និងបានការនឹករលឹក អំពាវនាវហៅរកនិងអញ្ជើញព្រលឹងមេបា-បុព្វជននេះ គឺជាការឆ្លុះបញ្ចាំងឱ្យឃើញនូវស្លាកស្នាមលម្អាននៃជំនឿពាប់ពែលទ្ធិព្រលឹងនិយម យ៉ាងពិតប្រាកដ ។

ឃ- ឆ្លងដល់ពេលវេលាចុងក្រោយនៃពិធីមង្គលការខ្មែរ, ក៏មានពិធីដែលឆ្លុះបញ្ចាំងនូវអត្ថន័យនៃជំនឿទៅលើលទ្ធិពីរ ឱ្យស្តែងឡើងនៅពេលតែមួយ. នោះគឺ :

- ក្នុងពិធីបង្វិលពពិល[២២] យើងឃើញឧបករណ៍(វត្ថុ) ពីរប្រភេទបានត្រូវគេយកមកប្រើគឺទៀន និងពពិល ។ ទៀនជាវត្ថុពិសិដ្ឋតំណាង "**សិវលិង្គ**"

---

[២២] លោកតាគ្រូអាចារ្យបញ្ញើត ឡុង សៀម បកស្រាយថាពាក្យ ពពិល នេះ ក្លាយមកពីពាក្យ "វិរិល" ដោយប្តូរតួ "វ" ជា "ព" ពោលគឺគេយកទៀនបិទលើវត្ថុពិសិដ្ឋទាំង ២ ឱ្យវិលទៅមក ចំនួន ៧ ឬ ៩ ជុំ ឬ ១៩ ជុំ ។ បណ្ឌិតត្រាវជ្រាវខ្លះទៀត បកស្រាយថា "ពពិល" ក្លាយមកពី "ពពិរ" គឺពររបស់ព្រះ សិវៈ និងនាងឧមាភគវតី ដែលបានទៀន និងពពិលជាតំណាង ។

គឺលិង្គព្រះសិវៈ (ឥសូរ), និងពពិល (រាងដូចស្លឹកពោធិ៍), តំណាង**យោនី**នាងឧមាភគវតី ជាមហេសីរបស់ព្រះសិវៈ ។ វត្ថុទាំងពីរនេះ គឺជាទីសក្ការៈគោរពបូជា របស់បុព្វបុរសខ្មែរ កាលពីសម័យដែលលោកប្រតិបត្តិ "**ព្រហ្មញ្ញ-សាសនា**" ។ ហើយនៅគ្រប់តែប្រាសាទបុរាណ គេតែងតែឃើញវត្ថុជាទីសក្ការៈទាំងពីរប្រភេទនេះជានិច្ច ។

- នៅពេលដែលពិធីបង្វិលពពិលប្រព្រឹត្តទៅ, ក៏ស្រាប់តែលោកអាចារ្យដែលដឹកនាំកម្មវិធី, បាននាំមនុស្សទាំង ៩ នាក់ ជាសមាជិកតំណាងទាំងខាងកូនប្រុស និងកូនស្រី, សូត្រធម៌ "**ជយន្តោ ពោធិយាមូលេ ...**" ជាកិច្ចប្រកំព្រំប្រសិទ្ធិពរជ័យ ជូនគាប់គូស្វាមីភរិយា ។ រីឯធម៌ "ជយន្តោ" នេះវិញ, គឺដកស្រង់ចេញមកពីគម្ពីរ ព្រះពុទ្ធសាសនា នេះតែម្តង ។

សូមអស់លោកសាកល្បងវិភាគទៅមើល ថាតើនៅក្នុងពិធីបង្វិលពពិលនេះ ពិតជាមានអត្ថិភាពជំនឿនៃព្រហ្មនិយម និងពុទ្ធនិយមមកលាយឡំគ្នាដែរឬទេ ?, ដូច្នេះ បើយើងពិចារណាសារឡើងវិញនោះ, ក៏ពិតជាបានឃើញយ៉ាងជាក់ស្តែងនូវជំនឿចម្រុះបីបួនយកមកលាយឡំគ្នា ក្នុងពិធីអាពាហ៍-ពិពាហ៍ខ្មែរ ។

ង- នៅស្ទើរតែគ្រប់វត្តអារាមខ្មែរ, គេច្រើនតែឃើញមានិមិត្តរូបនៃស្លាកស្នាមជំនឿសាសនាខ្មែរទាំងបីអត្ថិភាពនៅជាមួយគ្នា ក្នុងទីតាំងភូមិ-សាស្ត្រតែមួយ, ដូចជា :

- មានខ្ទមអ្នកតា នៅផ្លូវចូលវត្ត, ឬនៅក្បែររបងវត្ត ។

- មានប្រាសាទបុរាណ, ដែលក្នុងនោះ, មានតម្កល់ "សិវលិង្គ និង

យោនីនាងឧមាភគវតី" ទុកជាទីគោរពបូជារបស់ព្រាហ្មណ្ឌបរិស័ទ ។

- មានវត្តអារាម និងព្រះវិហារជាទីតម្កល់ព្រះពុទ្ធរូបតូចធំជាច្រើន, សម្រាប់ជាទីគោរពសក្ការៈ របស់ពុទ្ធបរិស័ទ, មានព្រះសង្ឃជាអ្នកទ្រទ្រង់ព្រះពុទ្ធសាសនាឱ្យតាំងនៅឋិតថេរអស់កាលយូរអង្វែង, មានគម្ពីរព្រះត្រៃបិដកតម្កល់ក្នុងព្រះវិហារ ឬក្នុងហោត្រៃ ។ ដូច្នេះ, ព្រះពុទ្ធរូប, ព្រះធម៌, ព្រះសង្ឃដែលជាតំណាងត្រៃសរណគមន៍ ឬត្រៃរតនៈ ទាំងបី, ដ៏ជាស្នូលបណ្ដូលគ្រឹះនៃព្រះពុទ្ធសាសនា, បានមកប្រមូលផ្ដុំនៅក្នុងទី វត្តអារាម ។

តាមន័យដូចជម្រាបខាងលើ សូមអស់លោកមេត្តាជួយពិចារណាទៅមើលថា :

- ខ្ទមអ្នកតានៅក្នុងបរិវេណវត្ត, ជាតំណាងលទ្ធិបែបព្រលឹងនិយមឬទេ ?

- ប្រាសាទបុរាណដែលមានតម្កល់ សិវលិង្គ និងយោនីនាងឧមាភគវតី, ជាតំណាងជំនឿបែបព្រាហ្មណ្ឌសាសនាឬទេ ?

- វត្តអារាមដែលមានព្រះវិហារតម្កល់ព្រះពុទ្ធរូប, ហោត្រៃ (បណ្ណាល័យ) ដែលមានតម្កល់គម្ពីរព្រះត្រៃបិដកទាំង ១១០ ក្បាល, និងមានព្រះសង្ឃគង់នៅពាសពេញវត្ត តើនេះជាតំណាងនៃពួកពុទ្ធសាសនាដែរឬទេ ?

តើអ្វីៗ ទាំងប៉ុន្មាននេះ វាមិនមែនជារូបភាពចម្រុះនៃជំនឿទៅលើលទ្ធិសាសនាទាំងបីទេឬ ? ក្រៅពីនេះយើងអាចបន្ថែមនូវពិធីច្របូកច្របល់ ឡូកឡំផ្សេងៗ ទៀត ដូចជា :

- មានធ្វើពិធី សែនក្រុងពាលីក្នុងពិធីបុណ្យ "បំបួសនាគ" តាមទម្រង់

ព្រះពុទ្ធសាសនា, ក្នុងបុណ្យកតញ្ញូ ឬបុណ្យបច្ច័យបួន ..... ។

យើងនៅត្រូវបន្ថែមទំ និមិត្តរូបឆ្លុះបញ្ចាំងនូវជំនឿបែបព្រាហ្មណ៍និយម ដូចជា : ធ្វើនំអន្សម, នំគមក្នុងពិធីអាពាហ៍ពិពាហ៍, ពិធីបុណ្យភ្ជុំបិណ្ឌកាន់បិណ្ឌ, ចេញព្រះវស្សា ..... ។

ជាសរុបមកវិញ ទោះបីនៅពេលបច្ចុប្បន្ន ដែលខ្មែរកំពុងកាន់ ជឿ និងប្រតិបត្តិព្រះពុទ្ធសាសនាយ៉ាងប្តូរផ្តាច់ក្តី, ហើយទោះបីនៅក្នុងច្បាប់រដ្ឋ-ធម្មនុញ្ញ មានចែងជាផ្លូវការថា ព្រះពុទ្ធសាសនា ជាសាសនារបស់រដ្ឋ ..... ក្តី, ក៏នៅក្នុងខួរក្បាលខ្មែរ, នៅក្នុងសតិអារម្មណ៍ខ្មែរ, នៅក្នុងការប្រតិបត្តិជំនឿរបស់ខ្មែរ, នៅតែមានធាតុសំយោគរវាងសាសនាទាំងពីរជានិច្ច, ពុំអាចញែកគ្នាឱ្យដាច់បាន, ពុំអាចលើកស្ទួយមួយណា, ចោលមួយណាបានឡើយ ។

អាស្រ័យហេតុនេះ ខ្ញុំសូមសរសើរចំពោះទិដ្ឋិសម្របសម្រួល, ចំពោះការបោះបង់អត្យុត្តិរបស់ **ព្រះពុទ្ធសាសនា** ដែលពោរពេញទៅដោយស្មារតីសហប្រតិបត្តិការ, ដោយស្មារតីសន្តិសហវិជ្ជមាន, (Coexistence pacifique), ពោលគឺមានសហានចិត្តសន្តោសប្រណីដល់សាសនាពីរទៀត គឺ ពហុទេពនិយម និងព្រហ្មនិយម, ហើយព្រមទុកកន្លែងឱ្យសាសនាទាំងពីរបាននៅរួមរស់ជាមួយគ្នាដោយសុខសាន្ត, ពុំមានប្រកួតប្រកាន់ថ្នាំងថ្នាក់អ្វីឡើយ ។ ត្រង់ចំណុចនេះ, យើងអាចនឹកទៅដល់ព្រះសង្ឃក្នុងវត្តមួយចំនួន, លោកនៅតែប្រើមន្តអាគម, ធ្វើកន្ទេរយន្ត, ធ្វើខ្សែកាថាពាក់ដើម្បីការពារអាវុធផ្សេងៗ ក្នុងសមរភូមិ, ធ្វើជាពេទ្យបុរាណ, ប្រើមន្តអាគមគាថាព្យាបាលអំពើមនុស្ស អំពើខ្មោច, ប្រសិទ្ធិស្រោចទឹកឱ្យរកស៊ីកាក់កប, ធ្វើមុខរបរអាជីវ-

កម្មលក់ដូរបានចំណេញចំណូលច្រើន, ដាក់ខ្មែរគាថាព្រោះព្រាំឱ្យប្តីដែលមានស្រីថ្មី មករួមរស់ជាមួយប្រពន្ធដើមវិញ ..... ។ល។ និង ។ល។

អ្នកធ្លាប់បានសិក្សា អំពីខ្លឹមសារព្រះពុទ្ធសាសនា តែងតែធ្លាប់បានយល់ដឹងហើយថា **"នត្ថិមេ សរណំ អញ្ញំ ពុទ្ធោមេ ធម្មោមេ សង្ឃោមេ សរណំ វរំ ....."** ប្រែថា វត្ថុដទៃជាទីពឹងទីរលឹកដ៏ប្រសើររបស់ខ្ញុំព្រះករុណាមិនមានឡើយ, មានតែព្រះពុទ្ធ ព្រះធម៌ ព្រះសង្ឃជាម្ចាស់ជាទីពឹងទីរលឹកដ៏ប្រសើររបស់ខ្ញុំព្រះករុណា ..... ។ល។ និង ។ល។ គាថាខ្លីប៉ុណ្ណេះអាចសរបញ្ជាក់ឱ្យយើងដឹងថា, **"ត្រៃសរណគមន៍"** ក្នុងព្រះពុទ្ធសាសនាមានតែ **"បី"** គត់ ពោលគឺ **"ព្រះរតនត្រៃ"** ។

សូមអនុញ្ញាតវិលបកទៅក្រោយបន្តិច, ដើម្បីពិនិត្យមើលក្នុងទំព័រប្រវត្តិសាស្ត្ររបស់ខ្មែរយើងតាំងពីសតវត្សទី ១ នៃគ្រិស្តសករាជ, នោះគេពិតជាបានដឹងថា ព្រហ្មញ្ញសាសនា និងព្រះពុទ្ធសាសនា, ក៏ដូចជាលទ្ធិព្រលឹងនិយមតែងតែបានអត្ថិភាពនៅជាមួយគ្នារហូត, ពុំមានការប្រទូស្តរាយ ប៉ះទង្គិចគ្នាខ្លាំងក្លានោះឡើយ, រហូតមកទល់សម័យអង្គរ, ព្រះមហាក្សត្រខ្លះ, ជឿគោរព ព្រហ្មញ្ញសាសនា បែបនិកាយ **"សិវនិយម"** ព្រះមហាក្សត្រខ្លះទៀតជឿគោរពព្រហ្មញ្ញសាសនាបែបនិកាយ **"វិស្ណុនិយម"**, ហើយព្រះរាជាខ្លះទៀត បែរមកគោរព **ព្រះពុទ្ធសាសនាមហាយាន** ។ គួរជ្រាបថា នៅសម័យកាលនោះ, ដោយសារការប្រកាន់ទិដ្ឋិមានះចំពោះលទ្ធិសាសនា ខុសគ្នាដោយឡែកនោះ, ក៏មានការប្រទាំងប្រទើស ប្រទូស្តរាយ ផ្ចាញ់ផ្ចាលគ្នា, ប៉ះទង្គិចគ្នា, បំផ្លិចបំផ្លាញគ្នា, យកឈ្នះយកចាញ់គ្នា, ចង់ផ្តួលរំលំគ្នាទៅវិញទៅ

មក ..... ។ មានតែក្នុងរជ្ជកាលព្រះបាទ **ជ័យវរ្ម័នទី ៧** ទេដែលទ្រង់ជឿ ហើយប្រតិបត្តិ ព្រះពុទ្ធសាសនាមហាយាន ប៉ុន្តែទ្រង់បានសម្របសម្រួលជាមួយព្រហ្មញ្ញសាសនា និកាយផ្សេងៗ ឱ្យអាចរួមរស់ជាមួយគ្នាបានសុខសាន្ត, រហូតដល់ដឹកនាំប្រទេស មិនត្រាន់តែបានជ័យជម្នះទៅលើសត្រូវក្នុងស្រុកប៉ុណ្ណោះទេ, ក៏ប៉ុន្តែព្រះអង្គបានវាយកម្ចាត់កងទ័ពចាមឈ្លានពានឱ្យបាក់បបខ្ចបខ្ចាច, ហើយមានឱកាសកសាងអភិវឌ្ឍប្រទេសជាតិឱ្យបានចម្រុងចម្រើនដល់កំពូល ។ ប៉ុន្តែ នៅរជ្ជកាលក្រោយៗ មកទៀត ទំនាស់ខាងជំនឿសាសនាក៏នាំទៅដល់ការបែកបាក់សាមគ្គីគ្នា ហើយសង្គ្រាមផ្ទៃក្នុងធ្វើឱ្យខ្មែរចុះខ្សោយ រហូតដល់និកាយសាសនាមួយ លទ្ធិសាសនាមួយ ប្រឈមមុខដាក់គ្នា បំផ្លិចបំផ្លាញសម្បត្តិខាងសាសនាគួរជាបក្សប្រ ឱ្យដល់នូវភាពវិនាសហិនហោច ដូចមានភស្តុតាង ការវាយបំបាក់ព្រះកេស ព្រះហស្ត នៃបដិមារបស់ព្រះបាទជ័យវរ្ម័នទី ៧ .....។

ការផ្លាស់ប្តូររូបបដិមា ដោយយកសិវលិង្គ និងយោនី ឧមាភគវតីទៅដាក់ជំនួសព្រះពុទ្ធរូប នៅក្នុងប្រាង្គប្រាសាទនានា ..... ។ល។ និង ។ល។

ដោយមើលឃើញក្តីវិនាសអន្តរាយដល់ប្រទេសជាតិ ដោយសារការប្រទូស្តរាយគ្នា ខាងជំនឿសាសនានេះហើយ, ទើបពេលក្រោយមក, បុព្វបុរសខ្មែរយើងវិលបកកាន់ព្រះពុទ្ធសាសនាយ៉ាងខ្ជាប់ខ្ជួនរហូតសព្វថ្ងៃ, ហើយក៏នាំគ្នាបណ្តុះចិត្តសម្របសម្រួលគ្នា អត់ឱនយោគយល់គ្នា, ដរាបទាល់តែមានជំនឿចម្រុះ សំយោគ បីមកអត្ថិភាពក្នុងសង្គមខ្មែរតែមួយ, ហើយដំណើរការទៅរលូនសុខស្រួល ដូចយើងឃើញនាបច្ចុប្បន្ននេះស្រាប់ ។

ត្រង់នេះសរបញ្ជាក់ឱ្យយើងឃើញថា ទស្សនៈសន្តិភាពនិយមរបស់ព្រះពុទ្ធសាសនា ដែលមានឆ្លុះបញ្ចាំងនៅក្នុងព្រហ្មវិហារធម៌ថា "**មេត្តា ករុណា ឧបេក្ខា មុទិតា**" នេះហើយដែលជាធម៌គ្រឹះ អនុញ្ញាតឱ្យមានជំនឿសាសនាពីរ[២៣] ទៀតមកសុំជ្រកកោនក្នុងដែន ក្នុងសំណាក់នៃព្រះពុទ្ធសាសនាជារៀងដរាបមកទល់ពេលនេះ ហើយនឹងឋិតថេរនៅយូរអង្វែងតទៅមុខទៀត ។

* ឯកសារពិគ្រោះ

- ប្រវត្តិសាស្ត្រ ត្រឹងងា
- ឯកសារមហាបុរសខ្មែរ

---

[២៣] បើនិយាយតាមការពិត វាគ្មានសាសនាណាមានចិត្តសប្បុរសអនុគ្រោះដល់សាសនាផ្សេងៗទៀត ប៉ុន្មាននោះឡើយ ។ យើងមិនអាចគិតថា សព្វថ្ងៃនេះ ដែលប្រទេសយើងកាន់ព្រះពុទ្ធសាសនា (ជាសាសនារបស់រដ្ឋ) មានពុទ្ធបរិស័ទដល់ទៅ ៩០ % ក្ដី ក៏ព្រះពុទ្ធសាសនាមិនអាចគិតថា "ខ្លួនកំពុងរស់នៅក្នុងវិមានដ៏ធំមួយ" ហើយខ្លួនកំពុងអនុញ្ញាតឱ្យសាសនាព្រលឹងនិយម និងព្រហ្មញ្ញសាសនា រស់នៅក្នុងវិមានរបស់ខ្លួននោះបានឡើយ ព្រោះសាសនាព្រលឹងនិយម ហេតា-ចាស់ទុំនិយម ក៏អាចមានគំនិតដែរថា ខ្លួនមករស់នៅក្នុងវិមាននេះមុនគេ ។ ឯព្រហ្មញ្ញសាសនាក៏អាចមានមោទនភាពថា ខ្លួនក៏បានរកសោយសុខក្នុងវិមាននេះអស់រយៈពេល ១៤ ស.វ. ហើយដែរ ក្នុងរយៈពេលនេះ មានស្ដេចមន្ត្រី រាស្ត្រប្រជា ជឿនិងកាន់ប្រតិបត្តិយ៉ាងខ្ជាប់ខ្ជួន ហើយប្រទេសកម្ពុជាក៏បានរុងរឿងថ្កុំថ្កើងមានមុខមានមាត់ ដោយសារប្រាសាទរាប់ពាន់ដែលកសាងក្នុងកំឡុង ១៤ ស.វ. នេះដែរ ។ ដូច្នេះត្រូវតែនិយាយថា សាសនាទាំងបីទេ ដែលចេះរស់នៅចុះសម្រុងគ្នាក្នុងអារម្មណ៍ខ្មែរ ដែលជាប់ស្មោះជំនឿទាំង ៣ រហូតសព្វថ្ងៃ ។

- វចនានុក្រមសម្ដេចព្រះសង្ឃរាជ ជួន ណាត
- កម្រងឯកសារ ស្ដីពីប្រពៃណី ទំនៀមទម្លាប់ខ្មែរ មៀច ប៉ុណ្ណ
- Les êtres surnaturels dans la religion populaire Khmère Ang Chou Lien
- ពុទ្ធិកសិក្សាកម្ពុជា គណៈកម្មការនិពន្ធ ពុទ្ធសាសនបណ្ឌិត្យ

# ស្ត្រីខ្មែរ តាមលំដាប់សម័យកាល ពីអតីត មកបច្ចុប្បន្ន

## I. សេចក្តីផ្តើម

ប្រមាណជាច្រើនពាន់ឆ្នាំមកហើយ ដែលបុរសនិងស្ត្រីខ្មែរបានអត្ថិភាព និងរួមរស់នៅជាដៃគូ ទាំងក្នុងឋានៈជាប្តីប្រពន្ធក្នុងគ្រួសារ ក៏ដូចជា **សហភាគិន** ក្នុងក្របខណ្ឌសង្គមជាតិផងដែរ ។ ដោយហេតុថា នៅក្នុងសម័យ **សកលភាវូបនីយកម្ម** នេះ, ផ្នែកស្ត្រីភេទមើលឃើញលក្ខខណ្ឌជីវិតក្នុងគ្រួសារ ក៏ដូចជាឋានៈនាទីរបស់ភេទទាំងពីរ (Gender) នៅក្នុងសង្គមជាតិ ហាក់មានការលើសខ្វះគ្នា ហើយហាក់ដូចជាអ្វី ៗ ច្រើនតែមានទម្ងន់ទន់ទោរទៅខាងបុរសភេទ, ច្រើនជាង ។ ដោយចង់សាកល្បងលើកយកទស្សនៈផ្ទាល់ខ្លួន មកវិភាគឆ្លុះបញ្ចាំងលក្ខខណ្ឌនៃភេទទាំងពីរ ក្នុងគោលបំណងស្វែងរកតុល្យភាព ក្នុងក្របខណ្ឌ **ឋានៈ តួនាទី**, ដែលពួកគេម្នាក់ៗ , មានចំណែកត្រូវបម្រើគ្រួសារ និងសង្គមទៅតាមសេចក្តីត្រូវការ, និងផ្អែកតាមសមត្ថភាព, គុណសម្បត្តិរបស់ពួកគេ ។

ដើម្បីមានមូលដ្ឋានបង្អែករឹងមាំ សម្រាប់យកមកធ្វើជាទឡ្ហីករណ៍, យើងគួរតែចោលភ្នែកក្រឡេកមើលទៅក្រោយ, ក្នុងអតីតកាលដ៏ឆ្ងាយ, ដើម្បីឆ្លុះមើល, ជាពិសេសស្ត្រីភេទ, ក្នុងក្របខណ្ឌសង្គម និងគ្រួសារ, តើកូនប្រុស

និងកូនស្រីបានទទួលការអប់រំរបៀបណាខ្លះ ?

## II. ការអប់រំបុត្រាបុត្រី

នៅក្នុងគ្រួសារដែលមានកូនស្រីប្រុស, មាតាបិតាតែងតែផ្សព្វផ្សាយទៅលើបុត្រាបុត្រីនូវ ព្រហ្មវិហារធម៌ ៤ យ៉ាង[២៨] និងសង្គហធម៌ ៤ យ៉ាង[២៩] ទៅលើបុត្រាបុត្រីដូចគ្នា ។

### ១. ការអប់រំបុត្រា :

សង្គមខ្មែរពីរអតីតកាល តែងតែបណ្ដុះបណ្ដាលកូនប្រុសដោយ :

ក- យកទៅឱ្យសិក្សាអក្សរសាស្ត្រ លេខនព្វន្ត និងធម៌អាថ៌នៅវត្ត

ខ- បំបួសជាសាមណេរ ដើម្បីហ្វឹកហាត់ពត់លត់ដំខ្លួនឱ្យបានបទក្នុងសីល ១០

គ- បំបួសជាភិក្ខុ, បង្កើនកម្រិតយល់ដឹងខាងការគោរពពុទ្ធវិន័យចំនួន ២២៧ សិក្ខាបទ និងរៀនវិជ្ជាផ្លូវលោក, ផ្លូវធម៌, បំពាក់ឱ្យខ្លួននូវគុណធម៌ សីលធម៌ ចរិយាធម៌ ឱ្យបានទទួលឋានៈជាបណ្ឌិត[៣០] **(អន្ទិត)** ដែលជាឋានៈដ៏ខ្ពង់ខ្ពស់មួយ របស់បុត្រាខ្មែរនាសម័យនោះ ។ មជ្ឈមណ្ឌលអប់រំបុត្រាខ្មែរ

---

[២៨] មេត្តា, ករុណា, មុទិតា, ឧបេក្ខា ។

[២៩] ១-ឃាត់ឃាំងមិនឱ្យប្រព្រឹត្តអំពើអាក្រក់, ២-ឱ្យតាំងនៅក្នុងសេចក្ដីល្អ, ៣- ឱ្យសិក្សាចំណេះវិជ្ជា, ៤- រៀបចំកូនឱ្យបានផ្ទះសំបែង, ៥- ចែកកេរមត៌កឱ្យក្នុងកាលដ៏គួរ ។

[៣០] អ្នកមានកូនស្រី ស្វាគមន៍បុរសណាដែលមានឋានៈជាបណ្ឌិត (អន្ទិត) ប៉ុណ្ណោះ (ទស្សនៈពីជំនាន់ដើម ។

កាលពោះ គឺ **"វត្ត"** ដែលប្រៀបបានទៅនឹង **សាលាវិសាលមោក្ខ** (ឬសកលវិទ្យាល័យក្នុងសម័យនេះ) មានតួនាទីផលិតនូវបុរសដើមទ្រូង ៥ ហត្ថ ។

**២. ការអប់រំបុត្រី :**

ខុសប្លែកពីកូនប្រុស កូនស្រីខ្មែរត្រូវបានទទួលការអប់រំមួយបែបផ្សេង។ សង្គមខ្មែរសម័យដើមឱ្យតម្លៃខ្ពស់ទៅលើ **"ស្ត្រីគ្រប់លក្ខណ៍"** ព្រោះហេតុនេះហើយ បានជាគ្រប់គ្រួសារដែលមានកូនស្រី តែងតែខិតខំស្វះស្វាបំពាក់បំប៉នបណ្តុះបណ្តាលបុត្រីឱ្យទៅជាស្ត្រីគ្រប់លក្ខណ៍ តាមរយៈ **"ពិធីចូលម្លប់**[២៧]**"** ។ ក្នុងរយៈពេលពី ៣ ខែ, ៦ ខែ, ៩ ខែ នៃរយៈពេលចូលម្លប់, ក្រមុំខ្មែរបានទទួលនូវកម្មវិធីអប់រំជាមូលដ្ឋាន រួមមាន ៣ ចំណុច គឺ :

**ក. បំពាក់បំប៉ន បណ្តុះបណ្តាល អំពីលក្ខណៈសម្បត្តិ ៣ យ៉ាង** រួមមាន :

* **វិជ្ជាមេផ្ទះ :** ដាំស្ល, ដេរប៉ាក់, ចាក់ជុល, ត្បាញរវៃ .....

* **សីលធម៌, ចរិយាធម៌ :** រៀនច្បាប់ស្រី, រៀនប្រកាន់ឥរិយាបថ, អាកប្បកិរិយាស្លូតបូត, សុភាពរាបសារ, ឬកពាសមរម្យ ចេះគួរសមនឹងញាតិមិត្ត

* **បង្កើនសម្រស់ សោភណភាព :** ឱ្យទៅជាក្រមុំមានរូបឆោមលោមពណ៌ល្អប្រិមប្រិយ ទាក់ទាញអារម្មណ៍មនុស្សទូទៅ .....

និយាយរួម ចលនាចូលម្លប់នេះមានគោលបំណងផលិតស្រីគ្រប់លក្ខណ៍

---

[២៧] សូមអានសៀវភៅ "ក្រមុំចូលម្លប់" ដែលរៀបរៀងដោយខ្ញុំ (មៀច ប៉ុណ្ណ)

ដើម្បីបានក្លាយទៅជាគូនឹងបុរសដើមទ្រូងប្រាំហត្ថ (បណ្ឌិត, អធិត) នោះឯង ។ បើប្រៀបធៀបនឹងសម័យបច្ចុប្បន្ន, មជ្ឈមណ្ឌលអប់រំរបស់បុត្រាបុត្រីខ្មែរ, ពិតទៅមជ្ឈដ្ឋានពីរដាច់ដោយឡែកពីគ្នា, គឺមិនមែនទទួលការអប់រំបណ្ដុះបណ្ដាលរួមគ្នានៅសាលាបឋមសិក្សា, មធ្យមសិក្សា, អនុវិទ្យាល័យ, វិទ្យាល័យ, មហាវិទ្យាល័យ, សកលវិទ្យាល័យ ដូចសព្វថ្ងៃនេះឡើយ ។ តទៅទំព័រខាងមុខ អស់លោកអ្នកអាននឹងបានឃើញការបែងចែក ខណ្ឌញែកញ៉ាំងរវាងស្ត្រី និងបុរសឱ្យនៅដាច់ដោយឡែកពីគ្នា ..... តើព្រោះអ្វី ?

## III. ការប្រៀបធៀបតម្លៃរវាងភេទទាំងពីរ

តាមប្រពៃណីទំនៀមទម្លាប់ខ្មែរ, គ្រប់តែមាតាបិតាតែងតែប្រយ័ត្នប្រយែង រវៀសរវៃ ឃុំគ្រងថែរក្សាកូនស្រី, ដូចគេថែរក្សាការពារកែវវិសេសដូច្នោះដែរ ។ វិធានការនេះមិនមែនគ្មានមូលហេតុឡើយ ។ **ព្រហ្មចារី** ជាតម្លៃឧត្ដមបំផុតរបស់ស្ត្រីខ្មែរ ។ បាត់បង់ព្រហ្មចារី គឺបាត់បង់ធាតុបរិសុទ្ធ កាត់បង់កិត្តិយសគ្រួសារ ... ហើយកើតពីរឿងនេះទៀត, គឺសង្គមខ្មែរ, មជ្ឈដ្ឋានជុំវិញតែងប្រមាថពាក់អាយកេរ្តិ៍តែថ្កោលទោសទាក់ទង ។ ពាក់ព័ន្ធនឹងបញ្ហានេះ, ខ្មែរយើងការពងជាពាក្យទំនុកទំនៀមថា :

- មានកូនស្រី ទុកដូចជាមានក្រឡុកបួយអុំទិន, ហើយទុកកំពីងជិតដល់ទេ, នឹងមានជង្រុកប្រឡាក់, ធ្វើក្ដីខ្ចត, ហ៊ាំរកាតែងកើត ។

- កូនស្រីទុកដូចជាសំពត់ បើធ្លាក់ក្នុងភក់ហើយការបោកលាង ដើម្បីយកវិញនឹងប្រែទៅជាខ្មៅ

- កូនប្រុសប្រៀបដូចមាស ទោះធ្លាក់ទៅក្នុងភក់ជ្រាំក្តី កាលណាគេស្រង់យកទៅលាងទឹក, នឹងនៅតែក្រហមច្រាលដដែល ..... ។

ដូច្នេះ រវាងកូនប្រុស និងកូនស្រី មាតាបិតាតែងតែមានវិធានការផ្សេងគ្នា ។ បើមានកិច្ចការដែលត្រូវធ្វើដំណើរពេលយប់, ឬទៅផ្លូវឆ្ងាយ, នោះឪពុកម្តាយតែងតែតម្រូវឱ្យកូនប្រុសទៅបំពេញជំនួសបាន ដោយពុំមានក្តីព្រួយបារម្ភប៉ុន្មានឡើយ ។ កូនស្រីត្រូវមាតាបិតាទុកឱ្យនៅជិតៗ ខ្លួន ដើម្បីងាយមើលថែរក្សាការពារពីគ្រោះចៃដន្យផ្សេងៗ ។

## ១. ការងារសម្រាប់បុរស (ភេទខ្លាំង) និងស្ត្រី (ភេទខ្សោយ)

នៅក្នុងសង្គមខ្មែរ គេចាត់បុរសជាភេទខ្លាំង។ ការងារធ្ងន់ៗទាំងឡាយ មានដូចជា កាប់គាស់, លើសែង, ភ្ជួររាស់, ពោកពែន, អារឈើ នោះតម្រូវមកលើបុរស ។ ស្ត្រីត្រូវបានគេឱ្យទទួលបន្ទុកធ្វើការងារស្រាលៗ នៅផ្ទះ, (គេហកិច្ច) ដូចជា ត្បាញរវៃ, ដាំស្ល, បោសច្រាស សម្អាតផ្ទះសម្បែង, មើលថែកូនចៅ, ឱ្យបាយជ្រូកមាន់ទា ..... ។ ដោយហេតុថា គេចាត់ទុកស្ត្រីជាភេទខ្សោយហើយ, ទើបតម្រូវឱ្យរ៉ាប់រងការងារស្រាលៗ នៅក្នុងផ្ទះ ។

## ២. ក្រឹត្យក្រមទំនាក់ទំនងរវាងក្រមុំ និងកំលោះ

ទោះត្រូវចេញទៅប្រកបការងារនៅស្រែចម្ការ, មានដូចជា ដក ស្ទូង ច្រូតកាត់, ក៏គេឱ្យកូនស្រីធ្វើការតាមពួក តាមក្រុមជាមួយស្រីៗ ផងគ្នា ។ មិនអនុញ្ញាតឱ្យប្រុសៗ មកបន្ទំចូល ច្របូកច្របល់ ពពាក់ពពូនជាមួយស្រីៗឡើយ ។ ច្បាប់ស្រីមួយល្បះចែងថា : "**ធ្វើការអង្គុយប្រុងខ្លួន ទោះសម**

**កុំសម ផ្កា*ឯងជាស្រី....** " ។ ដំបូន្មាននេះដៅចំពោះកូនស្រី, ឱ្យចេះជ្រើសប្រយ័ត្នខ្លួន កុំឱ្យមានពាក្យដំនៀលពីអ្នកផង ។ នៅពេលទៅចូលរួមក្នុងពិធីបុណ្យផ្សេងៗ ដូចជា បុណ្យផ្កា កឋិន បញ្ចុះសីមា ចូលឆ្នាំ ។ល។ ពេលស្តាប់លោកសូត្រធម៌ ឬទេសនា ចាស់ៗ ស្រីៗ អង្គុយជិតរង់ព័ទ្ធវង់ជុំវិញក្មេងក្រមុំៗ, ហាក់ធ្វើរបងរាំងរា, មិនឱ្យមានការជ្រៀតចូលពីកំលោះៗ ។ បើម្តាយៗ មិនបានទៅបុណ្យនោះទេ, ក៏គង់គាត់ផ្តាំផ្ញើជាមួយយាយៗ ឱ្យជួយមើលការខុសត្រូវជំនួសគាត់ផងដែរ ។ វិធានការនេះ ម៉ឹងម៉ាត់ និងម៉ត់ចត់ណាស់ ។ ក៏ប៉ុន្តែ, នៅក្នុងពិធីបុណ្យចូលឆ្នាំប្រពៃណីជាតិ, វិន័យជាប្រពៃណីនេះ ហាក់បានបន្ធូរបន្ថិចវិញ, ដោយអនុញ្ញាតឱ្យកូនប្រុសស្រី, កំលោះក្រមុំ, លេងចូលឆ្នាំបាន, តែត្រូវតែនៅក្រោមក្រសែភ្នែកចាស់ៗ ជាម្តាយឪពុក ។ រាល់ការលេងល្បែងលើសើក្រោម ធ្វើឱ្យចាស់ភ្នែកនោះ, នឹងត្រូវបានចាស់ៗ ព្រមាន ។ គឺនៅក្នុងការលេងល្បែងប្រជាប្រិយនាឱកាសបុណ្យចូលឆ្នាំនេះហើយ, ដែលកំលោះ និងក្រមុំបានឱកាសបានសម្តែងនូវការស្និទ្ធស្នាលជាមួយគ្នា, លើគ្នា, កត់សម្គាល់គ្នា, តាមរយៈល្បែងបោះអង្គុញ, ចោលឈូង, លោតអន្ទាក់, ទាញព្រាត់, ចាប់កូនខ្លែង ..... ។ ល្បួងលេងទាក់ទិនផ្តោះផ្តងខាងពាក្យសម្តី, ចម្រៀងឆ្លើយឆ្លង, (រាំសារាវ៉ាន់, ប្រលែង .....) និងការប៉ះដៃជើងគ្នាខ្លះៗ ពេលដណ្តើមអង្គុញ ..... នឹងនាំទៅដល់ការ **ទំនុក** ឪពុកម្តាយឱ្យចូលស្តីនាងណា, កូនចៅ លោកតា-លោកយាយណា, ដែលកំលោះណាពេញចិត្ត ។

ការសម្រេចដាក់ជញ្ជាំងខណ្ឌ បែងចែកដាច់ រវាងក្រមុំនិងកំលោះខ្មែរនេះ, មើលមួយភ្លែតទៅហាក់ដូចជាការបំបិទសិទ្ធិយុវវ័យ, ហាក់ដូចជាការ

---

* ផ្កា ភេទ (ពាក្យបុរាណព្រោះ)

ញែកស្រី និងប្រុសឱ្យនៅដាច់ដោយឡែកពីគ្នា, ហាក់ដូចជាអមនុស្សធម៌, ហាក់ដូចជាតឹងរ៉ឹង ម៉ឺងម៉ាត់ពេក, ហាក់ដូចជាប្រឆាំងនឹងធម្មជាតិ, ដែលតម្រូវឱ្យធាតុពីរ[២៨] ជួបគ្នាជាចាំបាច់ ..... ។ ប៉ុន្តែបើយើងរំពឹងគិត, បែរទៅមួយជ្រុងទៀតនោះ, យើងនឹងមិនទុទិដ្ឋិនិយមទៀតឡើយ, ព្រោះមនុស្សតែងមានវប្បធម៌, អរិយធម៌, វិន័យ, សេចក្តីថ្លៃថ្នូរ, ដោយយកវិចារណញ្ញាណជាមូលដ្ឋាន ។ ប្រសិនបើបើកទូលាយពេក, អនុគ្រោះពេក, យោគយល់ពេក ធូររលុងពេក បាតុភូត **អនាធិបតេយ្យ** នឹងកើតមានឡើង ។ ពេលនោះ, ការច្របូកច្របល់ ពពាក់ពពូនក្នុងទំនាក់ទំនងរវាងបុរសស្ត្រី, នឹងមិនប្លែកប៉ុន្មានពីគោក្របីឡើយ ។ ក្នុងន័យនេះ គេមិនត្រូវភ្លេចទេថា "**មនុស្សមានធម្មសញ្ញា មានវិចារណញ្ញាណ**" ឯសត្វ, មានតែ **សភាវគតិ** ។ វាធ្វើអ្វីៗ តាមចំណង់ ឥតបានគិតបានដឹងពីអំពើនោះ, ល្អ ឬអាក្រក់, ខុស ឬត្រូវឡើយ ។

### ៣. ផលវិបាកនៃទំនាក់ទំនងខុសប្រពៃណី

សង្គមខ្មែរបុរាណឱ្យតម្លៃជាអាទិភាពទៅខាងស្ត្រី ក្នុងក្របខណ្ឌរបប "**មាតាធិបតេយ្យ**" អត្តភាពនៃស្រីក្រមុំ, ស្ទើរតែជាតួអង្គជាទីសក្ការៈទៅហើយ ។ ច្បាប់ទម្លាប់, ប្រពៃណីរបស់សង្គម, ទ្រទ្រង់របៀបរបបនេះ ។ ប្រុសកំលោះណាដែលប៉ាន់ប៉ះ, កុំថាឡើយដល់ខ្លួនប្រាណ សូម្បីតែត្រឹមចុងដៃចុងជើងរបស់កូនក្រមុំ, នឹងត្រូវទទួលការផាកពិន័យជាមាស ជាប្រាក់ ជាគោឡើងក[២៩], ជាស្រូវអង្ករ មានតម្លៃខ្ពស់នាសម័យនោះ ។ ប្រសិនបើមិនអាច

[២៨] ធាតុប្រុសធាតុស្រី (សម្រាប់មនុស្ស) ធាតុញីធាតុឈ្មោល (សម្រាប់សត្វ)
[២៩] គោឈ្មោលមាឌធំ ដែលគេមិនក្រៀវ ដើម្បីទុកធ្វើជា "គោពូជ"

រ៉ាប់រងនូវការផាកពិន័យដ៏ធ្ងន់ធ្ងរនេះបានទេ. នោះនឹងត្រូវមានទោសដល់ជាប់គុក ។

ព្រោះហេតុនេះហើយ. បានជាឪពុកម្ដាយណាដែលមានកូនកំលោះ. តែងតែខិតខំស្ដីប្រដៅកូន. កុំឲ្យប្រព្រឹត្តអំពើជ្រុលជ្រួស ប៉ះពាល់ បៀតបៀនកូនក្រមុំគេ. នាំឲ្យមានទុក្ខទោសមកដល់ខ្លួន។ ចំពោះរបៀបរបបបែបនេះ មនុស្សខ្មែរសម័យបច្ចុប្បន្ន តែងតែនឹកហួសចិត្ត ហើយជួនកាលគេគិតថា ជារឿងដែលពុំអាចជឿបានផង ។ ប៉ុន្តែ ក្នុងសម័យមួយ. ដែលទម្លាប់ទំនៀមខ្មែរយើង ជាទម្ងន់មកលើប្រុសៗ បែបនេះ, តើធ្លាប់ដែលមានអំពើប្រព្រឹត្តបំពារបំពានទាំងកំរោល បែបបិសាចទៅលើស្រីក្រមុំខ្លះដែរឬទេ ?

គួរគប្បីប្រាប់ថា ទោះបីនៅក្នុងបរិយាកាសមួយដ៏តឹងរ៉ឹង. ម៉ឹងម៉ាត់បែបនេះ ក៏គង់នៅតែមានពុតរូតរសកញ្ញ. ឬអំពើរំលោភបំពានកើតឡើងម្ដងៗដែរ ។ ជួនកាលកូនកំលោះ "ក" ដែលស្រឡាញ់កូនក្រមុំ "ខ" ក្នុងភូមិជាមួយគ្នាឬជិតគេ. ត្រូវបានក៏បបួលមិត្តភក្ដិដែលស្ម័គ្រជួយបបួលរលាសរ. ទៅលបចាប់នាង "ខ" នោះ នៅពេលនាងទៅដងទឹកតែម្នាក់ឯង. ឬក៏ទៅច្រូតនៅវាលស្រែឬយកអុសជាច់ពីព្រៃ. នៅក្បែរព្រៃគុម្ពោត. តើរត់ចូលព្រៃ ដោយមានមិត្តភក្ដិចិត្តមួយថ្លើមមួយ កាន់ដាវជួយការពារបង្ហើរទៅផង ។ ជួនកាលពួកគេទៅពួនលាក់ខ្លួននៅក្នុងរូងភ្នំ. ជួនកាលក៏នាំគ្នារត់ទៅស្នាក់អាស្រ័យនៅឯផ្ទះសាច់ញាតិនៅស្រុកឆ្ងាយ. ដរាបណាតែបានកូនមួយ ទើបហ៊ានវិលចូលភូមិវិញ. ដោយមានការសម្រុះសម្រួលពីចាស់ទុំ សាច់ញាតិទាំងសងខាង. ព្រោះជាមួយនឹងកិច្ចសហប្រតិបត្តិការរបស់អាជ្ញាធរដែនដី. មាន

មេស្រុក (មេឃុំ) ជាដើម ។ ប៉ុន្តែសូមជម្រាបថា. ករណីបែបនេះ ទណាស់ ..... ។ ជាទូទៅ ច្រើនតែមានការគោរពគ្នា. យោគយល់គ្នា. ក្តីសុខឱ្យគ្នា. ព្រមជាមួយនឹងការស្រុះស្រួលគោរពវិន័យ. ច្បាប់ ង្គមប្រចាំស្រុកភូមិ. ឱ្យមានសណ្តាប់ធ្នាប់របៀបរៀបរយ. និងរូមរស់ ះកេរ្តមកុរាន្ត ពីសម័យមួយទៅសម័យមួយទៀត ។

## រឿងៈពីបុរាណខ្លះៗ ទាក់ទងទៅនឹងអត្តភាពរបស់ស្ត្រី

កាលពីជំនាន់ដើម. មានមតិខ្លះបាក់ដូចជាបន្ទាបសេមត្ថភាពស្ត្រី. ខាង កម្រិតប្រាជ្ញា ខាងគំនិតផ្តួចផ្តើម និងចក្ខុវិស័យ ។ តាមការវិភាគរបស់ ការបញ្ចុះតម្លៃស្ត្រីក្នុងសង្គមខ្មែរបុរាណ. មិនមានន័យទូទៅដែលគេអាច ទុកជាក្បួនជាខ្នាត ឬទុកជាផ្លូវការឡើយ ។ បើខ្ញុំយល់មិនច្រឡំទេ. របុរសខ្លះ. ជាអ្នកដទៃក្តី. ជាបងប្អូនសាច់ញាតិក្តី. ជាប្តីក្តី. ដោយបាន ឃើញស្ត្រីខ្លះ. (មួយចំនួនតូច) មានការភ្លេចភ្លាំង. គិតមិនដល់ . យល់ ស៊ីជម្រៅ មិនបានវែងឆ្ងាយ. ក្នុងការដោះស្រាយបញ្ហាអ្វីមួយ. ឬក្នុង ទង់រកចម្លើយលោះខនព្ធន្តមិនបានឆាប់. មិនប្រើវិធី បូក. សង. គុណ. ។ល។ និង ។ល។ មើលឃើញការភ្លាំងភ្លាត់ ការមិនស្ទាត់ជំនាញខ្លះៗ បខាងលើ ក៏លើកជាពាក្យទំនឹមបង្អាប់ស្ត្រីលេងជាការកម្សាន្ត ...... រដែកគ្នាលេងជាលក្ខណៈគ្រួសារ ។ ពាក្យបង្អាប់កំប្លែងទាំងនោះ មាន

១- ស្ត្រីវិលចង្ក្រានមិនជុំ

២- ស្ត្រីនោមមិនហួសពីកែង

៣- ស្ត្រីគិតគូរ រកដំណោះស្រាយ ចំណោញ ខាត ប្តូក សង គុណ ចែក ..... ដោយប្រើខ្ទាច់អ៊ីងដូង, ខ្ទាច់ជើងធូប, ឬក្បាច់គ្រាប់ស្រូវយកមកធ្វើជាគោលក្នុងការគិត

៤- ស្ត្រីមុជមិនជ្រៅទៅមិនឆ្ងាយ

៥- ស្ត្រីមានគំនិតចាក់ស្មុក

៦- ស្ត្រីច្រើនស្រដីចែប៉ប្រែ

៧- ស្ត្រីមានចិត្តរញ៉ុំរញ៉ូវ (រឿងវេស្សន្តរជាតក ពោលបង្អាប់ដោយតាជូជក)

៨- ស្ត្រីសម្តីតិច ស្រដីការអ្វីពុំដាច់ស្រេច និងទទួលបង្គាប់បញ្ជាពីលោកមេបាក្រែងបិនបាន (សម្តីពោលដោយលោកអេបា ក្នុងពិធីថែចូវស្តីដណ្តឹង[១០] .....)

៩- ឈ្មើតរុកជាស្រី, ស្មារតីតិច, ច្រើនភ្លេចមុខ ភ្លេចក្រោយ, ក្រែងនឹងទទួលការសព្វព្រប់ទៅមិនបាន[១១] .....

១០- ស្ត្រីជាភេទទន់ខ្សោយ មិនអាចយកជាមុខជាមាត់បាន .....

១១- កុំយកស្រីធ្វើជាគ្រូ កុំយកទ្រូធ្វើពារ ។ល។

ប៉ុន្តែពាក្យពោលបង្អាក់ស្ត្រីទាំងប៉ុន្មានដែលបានថែងក្នុងប្រយោគខាង

---

[១០] លោកមេបាពុំសូវបានជឿជាក់ទៅលើអ្នក ផ្លូវស្រី មើលពោលដូច្នេះ (ក្បួនទម្រង់ការអាពាហ៍ពិពាហ៍ **ចាប ‐ ពិន** ទំព័រ ២៩ បន្ទាត់ ១២

[១១] ក្បួនអាពាហ៍ពិពាហ៍ អ្នកញ៉ាមហាវិជ្ជាវៀល **នៅ**, អ្នកអ្នកញ៉ាមហាមន្ត្រី **ញ៉ឹក នូ** ទំព័រ ៦៦ បន្ទាត់ ១១

លើនេះ, វានឹងមានន័យ **បដិបក្ស** ជាមួយនឹងពាក្យទំនឹមទំនៀមខ្មែរបុរាណ ដដែលបានកំណត់ថា, ក្នុងរបបមាតាធិបតេយ្យ, គេលើកស្ត្រីជាធំ, គេឱ្យឧត្តមភាពទៅខាងស្រី, គឺគេលើកកម្ពស់តម្លៃស្ត្រីដោយយកពាក្យ **"មេ"** ជាតំណាង ប្រែថាធំជាងគេ ឧទាហរណ៍ : មេអណ្តើក, មេខ្មែរ, មេសម្ពាង, មេនាំភ្លើង, មេបា, មេកន្ទ្រែ, មេកាំបិត, មទ័ព, មេកន្ទ្រាញ .....

- ទោះជាតិ **ជាមនុស្សប្រុសក៏ដោយ** : ឧទាហរណ៍ : មេឃុំ, មេទ័ព, មេកន្ទ្រាញ មេការ, មេដៃ, មេតុងទីន, មេបា, មេវត្ត, មេផ្ទះ, មេគ្រួសារ .....

- ទោះជាតិ **ជាវត្ថុក៏ដោយ** : ឧ. មេដំបូល, មេទ្វា, មេត្រៃ, មេសោ, មេអាកោ, មេតាប៉ៃ, មេទឹក,

- ទោះជាតិ **ជាសត្វក៏ដោយ** : មេហ្វូង, មេខ្យល់, មេខ្លោង, មេរោគ, មេក្រមី, មេស្វិល,

* ចំពោះពិធីមួយចំនួនទៀត គេតែងយកមនុស្សស្រីមកធ្វើជាអធិបតីដូចជា :

**ក- ពិធីប្រណាំងទូក** : គេឱ្យស្ត្រីរាំក្បាលទូក ដើម្បីឱ្យមានជ័យជម្នះ, សិរីសួស្តី,

**ខ- ពិធីឡើងផ្ទះ** : គេឱ្យស្ត្រីម្នាក់បីឆ្នាសប្បុរបីដើរមុខក្បួនដង្ហែឡើងផ្ទះថ្មី, ពាក្យស្លោកថា : **ឆ្នាសប្បុរបី ស្រីគ្រប់លក្ខណ៍**

**គ- ពិធីសែងផ្ទះ** : គេឱ្យស្ត្រីក្រមុំសែងទៅជួរមុខតាមសសរទាំង ៣, ដើម្បីផ្តល់កម្លាំងចិត្តដល់ប្រុសជាអ្នកសែងនៅជួរក្រោយៗ ។

* ចំពោះបង្គោលទ្រទ្រង់គ្រួសារ : គេទុកស្ត្រីជាតួអង្គសំខាន់ ឧទាហរណ៍ :

ក- ស៊ូស្លាប់បា, កុំឱ្យស្លាប់ "**មេ**", លង់ទូកកណ្តាលទន្លេ, កុំឱ្យភ្លើងឆេះផ្ទះ

ខ- ពាក្យទំនឹមទំនៀម ខ្លែងហើរដ្បិតខ្យល់, នាយថ្មើរដ្បិតពល, អាហារឱ្យសុខ, ទ្រព្យគង់ដ្បិត "**ស្រី**", ចេះសំចៃទុក, ផ្ទះធំត្រូវយក ដ្បិត "**ភរិយា**" ជា

គ- គេយកស្តីដណ្តឹងកូន : ប្តីថាឱ្យ, **ប្រពន្ធ**ថាមិនឱ្យ = មិនឱ្យ, ប្តីថាមិនឱ្យ, **ប្រពន្ធ**ថាឱ្យ = ឱ្យ, ភាគីស្រីមានអាទិភាព[៣៤]

## V- ការផ្សំផ្គុំគូ ក្នុងក្របខ័ណ្ឌ មាតាធិបតេយ្យ

ក្នុងរបបមាតាធិបតេយ្យ, គេសន្មតឱ្យ **ឧត្តមភាព** នៅខាង ស្ត្រី ។ ចាប់ពីរជ្ជកាលព្រះនាង សោមា (លីវយី) មក, សង្គមខ្មែរតែងលើកតម្កើងស្ត្រីជាធំ ។ ដូច្នេះ ក្នុងការរៀបចំផ្សំផ្គុំបុត្រាបុត្រី, ឱ្យទៅជាប្តីប្រពន្ធនោះ ភាគីកូនប្រុសត្រូវទៅស៊ីស្តីដណ្តឹង ពុកម្តាយខាងកូនស្រី, ដែលអាចបានដូចបំណង, ឬត្រូវខាងស្រីគេបដិសេធសម្តី ។ ក្នុងករណីដែលគេយល់ព្រមឱ្យ, ក៏មានភ្ជាប់លក្ខខណ្ឌជាច្រើន ដូចជា :

**១- ការចែចូវ :** មុនចូលស្តីតាមផ្លូវការ, ត្រូវមានការស៊ើបសួរ,

---

[៣៤] សៀវភៅសង្គមវិជ្ជាខ្មែរ លោក ស - ការុន

ស្ពាបស្ទង់គ្នាចុះឡើង, ដោយមានវត្ថុខ្លះកំដរដៃផង ។ ការចែចូវនេះ, ត្រូវធ្វើជាបីដំណាក់កាល, ហៅថា "**ចែចូវតូច**" ។

**២. ការស្តីដណ្តឹង** : បន្ទាប់ពីបានទទួលលទ្ធផលវិជ្ជមានក្នុងការចែចូវរួចហើយ, ទើបឈានដល់ការស្តីដណ្តឹងជាផ្លូវការ និងពេញមុខ ។

**៣. ការបម្រើ** : កាលណាភាគីខាងស្រីយល់ព្រមឱ្យកូនក្រមុំតាមការស្តីដណ្តឹងហើយនោះ, កូនប្រុសត្រូវចូលទៅបម្រើគ្រួសារខាងកូនស្រី, ក្នុងន័យផ្គាប់ចិត្ត និងបានទទួលអនុគ្រោះយោគយល់ ពីភាគីកូនស្រី ។ ក្នុងការបម្រើនេះ, កូនប្រុសត្រូវបំពេញការងារមួយចំនួនដូចជា, កិនស្រូវ, បុកអង្ករ, រែកទឹក, ពុះឧស, ធ្វើស្រែចម្ការ .... ។ តាមរយៈការបំពេញការងារឱ្យគ្រួសារកូនស្រីនេះ, ម៉ែឪគេបានវាយតម្លៃអំពីលទ្ធផលការងារ, ប៉ិនប្រសប់ ឬខ្ជិលខ្ជា, ស្មោះត្រង់ ឬមានពុតត្បុត ។ បើពុកម្តាយកូនស្រីទាស់ចិត្ត ដោយប្រការណាមួយនោះ, គេអាចផ្តាច់ចំណងមេត្រីភាពភ្លាម* ។

**៤. ការបន្ទាប់**[៣៣] : នៅក្នុងពិធីស្តីដណ្តឹងជាផ្លូវការនោះ, មាតាបិតា ខាងកូនស្រីអាចបង្គាប់ :

**ក. ឱ្យសង់ផ្ទះ** ម៉ូតអ្វី, ទំហំប៉ុនណា, ប្រាក់ស្បៀវ ឬប្រាក់ក្បឿង .....

**ខ. ឱ្យជូនគ្រឿងអលង្ការ** ជាខ្សែកមាស, ប៉ុន្មានជី ..... ខ្សែដៃមាស, ខ្សែឆៀង, ខ្សែចង្កេះ, ចិញ្ចៀន, ក្រវិល, ការ៉, ការ៉បិត, កងដៃ,

---

* សូមអានរឿងពុកក្មេករើសកូនប្រសារ

[៣៣] ចំពោះរឿងបណ្តាការចំសីងមានចែងនៅ ទំព័រទី ៤៥ នៃសៀវភៅ "ក្បួនទម្រង់ការអាពាហ៍ពិពាហ៍ (ចាប-ពិន)

កងជើង, សរុបប៉ុន្មានជី ប៉ុន្មានតម្លឹង ។

**គ. ជំនូនភស្ដុភារ :** រាល់ពេលបុណ្យភ្ជុំបិណ្ឌ, បុណ្យចូលឆ្នាំ, និងពេលដែលគ្រួសារខាងស្រីមានធុរៈរវល់, គ្រួសារខាងប្រុសត្រូវយកភស្ដុភារផ្សេងៗ មាន អង្ករខ្សាយ, អង្ករដំណើប, នំអន្សម, នំគម, មាន់ទា, សាច់ជ្រូក, ត្រី, ដូងទុំ, ផ្លែឈើ ..... យកទៅជូនគ្រួសារខាងស្រីជាទៀងទាត់ ។

**៥. ពេលដំណើរការរៀបអាពាហ៍ពិពាហ៍ :** ខាងភាគីកូនប្រុសត្រូវមានភស្ដុភាមួយចំនួន ជូនទៅខាងស្រី ដូចជា ផ្លែឈើតូច, ផ្លែឈើធំ, ស្លាពាន់, ម្លូពាន់, បន្ទែបង្ការ, សាច់ជ្រូក, សាច់មាន់, ស្រា, ទឹកក្រូច, នំអន្សម, នំគម ..... ។ល។

**៦. ក្នុងពិធីកាត់ខាន់ស្លា :** នៅក្នុងពិធីកាត់ខាន់ស្លានេះ ឪពុកម្ដាយខាងស្រី តែងតែឱ្យខាងប្រុសចេញថ្លៃទឹកដោះ, ដែលគេនិយមហៅថា **"ស្លាប់ទឹកដោះ"** តាមប្រពៃណីខ្មែរ, ស្លាប់ទឹកដោះអាចមានតម្លៃទៅតាមត្រកូល, តាមសក្ដិ មានពី ៥០ តម្លឹង ៣ បាត ៣ ស្លឹង ចុះមកដល់ ៧ តម្លឹង ១ បាត ១ ស្លឹង ..... ។ បើគិតជាទឹកប្រាក់យើងសព្វថ្ងៃមានប្រហែល ពី ៧០០ ដុល្លារ ចុះមក ៥០០ ដុល្លារ ។ ស្លាប់ទឹកដោះគឺជាការកាត់ថ្លៃទឹកដោះដែលម្ដាយបង្ហូរចេញពីទ្រូងមកចិញ្ចឹមកូនស្រី តាំងពីថ្ងៃកើតមក រហូតដល់ពេលរៀបការ[illegible] ។

---

[illegible] មានអ្នកឆ្ងល់ម្ដងចំនួនសួរថា ឬមួយកូនប្រុស ក៏ធំពេញដោយទឹកដោះមកចិញ្ចឹមកូនដែរ ម្ដេចថែ១ ទាំងពីរភាគី មិនយកមកទូទាត់ក្នុងផង ? ចម្លើយគឺ តាមរបបមាតាធិបតេយ្យ មានតែម្ដាយខាងស្រីទេទើបបានសិទ្ធិទាមទារថ្លៃ ស្លាប់ទឹកដោះ ។

**៧. ទីស្នាក់នៅក្នុងអំឡុងអាពាហ៍ពិពាហ៍ :** ក្នុងពេលប្រព្រឹត្តទៅនៃអាពាហ៍ពិពាហ៍, ផ្ទះដែលភាគីខាងប្រុសសង់នោះ, ត្រូវបានកូនស្រីយកធ្វើជាទីស្នាក់នៅរបស់ខ្លួន, ដោយយោលទៅលើការបង្គាប់បញ្ជារបស់មេបាខាងស្រី, នៅពេលស្ដីដណ្ដឹងភ្ជាប់ពាក្យ ។ ឯអ៊ុកនឿយហត់ក្នុងការកាប់ឈើ អារឈើលើកផ្ទះនោះ, គេតម្រូវឱ្យស្នាក់នៅក្នុង **"រោងផ្កាស្លា"** នៅផ្ទាល់នឹងដីទេវិញ ។

តាមការបរិយាយរៀបរាប់តាំងពីដើមមកទល់ពេលនេះ, បញ្ជាក់ឱ្យឃើញថា, ភាគីស្ត្រីឋិតនៅខាង **"ម្រៀបខ្លាំង"** ដែលស្រីៗ គួរតែមានមោទនភាព, ហើយខាងភាគីប្រុសៗ, ឥតមាន **"ក្នុងចិត្ត"** ច្រណែនទ្រិស្ដនឹងស្រីៗ, សូម្បីតែបន្តិចក៏គ្មានផង ។ តើព្រោះហេតុអ្វី ? តើប្រការនេះវាមិនមែនជាឥទ្ធិពលនៃ **"ផ្គត់ផ្គង់ទៀមទម្លាប់"** ទេឬ ? ។

នៅទំព័រជាបន្តទៅនេះ ខ្ញុំសូមអនុញ្ញាតលើកកម្ពស់បន្ថែមទៀត, នូវតម្លៃរបស់ស្ត្រី នៅជំនាន់ពុទ្ធកាល, ដើម្បីនារីសម័យនេះសញ្ជឹងគិត និងមានមោទនភាពចំពោះអត្តភាពនៃភេទរបស់ខ្លួន ។

និយាយមកដល់ចំណុចនេះ ខ្ញុំគិតថា យើងមានមូលដ្ឋានខ្លះៗ ហើយសម្រាប់ស្វែងយល់ឱ្យបានសមរម្យបន្តិច អំពីបញ្ហា **ភេទ** (យែនឌ័រ) ដែលកំពុងធ្វើសកម្មភាពផ្សព្វផ្សាយយ៉ាងទូលំទូលាយ នៅក្នុងចំណោមស្ត្រីនៅគ្រប់វិស័យទូទាំងប្រទេសកម្ពុជា សំដៅជំរុញឱ្យបានខ្លាំងក្លា និងឆាប់រហ័សនូវសិទ្ធិស្មើភាពរវាងបុរសនិងស្ត្រីនៅក្នុងគ្រប់វិស័យដូចជា ឱ្យនារីខ្មែរកាន់តំណែង និងតួនាទី ក្នុងក្របខណ្ឌរដ្ឋ គ្រប់មន្ទីរក្រសួង គ្រប់ស្ថាប័ន គ្រប់ជាន់ថ្នាក់ យ៉ាង

ហោចណាស់ឱ្យបាន ៥០ % ប្រៀបនឹងបុរស ឬលើសបុរស ក៏រឹតតែល្អ ដោយយោលទៅតាមបរិមាណស្ត្រី ច្រើនជាងបុរស ។

ដើម្បីលាតត្រដាងឱ្យឃើញរឹតតែជាក់ច្បាស់ និងធ្វើឱ្យនារីភេទមានអារម្មណ៍ជ្រះថ្លា ខ្ញុំសូមអនុញ្ញាតធ្វើការវិភាគ តាមទស្សនៈផ្ទាល់របស់ខ្ញុំ ក៏ដូចជាពិនិត្យមើលពីជ្រុងផ្សេងៗ នៃអត្តភាពរបស់នារីខ្មែរ តាមរយៈការឆ្លុះបញ្ចាំង ទៅលើទិដ្ឋភាពសង្គមវប្បធម៌ ដូចខាងក្រោមនេះ :

## VI. ទីតាំងស្ត្រីក្នុងបរិបទសង្គមវប្បធម៌

**១. លក្ខណ៍ស្ត្រីក្នុងក្របខណ្ឌពុទ្ធសាសនា :** ដោយខ្មែរយើង ជឿ-កាន់-គោរព ព្រះពុទ្ធសាសនា តាំងពី ស.វ. ទី ៣ មក. បណ្ដាប្អូនសាសនានេះបានឥទ្ធិពលយ៉ាងខ្លាំងមកលើពុទ្ធសាសនិកជន តាមរយៈវត្ថុបទផ្សេងៗ ដែលបានចែងក្នុងគម្ពីរជាតេក សំដៅលើកកម្ពស់មុខមាត់ស្ត្រី ដែលមានគុណធម៌ខ្ពង់ខ្ពស់វិសេសវិសាលដូចយ៉ាង :

**ក. ព្រះនាងគោតមី :** ព្រះមាតុច្ឆារបស់ព្រះពុទ្ធជាម្ចាស់ទ្រង់មានតួនាទីដ៏ឧត្តុង្គឧត្ដមក្នុងការគ្រប់គ្រងដឹកនាំ ភិក្ខុនី សាមណេរីរាប់ពាន់អង្គក្នុងជំនាន់ពុទ្ធកាល ។

**ខ. ព្រះនាង យសោធរពិម្ពា :** កន្សែស្រាវពេញមែព្រះបរមគ្រូ. ដោយព្រះនាងបានបំពេញរាជភារកិច្ចជាឧត្តមបរិសីដ៏ចម្បង បណ្ដាលហេតុនោះឱ្យព្រះ **សិទ្ធត្ថ** ជាព្រះភស្ដាបានត្រាស់ដឹងព្រាជ្ញាសម្មាសម្ពោធិញ្ញាណ ជាកំពូលមនុស្សក្នុងលោក ។

**គ. នាងវិសាខា** : បុត្រីរបស់សេដ្ឋី បានសម្រេច **សោតាបត្តិផល** តាំងពីអាយុ ៧ ឆ្នាំ ហើយក្រោយមក អាស្រ័យដោយគុណធម៌ដ៏ឆ្នើម ខាងការឧបត្ថម្ភទ្រទ្រង់ព្រះពុទ្ធសាសនា ក៏ត្រូវបានព្រះពុទ្ធអង្គ តែងតាំងជាឧឡារិកជា ញោមឧបដ្ឋាយិកា ជាមហាឧបាសិកាដ៏មានកិត្តិយស ក្នុងចំណោមពុទ្ធសាសនិកជននាជំនាន់នោះ ។

**ឃ. ព្រះនាងមទ្រី** : ក្នុងរឿង **ព្រះវេស្សន្តរជាតក** ព្រះនាងមទ្រីជាតួអង្គស្រីដែលបានបង្ហាញនូវស្វាមីភក្តិដាច់ខាតចំពោះតួអង្គព្រះវេស្សន្តរជាស្វាមី ។ ដូចព្រះនាង **សិតា** ដែរ, ព្រះនាងសុខចិត្តលះបង់សេចក្តីសុខគ្រប់ប្រការក្នុងនាមជាព្រះអគ្គជាយានៃមហាក្សត្រ, ចេញចាកពីរាជវាំង, ចរលីលាជាមួយបុត្រាបុត្រី, រួមសុខទុក្ខជាមួយព្រះវេស្សន្តរ, ក្នុងដំណើរចេញសាងផ្នួសជាឫសីតាបស ក្នុងបពិតគិរីវង្កត, រងទុក្ខលំបាកគ្រប់បែបយ៉ាង, រស់ដោយសារផលាផល ក្នុងព្រៃហិមពាន្ត ។ គឺដោយព្រះរាជការកិច្ចដ៏វិសេសវិសាលនេះហើយ, ដែលក្នុងជាតិជាបន្ទាប់មកព្រះវេស្សន្តរ បានត្រាស់ដឹងព្រាជ្ញាសម្មាសម្ពោធិញ្ញាណ, មានឋានៈជាព្រះសម្មាសម្ពុទ្ធ សង្គ្រោះសត្វលោកឱ្យចាកទុក្ខ ។

**២. លក្ខណស្ត្រីក្នុងបណ្ដាអក្សរសិល្ប៍ខ្មែរ**

**ក. រឿងរាមកេរ្តិ៍** : ព្រះនាង **សិតា** ត្រូវបានគេកត់សម្គាល់ និងឱ្យតម្លៃខ្ពស់ទៅលើការការពារភាពបរិសុទ្ធ ស្វាមីភក្តិដាច់ខាតចំពោះស្វាមី និងប្រឈមមុខនឹងការពិសោធន៍ដ៏គ្រោះថ្នាក់របស់ព្រះរាម ដើម្បីបញ្ជាក់អំពីភាពបរិសុទ្ធ ស្មោះត្រង់ ក៏ដូចជារងនូវទុក្ខវេទនាស្ទើរស្លាប់ស្ទើររស់ដោយការព្រះស្វាមី ។

**ខ. រឿងមារយើង** : ប្រពន្ធថ្មីរបស់មាយើង ដែលដូរយកបានពីនាយភោត្រា គឺជាស្រីមានប្រាជ្ញាឆ្លាត, វាងវៃ និងមានគុណសម្បត្តិ, សមត្ថភាពគ្រប់វិស័យ. ក្នុងការលើកស្ទួយឱ្យជីវភាពសម្បូរដោយទ្រព្យធន ក្នុងការបោត់ពត់លត់ដំមាយើងឱ្យមានកាយសម្បទារឹងមាំ, ប្រាជ្ញាឆ្លៀវឆ្លាត ...... នៅទីបំផុតបានក្លាយទៅជាបបាសេនាដ៏ជំនិតរបស់ព្រះមហាក្សត្រ ។ ជោគវាសនាដ៏ត្រដឹមត្រដែតនេះ, ពិតជាកើតឡើងពីប្រពន្ធ ជាស្រីគ្រប់លក្ខណ៍, ស្របនឹងពាក្យភាសិតមួយឃ្លាថា : សំពៅបយោងដី, ស្រីយោងប្រុស ..... ឬ នាយថ្មើរជ្បិតពល, អាសារឱ្យសុខ, ទ្រព្យគង់ជ្បិតស្រី, ចេះសំចៃទុក, ផ្ទះធំស្រពោក, ជ្បិតភរិយាជា ។ល។

**គ. រឿងទុំទាវ** : ក្នុងរឿងនេះ នាងទាវបានបង្ហាញដល់អ្នកសិក្សា, នូវទឹកចិត្តស្នេហាដ៏ប្តូរផ្តាច់ចំពោះទុំជាប្តី, មិនញញើតនឹងវង្សត្រកូលអំណាចប្រមាសព្រាក់ ហើយឱ្យពន្លែទៅលើសុភមង្គលនៃជីវិត ដោយសារតែភក្តីភាព ការប្តូរផ្តាច់ស្លាប់រស់ជាមួយស្នេហាដ៏ស្មោះ "មួយទល់នឹងមួយ" ។

**ឃ. នាងកង្រី** : ដោយសារតែស្នេហាស្មោះ អស់ពីដួងចិត្តចំពោះ**ឫទ្ធីសែន** ជាស្វាមីស៊ូលះបង់ព្រះនគរ, លះបង់មាតា, ព្យាយាមរត់តាមស្វាមីរហូតដល់ដួលដេកស្លាប់នាឆ្នេរមហាសមុទ្រ ។ ស្វាមីភក្តិរបស់នាងកង្រី បានចារឹកទុកជាប្រវត្តិដល់បណ្តាជនឱ្យមានការចាប់អារម្មណ៍ថា នាងជាស្ត្រីមួយរូបដែលស្មោះចំពោះតែប្តីមួយប៉ុណ្ណោះ ។

**ង. រឿងអាកម្ប៉ិលផេះ** : នៅក្នុងរឿងព្រេងបុរាណនេះ គេគប់សម្គាល់ឃើញថា, នាងពៅដែលមានពូជពង្សជាបុត្រីមហាសេដ្ឋី, បានសម្រេច

ចិត្តផ្សងព្រេងមកយកមនុស្សខ្ជិលផុតលេខជាស្វាមី. ក្នុងបំណងកែប្រែស្វាមីឱ្យចេញផុតពីអន្លង់នៃភាពកម្សត់ទុគ៌ត. និងពីអត្តចរិតខ្ជិលច្រអូស. ឱ្យក្លាយទៅជាមហាសេដ្ឋី. មានទ្រព្យសម្បត្តិស្តុកស្តម្ភ បង្កើតបានជាការភ្ញាក់ផ្អើលដល់សេដ្ឋីជាបិតា. និងពីមហាជននៅក្នុងតំបន់ ។ លទ្ធផលគួរឱ្យស្ងើចសរសើរនេះ. គឺស្តែងចេញពីការលើកស្ទួយអត្តភាពស្វាមី តម្កល់ខ្ពស់ ស្វាមីទុកជាទីគោរពសក្ការៈដូចតម្លែងក្រឡា និងអាស្រ័យដោយប្រាជ្ញាវៃឆ្លាត។ ទាំងអស់នេះនាំឱ្យគេបានសម្រេចជោគជ័យក្នុងការស្វែងរកសម្បត្តិមហាសាល. និងដោយសារគុណធម៌ជាស្រីគ្រប់លក្ខណ៍ និងការលើកស្ទួយស្វាមីទុកដូចជាម្ចាស់សិរសា ទុករាត្រាដូចទាសី ។

**ច. រឿងគង់ហ៊ាន :** បុរសក្លាហានក្លែងក្លាយ. ដែលមាននិទានក្នុងប្រភេទរឿងព្រេងបុរាណខ្មែរនេះ. ត្រូវបានមហាជនកោតសរសើរដោយផែដៀល. ដោយសារមានជំនួយពីប្រពន្ធទាំងពីររបស់ខ្លួន គឺនាង **អៀវ** និងនាង **គី**. បានព្រួតគ្នាវាយខ្លាសាហាវមួយទាល់តែងាប់. នៅពេលដែល **ប្តីកំសាក**. បានរត់ម្ជុលទៅពួនលាក់ខ្លួនទាំងកាយញ័ររទេទ្រើក. ភ័យរន្ធត់ក្នុងប្រហោងរន្ធលើ. យកសុខតែអាត្មាខ្លួន ។ ដោយហេតុតែ **នារីក្លាហាន** ទាំងពីរ. ចង់ទុកមុខឱ្យប្តី ឈ្មោះ **គង់**. អួតក្អេងក្អាងប្រាប់មហាជនក្នុងតំបន់ថា **មិនដែលមានស្ត្រីគេឯណា ក្លាហាន ហ៊ានវាយខ្លាសាហាវឱ្យស្លាប់នោះ ? មានតែប្រុសៗ ទេ, ទើបអាចប្រយុទ្ធ យកឈ្នះខ្លាបាន !** ។ តាមរយៈ **សច្ចធម៌**. បុរស**គង់** មានឈ្មោះល្បីថាជាអ្នកក្លាហាននេះ. ពិតជាបានមកដោយសាស្ត្រីជាភរិយានោះឯង ។ ដូច្នេះ. តាមក្រឹត្យក្រប

**លោកិយសច្ចៈ**, ទន្ទឹមនឹងបុរសក្លាហាន, ក៏នៅមាន **នារីក្លាហាន** ផងដែរ ។

### ៣- លក្ខណស្ត្រីក្នុងប្រវត្តិសាស្ត្រខ្មែរ

ក- ព្រះនាង **លីវយី** ឬ **សោមា** : នៅក្នុង ស.វ. ទី ១ នៃគ្រិស្ត-សករាជ, ហើយមកក្សត្រីខ្មែរ ព្រះនាមលីវយី ឬ សោមា, ត្រូវបានប្រជារាស្ត្រខ្មែរ លើកតម្កើងឱ្យសោយរាជ្យ ដោយប្រគល់ឧត្តមភាពទៅលើស្ត្រីមួយរូប មានតួនាទីដ៏ខ្ពង់ខ្ពស់, និងប្រគល់អំណាចដឹកនាំប្រទេសជំនួសបុរសៗ ពេញទាំងផែនដី, ដោយសារហេតុប្រជារាស្ត្រកត់សម្គាល់ឃើញនូវមហាគុណសម្បត្តិដ៏ធំធេង ដូចខាងក្រោមនេះ :

- មានគតិបណ្ឌិតខ្ពស់ក្នុងការដឹកនាំរាស្ត្រឱ្យបានសុខចម្រើនរុងរឿង
- តស៊ូ ប៉ិនប្រសប់ ឆ្លាតក្នុងការគ្រប់គ្រងដឹកនាំរាស្ត្រ
- ក្លាហានជំនះក្តីចលាចលពិតប្រាកដ
- ថែរក្សាផលប្រយោជន៍ដល់រាស្ត្រប្រជា ដោយព្រះទ័យអាណិតអាសូរ
- មានវិញ្ញាណអត់ធន់ ប្រកាន់ចិត្តរឹងប៉ឹងនាំតតាំងឆ្លងកាត់គ្រាក្រ
- មានព្រះបរិហារមេត្តាចំពោះរាស្ត្រទូទាំងនគរ ។ល។ និង ។ល។

**ខ- ព្រះនាងជ័យរាជទេវី និង ឥន្ទ្រទេវី :** ក្នុងរជ្ជកាលព្រះបាទ ជ័យវរ្ម័នទី ៧, អ្នកប្រវត្តិសាស្ត្រជាតិ និងអន្តរជាតិ តែងលើកសរសើរថា, នៅក្នុងរាជ្យព្រះអង្គ, ប្រទេសកម្ពុជាបានស្ថិតក្នុងរុងរឿងដ៏ក្រៃលែង, ទាំងសេដ្ឋកិច្ច, យោធា, នយោបាយ, និងសង្គម ។ លទ្ធផលដ៏ត្រចះត្រចង់ និងល្បី

ពួរនឹពេញសកលលោកនេះ, ពិតជាមានចំណែកយ៉ាងសំខាន់របស់ព្រះអគ្គ-មហេសីទាំងពីរព្រះអង្គ, ដែលល្បីល្បាញខាងមានចំណេះប្រាជ្ញាវាងវៃ, មានកម្រិតវិជ្ជាខ្ពង់ខ្ពស់ជា **សកលវិទ្យាធិការិនី**, ជាកវីនិពន្ធខាងឆ្លាក់សិលាចារឹកលើផ្ទាំងថ្មទុកជាស្នាព្រះហស្ត, រហូតសព្វថ្ងៃ ។ ព្រះមហាក្សត្រជ័យវរ្ម័នទី ៧ ជាអ្នកបើកបរនាវា, រីឯព្រះអគ្គមហេសីទាំងទ្វេហ្នា គឺជាអ្នកកាច់ចង្កូតតម្រង់ទិសទៅកាន់ជោគជ័យ ។ ដូច្នេះ, យើងឃើញច្បាស់ណាស់ថា "**ធាតុផ្សំទាំងពីរនេះ ពុំអាចមានមួយណា អត់មួយណាបាននោះឡើយ**" ។

**គ. ជំទាវចៅហ្វាទេវី នារីសោភ័ណស្រែន**[៣៥] : ប្រវត្តិ-សាស្ត្រខ្មែរក្នុងរវាងចុងរជ្ជកាលព្រះបាទស្រីសុរិយោពណ៌ និងដើមរាជ្យព្រះបាទជ័យជេដ្ឋាទី ២, បានស្គាល់នូវសង្គ្រាម បះបោរកើតឡើងដោយ "**ស្ដេចសំរែរាជា**", ក្នុងដែនដីស្រុកកំពង់សែម ក្នុងអំណោយខេត្តកំពង់ធំ តែជោអាសជាស្ដេចត្រាញ់ កាន់ខេត្តកំពង់ធំ, ដែលធ្លាប់តែបង្ក្រាបខុទ្ទាមបានជ័យជម្នះជាច្រើនលើកច្រើនគ្រាមកហើយនោះ, ស្រាប់តែមកជួបនឹងបរាជ័យយ៉ាងជូរចត់នៅចំពោះមុខមេក្លើងឈ្មោះ "**ស្ដេចសំរែ**" ទៅវិញ ។

លោកជំទាវស្រែនជាភរិយាដ៏ឧត្តមរបស់ ឧកញ៉ាតេជោបុរាជ, ឃើញស្វាមីកើតទុក្ខមុខស្រពោន ក៏យល់ចិត្តប្ដីហើយធានាថា, នឹងជួយប្រើល្បិចកល ធ្វើយ៉ាងណាយកជ័យជម្នះលើទ័ពស្ដេចសំរែឱ្យទាល់តែបាន ។ នៅទីបំផុត, អាស្រ័យដោយកលល្បិចប្រាជ្ញាឈ្លាសវៃរបស់លោកជំទាវស្រែន, ស្ដេចសំរែក៏បាន ចាប់ក្នុងអន្ទាក់របស់ភរិយាចៅហ្វាយខេត្តកំពង់ធំនេះវិញ, និងត្រូវ

---

[៣៥] ឯកសារខ្លះ ហៅយ៉ាងខ្លីថា **ជំទាវស្រែន** ។

ទ័ពលោកតែដោយបុរាណជាប់ខ្លួនបាន, ហើយសម្លាប់ចោលទៅ ។ ត្រង់នេះ យើងអាចសន្និដ្ឋានបានថា, ទោះបីស្ត្រីគ្មានកម្លាំងកំហែង សិល្ប៍មន្តវិជ្ជាការ ខ្លាំងក្លាដូចបុរសក៏ពិតមែន, ប៉ុន្តែជួនកាល ប្រាជ្ញា និងល្បិចកលរបស់ភេទទន់ខ្សោយ, នៅតែទទួលលទ្ធផលល្អ ជាងការប្រើទ័ពរាប់ពាន់ និងអាវុធយុទ្ធភ័ណ្ឌដ៏ច្រើនសន្ធឹកសន្ធាប់នោះទៅទៀត ។

## VII. តួនាទីស្ត្រីក្នុងក្របខ័ណ្ឌសកលលោក

ក្រៅពីការសង្កេតសម្គាល់គុណសម្បត្តិ, សមត្ថភាពរបស់ស្ត្រី, ក្នុងគម្ពីរព្រះពុទ្ធសាសនាក្នុងសម័យកាលនានានៃប្រវត្តិសាស្ត្ររបស់កម្ពុជា, ក្រៅពីបានសិក្សាស្វែងយល់តាមរយៈបទអក្សរសិល្ប៍ខ្មែរ ពីសម័យបុរាណរៀងមក, ដែលឆ្លុះបញ្ចាំងពីភេទស្រីគុណធម៌ សីលធម៌ សមត្ថភាព និងប្រាជ្ញាឈ្លាសវៃ ...... យើងខ្ញុំសូមអនុញ្ញាតចូលជ្រៅទៅពិនិត្យមើលស្ថានភាព, ទីតាំង, ឋានៈរបស់ស្ត្រីនៅលើសកលលោកផ្សេង, ដើម្បីបង្ហាញជូនថា, តើស្ត្រីអាចឈានទៅដល់ទីតាំងកម្រិតណា, ទន្ទឹមនឹងបុរសឬទេ ដែលកាន់តួនាទីដឹកនាំដ៏សំខាន់ៗ នោះ ?

**១. នៅប្រទេសឥណ្ឌា** : លោកស្រី **ឥណ្ឌារ៉ាគន្ធី** ជាស្ត្រីដំបូង បានត្រូវតែងតាំងជានាយករដ្ឋមន្ត្រី ក្នុងទសវត្សរ៍ទី ៦០

**២. នៅប្រទេសអង់គ្លេស** : មហាក្សត្រិយានី **អេលីហ្សាបែត** ទី II បានសោយរាជ្យនៅអង់គ្លេសនាពេលបច្ចុប្បន្ន ។ លោកស្រី **ម៉ាហ្គារ៉េត ថាតឆឺរ** ក៏បានទទួលតំណែងជានាយករដ្ឋមន្ត្រីផងដែរ ។

៣. **នៅសហរដ្ឋអាមេរិក** : លោកស្រី **ខុនដូលីហ្សារ៉ៃ** បាន កាន់តំណែងជារដ្ឋមន្ត្រីការបរទេស ក្នុងអាណត្តិលោក ដប់បិលយូប៊ុស ។ ក្រោយមក ក្នុងអាណត្តិលោកប្រធានាធិបតី បារ៉ាក់ អូបាម៉ា អ្នកស្រី **ហ៊ីឡារី គ្លិនតុន** បច្ចុប្បន្នក៏មានតំណែងជារដ្ឋមន្ត្រីក្រសួងការបរទេសដែរ ។

៤. **នៅប្រទេសអាល្លឺម៉ង់** : អធិការបតីបច្ចុប្បន្ននាម **អង់ហ្គីឡាមែគែល** ប្រមុខរដ្ឋាភិបាល ក៏ជាស្ត្រីដែរ .. ។

សរុបមកវិញ, ប្រសិនបើយើងធ្វើការឆ្លុះបញ្ចាំងបកទៅក្រោយ, ដោយពិនិត្យមើលទីតាំង និងស្ថានភាពស្ត្រីនៅគ្រប់កាលៈទេសៈ, តាមរឿងព្រេង, ប្រវត្តិសាស្ត្រ អត្ថបទអក្សរសាស្ត្រជាតិខ្មែរ និងទីតាំងឋានៈនាទីស្ត្រី នៅក្នុងក្របខណ្ឌសកលលោក, ក៏ល្មមឃើញ និងយល់បានថា តើស្ត្រីភេទមានសារៈសំខាន់ខ្លាំងប៉ុណ្ណា មានការចាំបាច់ខ្លាំងប៉ុណ្ណា ក្នុងការដឹកនាំគ្រប់គ្រង និងស្ថាបនាសេដ្ឋកិច្ច និងសង្គមក្នុងប្រទេសនីមួយៗ នោះ ? សព្វថ្ងៃបើយើងបាន មើលឱ្យចំបញ្ហា, យើងក៏ត្រូវតែទទួលស្គាល់ដែរថា, ក្នុងចំណោមមុខតំណែង ឋានៈនាទីនៅក្នុងបណ្ដាមន្ទីរក្រសួង, ស្ថាប័នជាតិ, ពីលើដល់ក្រោមនោះ, ចំនួនស្ត្រីនៅមានតិច បើប្រៀបធៀបទៅនឹងចំនួនបុរស ។ លុះបានមើលឃើញបញ្ហានោះហើយ, យើងតម្រូវស្រាវជ្រាវរកឫសហេតុនៃតម្លាតគ្នា អំពីឋានៈនាទីតំណែងរវាងស្ត្រី និងបុរស, ដែលមានបរិមាណតិច-ច្រើនខុសគ្នានេះ, តើមកពីមូលហេតុអ្វី ? មកដល់ត្រង់ចំណុចនេះ, ខ្ញុំសូមអនុញ្ញាតវិលបកទៅក្រោយវិញបន្តិច ដើម្បីលើកយកមកពិចារណា ដូចតទៅ :

កាលពីសង្គមចាស់ ការអប់រំបណ្ដុះបណ្ដាលកូនប្រុស និងកូនស្រី ឋិត

ក្នុងលក្ខខណ្ឌខុសប្លែកពីគ្នា ។ កូនស្រីបានត្រឹមឆ្លងកាត់ចលនាចូលម្លប់ ដើម្បីប្រែក្លាយខ្លួនឱ្យទៅជាស្រីគ្រប់លក្ខណ៍. តាមការនិយមរបស់សង្គមពីជំនាន់នោះ ។ ឯកូនប្រុសត្រូវទៅទទួលការអប់រំខាងសីលធម៌ ចរិយាធម៌ និងវិជ្ជាជីវៈពីវត្តអារាម, ដូចបានជម្រាបខាងដើមរួចហើយ ។

ចំពោះពេលបច្ចុប្បន្នវិញ ការអប់រំបុត្រធីតាខ្មែរ បានប្រែផ្លាស់ប្លែកពីសង្គមមុន ដោយហេតុថា ទាំងកូនប្រុស ទាំងកូនស្រី សុទ្ធតែត្រូវបានទទួលការបណ្តុះបណ្តាលពីមជ្ឈដ្ឋានតែមួយដូចគ្នា, ពោលគឺ សាលាបណ្តុះបណ្តាលគ្រប់ជាន់ថ្នាក់, ពីបឋមសិក្សាដល់ក្រោយឧត្តមសិក្សា ពុំមានការបែងចែកដូចពីមុនទៀតឡើយ ។ ប៉ុន្តែ ប្រការដែលយើងឆ្ងល់ គឺពិតនៅត្រង់ថា នៅគ្រប់ភូមិសិក្សាទាំងអស់ សិស្សស្រីមានតិចជាងសិស្សប្រុស ។ ប៉ុន្តែ បើពិតតាមសមាមាត្រ ចំនួនប្រជាពលរដ្ឋស្រីមានច្រើនជាង ( ៥៥ % ) ពលរដ្ឋប្រុស នោះវាមិនបញ្ជាក់ឱ្យមានការផ្ទៀងផ្ទាត់ដ៏សមហេតុសមផលមួយ ហើយយើងពិតជាដាក់សំណួរថា **ព្រោះហេតុអ្វី** ? មូលហេតុមានច្រើនដែលខ្ញុំសូមអនុញ្ញាតធាកធ្យុវិភាគ ដូចតទៅ :

១. **ប្រពៃណីជំនឿចាស់បុរាណ** : ពិតមែនតែខ្មែរទាំងអស់បានជ្រួតជ្រាបបានច្បាស់ នូវពីសិទ្ធិក្នុងការទទួលការអប់រំ ត្រូវបានអនុគ្រោះស្មើគ្នាទាំងកុមារា ទាំងកុមារី, ប៉ុន្តែ ឪពុកម្តាយពុំទាន់ហ៊ានបណ្តោយកូនស្រីឱ្យបានសេរីភាពពេញលេញ, ការហាមឃាត់កូនស្រីប្រព្រឹត្តអំពើរំលោភលើក្រឹត្យវិន័យជាស្ត្រីខ្មែរ, ចង់ការពារថែរក្សា **"ព្រហ្មចារី"** ឱ្យនៅគង់វង្សរហូតដល់ថ្ងៃរៀបការ ..... ។ ទាំងនោះ គឺជាមូលហេតុមួយ, ដែលឪពុកម្តាយ មិនសូវហ៊ានបណ្តែតបណ្តោយ

កូនស្រីឱ្យទៅសិក្សាឆ្ងាយពីខ្លួន. ពិសេសកូនមានវ័យ **"គ្រប់ការ"** ។

**២. ជីវភាពក្រីក្រ :** បើយោលទៅតាមសន្ដានចិត្តរបស់ឪពុកម្ដាយគ្រប់រូប. មិនដែលមាន"ពុកម្ដាយណា មិនចង់ឱ្យកូនចេះនោះឡើយ ។ នេះជាកត្តាសត្យានុម័តិ ។ ប៉ុន្តែការសិក្សារបស់សិស្ស. តែងភ្ជាប់លក្ខខណ្ឌជាមួយលទ្ធភាពលុយកាក់ទ្រព្យសម្បត្តិ ។ គ្មានលុយ. មិនអាចទៅរៀនបានជាដាច់ខាត. ព្រោះសិស្សទាំងប្រុសទាំងស្រីត្រូវបង់ថ្លៃក្រដាសមេរៀន ថ្លៃឈ្នួលផ្ញើកង់-ម៉ូតូ. បង់ថ្លៃឈ្នួលបង្រៀនបន្ថែម (Cours) "គួរ" ។ ឋិតនៅចំពោះមុខជីវភាពក្រីក្រ ខ្វះខាត, ប្រសិនបើគ្រួសារណាមានកូនពីរ, គឺប្រុសមួយស្រីមួយ. គេនឹងផ្អាកឱ្យកូនស្រីឈប់រៀន, ទុកតែកូនប្រុសឱ្យបន្តការសិក្សា. ដោយគិតថា. កូនស្រីអាចជួយកិច្ចការផ្ទះបានច្រើនជាងកូនប្រុស. មានការដាំស្លា ដកស្ទូង ច្រូតកាត់ ត្បាញរវៃ ..... ជាដើម ។

**៣. បញ្ហាសុវត្ថិភាព :** បច្ចុប្បន្ននេះបានកើតបញ្ហាចាប់រំលោភ. ដែលមានស្ទើរគ្រប់ទិសទីនៃប្រទេសយើង ។ គឺហេតុដូច្នេះហើយ បានជាឪពុកម្ដាយមានការភ័យបារម្ភ. ខ្លាចកូនរងគ្រោះពីការចាប់រំលោភនេះ, ហើយតែងតែរក្សាទុកកូនស្រីឱ្យនៅជិតៗ ខ្លួន. ដើម្បីថែរក្សាការពារឱ្យបានសុវត្ថិភាព ។ គោលបំណងចង់រក្សាកូនស្រីឱ្យនៅមានភាពបរិសុទ្ធ, ការពារកិត្តិយស, កេរ្តិ៍ឈ្មោះវង្សត្រកូលមិនឱ្យមានមោះមន្ទិលសៅហ្មង ពាក់ព័ន្ធនឹងព្រហ្មចារី ....., ទាំងនេះហើយ ដែលកូនស្រីមិនសូវបានទទួលការអប់រំឱ្យស្មើនឹងកូនប្រុស ហើយវាគឺជាកត្តាមួយដែលឆ្លើយតបទៅនឹងសំណួរ ដែលថា : **"ហេតុអ្វីបានជាសិស្សស្រី មានតិចជាងសិស្សប្រុសនោះ ?"**

**៤. កត្តាសង្គម** : ក្នុងសម័យ "សកលភាវូបនីយកម្ម", មហាប្រទេសជឿនលឿនខាងផ្នែកឧស្សាហកម្ម, សេដ្ឋកិច្ច, នយោបាយ, សង្គមកិច្ច, វប្បធម៌ ..... គេតែងតែឆ្លៀតបង្ករបញ្ចូលឥទ្ធិពលគេមកកាន់ ប្រទេសកំពុងអភិវឌ្ឍន៍, តាមរយៈ វិទ្យាសាស្ត្របច្ចេកទេស, សម្ភារៈ, វប្បធម៌, ទំនៀមទម្លាប់របស់ជាតិគេ ឱ្យវាយលុកចូលមកផ្សព្វផ្សាយក្នុង ប្រទេសកម្ពុជាយើង ។ ប្រពៃណី ទំនៀមទម្លាប់ វប្បធម៌របស់គេ, ចែកចេញជាវប្បធម៌ល្អ, និងវប្បធម៌អវិជ្ជមាន, ដែលប្រភេទវប្បធម៌ទាំងពីរនេះ, បានវាយលុកចូលមកតាមរយៈ ជនជាតិបរទេសខ្លះ, ដែលល្មោភតាមតណ្ហា, ហើយស្ទះស្វែងរកការរួមភេទជាមួយនឹងកុមារ ឬស្ត្រីខ្មែរ, ជាអនីតិជនក្ដី, ជាមីតិជនក្ដី ។ ជួនកាលវប្បធម៌នេះ ជ្រៀតចូលមកតាមរយៈ ខ្សែវីដេអូ, ទូរស័ព្ទបានរូបភាពអាសអាភាស, តាមរយៈពិធីបុណ្យផ្សេងៗ ដូចជា **"បុណ្យសង្សារ"** **"ពិធីកាត់នំ"** ក្នុងភាសាប្រពៃណីខ្មែរ **"បុណ្យណូអែល"** ឬ **"គ្រិស្តស្មាស់"** (Noel, Chrismas), តាមរយៈសម្លៀកបំពាក់ **"ស្លៀកខ្លី, ខោអាវធំ"** ក្នុងពេលកូនក្រមុំកូនកំលោះធ្វើដំណើរកម្សាន្ត និងកត្តាបរិភោគតាមភោជនីយដ្ឋានផ្សេងៗ ។ ពិធីខាងលើទាំងប៉ុន្មាននេះ មិនគ្រាន់តែចូលមកលាយឡំជាមួយនឹងពិធីខ្មែរ ធ្វើឱ្យប្រឡាក់ប្រឡូស រំខានដល់ប្រពៃណីខ្មែរយើងតែប៉ុណ្ណោះទេ ប៉ុន្តែ បានញ៉ាំងឱ្យខ្មែរខ្លះភ្លេចអត្តសញ្ញាណពិធីខ្មែរយើង, ត្រូវតែរក្សាទុកជាទម្លាប់មកក្នុងពិធីខ្មែរទាំងឡាយ, ដើម្បីឱ្យពិធីខ្មែរបានស្រស់ស្អាត, និងបានអត្ថន័យកាន់តែវិសេសវិសាលកើនឡើងថែមទៀត ។

បាតុភូតអវិជ្ជមានទាំងប៉ុន្មានដែលលើកឡើងខាងលើ ច្រើនតែមាន

ផលប៉ះពាល់, ជាពិសេសទៅលើស្ត្រីខ្មែរ, ដែលប្រការនេះ, ធ្វើឱ្យមានការភ័យបារម្ភពីសំណាក់មាតាបិតាខ្មែរ, ហើយកាន់តែមានវិធានការតឹងរ៉ឹង, ប្រយ័ត្នប្រយែងរិតតែខ្លាំងចំពោះកូនស្រី ។ រីឯវិធានការដំបូងរបស់ពួកគាត់គឺ, ទុកកូនស្រីឱ្យនៅក្បែរខ្លួនជានិច្ច ។ និយាយបែបនេះ, មិនមែនមានន័យថា, គ្មានកូនស្រីខ្មែរសិក្សានៅមធ្យមសិក្សា ឧត្តមសិក្សា និងក្រោយឧត្តមសិក្សាសោះនោះឡើយ, ប៉ុន្តែមានក្នុងកម្រិតទាបប៉ុណ្ណោះ[៣៦] ។

**៥. វិធានការ :** ប្រការដែលខ្ញុំជម្រាបជូនទាំងប៉ុន្មាននេះ, ពុំមានន័យថា ទុកបញ្ហាទាំងនេះឱ្យនៅដដែល, ដោយពុំមានវិធីកែប្រែ, ឬសម្របសម្រួលនោះឡើយ ។ តើគេគួរតែធ្វើដូចម្តេច ?

ដើម្បីឆ្លើយតបនឹងសំណួរខាងលើនេះ, ខ្ញុំសូមអនុញ្ញាតជម្រាបជូនអស់លោកអ្នកអាន, ដោយបកវិលទៅក្រោយបន្តិច, ក្នុងអំឡុងទសវត្សទី ៤០, ទី ៥០, និងពាក់កណ្តាលទសវត្សទី ៦០ បានជ្រាបថា, កាលណោះពុំទាន់មានពួតេនិយាយពីយែនឌ័រអ្វីនៅឡើយទេ, ប៉ុន្តែរាជរដ្ឋាភិបាលជំនាន់នោះ បានផ្តល់សេចក្តីទុកចិត្តជឿជាក់ចំពោះមាតាបិតាដែលមានកូនស្រីពេញវ័យក្រមុំ, ហើយត្រូវឡើងទៅសិក្សានៅមធ្យមសិក្សា, ដែលកាលណោះ មាននៅតែរាជធានីភ្នំពេញប៉ុណ្ណោះ ។ រាជរដ្ឋាភិបាលបានយល់ច្បាស់ដល់ជម្រៅចិត្ត និងផ្តត់គំនិតគិតគូរដល់កូនស្រី, ដោយកសាងជាអនុវិទ្យាល័យ ឬវិទ្យាល័យមួយ មាន

---

[៣៦] សិស្សនារីដែលមានវាសនាទាំងនេះ ច្រើនតែជាបុត្រីរបស់មាតាបិតាដែលមានលំនៅឋានក្នុងក្រុង រាជធានី ទីប្រជុំជន ធានីខេត្តនានា ដែលមានសាលាថ្នាក់មធ្យមសិក្សា ឬឧត្តមសិក្សា និង ។ល។ ដែលជាបរិមាណមួយពុំមានសមាមាត្រនឹងសិស្សប្រុសឡើយ ។

លក្ខណៈពិសេស. ដែលមានឈ្មោះថា. **"អនុវិទ្យាល័យនារី"** ដែលតាំងនៅត្រង់ **"មន្ទីរអប់រំរាជធានី"** បច្ចុប្បន្ននេះ ។ ក្រសួងសិក្សាធិការជាតិ. ឬក្រសួងអប់រំ យុវជន និងកីឡា. បានកសាង **"អន្តេវាសិកដ្ឋាន"** មួយនៅក្នុងបរិវេណនៃអនុវិទ្យាល័យនោះ. ដែលទទួលសុទ្ធតែសិស្ស-និស្សិត នារីឱ្យស្នាក់នៅ. ហូបចុក និងសិក្សាក្នុងអនុវិទ្យាល័យ ដែលភ្ជាប់ដោយអន្តេវាសិកដ្ឋាននោះ ។ លោកសាស្ត្រាចារ្យទាំងខ្មែរ ទាំងបរទេស ភាគច្រើនដាច់ខាតគឺជាស្ត្រី ។ ចំពោះអគ្គានុរក្ស. អនុរក្សដែលមានភារកិច្ចគ្រប់គ្រង ត្រួតត្រាការពារសិស្ស-និស្សិតនារីទាំងនោះ ទាំងយប់ទាំងថ្ងៃ រស់នៅកិតថេរជាប្រចាំជាមួយសិស្ស-និស្សិតនារីទាំងនោះ[៣៧]. គឺសុទ្ធតែជាបុគ្គលិកស្ត្រីទាំងអស់ ។ វិន័យរបស់អន្តេវាសិកដ្ឋាននោះ. បានហាមឃាត់មិនឱ្យបុរសចេញចូលទាក់ទងជាមួយសិស្ស និស្សិតនារីបានឡើយ. លើកលែងតែឪពុកម្តាយរបស់សិស្សនិស្សិតប៉ុណ្ណោះ ។ វិធានការនេះតឹងរ៉ឹងណាស់ រហូតដល់ពុំដែលមានការភ្លាំងភ្លាត់ផ្តេះផ្តោះដល់សិស្សនិស្សិតស្ត្រីណាមួយឡើយ ។ ព្រោះហេតុនេះហើយបានជាមាតាបិតាសិស្សនិស្សិតទាំងនោះ. មានការជឿជាក់ទុកចិត្តយ៉ាងខ្លាំងចំពោះរដ្ឋាភិបាល ដែលមានគំនិតផ្តួចផ្តើមកសាងអន្តេវាសិកដ្ឋាន បែបនេះ. ធ្វើឱ្យកូនស្រីខ្មែរមានឱកាស និងបានទទួលការទុកចិត្តពីគ្រប់មាតាបិតាទាំងអស់ ។

---

[៣៧] សូមអនុញ្ញាតជម្រាបថា អតីត សិស្ស និស្សិតនារីទាំងនោះ ខ្ញុំអាចចាំឈ្មោះបានខ្លះៗ ដូចជា៖ លោកស្រី ឈៀវ ប៊ុណ្ណារី. អ្នកគ្រូ សួន អេងស៊ាន ដែលរស់នៅជិតផ្ទះខ្ញុំសព្វថ្ងៃ និងអ្នកគ្រូជាច្រើនទៀត ដែលមានជីវិតរស់នៅរហូតសព្វថ្ងៃ ហើយដែលសុទ្ធតែអាយុចាប់ពី ៧៥ ឆ្នាំឡើងទៅ ។

**៦. ការពារភេទ** : ប្រសិនបើរាជរដ្ឋាភិបាលមានបំណងជួយជំរុញ បញ្ហាយេនឌ័រ ឱ្យជឿនលឿនទៅមុខ, ចង់លើកស្ទួយឱ្យសិស្សនារីមានឱកាស បានរៀនសូត្រដូចសិស្សនិស្សិតប្រុស, ដើម្បីធានាដល់ជំនឿទំនុកចិត្តរបស់មាតា បិតាដែលមានកូនស្រី, ឱ្យលោកហ៊ានបញ្ជូនកូនស្រីឱ្យឃ្លាតពីខ្លួននោះ, រាជរដ្ឋាភិបាល គួរតែ :

**ក. ស្ថាបនា សាលាថ្នាក់ មធ្យម និងឧត្តមសិក្សា**, និង មានឧបសម្ពន្ធ អន្តេវាសិកដ្ឋាន សម្រាប់ទទួលសិស្សនារីឱ្យរស់នៅ ហូបចុក សិក្សាដោយសុវត្ថិភាព, ឆ្លើយតបបានទៅនឹងទំនុកចិត្តរបស់មាតាបិតា, ហើយ ដែលរដ្ឋាភិបាលជាអ្នករ៉ាប់រងការចំណាយគ្រប់បែបយ៉ាង សម្រាប់ទ្រទ្រង់ ស្ថាប័ននេះ ។

**ខ. បង្កើតរបបគ្រប់គ្រង-អប់រំសិស្សនារី** ក្នុងអន្តេវាសិកដ្ឋាន តាមបែបប្រព័ន្ធស្ត្រីគ្រប់គ្រងស្ត្រី ក្រោមវិន័យដ៏តឹងរ៉ឹងម៉ឺងម៉ាត់ ។

**គ. ចាត់តាំងសម័យប្រឡងជ្រើសរើស សិស្ស-និស្សិតពូកែៗ** ឱ្យចូលមកសិក្សា និងរស់នៅក្នុងអន្តេវាសិកដ្ឋាន ជាបន្តតពជាច់រយៈ, ៗ ន័យលើកស្ទួយលេកុខពេក្ខ សិស្សនិស្សិត ស្ត្រីឱ្យបានសន្ទុះថ្មីមួយ, មិនឱ្យចាញ់ និស្សិតប្រុសឆ្ងាយដាច់សង្វែងពេក ។ បើធ្វើដូច្នេះបាន, មន្ត្រីរាជការស្ត្រី ខ្មែរ, អាចនឹងបានដល់ ៥០ % នៃមន្ត្រីរាជការបុរស ។ អ្វីៗ យើងគប្បីមើលធ្ងន់ទៅលើសមត្ថភាព គឺមិនមែនឱ្យទម្ងន់ជាអាទិភាព ភេទណានោះទេ ។

## VIII. សេចក្តីសន្និដ្ឋាន

ប្រសិនបើយើងធ្វើការទិទស្សន៍ឆ្លុះបញ្ចាំង, និងធ្វើការសិក្សាប្រៀបធៀបអំពី ប្រៀបខ្លាំងប្រៀបឈ្នះ, អំពីឧត្តមភាពរបស់ភេទណា ទៅលើភេទណានោះ, យើងឃើញថា, បើយោលទៅតាមកាលៈទេសៈ ទៅតាមសមត្ថភាព ទៅតាមរបបមាតាធិបតេយ្យ, ទៅតាមច្បាប់រដ្ឋបាលគ្រប់គ្រង, ទៅតាមច្បាប់សង្គម, និងតាមប្រពៃណីទំនៀមទម្លាប់ខ្មែរ, ភេទប្រុស និងភេទស្រី តែងតែផ្លាស់វេន គ្នាទទួលខុសត្រូវចំពោះជាតិ ចំពោះសង្គម ចំពោះគ្រួសារ មានលក្ខណៈប្រហាក់ប្រហែលគ្នា មិនមានឱ្យប្រៀបខ្លាំងទៅខាងណាជាងខាងណាឡើយ, ពោលគឺ ភេទទាំងពីរនេះ តែងតែត្រូវការគ្នា, ព្រាស្រ័យគ្នាជាចាំបាច់, មិនអាចខានបួយណាខ្វះមួយណាបានឡើយ ។ ហើយតាំងពីបុរាណកាលរៀងមក, ក្នុងការអភិវឌ្ឍន៍គ្រួសារ, ក៏ដូចជាការអភិវឌ្ឍន៍សង្គម, ភេទទាំងពីរសុទ្ធតែមាន តួនាទីសំខាន់ដូចៗ គ្នា មានសមត្ថភាពដូចៗ គ្នា, ដោយហេតុនេះហើយ, ទើបសព្វសារ ប្រួចបុជាតិ, លោកបង្កើតមនុស្សមក ទោះទាំងនៅលើសកលលោក ក៏ដូចជានៅប្រទេសនីមួយៗ ដែរ, គឺមានបរិមាណភេទប្រុសភេទស្រីប្រហាក់ប្រហែលគ្នា ដើម្បីឱ្យគេក្លាយទៅជាដៃគូ ភេទជាមួយគ្នា ជាគូជីវិតនឹងគ្នា តរៀង ទៅរហូតដល់ទីអវសាន ។

# ជីវិតក្មេងវត្ត និងការលេងជឹង[៣៨]

តើកូនតឹង ឬកូនជឹងនេះ ជានរណា ? តើពាក្យនេះមានន័យយ៉ាងណា ? ហើយតើគេតែងប្រទះឃើញ កូនតឹង ឬកូនជឹងនេះ មាននៅទីណាខ្លះ ? មិនបាច់ឆ្ងល់ឡើយ កូនតឹង ឬកូនជឹងនេះ គឺជាក្មេងប្រុសណាដែលមានរូបស្អាតល្អល្អះ សមរម្យ គួរឱ្យស្រឡាញ់ ហើយដែលត្រូវបានបុរសណាស្រឡាញ់ហួង-ហែងសម្គាល់ទុកថា គូកំណាន់ ជាកម្មសិទ្ធិរបស់ខ្លួន, ដែលពុំអនុញ្ញាតឱ្យជនណាមកឆាបឆក់យកពីដួងចិត្តគេបានឡើយ ។ បើនិយាយឱ្យស្រួលស្ដាប់, ល្បែងកូនជឹងនេះ, គឺជារូបភាពមួយនៃការ "ស្រឡាញ់ភេទដូចគ្នា" ត្រូវនឹងពាក្យបារាំងហៅថា (Monosexuel) ឬថាជាការលេងកូនជឹង (Pédérastie) ។ ការលេងកូនជឹងកើតមាននៅទីណាដែលមានប្រជុំក្មេងជំទង់ៗ ដែលច្រើនតែមានអាយុពី ១២ ឆ្នាំ ទៅ ១៨ ឆ្នាំ ។ ជាធម្មតា អ្នកលេងកូនជឹងតែងតែមានអាយុច្រើនជាងកូនជឹង ។ គេសង្កេតឃើញការលេងកូនជឹងច្រើនប្រព្រឹត្តទៅនៅ :

ក- វត្តអារាម ដែលមានកូនសេកជាច្រើនទៅរៀន និងរស់នៅក្នុងវត្តទាំងយប់ ទាំងថ្ងៃ

ខ- សាលាបឋមសិក្សា ឬមធ្យមសិក្សាដែលមានអន្តេវាសិកដ្ឋានមាន

---

[៣៨] កូនជឹង ឬកូនតឹង ... មិនដឹងថាតំបន់ដទៃៗ ទៀត គេឱ្យឈ្មោះយ៉ាងម៉េចនោះទេ ប៉ុន្តែខ្ញុំលើកយកពាក្យនេះមកប្រើ ដោយនៅស្រុកកំណើតខ្ញុំ គេនិយមពាក្យពីរបែបនេះ ។ នៅក្នុងវចនានុក្រមសម្ដេច ជ.ណាត ពុំឃើញមានពាក្យទាំងពីរនេះទេ ។ នេះប្រហែលជាពាក្យក្នុង "គ្រាម ភាសា" ដែលមានប្រើទៅតាមតំបន់នានាប៉ុណ្ណោះ ។

សិស្សរស់នៅរាប់រយជួបជុំស្នាក់នៅហូបចុករួមគ្នា ។

បុរសដែលលេងកូនជីង តែងតែហួងហែងថែរក្សា ផ្ដល់ផ្គង់សម្លៀកបំពាក់ ចំណីអាហារលុយកាក់ឱ្យកូនជីងរបស់ខ្លួន, ដោយក្ដីអាណិតស្រឡាញ់, មានកាយវិការមិនខុសគ្នា ពីគូសង្សារប្រុស, ធ្វើចំពោះគូសង្សារស្រីរបស់ខ្លួនប៉ុន្មានឡើយ ។ ពេលយប់គេដេកជាមួយគ្នា ថ្នាក់ថ្នមបពោសអង្អែល ឱបក្រសោបដោយក្ដីស្រឡាញ់ពេញចិត្ត ។ ស្ទើរធ្វើដំណើរទៅណាមកណា, ក៏បណ្ដើរគ្នាព្រួសរ, មានខ្ទបកង់, ជិះរ៉ឺម៉កជាដើម ។ ខ្ញុំសូមអនុញ្ញាតជម្រាបអំពីព្រឹត្តិការណ៍សោកនាដកម្មមួយ, ដែលកើតឡើងពីការលេងកូនជីងនេះ ដែលប្រព្រឹត្តទៅនៅវត្តនាស្រុកកំណើតខ្ញុំ (វត្តព្រះធាតុ) ។ ប្រការការគួរឱ្យចាប់អារម្មណ៍នោះគឺ, អ្នកលេងកូនជីងនោះជាព្រះសង្ឃ, ដែលខ្ញុំពុំអាចសន្និដ្ឋានបានថាតើប្រការនេះអាចប៉ះពាល់ដល់ពុទ្ធវិន័យក្នុងកម្រិតណានោះឡើយ ។ មានយប់មួយនោះ ប្រហែលជាម៉ោង ១១ ជិតអធ្រាត, ក៏ស្រាប់តែឮសូរមាត់ស្រែកឆោឡោពេញវត្ត ។ ភ្លាមនោះ, មនុស្សក្នុងវត្ត, ទាំងព្រះសង្ឃ, ទាំងក្មេងវត្ត, បានរត់ឈ្ងួរឆទៅកុដិមួយនៅខាងលិចព្រះវិហារ, ព្រោះឮសូរសម្រែកចេញមកពីទីនោះ ។ ក្រោយមក, គេរាល់គ្នាក៏បានដឹងថា, មានព្រះសង្ឃមួយអង្គ នាម (..... [១១៩]) ត្រូវគេកាប់ត្រូវមួយពូថៅយ៉ាងដំណំ, ត្រង់ "ក្ដោងច្រមុះ", ធ្វើឱ្យលោកស្រែកយ៉ាងខ្លាំង ហៅឱ្យគេជួយ, ដោយឈឺចាប់នឹងមុខរបួស ស្ទើរដាច់ក្ដោងច្រមុះ ។ លោកបានប្ដូរប្រឡាក់ខ្លួនប្រាណលោក នឹងជិតដាមដល់ស្បង់ចីពរទៀតផង ។ វិធានការជាដំបូងរបស់ព្រះគ្រូចៅអធិការ, គឺគោះគង

---

[១១៩] ខ្ញុំសូមអនុញ្ញាតមិនបញ្ចេញឈ្មោះ ជនរងគ្រោះ ព្រោះតាមចំណាំតិតាត់កំពុងរស់នៅសព្វថ្ងៃ ។

ទូងស្គរផ្តល់ដំណើងដល់ពុទ្ធបរិស័ទនៅក្បែរខាងវត្ត, ឱ្យចូលមកជួយយកអាសារព្រះសង្ឃដែលត្រូវរបួស ។ គេនាំគ្នាយករទេះមកដឹកព្រះសង្ឃត្រូវរបួសយកទៅពេទ្យប្រចាំសាលាស្រុក, រួចដោយមុខរបួសមានអាការធ្ងន់ធ្ងរ ក៏បញ្ជូនបង្ហូសទៅពេទ្យខេត្តតែម្តងទៅ ។ វិធានការទីពីរ របស់ព្រះគ្រូចៅអធិការ, គឺវាយអាគាំងប្រមូលព្រះសង្ឃទាំងភិក្ខុ, ទាំងសាមណេរ, ទាំងក្មេងវត្តតូចធំ, ដើម្បីពិនិត្យមើលតើមានបាត់ជនណាឬទេ ? ហើយតាមរបៀបនេះ, គេនឹងអាចរកមុខរកជនដែលយើញជាមិនខាន ។ ក្រោយពីបានមកជួបជុំគ្នាអស់ហើយ, គេក៏បានដឹងថា, មានអ្នកបាត់ខ្លួនម្នាក់ឈ្មោះ (.....) ក្នុងភេទជាព្រះសង្ឃផងដែរ ។ ដោយនាមរបស់ជនបាត់ខ្លួន (អវត្តមាន) នោះ មានឈ្មោះដូចគ្នានឹងបងថ្លៃខ្ញុំដែរ, គេក៏ផ្តោតការសង្ស័យមកលើគាត់ ។ ប៉ុន្តែ ក្រោយពីបានធ្វើការស៊ើបអង្កេតច្បាស់លាស់រួចមក ទើបគេអាចសន្និដ្ឋានបានថា គឺឈ្មោះ (.....) នោះទេ ដែលជាឧក្រិដ្ឋជនពិតប្រាកដ, ព្រោះបានរត់គេចខ្លួនចោលវត្ត បាត់ក្នុងរយៈពេលច្រើនថ្ងៃកន្លងមក ។ ឯបងថ្លៃខ្ញុំក៏បានរួចខ្លួនពីការសង្ស័យផងដែរ ។ ខ្ញុំសូមអនុញ្ញាតជម្រាបបញ្ជាក់ថា, ទាំងកូនជឹង, ទាំងគូប្រជែងដណ្តើមកូនជឹងគ្នានេះ, សុទ្ធតែមានទីលំនៅក្នុងភូមិចំណោះជើងវត្តព្រះធាតុនេះផងដែរ ។ តែប្រការគួរឱ្យចាប់អារម្មណ៍នោះគឺ, ទាំងជនរងគ្រោះ, ទាំងគូប្រជែងដណ្តើមកូនជឹង ទាំងបងថ្លៃខ្ញុំ សុទ្ធតែជាព្រះសង្ឃទាំងអស់ ។ លើកលែងតែតួអង្គកូនជឹងទេដែលជាក្មេងវត្ត, អាយុប្រហែល ១៥ ឬ ១៦ ឆ្នាំ ។ ជាលទ្ធផល, អ្នកប្រហារគេដោយពូថៅ ថ្ងៃក្រោយមកត្រូវចាប់ដាក់ពន្ធនាគារអស់ ២ ឆ្នាំ ។ រីឯជនរងគ្រោះត្រូវបន្សល់ទុកស្លាកស្នាមអនុស្សាវរីយ៍ត្រង់

ក្តោងច្រមុះ (ស្មាមកំពិត) ឱ្យកូនចៅមើល និងរងក្តីអាម៉ាស់ចំពោះមហាជន អ្នកស្រុកនៅតំបន់នេះ, ព្រោះដោយសារជម្លោះដណ្តើមកូនជីងគ្នា, ទាំងខ្លួនឋិត ក្នុងភេទជាព្រះសង្ឃ, ហើយនាំគ្នាបង្កើតរឿងសោកនាដកម្មដ៏គំរក់បែបនេះ, នាំឱ្យប៉ះពាល់ដល់កេរ្តិ៍ឈ្មោះមិនល្អដល់វត្ត ដែលខ្លួនបានសាងផ្នួសសន្សំបុណ្យ កុសល ។

ទាំងនេះគឺជាប្រវត្តិដ៏កម្សត់ខ្លះ, ជូរចត់ខ្លះ, រីករាយខ្លះ, សោកនាដ-កម្មខ្លះ, ដែលបន្សល់ទុកដោយអនុស្សាវរីយ៍ នៅក្នុងមជ្ឈមណ្ឌលអប់រំរបស់ សង្គមខ្មែរ, គឺវត្តអារាម ។

ខ្ញុំសង្ឃឹមថា, អនុស្សាវរីយ៍ជីវិតក្មេងវត្តក្នុងសង្គមខ្មែរ ពិតជាបានឆ្លុះ បញ្ចាំងជូនអស់លោកនូវព្រឹត្តិការណ៍អតីតកាល ផ្តល់ឱកាសជូនអស់លោកជ្រាប និងយល់ដឹងបន្ថែមទៀតនូវអាថ៌កំបាំងខ្លះៗ ដែលគួរតែសិក្សាស្វែងយល់អំពី សង្គមខ្មែរពីអតីតកាល ។

**សន្និដ្ឋាន** : បើល្បែងកូនជីងនេះប្រព្រឹត្តទៅដោយសុខសន្តិភាព ពុំ មានគូប្រជែង, ពុំមានទំនាស់ជម្លោះកើតឡើងទេនោះ វាគឺជារឿងធម្មតា ។ ប៉ុន្តែ ដូចគេធ្លាប់និយាយថា, ល្បែងស្នេហា, កាលណាមានអ្នកលេងឡើងដល់ ទៅបី ឬបួននាក់នោះ, ពិតជាមានទឹកភ្នែក ឬឈាមហូរខ្លះៗ ជាមិនខាន ។ ប៉ុន្តែអ្វីដែលរអាក្រក់មើលខ្លាំងមែនទែននោះ, គឺអ្នកលេងកូនជីងជាភេទអ្នក បួស, ហើយបន្ថែមពីលើនេះទៀត, គឺមានការប្រទូស្តរ៉ាយគ្នាយ៉ាងស្រួចស្រាវ រវាងព្រះសង្ឃនឹងព្រះសង្ឃ, រហូតដល់ប្រព្រឹត្តអំពើឧក្រិដ្ឋកម្ម បង្ហូរឈាមគ្នា យ៉ាងសាហាវ, ភ្លេចគិតដល់ពុទ្ធវិន័យ, ភ្លេចគិតដល់កិត្តិយសខ្លួនឯង និងគ្រួសារ

កិត្តិយសព្រះគ្រូចៅអធិការ, កិត្តិយសវត្តអារាម ពិសេស ឥទ្ធិពលព្រះពុទ្ធ-សាសនា ។ គំរូដ៏លាមកស្មោកគ្រោកបែបនេះ ពុទ្ធសាសនិកជនទាំងឡាយ កុំគប្បីយកតម្រាប់តាមឱ្យសោះ ។ ទោះបីនៅពេលបច្ចុប្បន្ន ក៏ព្រះសង្ឃខ្លះនៅតែប្រព្រឹត្តអំពើខុសឆ្គង មានការបំពានវិន័យពីបទ បរាជិក ដោយលួចលាក់រួមភេទជាមួយស្ត្រី, លួចថតរូបស្ត្រីដោះអាវឱ្យលោកស្រោចទឹក ហើយថតដាក់ទូរស័ព្ទលក់រូបភាពអាសអាភាសនេះ ។ ព្រះសង្ឃខ្លះកេងប្រវ័ញ្ចទ្រព្យគរុភណ្ឌយកមកធ្វើជាសម្បត្តិផ្ទាល់ខ្លួន ដោយក្តីលោភលន់ឥតគិតពីអំពើខុសឆ្គងរបស់ខ្លួនក្នុងភេទជាសង្ឃ ។ ពិតមែនតែមានការខុសឆ្គង ទាំងនេះត្រូវគេចាត់ថាជារឿងបុគ្គលក៏ដោយក៏វាមែងជះ ឥទ្ធិពលសៅហ្មងមកលើព្រះពុទ្ធសាសនាដោយពុំអាចប្រកែកបាន ។

# អំពីការក្រៀវគោ

គោមានជីវិតផ្សារភ្ជាប់ជាមួយសង្គមខ្មែរ អស់កាលជាច្រើនម៉ឺនឆ្នាំមកហើយ, នេះបើតាមការសន្និដ្ឋានរបស់អ្នកបុរាណវត្ថុវិទ្យា ។ មុនចូលមករស់នៅជាមួយនឹងសហគមន៍មនុស្សខ្មែរ, គោរស់នៅឯករាជក្នុងព្រៃជាហ្វូង, រាប់សែនពាន់ក្បាល ។ ប៉ុន្តែ លុះពេលជាខាងក្រោយមក, អាស្រ័យដោយជីវភាពសង្គមមនុស្សមានការអភិវឌ្ឍរីកចម្រើន, និងដោយសេចក្តីត្រូវការរបស់មនុស្ស ដើម្បីពង្រីកផលរបររបស់ខ្លួន ឱ្យផលិតកម្មកសិកម្មមានសន្ទុះកាន់តែខ្លាំងក្លា, អាចឆ្លើយតបទៅនឹងការប្រើប្រាស់ហូបចុកបានគ្រប់គ្រាន់, និងលើសពីសេចក្តីត្រូវការនោះ, មនុស្សត្រូវការជាចាំបាច់ នូវជំនួយខាងកម្លាំងអូសទាញ, សម្រាប់របរកសិកម្ម ។ គឺនៅពេលនោះហើយ, ដែលមនុស្សនាំគ្នាស្ទុះតែរួសរកទាក់ចាប់គោព្រៃ, ក្របីព្រៃ, មកផ្សាំងចិញ្ចឹមទុកប្រើប្រាស់ក្នុងគ្រួសារ, ក្លាយទៅជាសត្វពាហនៈ ។ នេះហើយគឺជាប្រវត្តិនៃវត្តមានរបស់សត្វគោ នៅក្នុងសង្គមមនុស្ស, ពិសេសមនុស្សខ្មែរ ។ ការចិញ្ចឹមគោ គឺរួមមានទាំងគោញី, គោឈ្មោល, ដែលធ្វើឱ្យពូជគោចេះតែកើតកើនច្រើនឡើងៗ នៅក្នុងគ្រួសារមនុស្ស ។

**១. អំពីគោឈ :** សូមជម្រាបថា គោឈ្មោលមួយចំនួនតូច, ដែលត្រូវទុកធ្វើ "**ឈ**" នោះ, គេមិនក្រៀវទេ ។ ព្រោះអ្វី ? ព្រោះគោបា ត្រូវរក្សាកាមពលខ្លាំងក្លាក្នុងការបង្កាត់ពូជ ។ គោបាល្អត្រូវមានមាឌធំ, មានកម្លាំងខ្លាំងក្លា, និងមានកាយសម្បទាល្អ អាចបន្តកូនពូជជាទៅបានទៅតាមសេចក្តី

ត្រូវការក្នុងរបរកសិកម្ម ។

**២. អំពីគោរកម្រៀវ** : តើអ្វីទៅជាគោកម្រៀវនោះ ?

ក- គោកម្រៀវគឺជាគោសម្រាប់ចិញ្ចឹមយកសាច់, ដោយសារវាធំធាត់ទ្រលុកទ្រលន់

ខ- គោកម្រៀវ គឺជាគោចិញ្ចឹមសម្រាប់ទុកធ្វើជាកម្លាំងអូសទាញ, ប្រើការក្នុងកិច្ចការកសិកម្ម, គឺប្រើប្រាស់ឱ្យអូសនង្គ័ល, អូសរទេះ, អូសរនាស់, ទៅរដូវកាលដែលមនុស្សត្រូវការប្រើប្រាស់ជាចាំបាច់ ។ នៅតាមជនបទស្រែចម្ការ, គ្រួសារខ្មែរនីមួយៗ, ធ្លាប់ចិញ្ចឹមគោឈ្មោលមួយនឹមសម្រាប់ភ្ជួររាស់, អូសរទេះ, និងចិញ្ចឹមគោញីពីរក្បាល ឬច្រើនលើសពីនេះ, អាស្រ័យដោយគ្រួសារមានអ្នកជំនួយសម្រាប់ឃ្វាល និងថែរបំប៉នឱ្យធំធាត់ ។

**៣. អាយុគោសមល្មមក្រៀវ** : កសិករបានកំណត់ទុកជាស្រេចថា, គោអោត្រូវក្រៀវ, គោអោត្រូវទុកធ្វើបា ។ ក្រៀវគោដែលនៅមានវ័យក្មេងពេក, គឺធ្វើឱ្យគោបាក់កម្លាំងខូចសុខភាព, រហូតដល់មិនអាចប្រើការបាន ។ ដូច្នេះ, ទាល់តែគោអាយុបានពីរខួប ឬគោមួយបួននោះ, ទើបចូលដល់វ័យអាចក្រៀវបាន ។ នៅអាយុប៉ុណ្ណេះ, វាអាចបន្តពូជបានខ្លះៗ ហើយ ។

**៤. របៀបក្រៀវគោ** : ដើម្បីក្រៀវគោ ម្ចាស់គោត្រូវត្រៀមវត្ថុមួយចំនួនដូចជា :

ក- មើបរមៀតបុកឱ្យម៉ដ្ឋ, រួចលាយនឹងស្រា, ឱ្យគ្រាន់តែសើមល្មម

ខ- អន្លូងចុនមធ្យមមួយទុកសម្រាប់ដំលើពន្លាកឈើ

គ- ពន្លាកឈើ, ឬឈើសំប៉ែត មានមុខទាល

ឃ- ក្រណាត់ក្រមាចាស់ៗ, ដែលគេចោលលែងប្រើ, ទុកសម្រាប់រុំសណ្ដង់ពងស្វាស

ង- ខ្សែពួរពីរចង្វាយ សម្រាប់ទាញផ្ដួលគោ, និងទាក់កគោ

ច- ត្រូវមានអ្នកជំនួយចំនួន ៤ នាក់ រួមទាំងអ្នកចេះក្រៀវផង ជាធម្មតា, តាមជំនឿពីបុរេបុរាណរៀងមក, គេត្រូវរកគ្រូហោរ គន់គូររកថ្ងៃពេលាដែលល្អ[៤០], ដើម្បីក្រៀវគោឱ្យមានសិរីសួស្ដី ព្រមទាំងញុំាងការក្រៀវគោនេះ បានជោគជ័យ, ពុំមានគ្រោះថ្នាក់ និងឱ្យគោបាក់កម្រៀវល្អ ។

ម្ចាស់គោគោរពតាមការទស្សន៍ទាយរបស់គ្រូហោរ, ទាំងថ្ងៃដែលត្រូវក្រៀវ, និងទាំងម៉ោងដែលមើលទៅឃើញថាល្អឥតទាស់ ។ ជាដំបូងម្ចាស់គោត្រូវយកពួរទៅទាក់កគោ, ចងភ្ជាប់នឹងគល់ឈើមួយយ៉ាងមាំ ។ មនុស្សពីរនាក់រុញត្រង់ស្មាគោទៅខាងស្ដាំឱ្យខ្លាំង, ឯមនុស្សម្នាក់ឬពីរនាក់ ទាញកន្ទុយគោនិង ច្រានគូទគោទៅខាងឆ្វេង ។ ធ្វើយ៉ាងនេះគោស្មាវនឹងដួលដល់ដីពិតៗ ។ កាលណាគោដេកផ្ងៀងទៅលើដីហើយ, គេប្រញាប់យកខ្សែមកចងរឹតជើងមុខនិងជើងក្រោយទាំងពីរ, ដើម្បីការពារកុំឱ្យវារើបម្រះរួច, ឬធាក់ត្រូវអ្នកក្រៀវ ។ ដើម្បីឱ្យស្រួលក្រៀវ, គេទាញជើងក្រោយឱ្យរួបទៅភ្ជាប់នឹងជើងមុខ ។ ធ្វើយ៉ាងនេះ, ពងស្វាសគោនឹងលេចចេញពីចន្លោះគល់ភ្លៅក្រោយមកនៅខាងក្រៅ ។ អ្នកក្រៀវយកក្រណាត់មកចងរុំព័ទ្ធត្រង់សណ្ដង់ពងឱ្យណែន, ហើយទាញបោកពងស្វាសគោទៅកល់លើផ្ទៃចបផ្ងៀង ដើម្បីទំរជំឱ្យបានស្រួល ។

---

[៤០] កសិករជាទូទៅ ច្រើនក្រៀវគោនៅរដូវវិហើយ ព្រោះសៅកៅក៏សម្បូរ ហើយរាល់ការងារកសិកម្មត្រូវបានសម្រាក ទាំងមនុស្ស ទាំងសត្វ ។

កាលណាអ្វីៗ បានត្រៀមរៀបចំបានត្រឹមត្រូវទៅតាមទម្លាប់ហើយ នោះ, មនុស្សជំនួយពីរនាក់ត្រូវទទួលភារៈ សង្កត់គោទាំងខ្លួនទាំងក្បាលឱ្យជាប់ ដើម្បីកុំឱ្យវារើបម្រះ, ឬស្ទុះក្រោកឈរបាន ។ ឯម្ចាស់គោនៅជួយចាប់ពងស្វាសគោ, បង្វិលប្រែប្រួល ដើម្បីឱ្យអ្នកក្រៀវដំឱ្យបានស្មើ ត្រូវសព្វសរសៃសណ្ដង់ពង ។ ពេលនោះ, គ្រូក្រៀវគោចាប់ពងផ្ដងដាក់លើផ្ទៃចបផ្ទៀង, រួចយកចុងពន្លាកឈើ, ដំទៅលើក្រណាត់ដែលរុំគល់ពង ។ មុនដំបូងគេដំតិចៗ ល្មមដើម្បីផ្សាំគោកុំឱ្យឈឺខ្លាំងពេក, ដែលអាចធ្វើឱ្យស្ទុះ រើបម្រះ រត់លែងឱ្យក្រៀវ ។ អ្នកក្រៀវចេះតែដំព្នូរប៉ូកៗ, បង្កើនទម្ងន់អន្លូងបន្តិចម្ដងៗ ។ ឯម្ចាស់គោក៏ចេះតែប្រែសណ្ដង់ពងស្វាសគោ, បំបែរមករកចុងពន្លាកឈើ, លៃយ៉ាងណាឱ្យត្រូវសព្វជុំវិញទងសណ្ដង់ពង ។ នៅពេលណាដែលអ្នកក្រៀវបង្កើនទម្ងន់អន្លូងនោះ, គោឈឺខ្លាំង, វាញោចខ្លួនម្ដងៗ ស្ទើរតែហើរពីដី, ហើយស្រែករោទ៍ឮ "រ៉ិកៗ" ដោយការឈឺចាប់ ។ ម្ចាស់គោខំលួងលោមគោ ដោយស្រែកថា "អត់! អត់!" អ្នកក្រៀវចេះតែបន្តដំជុំវិញទងសណ្ដង់ពងគោ, ដរាបទាល់តែសរសៃត្រង់ម្ដុំនេះបែករាយស្មើល្អ, ក៏ផ្អាកឈប់ដំ ។ ម្ចាស់គោយកពន្លៃត្រាំស្រា មកហុចឱ្យអ្នកក្រៀវ ដែលស្រាយក្រណាត់រុំជុំវិញសណ្ដង់ពងនោះចេញ, រួចក៏លាបស្រឡាបជុំវិញត្រង់កន្លែងដំឱ្យទាល់តែសព្វ ។ ការក្រៀវគោបានដល់ទីបញ្ចប់ហើយ ។ នៅពេលនេះ ទាំងអ្នកក្រៀវ, ទាំងម្ចាស់គោ, ទាំងអ្នកជំនួយ, នាំគ្នាស្រាយខ្សែចេញពីជើងគោ, ហើយក៏នាំគ្នាដកឃ្នាឱ្យឆ្ងាយពី

ងក្រពុលមុខនឹងការឈឺចាប់, ដោយត្រូវគេដំពងយ៉ាងដំណំ ។ ការ

រយៈពេលប្រមាណជាមួយម៉ោង ។ ម្ចាស់គោតែងតែមានស្រា

មួយកំប៉ុក, និងគ្រឿងក្លែមមួយចានជាកិច្ចស្វាគមន៍អ្នកជួយ, និងគ្រូក្រៀវគោ។ ជីវភាពនៅជនបទស្រែចម្ការ តែងតែមានសាមគ្គីគ្នាយ៉ាងល្អកល្អើនយ៉ាងនេះឯង ។

ការងារផ្សេងៗ សព្វសារពើ, មិនមែនតែការក្រៀវគោទេ, ទោះកិច្ចធុរៈធ្ងន់ស្រាលយ៉ាងណាក្តី ក៏បងប្អូនកសិករយើងស្រុះស្រួលជួយយកអាសាគ្នាទៅវិញទៅមកជាដរាប, ម្ល៉ោះហើយ, បរិយាកាសនៃសាមគ្គីធម៌, ចេះតែស្រស់ស្រាយ, ចេះតែប្រព្រឹត្តទៅយ៉ាងរលូនឥតមានអ្វីជាអសកម្មសោះឡើយ ។

**៥- ការថែរក្សាគោ** : ពីរបីថ្ងៃក្រោយ[៤១] មកគោដែលគេក្រៀវ ជំពង, ច្រើនតែសំកុកស្ងួលព្រឺរោម, ព្រឺស្បែក, ដោយរលាកគ្រាប់ត្រង់គល់ សណ្តែងពង ។ វាស៊ីស្មៅ ផឹកទឹកផងដែរ, ប៉ុន្តែស៊ីតិចៗ ហើយដេកសម្រាក ច្រើនជាងឈរ ។

ក្នុងអំឡុងពេលក្រោយពីក្រៀវរួចហើយនេះ, ម្ចាស់គោត្រូវរវៀសរវៃមើលថែរក្សាគោឱ្យបានជិតដល់គឺ :

ក- ផ្តត់ផ្តង់ស្មៅខ្ចីល្អៗ យកមកបំបែនកម្លាំងគោ, ព្រោះគោអាចស្គមស្រកសាច់ អាស្រ័យដោយបកពីការឈឺចាប់ត្រង់ត្មាមសណ្តែងពង ។

[៤១] មានរបៀបក្រៀវគោពីរយ៉ាងគឺ : ក្រៀវជំ និងក្រៀវវះ ។ កសិករខ្មែរយើងកម្រប្រើងក្រៀវវះណាស់ ព្រោះខ្លាចរបួសស្នាមវះហើយតែងចេញខ្ទុះ រួចជាជំរាបដង្កូវជ្រែក ហើយមិនជានាំឱ្យងាប់គោ ។ មានតែបសុពេទ្យប៉ុណ្ណោះដែលក្រៀវគោដោយវះយកគ្រាប់ពងចេញ ។ ប៉ុន្តែឥឡូវនេះ មានរបៀបក្រៀវគោ ម្យ៉ាងទៀត ងាយស្រួលមិនមានការឈឺចាប់ច្រើន ។ សព្វថ្ងៃកសិករនៅជនបទនៅតែបន្តក្រៀវ. ជំ. ជាដរាប ។

ខ- ឧស្សាហ៍មើលក្រែងមានរលាក, របួសត្រង់កន្លែងដំ, ដែលអាច ក្លាយទៅជាដំបៅដង្កូវជ្រោះ នាំឱ្យកើតមានបញ្ហាធ្ងន់ធ្ងរ, និងត្រូវរកថ្នាំលាបឱ្យ សះរបួសឱ្យបានឆាប់ ។

គ- ត្រូវចងគោក្រៀវឱ្យនៅដាច់ឆ្ងាយពីគោឯទៀត, ការពារកុំឱ្យគេ ជល់ ឬរំខានវា

ឃ- លាងទឹកដុសសម្អាតខ្លួនប្រាណវា, យ៉ាងហោច មួយថ្ងៃម្តង

**៦. គោបាក់កម្រៀវ :** ក្រោយពីពេលក្រៀវរវាង ១ ខែ ឬ ២ ខែ, ម្ចាស់គោត្រូវសង្កេតតាមដានមើលគោ, ដើម្បីឱ្យដឹងថា តើគោដែលត្រូវ ក្រៀវនេះ **"បាក់កម្រៀវឬទេ ?"** ក្នុងរយៈពេលនេះ គេអាចកត់សម្គាល់ មើលការវិវឌ្ឍន៍របស់គោ :

- តើវាឡើងសាច់ធាត់ធំដូចដើមវិញឬនៅ ?

- តើពងស្វាសវារួញឬទេ ? បើពងវារួញស្វិតទៅតូច, នោះជាសញ្ញា ប្រាប់ឱ្យដឹងថា គោនេះនឹងឈានទៅបាក់កម្រៀវជាស្ថាពរនៅ ៤ ខែ ឬ ៥ ខែខាងមុខ

- នៅរដូវច្រូតកាត់រួចស្រេចអស់ហើយនេះ, គឺជារដូវដែលគោញីគោ ឈ្មោលដោយគ្នា ពោលគឺរដូវបន្តពូជ ។ ម្ចាស់គោត្រូវសម្គាល់គោរបស់ខ្លួន ថា តើវាដេញពាក់ញីដូចពេលមុខក្រៀវឬទេ ? បើវាមិនដេញញីពពាក់ពពូនរក ពាក់ញីទេនោះ, គឺជាសញ្ញាប្រាប់ឱ្យម្ចាស់ដឹងថា, គោនោះបាក់កម្រៀវហើយ ។

ម្តាល់ម្យ៉ាងទៀតនោះគឺ, គួចគោធាត់ឡើងត្រម៉ាក គួចវាលែងទយ លេពីមុនក្រៀវនោះទៀតហើយ ។

**៧. សន្និដ្ឋាន :** គោបាក់តម្រៀវមានរូបរាងកាយវាវិវឌ្ឍន៍. គឺធំ-ខ្ពស់-ធាត់ រាងសក្តិសមគួរគយគន់ ។ វាលែងរវល់នឹងការរត់ស្វែងរកញីទៀតឡើយ ។ ម្ចាស់អាចពេញចិត្តនឹងគោរបស់ខ្លួន ដែលស្លូតបូត. ស្រួលទឹម. មិនកាច. មិនជល់ម្ចាស់. ហើយមានកំលាំងអត់ធន់ក្នុងការងារ អូសនង្គ័ល. អូសរនាស់ និងអូសរទេះ ។ វាតែងតែមានអាយុយឺនយូរជាងគោបា ។

# រូបបន្លាច (Figurine)

រូបបន្លាចនេះ, ជាទូទៅច្រើនតែឃើញនៅតាមភូមិនានា នៃជនបទស្រែចម្ការ ។ តើគេធ្វើរូបបន្លាចនេះដើម្បីអ្វី ? នៅក្នុងកាលៈទេសៈណា ? មានទ្រង់ទ្រាយដូចម្ដេច ?

តទៅនេះ សូមអស់លោកស្វែងយល់ពីរូបបន្លាចនេះជាមួយខ្ញុំ ។

តាំងពីអតីតកាល, គ្រាដែលស្រុកយើងមិនសូវបានជ្រួតជ្រាបអំពីក្បួនវេជ្ជសាស្ត្រ, វិទ្យាសាស្ត្រទំនើបនោះ, តែកាលណាមានជំងឺរាតត្បាតជាទ្រង់-ទ្រាយធំ ដូចយ៉ាងប៉េស្ត (ពិស), អុតធំ, អាសន្នរោគ, ដែលធ្វើឱ្យមនុស្សម្នាក្នុងបណ្ដាភូមិនានា ស្លាប់រង្គាលអស់ជាច្រើន ។ ទោះបីមានគ្រូឱសថបុរាណជួយធ្វើអន្តរាគមយ៉ាងណាក្ដី, ក៏រមែងបានទទួលលទ្ធផលស្ដួចស្ដើងណាស់ ។ នៅពេលនោះ, អ្នកស្រុកអ្នកភូមិភ័យតក់ស្លុត, ព្រោះខ្លាចសេចក្ដីស្លាប់មកឆក់យកជីវិតខ្លួន និងសមាជិកក្រុមគ្រួសារខ្លួន ។ ក្នុងភូមិនីមួយៗ មានមនុស្សស្លាប់ពី ២ ទៅ ៥ នាក់ ជាបន្តបន្ទាប់ ។ អ្នកជួយយកអាសារ, សែងខ្មោចយកទៅកប់នៅព្រៃស្មសាន្ត, មានការហត់នឿយយ៉ាងខ្លាំង, ព្រោះគ្រាន់តែត្រឡប់មកពីព្រៃវិញ, ក៏មានមនុស្សស្លាប់ជាបន្តបន្ទាប់, ត្រូវជញ្ជូនយកទៅព្រៃទៀត ។ អ្នកកប់ខ្មោច បានផឹកស្រាឱ្យស្រវឹងដើម្បីទប់ទល់កុំឱ្យមានការតក់ស្លុត, និងឱ្យស៊ាំនឹងការប៉ះពាល់សពផង ។

គឺនៅពេលដែលស្រុកទេស ឋិតក្នុងភាពកលិយុគវឹកវរដូច្នេះហើយ, ដែលប្រជានិករនាំគ្នាភិតភ័យខំស្វះស្វែងរកវត្ថុជាទីពឹង ។ ក្រៅពីធ្វើពិធីបន់ស្រន់

ខ្មោចអារក្ស, បញ្ជាន់អ្នកតា សុំសេចក្ដីសុខ, សុំកិច្ចការពារ, ក៏នៅមានវិធីមួយ, គឺការធ្វើរូបបន្លាច ។ អស់លោកជ្រាបទេថា, គេយកអ្វីខ្លះមកធ្វើរូបបន្លាច ? ។ ហើយរូបបន្លាចត្រូវមានសណ្ឋានទ្រង់ទ្រាយយ៉ាងណា ? និងមានខ្លឹមសារពិតរបស់វាយ៉ាងណា ?

រូបបន្លាចដែលធ្លាប់បានឃើញនៅតាមនិគមជនបទនានា, នៅពេលស្រុកកើតជំងឺរាតត្បាត, មានច្រើនសណ្ឋានដូចពណ៌នាខាងក្រោមនេះ :

**១. រូបបន្លាចធ្វើពីបំណែក ឡូទិន :** បំណែកឪទិនទឹកត្រី, ពីត្រឹមពាក់កណ្ដាលខ្លួនចុះទៅក្រោម, ដែលគេនិយមហៅថា "ក្តិតឪទិន" នោះ, ត្រូវបានគេយកមកច្នៃធ្វើជារូបបន្លាច, មានមាត់ច្រវាមធំគ្រហ៊ើ-ហ៊ើ, មានធ្មេញធំៗ ស្រួចស្រាវលេចចេញមកតាមមាត់ច្រ-ហា- ។ ដើម្បីឱ្យមានទិដ្ឋភាពកាន់តែសម្បើមទៀតនោះ, គេគូរច្រមុះធំ, ភ្នែកក្រឡោត, ត្រចៀកកំពឹង ។ កាលណាគូររួចសព្វគ្រប់ហើយ គេយកក្បាលរូបបន្លាចនោះ, មកពាក់នៅទ្វាររបង បែរមុខឆ្ពោះមករកផ្លូវ ។

**២. រូបបន្លាចធ្វើពីបំណែកឆ្នាំងដី :** ឆ្នាំងដីដែលបែកត្រឹមក្លៀកមកខាងលើ, ហើយនៅសល់ត្រឹមក្លៀក (ផ្នែកកំពង់) ចុះទៅគូថឆ្នាំង, ក៏ត្រូវបានគេយកមកច្នៃធ្វើរូបបន្លាចផងដែរ ។ ដោយឆ្នាំងដីដែលប្រើប្រាស់យូរហើយ, តែងតែមានពណ៌ខ្មៅនោះ គេយកកំបោរ-ស- មកគូរធ្វើភ្នែកក្រឡោត ត្រចៀក មាត់ស្មេញ ធ្មេញធំៗ ។ រូបអាក្រក់គួរឱ្យខ្លាចបែបនេះ, ត្រូវបានយកមកផ្អក់, ព្យួរនៅទ្វាររបងបែរមុខទៅរកផ្លូវដែរ ។

**៣. រូបបន្លាចធ្វើពីចំបើង :** រូបប្រភេទនេះគេហៅថា ទីងមោង

ក៏បាន ។ ទីងមោងមានសណ្ឋានរាងរៅ ប្លែកពីរូបទាំងពីរខាងលើ, ដោយគេសាងវាជារូបពេញលេញ មានតួខ្លួន, មានក្បាល, ដៃ ជើង, សព្វគ្រប់ ។ ដំបូងគេយកចំបើងមមកចងរុំផ្តោបនឹងបង្គោលមួយ ធ្វើជាតួដងខ្លួន, បង្ហួតទៅខាងលើចងធ្មុំជារាងមូល, សម្រាប់ធ្វើក្បាល ។ រួចហើយ គេយកឈើមួយកំណាត់ល្មមមកចងទទឹងខ្លួន ធ្វើជាដៃ ។ ផ្នែកខាងក្រោម គេចងភ្ជាប់ឈើចំពាមពីរធ្វើជាជើង, ទាំងខ្លួន, ទាំងដៃ ទាំងជើង, សុទ្ធតែរុំដោយចំបើង, ធ្វើយ៉ាងណាឱ្យដូចក្បាល, ខ្លួន, ដៃជើងមនុស្សពិតៗ ។

នៅដំណាក់កាលចុងក្រោយ, គេយកខោអាវចាស់ៗ មកស្លៀកពាក់ឱ្យរូបសំណាកធ្វើពីចំបើងនោះ ។ ជួនកាលគេយកក្អមឆ្នាំងចាស់ៗ មកច្នៃគូរភ្នែក, ច្រមុះ, មាត់, ធ្វើជាក្បាល ។ ក្នុងករណីខ្លះទៀត, គេយកក្រណាត់ខ្មៅមកផ្ទួលឱ្យមូល, ហើយគូរភ្នែក, ច្រមុះ, ត្រចៀក, មាត់ឱ្យមានអ្វីៗ ដូចមនុស្សដែរ ។ ប៉ុន្តែ ចំណុចប្លែកនោះ គឺជាមុខមាត់កំណាច, មានអាការៈសម្បើមគួរឱ្យស្ញប់ស្ញែងភ័យតក់ស្លុត ។

លុះកសាងបានពេញលេញជារូបសំណាករួចហើយ, គេនាំយករូបនេះទៅចងភ្ជាប់នៅបង្គោល, ឬនៅរបង, ចំពីមុខផ្ទះ នៅពីខាងឆ្វេង ឬខាងស្តាំច្រកទ្វាររបង ។

**៤. គោលបំណងនៃរូបបន្លាច :** កាលពីជំនាន់ដើម, បណ្តាជននៅតាមនិគមជនបទស្រុកស្រែចម្ការទូទាំងប្រទេស, ច្រើនប្រកាន់អបិយជំនឿ, ជឿទៅលើខ្មោចព្រាយបិសាច, អារក្ស អ្នកតា, ដោយហេតុថា កាលណោះ, វេជ្ជសាស្ត្រ, វិទ្យាសាស្ត្រ, នៅមិនទាន់ជ្រួតជ្រាបទៅដល់សតិអារម្មណ៍របស់

អ្នកជនបទនៅឡើយ ។ ម្ល៉ោះហើយ, ពេលមានភ័យអាសន្ន, តែងតែពឹងពាក់លើឥទ្ធិពលរបស់ អធិភូត ដូចពោលខាងលើ, ដើម្បីជួយបញ្ចៀសរាល់ជំងឺតម្កាត់, គ្រោះកាច, ឧបទ្រពចង្រៃអ្វីផ្សេងៗ, ក្រោមរូបភាពនៃការបួងសួងបន់ស្រន់, ភ្ជាប់ដោយតង្វាយផ្សេងៗ តាមរយៈ អន្តរការី, ដូចជារូបអារក្សក្ដី, ជាការពឹងពាក់គ្រូបុក្ដី ។ យ៉ាងណាមិញ, រូបបន្លាចដែលបានលើកយកមកអធិប្បាយជូនជ្រាបពីខាងដើម, ក៏ឋិតនៅក្នុងករណីនេះផងដែរ ។ អ្នកស្រុកទាំងនោះនាំគ្នាគិតថា, រូបបន្លាចដែលគេដាក់នៅគ្រប់មុខផ្ទះនោះ, មុខជាអាចធ្វើឱ្យព្រលឹងខ្មោចព្រាយបិសាច, ដែលជាភ្នាក់ងារនាំជំងឺមកនោះ, មានការភ័យខ្លាចរូបបន្លាចដែលនៅចាំការពារនៅមុខផ្ទះ, មិនហ៊ាននាំជំងឺយកមកធ្វើឱ្យមនុស្សក្នុងផ្ទះនោះឈឺ, ហើយដោយហេតុនេះ, មនុស្សក្នុងគ្រួសារទាំងអស់នឹងបានរួចខ្លួនពីរោគាព្យាធិជាមិនខាន ។

**៥. អំពីលទ្ធផល** : តើគ្រប់ផ្ទះ, គ្រប់គ្រួសារដែលបានដាក់រូបបន្លាច ពិតជាបានរួចខ្លួនពីការរាតត្បាតនៃជំងឺសាហាវៗ ដូចបានសង្ឃឹមទុកឬទេ ?

ចំពោះលទ្ធផលវិញ, ពិតជាមិនខុសគ្នាពីការបួងសួង បន់ស្រន់តាមរូបភាពផ្សេងៗ នោះឡើយ ។ ឧទាហរណ៍ :

- ការបួងសួងបន់ស្រន់សុំទឹកភ្លៀង ជួនក៏បានសម្រេចដូចបំណង ជួនក៏នៅតែរាំងដដែល ។

- ការលៀងអារក្ស, សុំឱ្យអ្នកជំងឺបានជាសះស្បើយពីរោគាព្យាធិ អ្នកខ្លះនៅតែឈឺដដែល ជួនកាលរហូតដល់ស្លាប់ក៏មាន ជួនក៏បានជាសះស្បើយ

ពីជំងឺ ..... ។

**៦. ការវិភាគរកហេតុផល :** គួរគប្បីជ្រាបថា, ជំងឺអាសន្នរោគក្ដី, ជំងឺអុតធំក្ដី, សុទ្ធតែកើតឡើងដោយសារមេរោគជាអ្នកបង្កើតឡើង។ មេរោគទាំងនោះ, ឬក៏រូបបន្ទាច, វាពុំមានការទាក់ទងគ្នា, ឬពុំមានឥទ្ធិពលចាញ់ ឬឈ្នះគ្នា, តាមរបៀបណាមួយឡើយ ។ សូមជម្រាបថា, រាល់ជំនឿផ្សេងៗ គឺសុទ្ធតែកើតឡើងពី **"ភ័យ"** ទាំងអស់, គិតរួមទាំងការធ្វើរូបបន្ទាចនេះផងដែរ ។ ដោយពុំមានអ្វីជាទីពឹង, ក្រៅពីរកគ្រូហ្មក្នុងភូមិដែលតែងតែព្យាបាលជំងឺគ្រប់ប្រភេទ តាមរយៈ :

- ការប្រើគាថា, មន្តអាគម សិល្បសាស្ត្រ, សូត្រផ្លុំ, បណ្ដេញ, បង្ក្រាបរោគាព្យាធិ ។

- ការប្រើឱសថបុរាណ មានឫសឈើ, សម្បកឈើ, ស្លឹកឈើ, ឆ្អឹងស្នែងសត្វផ្សេងៗ យកមកផ្សំព្យាបាល, ដោយឱ្យអ្នកជំងឺផឹក លាប ជាដើម នោះឡើយ ..... ។

យើងឃើញថា, មធ្យោបាយក្នុងការព្យាបាលរោគមានតិចណាស់ ហើយសុទ្ធតែរបៀបរបបបែបបុរាណ, រត់មិនទាន់ការវិវឌ្ឍន៍នៃជំងឺទៀតផង។ ទន្ទឹមនឹងជំនឿផ្សេងៗ និងវិធីព្យាបាលបែបបុរាណ, នៅប្រទេសជឿនលឿននៃលោកខាងលិច, វិទ្យាសាស្ត្រ វេជ្ជសាស្ត្រ មានការលូតលាស់រីកចម្រើនយ៉ាងសម្បើម ។ ឱសថ និងវិធីព្យាបាលបែបទំនើបៗ ក៏បានជួយសង្គមមនុស្សលោកឱ្យបានជាសះស្បើយពីរោគាព្យាធិជាច្រើនជំពូក, បានឆាប់រហ័សទាន់ចិត្ត ឥឡូវនេះ យើងកំពុងឈានមកដល់យុគនៃវិទ្យាសាស្ត្រទំនើប ។

**៧. ការស៊ីករោចរិលនៃជំនឿអរូបិយ** : ទន្ទឹមនឹងការរីកលូតលាស់នៃវិទ្យាសាស្ត្រទំនើប, និងក្បួនវេជ្ជសាស្ត្រ, វិធីព្យាបាលរោគក៏ប្រែរូបភាពពីបុរាណមកទំនើបដែរ ។ ជំនឿទៅលើការបែបន់, ការសែនព្រេន, តង្វាយផ្សេងៗ ក៏កាន់តែចុះខ្សោយទៅៗ ជាលំដាប់ ។ ជាមួយនឹងការអន់ថយនៃជំនឿបែបអរូបីនោះ, ជំនឿជឿជាក់ទៅលើវិទ្យាសាស្ត្រ វេជ្ជសាស្ត្រ, ក៏ចេះតែកើនឡើង ធ្វើឱ្យតួនាទីនៃមន្ទីរពេទ្យ តាំងពីក្រុងធំៗ រហូតដល់មណ្ឌលសុខភាព, ពេទ្យបង្អែកនៅមូលដ្ឋាន, កាន់តែមានសកម្មភាពមមាញឹក ក្នុងការជួយសង្គ្រោះព្យាបាលប្រជាពលរដ្ឋទូទៅ ។ ប្រសិនបើក្រសួងសុខាភិបាលមានឱសថគ្រប់ប្រភេទយ៉ាងសម្បូរ, គ្រូពេទ្យគ្រប់ជាន់ថ្នាក់មានប្រាក់បៀវត្សរ៍សម្រាប់ដោះស្រាយជីវភាពនោះ, សេវាព្យាបាលសុខភាពជាទូទៅនឹងទទួលបានជោគជ័យ ជាហេតុរួមចំណែកកាត់បន្ថយជំនឿអរូបីឱ្យអស់ពីសង្គមជាតិយើង នៅពេលមិនយូរប៉ុន្មានខាងមុខនេះ ។

# ការដាក់ដង់បក្សីស៊ីដីប្រៃ

**ក.ក.ន** ដោយខ្ញុំជាកូនកសិករ, ធ្លាប់មានជីវភាពរស់នៅស្និទ្ធស្នាលជាមួយធម្មជាតិ, ព្រៃភ្នំ, វាលស្រែ, ហ្វូងគោក្របី, ម្យ៉ាងទៀតហើយល្បែងប្រជាប្រិយផ្សេងៗ ដូចជាលេងហ៊ុង, លេងរែក, វត់ខ្លែង, ប្រជល់ចង្រិត, ប្រជល់ត្រីក្រឹម, ដាក់ដង់, ដាក់អន្ទាក់ ....។ល។ មិនមែនជារឿងប្លែកសម្រាប់ខ្ញុំឡើយ ព្រោះហេតុនេះហើយ, បានជា នៅពេលនេះ, ខ្ញុំអាចសរសេរឯកសារដូចមានចំណងជើងខាងលើនេះបាន, ដោយមិនចាំបាច់ធ្វើបទសម្ភាសន៍ជាមួយកសិករនៅជនបទណានោះឡើយ ..... ។ ដោយចង់ឱ្យអ្នកអាន, អ្នកស្រាវជ្រាវទូទៅបានដឹងអំពីវប្បធម៌ ប្រពៃណីពីអតីតកាល, ទើបនៅពេលនេះ ខ្ញុំលើកយក ល្បែងរបស់កូនកសិករមកធ្វើការពណ៌នាជូនជ្រាបដូចខាងក្រោមនេះ :

**១. អំពីដីប្រៃ*** : ហេតុអ្វីបានជាមានដីខ្លះប្រៃ, ដីខ្លះសាប ?, ដើម្បីឆ្លើយនឹងសំណួរនេះ, ខ្ញុំសូមសួរតបទៅវិញថា, ហេតុអ្វីបានជាមានទឹកប្រៃ, ទឹកសាប ? សំណួរនេះគឺជាចម្លើយសម្រាប់សំណួរមុន ។

តាមមតិរបស់ភូគព្ភសាស្ត្រ, ដែនដីយើងនេះផ្សំដោយវត្ថុធាតុប្លែកៗជាច្រើន, មានដូចជាថ្មកំបោរ, ថ្មកែវ, ថ្មសំលៀង, ដីល្បាប់, ដីកណ្ដៀង, ដីល្បាយខ្សាច់ ..... ។ នៅក្នុងជម្រៅនៃផែនដី, យើងតែងបានប្រទះឃើញរ៉ែមាស, រ៉ែប្រាក់, ត្បូង, ពេជ្រ, ជាតិបុក្ស៊ីត, សំណប៉ាហាំង, ដែក, ស្ពាន់,

---

* បើគេយកដីបន្តិចមកលិទ្ធមើលនោះ នឹងដឹងថាវាមានរសជាតិប្រៃមែន ។

ប្រេងកាត ..... ។ល។ តើអ្នកណាជាអ្នកបង្កើតឡើងនូវវត្ថុធាតុ (él émants) ប្លែកៗ ទាំងនេះ ? គ្មានអាទិទេពណាបង្កើតវត្ថុធាតុអស់ទាំងនេះទេ, ប៉ុន្តែវាជាការកកើតឡើងដោយទំនើងរបស់ធម្មជាតិ (Caprice de la nature) មិនខុសពីរន្ទះ, ផ្គរលាន់, ផ្លេកបន្ទោរ, ព្យុះភ្លៀង, ..... នោះឡើយ ។

ដើម្បីកុំឱ្យវែងឆ្ងាយពេក, ខ្ញុំសូមវិលមកជម្រាបជូនអំពីបាតុភូតដីប្រៃនេះវិញ ។ នៅក្នុងព្រៃក៏ដូចជានៅតាមវាលស្រែដែរ, មានប្រភេទដីខ្លះ, មានរសជាតិប្រៃ, ដោយការតាក់តែងមកស្រាប់ៗ របស់ធម្មជាតិ ។ ដីប្រៃនៅតំបន់ព្រៃ, ច្រើនមាននៅជិតតំបន់ដីល្បាយខ្សាច់, ជិតត្រពាំង, ឬជង្រុកអូរ ។ សត្វម្រឹគម្រឹគាខ្លះ[៦២], ពេលចុះមកផឹកទឹក, ក៏នាំគ្នាស៊ីដីប្រៃបន្តិចបន្តួចរួចទើបផឹកទឹក ។ ឯពួកព្រាន ក៏តែងទៅចាំងទីជាសម្ងាត់នៅតំបន់ដីប្រៃ និងត្រពាំងទឹក, ឬអូរនោះដែរ ដើម្បីលបបាញ់សត្វទាំងនោះ ។ នៅពេលនេះ ខ្ញុំសូមនាំអ្នកអានវិលបកវកតំបន់ដីប្រៃទៅតាមវាលស្រែវិញម្តង ។ នៅតាមវាលស្រែ, ដីប្រៃតែងប្រទះឃើញនៅមុខស្រែ, ជិតដំបូក, គឺនៅតំបន់ណាដែលមានប្រភេទដីកណ្ដៀរល្បាយខ្សាច់ ។ គេងាយនឹងកត់សម្គាល់ដីប្រៃណាស់, ព្រោះនៅទីនោះគេឃើញដីមានពណ៌ស, ល្បាយក្រហមបន្តិចៗ ។ កំណត់សម្គាល់មួយទៀតគឺ, នៅដីត្រង់នោះ, ពុំមានស្មៅដុះឡើយ, ព្រោះដីប្រៃមិនអនុលក្ខណៈឱ្យតិណជាតិរស់ដុះដាលបានឡើយ ។ ផ្ទុយទៅវិញ, ដីប្រៃជាចំណីដ៏ជាទីពេញចិត្តរបស់បក្សាបក្សីខ្លះៗ, ដូចជា កំប្លុក, ប៉ូព្ធ, ពពូល ជាដើម ។ ក្មេង ៗ កូនកសិករដែលជាអ្នកឃ្វាលគោ, កត់ចំណាំទុកទីដីប្រៃត្រង់ណាដែល

---

[៦២] ច្រើនតែពួកតិណាហារសត្វ ដែលស៊ីដីប្រៃនៅក្នុងព្រៃ ។

តែងតែឃើញមានសត្វចុះស៊ីច្រើនកុះករជាងគេ ។ រួចហើយវាក៏ដាក់គម្រោង ដើម្បីមកដាក់ជង់នៅទីនោះ ។

**២. អំពីជង់ :** ជង់ជាប្រភេទឧបករណ៍ម្យ៉ាងសម្រាប់ដាក់ឱ្យសត្វជាប់ជើង ឬក ។ ជង់ច្រើនធ្វើអំពីគ្រឿងផ្សំមួយចំនួនដូចជា :

**ក. សរសៃជក់ត្នោត :** ដែលគេយកតែសរសៃខ្មៅធំ ស្វិតជាប់ល្អ មិនងាយដាច់ ។ គេយកសរសៃជក់ត្នោតនេះ មកកួតយកពោះចេញ, រួចកួចធ្វើជាក្រវិល, ងាយរូតបានរហ័ស ។

**ខ. ជើងជង់ :** មានវត្ថុពីរយ៉ាងដែលគេយកមកធ្វើជើងជង់បាន នោះគឺ ចម្រឹងឫស្សីបិតឱ្យស្រួចម្ខាងងាយដោតភ្ជាប់ទៅក្នុងដី, និងបន្ទាវៀង ពពាដែលធំវែងល្អ ។

**គ. សំបុកកាត់ :** គឺសំបុកដង្កូវនាង(Cocon) ដែលមេអំបៅចោះទម្លុះចេញមកខាងក្រៅ ដើម្បីពងបន្តពូជ ។ សំបុកកាត់មួយភាគធំត្រូវបានលក់ញមកទិញយកទៅច្នៃទៅជាមួកដ៏ល្អវិសេសម្យ៉ាង ហៅថា "**មួកសំបុក**"។

**៣. របៀបចងជង់ :** គេត្រូវយកសរសៃជក់ត្នោតពណ៌ខ្មៅថ្លោស, ដែលកួចក្រវិល ហើយស៊កសរសៃជង់ក្នុងក្រវិលរួចជាស្រេចនោះ, មកចងរុំភ្ជាប់នឹងជើងជង់, ដោយផ្ដិះយកសរសៃសំបុកកាត់នោះចេញមួយស្រទាប់ ។ គេរុំគល់សរសៃជង់នេះជាច្រើនជុំ, ច្រើនជាន់ ។ ហើយដើម្បីការពារកុំឱ្យរបូត, គេកួចតល់សរសៃជង់ឱ្យកើតជាកញ្ចុំកំនួចមួយ ។ កាលណាចងជង់បានច្រើនហើយ, ទើបគេយកមកចងជា "រនង" ដែលមានចំនួនជង់ពី ៧ ទៅ ១០ ជង់។ ខ្សែរនងនេះ, ចងភ្ជាប់ពីជើងជង់មួយទៅជើងជង់មួយទៀត លៃចម្ងាយល្មមឱ្យ

រង្វង់ជ័រគងគ្នាបន្តិច ។ កុមារកសិករម្នាក់ៗ អាចចងជ័របានពី ១០ ទៅ ១៥ រនងយ៉ាងតិច, ដើម្បីតម្រូវទៅតាមសេចក្តីត្រូវការ, និងតម្រូវទៅតាមទំហំទីវ៉ានដីប្រៃតូចឬធំ ..... ។

**៤. វិធីការចាក់ជ័រ** : កុមារកសិករចំណាំទុកបានហើយ, នូវទីវ៉ានដែលមានដីប្រៃធំទូលាយល្មម, ហើយដែលអាចនឹងដាក់ជ័របានបក្សី ដូចបំណង ។ ព្រានកុមារក្រោកពីព្រលឹមស្រាងៗ, ប្រហែលជាម៉ោង ៤ កន្លះ, ស្ពាយចង្អោយរនងជ័រសម្រាប់យកទៅ ដាក់នៅដីប្រៃ ។ សូមជម្រាបថា, បក្សីស៊ីដីប្រៃនេះ ក្នុងមួយថ្ងៃវាមកស៊ីពីរពេល,គឺព្រឹកមួយពេល, ល្ងាចមួយពេល ។ ប៉ុន្តែជាទូទៅ, គេច្រើនដាក់ជ័រតែ ពេលព្រឹកប៉ុណ្ណោះ ។ លុះទៅដល់កន្លែងដីប្រៃហើយ ព្រានកុមារក៏ប្រញាប់ប្រញាល់យកជ័រ, ហើយយកទៅដោតជើងជ័រដែលស្រួចឱ្យចាក់ទៅក្នុងដីឲ្យជ្រៅ ប្រហែលជាង ១ សង់ទីម៉ែត្រ, ជាជួរត្រង់តាមមាត់ទីដីប្រៃ, ក្នុងមួយរនងៗ, ទុកចន្លោះពីរនងមួយទៅរនងមួយប្រហែល ៣ ទៅ ៤ តឹក (ធ.ម) រហូតទាល់តែពេញមួយបណ្តោយដីប្រៃ ។ កុមារព្រានព្រៃក៏នឹងស្លឹកឈើធំល្មម, ឬធ្វៃក្រណាត់, មកចងសណ្តោងនៅចុងខ្សែរនងម្ខាងៗ ដើម្បីកុំឱ្យបក្សីហើរយករនងទាំងជ័រទៅរួច, នៅពេលដែលវាជាប់ជ័រ ។ លុះសម្រេចកិច្ចការដាក់ជ័រនេះរួចរាល់សព្វគ្រប់ហើយនោះ, ព្រានកសិករក៏លបទៅពួន លាក់ខ្លួននៅក្បែរដំបូក, ឬព្រៃគុម្ពោតដែលនៅមិនឆ្ងាយប៉ុន្មាន ពីកន្លែងដីប្រៃ ។ នៅលើដើមឈើខ្ពស់ៗ, ជិតកន្លែងដីប្រៃ, ដោយរង់ចាំតែពេលស្ងាត់មនុស្សប៉ុណ្ណោះ ។ បន្តិចក្រោយមក, ពួកវាហើរចុះមកត្រង់កន្លែងដីប្រៃ, ដោយឥតបានគិតពីគ្រោះភ័យអ្វីឡើយ ។ ពួកវាចឹកដីប្រៃស៊ីសប្បាយផង, ហក់

លោតចឹកគ្នារញ៉ីរញ៉ៃផង ។ គឺនៅពេលដែលវាលោតដេញចឹកគ្នា, និងពេល ដែលវាលោតគេចពីចំពុះគ្នាវានេះហើយ, ដែលក្បាលវាបានស៊កច្រកចូលទៅ ក្នុងរង្វង់ជង់, ហើយក៏ត្រូវខ្សែជង់រឹត-ក-ជាប់យ៉ាងតឹង ។ គឺនៅពេលនេះ ហើយដែលវាដឹងថា វាជាប់ជង់, រួចក៏ភ័យស្លន់ស្លោ ស្ទុះហើរ ក្នុងក្ដីសង្ឃឹមថា នឹងបានរួចខ្លួនពីជង់ប្រល័យ ។ ប៉ុន្តែវាធ្វើម៉េចនឹងហោះហើរទៅបាន, បើព្រាន កុមារបានត្រៀងទុកជាមុន ដោយយកផ្លែក្រសាំង ឬមែកឈើធ្ងន់ មកចង សណ្ដោងទៅហើយនោះ ? ចំណែកបក្សីដទៃទៀត, ដែលមិនជាប់-ក-, ក្នុង រង្វង់ខ្សែជង់នោះ, ក៏បានដឹងអំពីគ្រោះភ័យ, ហើយស្ទុះហើរទាំងភ័យរន្ធត់, យ៉ាងលឿនស្លេវ យកប្រាសតែអាយុរៀងៗខ្លួនទៅកាន់ទីដទៃឆ្ងាយពីនេះ ។ កុមារព្រានអរយ៉ាងត្របោបត្របាច, ហើយស្ទុះរត់យ៉ាងលឿន ទៅកាន់កន្លែង ដាក់ជង់ ។ នៅទីនោះ, ជង់ដែលទាក់ជាប់-ក-បក្សី ក៏របើកសណ្ដោកចេញពីដី, ហើយរបូតរវាត ចេញពីកន្លែងដោត, ហើយបក្សីជាប់ ជង់ហើរនាំយកទៅឱ្យ ឃ្លាតពីកន្លែងចាក់ នោះចម្ងាយពីរឬបីម៉ែត្រ ។ រីឯជង់ដទៃទៀត ដែលមិនបាន ជាប់ទេនោះ, ក៏នៅឈររក្សាទម្រង់ដើមដដែល ។ ព្រានកុមារត្រេកអរ, ដោយ បានឃើញកំប្រុកមួយរៀលមួយ, និងពពិចមួយ, ជាប់ជង់របស់វា, ខំរើបម្រាស់ ព្រាលៗ, ដោយស្ទុះហើរយោងវត្ថុសណ្ដោងនោះមិនរួច ។ កុមារដោះយកសត្វ ទាំងបីពីខ្សែជង់, យកមកចងជើងយ៉ាង ជាប់ល្អទាំងជង់ ទាំងបក្សីមកផ្ទះវិញ, ដោយទឹកមុខញញឹមស្រស់ស្រាយ, ព្រោះទទួលបានផលនៃការប្រមាញ់របស់ ខ្លួនដ៏ជាទីគាប់ចិត្ត ។ តាមទម្លាប់, ក្នុងមួយព្រឹក គេមិនចាក់ជង់ពីរដងទេ, ព្រោះ

បក្សីទាំងនេះ បើកាលណាចុះស៊ីកន្លែងណា, មានគ្នាវាទទួលរងគ្រោះជាប់ជង់, ឃើញស្ដែងនឹងភ្នែកបែបនេះហើយ, វាមិនមកចុះស៊ីជីប្រែនៅកន្លែងនេះទៀតទេ ។ គេអាចសួរថា តើថ្ងៃស្អែក, គេអាចមកចាក់ជង់នៅកន្លែងដដែលនេះ, បានទៀតឬទេ ? ពិតជាបាន, ព្រោះដល់ថ្ងៃស្អែក ព្រឹត្តិការណ៍ដ៏ភ័យរន្ធត់ពីថ្ងៃមុននោះ, ត្រូវពួកវាភ្លេចអស់ទៅហើយ នេះម្យ៉ាង, ហើយមួយវិញទៀត, ពួកវានៅឃ្លាន, នៅត្រូវការចំណីនេះជាចាំបាច់, ដូច្នេះ វានឹងត្រូវតែមកស៊ីជីប្រែនៅទីនេះទៀត, ឯព្រានកុមារក៏អាចទៅចាក់ជង់នៅទីនេះទៀតផងដែរ ។ គេអាចប៉ាន់ប្រមាណថា, លុះតែអស់បក្សីពួកនេះ, លុះតែគេចាប់បានបក្សីទាំងនេះឱ្យអស់រលីងពីតំបន់នេះ, ទើបលែងមានបក្សីមកស៊ីជីប្រែ, ហើយទើបកុមារព្រានលែងអាចទៅចាក់ជង់នៅទីនោះបានដូចពេលមុនៗ ទៀត ។ សូមជម្រាបបន្ថែមថា នៅតំបន់នីមួយៗ, មានជីប្រែ ៤ ទៅ ៥ កន្លែង ។ ដោយហេតុនេះ, កុមារព្រានអាចផ្លាស់ប្ដូរទីចាក់ជង់ពីកន្លែងមួយទៅកន្លែងមួយ, រួចហើយលុះបាន ១ ចប់ ១ ជុំ, ក៏វិលមកកន្លែងដដែលវិញ ។ ឯលទ្ធផលគឺនៅតែមានបក្សីជាប់ជង់ យ៉ាងហោចណាស់ ក៏ក្នុងមួយព្រឹកៗ បានពីរក្បាលដែរ ។ ជួនកាលនៅតំបន់ ភូមិស្រុកនីមួយៗ, កុមារកសិករ ដែលមានជំនាញខាងដាក់ជង់បក្សីស៊ីជីប្រែនេះ, ជួនកាល, ក្នុងមួយភូមិមានតែម្នាក់ប៉ុណ្ណោះ, ព្រោះក្រៅពីគេគ្មានជំនាញផង, ឬក៏គេមានរវល់ក្នុងការកិច្ចអ្វីផ្សេង, ពុំអាចប្រកបរបរប្រមាញ់ដូចនេះបានផង ។

**៥. អំពីផលប្រយោជន៍នៃការចាក់ជង់ :** ជាធម្មតា, មនុស្សដែលរស់នៅក្នុងតំបន់នីមួយៗ, តែងតែមានទម្លាប់នឹងសម្របសម្រួលជីវភាព

ទៅនឹងកន្លែងនោះ, តើធនធានធម្មជាតិនៅកន្លែងនោះ អំណោយផលយ៉ាងណាខ្លះ ?, អាចផ្តល់ផលប្រយោជន៍, និងមុខរបរផ្សេងៗ ដល់មនុស្សនៅតំបន់នោះបែបណាដែរ ? ឧទាហរណ៍ : នៅតំបន់មានបឹង, ស្ទឹង, ព្រែក, ទន្លេ, គេនឹងចាប់មុខរបរនេសាទជាមធ្យោបាយចិញ្ចឹមជីវិត ។ ឯអ្នកនៅតំបន់ព្រៃ ភ្នំពិតជាត្រូវជ្រើសរើសយករបររបេះជ័រ, បោចវល្លិ៍, ផ្តៅ, ជីកដំឡូង, បេះផ្សិត, បេះរុក្ខផលផ្សេងៗ, និងរករបរដេញសត្វ, ដាក់អន្ទាក់, បង្កាត់សម្រាប់ប្រមាញ់សត្វមកចិញ្ចឹមជីវិត ។ ដូចជានៅក្នុងបរិបទនេះជាដើម, នៅរដូវប្រាំងដែលកសិករបានច្រូតកាត់ បោកបែន ប្រមូលផលដាក់ជង្រុករួចស្រេចជាស្ថាពរហើយនេះ, កសិករត្រូវតែមានមុខរបរណាផ្សេងទៀត ដើម្បីបានជាផលកំរៃសម្រាប់ផ្គត់ផ្គង់ជីវភាព ។ ប្រសិនបើមាតាបិតាខិតខំទៅរកត្រីនៅបឹងជិតខាងភូមិ, ឬចូលព្រៃបោចផ្តៅវល្លិ៍យកមកធ្វើគ្រឿងឧបករណ៍ប្រើប្រាស់ និងលក់យកចំណូលនោះ, កុមារាជាកូន ដែលមានអាយុពី ១២ ទៅ ១៥ ឆ្នាំ, ក៏ត្រូវបំពេញភារកិច្ចមួយ, ឬរកផលរបរណាមួយ, ដើម្បីរួមចំណែករកចំណូលឱ្យគ្រួសារ ។

**ត. ការចាក់ជង់គឺជាមុខរបរមួយ :** បក្សីបីក្បាលដែលកុមាររកបានដោយដាក់ជង់នេះ គឺជារបរមួយដែលមានមុខចំណូលខ្លះៗ ផ្តល់ទៅឱ្យគ្រួសារ ។ ប្រសិនបើគេលក់បក្សីទាំងបីក្បាលនេះវិញ កាលជំនាន់នោះ គេអាចរកចំណូលបានយ៉ាងហោចណាស់ក៏ ២ រៀលដែរ ។ បើចំពោះជំនាន់នេះវិញ ថ្លៃបក្សី ៣ ក្បាលនេះអាចឡើងដល់មួយម៉ឺនពីរពាន់រៀល ។ ហើយប្រសិនបើគេលក់តែបក្សីពីរក្បាល, ហើយទុកបក្សី ប៉ុព្វមួយសម្រាប់ធ្វើម្ហូបក្នុងគ្រួសារ

នោះ, គេអាចសន្សំបានប្រាក់ចំណេញសម្រាប់ទិញម្ហូបសម្រាប់គ្រួសារក្នុងមួយថ្ងៃនេះ ។ ហេតុនេះ, បើកុមារព្រាននេះអាចដាក់ជង់បានបក្សី, ពីពីរទៅបីក្បាល, រៀងរាល់ព្រឹកនោះ, អាចចាត់ទុកថា ប្រមាញ់បក្សីរបស់វានេះ, គឺជាមុខរបរចិញ្ចឹមជីវិតមួយបែប, ដើរទន្ទឹមនឹងមុខរបរឪពុករកត្រី, បរបាញ់សត្វ, ឬរកបោចវល្លិ៍, កោចផ្តៅ ..... ដែរ ។ នេះនៅមិនទាន់គិតពីម្តាយទៅលក់បន្លែនៅឯផ្សារ ឬធ្វើការដាំត្រសក់ ឬលើកកន្ទេល ធ្វើកញ្ជើ កញ្ច្រែងសម្រាប់លក់ គួបផ្សំជាមួយនឹងសេស្រី ទៅច្រូតស្បូវមកក្រងធ្វើជាកណ្តុបប្រក់ផ្ទះ ។ ជីវិតគឺរស់ដោយសារការ, ហើយការគឺជាមុខចំណូលក្នុងគ្រួសារនីមួយៗ ។ មានការព្រាំព្រៃ មានចំណូលច្រើន នោះជីវភាពគ្រួសារនឹងធូរធារ រួមចំណែកដល់ការអភិវឌ្ឍន៍ប្រទេសជាតិ ។

**ខ. ការដាក់ជង់គឺជាកីឡា** : ការធ្វើដំណើរដោយថ្មើរជើង គឺជាកីឡាមួយប្រភេទ ។ ការដើរទៅបកពីផ្ទះទៅកន្លែងដីព្រៃ, ពីទីនោះមកផ្ទះវិញ ជារៀងរាល់ថ្ងៃ, ធ្វើឱ្យរូបរាងកាយកុមារមានភាពរឹងមាំ, ស្វាហាប់, សុខភាពកាន់តែប្រសើរ ។ គួបផ្សំនឹងខ្យល់អាកាសបរិសុទ្ធនៅជនបទស្រែសម្ការ, គួបផ្សំនឹងទេសភាពដ៏ល្អដូចផ្ទាំងគំនូរវិចិត្រ គួបផ្សំនឹងការអារម្មណ៍សប្បាយរីករាយផងនោះ, អត្តភាពគេកាន់តែរឹងប៉ឹងរាំងពលលូតឡើងទៀត ។ ហេតុដូច្នេះហើយបានជាគេតែងពិនិត្យឃើញថា, កុមារនៅជនបទ, ច្រើនតែមានជីវិតប្លាត់ផ្សេងៗ ជាងកូនអ្នកទីក្រុង ។ .

**គ. ការដាក់ជង់គឺហាត់ពត់លត់ដំបងពិសោធន៍** : មុននឹងទទួលបានលទ្ធផលល្អពីមុខរបរតូចតាចរបស់វា, កុមារស្រុកស្រែ តែងទទួលនូវ

បរាជ័យផ្ទួនៗ ពីរបរដាក់អន្ទាក់, ពោលគឺ ធ្វើជង់មិនទាន់ល្អ, ក្រវិលរូតមិនរហ័ស ធ្វើឱ្យបក្សីជាប់ជង់ហើយរបូតហើរបាត់, ឬក៏ប៉ោលដែលចងសណ្តោងស្រាលពេក, ធ្វើឱ្យបក្សីនាំហើរយកទៅជាមួយ, ហើយទៅធ្លាក់នៅទីឆ្ងាយ ។ ក្រោយពីបរាជ័យច្រើនដង, គេក៏ចេះតែឆ្លាតវាងវៃខ្លាំងឡើង, រហូតដល់របរតូចតាចរបស់គេទទួលបានផ្លែផ្កាគួរជាទីពេញចិត្ត ។ លុះដល់កាលណាគេធំឡើង, កាលណាគេក្លាយទៅជាអ្នកទទួលខុសត្រូវលើជីវភាព, ក្នុងឋានៈជាមេគ្រួសារ, ជាប្តី, ជាឪពុកគេនោះ, គេពិតជាមានសមត្ថភាពក្នុងការធានារ៉ាប់រងជីវភាពគ្រួសារបាន, ហើយគេនឹងញ៉ាំងឱ្យគ្រួសារគេមានការអភិវឌ្ឍន៍ ។

**ឃ. ការដាក់ជង់មិនបង្ហិនបង្ខោចសត្វបក្សាបក្សី** : សព្វថ្ងៃនេះ, ផ្នែកខាងជំនាញ, ត្រូវការអភិរក្សបក្សាបក្សីដ៏កម្រខ្លះ, ដូចជា ចចាត, ទៀវ, ក្អែក, កងកេង, ភូវាំង, ប៉ូពូ[៨៣], ពពិច, កំប្តុក ។ល។ ព្រោះរោមស្លាបបក្សីប្រភេទនេះ, មានពណ៌ភ្លើរលើបរលោង ឆ្លុះពណ៌ស្រស់ណាស់, ហើយរឹងសាច់វាសោតទៀត ក៏មានរសជាតិឆ្ងាញ់ណាស់ដែរ ។ ដោយហេតុថា ព្រៃព្រឹក្សានៅប្រទេសយើងកាន់តែហិនហោចរេចរឹល, ដោយការកាប់រំលំរានចោលលើសផែនការ, ឬការត្រប់ត្រងបែបច្នូវរលុង, សត្វបក្សាបក្សីដែលយកព្រៃធ្វើជាជម្រក, ធ្វើជាលំនៅឋាននោះ, ក៏កាន់តែខ្សត់ខ្សោយទៅៗ គួរឱ្យភ័យបារម្ភ ។ ប៉ុន្តែ, បើពិតថា ការដាក់ជង់ ប្រហាញ់ចាប់បក្សី មួយថ្ងៃបានពីរ ឬបីក្បាល ហើយប្រព្រឹត្តទៅតែនៅរដូវប្រាំង ដែលក្នុងមួយរដូវមានតែ ២ ឬ ៣ ខែ, ថា

[៨៣] នៅតំបន់ខ្លះ គេហៅបក្សីនេះថា : សត្វមហោរី ឬ ហុលពូ ។

ជាការបង្អិនបង្អោចបក្សាបក្សីនោះ, ពិតជាមិនត្រឹមត្រូវទេ, ព្រោះការបន្តពូជរបស់បក្សីក្នុងមួយឆ្នាំៗ អាចកើនឡើងរាប់លានក្បាលឯណោះ ។ ប៉ុន្តែបើការបរបាញ់, ការទាក់, ការចាប់បក្សាបក្សី, ធ្វើឡើងដោយឧបករណ៍ទំនើបៗ ឬក៏ការបំពុលពួកវាឱ្យងាប់ទាំងហ្វូងៗ ក្នុងមួយថ្ងៃនោះ, ទើបចាត់ទុកជាការបំផ្លិចបំផ្លាញក្នុងទ្រង់ទ្រាយធំ ។

## ខ. បក្សីជាគ្រឿងលម្អបរិដ្ឋាន និងជាលំនឹងក្នុងធម្មជាតិៈ

មនុស្សនឹងធម្មជាតិត្រូវតែរស់នៅផ្សាភ្ជាប់ជាមួយគ្នា ។ រីឯបរិដ្ឋានធម្មជាតិ, ជាគ្រឿងលម្អដល់ជីវភាពមនុស្ស, ផ្តល់នូវសុខមនោរម្យដល់មនុស្ស ។ ខ្យល់បក់ស្លឹកឈើលាន់ឮព្រោកព្រាវ, សំឡេង សម្រែក ចម្រៀងរបស់បក្សាបក្សីគឺជាតន្ត្រីធម្មជាតិ, បំពេរអារម្មណ៍មនុស្សឱ្យរំភើបរីករាយ, ធ្វើឱ្យជីវភាពគេស្រស់ស្រាយសប្បាយទាំងផ្លូវកាយ, ទាំងផ្លូវចិត្ត ។ បក្សាបក្សីហើចហើរកៀងការលោតញ័រ, គឺទីនេះហើយជាឋានសួគ៌ ឋានសុខរបស់មនុស្ស ។ អ្នកណាបំផ្លាញព្រៃព្រឹក្សា បំផ្លាញបក្សាបក្សី បំផ្លាញបរិដ្ឋាន ឈ្មោះថា ពង្រេចពង្រើល និងផុតកម្មោចជីវិតខ្លួនឯង ។

# ល្បែងប្រជល់ចង្រិត*

## សេចក្ដីផ្ដើម

**ត.ត.ន.** កាលពីថ្ងៃទី ៩ ខែមិថុនា ឆ្នាំ ២០០០ អ្នកយកពត៌មានកាសែត ឃែមបូឌាដេលី (Cambodia Daily) បានស្នើសុំសម្ភាសជាមួយខ្ញុំពាក់ព័ន្ធនឹងប្រធានបទ **"ល្បែងប្រជល់ចង្រិត"** ។ ការចាប់អារម្មណ៍របស់កាសែតបរទេសមួយនេះធ្វើឱ្យខ្ញុំយល់ថា ការដែលគេយកចិត្តទុកដាក់ពិនិត្យមើលល្បែងនេះនៅប្រទេសយើងនោះ ប្រហែលជានៅប្រទេសគេ ពុំឃើញមានល្បែងដូចនេះឡើយ ។ ព្រោះហេតុនេះហើយ បានជាគេឆ្ងល់ និងចង់ដឹង ចង់យល់អំពី **"អត្ថន័យ"** នៃល្បែងនេះ ដែលក្មេងៗ នៅក្នុងសង្គមខ្មែរ បានប្រព្រឹត្តលេងតាំងពីជំនាន់ដើម រហូតមកទល់បច្ចុប្បន្ន ។ យើងអាចកំណត់បានថា ជាល្បែងត្រូវរាប់បញ្ចូលទៅក្នុង ប្រពៃណី ទំនៀមទម្លាប់ខ្មែរ ហើយក៏អាចចាត់ទុកជារូបភាពមួយនៃ **"អត្តសញ្ញាណជាតិ"** ផងដែរ ។ ដោយហេតុនេះហើយ បានជាខ្ញុំខំសរសេររៀបរៀងចងក្រង អំពីប្រវត្តិនៃល្បែងនេះ ក្នុងន័យឆ្លើយតបទៅនឹងសំណួមពរ នៃការសិក្សាស្រាវជ្រាវរបស់ជនជាតិបរទេស ក៏ដូចជាអ្នកស្រាវជ្រាវខ្មែរយើង ដែលចង់យល់ដឹងអំពីមតិកវប្បធម៌ ប្រពៃណីជាតិខ្មែរផងដែរ ។

---

* នៅទ្វីបអាស៊ីយើងនេះ ក្មេង ៗ ស្ទើរគ្រប់ប្រទេស តែងតែលេងល្បែងប្រជល់ចង្រិតដូចស្រុកខ្មែរយើងដែរ មានដូចជាប្រទេសចិនជាដើម

ខ្ញុំសរសេរអត្ថបទឯកសារនេះ មិនមែនចម្លង ដកស្រង់ចេញពីសៀវភៅក្បួនខ្នាតណោះឡើយ ព្រោះថា ពុំទាន់មានឯកសារដែលពណ៌នាអំពីប្រធានបទនោះនៅឡើយទេ ។ គេក៏មិនអាចវាយតម្លៃបានថា អត្ថបទប្រភេទនេះ ពុំមានលក្ខណៈសម្បត្តិ ដែលអាចយកជាការបាននោះឡើយ ។ ខ្ញុំយកបទពិសោធន៍ផ្ទាល់ខ្លួនមករ៉ាយរ៉ាប់ ព្រោះកាលខ្ញុំនៅពីកុមារ ខ្ញុំបានចូលប្រឡូកផ្ទាល់ក្នុងល្បែងប្រជល់ចង្រិតនេះ ក្នុងនាមជាកូនកសិករ. អស់រយៈពេលជាច្រើនឆ្នាំ របួតយល់ដឹង ចាំច្បាស់ឥតទើសទាក់ និងអាចយកឈុតឆាកនៃល្បែងនេះមកពណ៌នាឱ្យឃើញជាក់ស្តែងបានយ៉ាងប្រត្យក្ស ។

ខ្ញុំរំពឹងទុកថា តទៅខាងមុខ អាចនឹងមានអ្នកស្រាវជ្រាវ ទាំងជាតិ ទាំងអន្តរជាតិបកសិក្សា និងដកស្រង់យកអត្ថន័យខ្លឹមសារ និងដំណើរប្រព្រឹត្តទៅនៃល្បែងប្រជល់ចង្រិតនេះជាមិនខាន ។ ដល់ពេលនោះ សៀវភៅ ឬអត្ថបទនេះនឹងក្លាយទៅជាឯកសារពិគ្រោះយ៉ាងពេញមុខតែម្តង ។

# ល្បែងប្រជល់ចង្រិត

នៅតាមភូមិស្រុកនានានៅជនបទ ស្រែចម្ការនៃប្រទេសខ្មែរយើង, កុមារប្រុសស្រី តែងតែលេងល្បែងកម្សាន្តផ្សេងៗ ទៅតាមរដូវកាល, ដូចជា រដូវដើមឆ្នាំ, រដូវវស្សា, រដូវប្រាំង, រដូវរំហើយ, ពេលយប់, ពេលថ្ងៃ, នៅក្នុងភូមិ, នៅក្នុងវត្ត, នៅតាមវាលស្រែ, សុទ្ធតែមានល្បែងសម្រាប់លេង ដើម្បីកែអផ្សុក ឬសម្រាប់ពង្រឹងកាយសម្បទា, ក៏ដូចបណ្តុះប្រាជ្ញាស្មារតី, ព្រមទាំងបង្កើតឡើងនូវស្មារតីសាមគ្គី, និងស្មារតីប្រកាន់ពួក-ក្រុមផងដែរ ។ ក្នុងចំណោមល្បែងទាំងអស់, ខ្ញុំសូមលើកយកល្បែង "**ប្រជល់ចង្រិត**" មកធ្វើការសិក្សា និងអត្ថាធិប្បាយ ដូចតទៅ :

## I. អំពីចង្រិត :

ដើម្បីយល់បានអំពីការប្រជល់ចង្រិត, គប្បីយើងស្គាល់ចង្រិតសិន, ថាតើចង្រិតជាអ្វី ? តាមវចនានុក្រម សម្តេចសង្ឃរាជ ជួន ណាត ទំព័រ ១៧៨ ចង្រិត (ន.) ឈ្មោះសត្វល្អិតមានស្លាបហើរបាន ។ មានពូជចង្រិតផ្សេងៗ ជាច្រើន ដូចជា :

**១. ចង្រិតដូង** : ខ្លួនធំធាត់ប៉ុនៗ ម្រាមដៃ ។ ខ្មែរយើងទាំងនៅស្រែ ទាំងនៅក្រុង ចូលចិត្តបរិភោគចង្រិតដូងណាស់, ព្រោះគេយល់ថាចង្រិតដូង, ដែលញាត់គ្រាប់សណ្តែកដីលីង, ហើយបំពងនឹងខ្លាញ់ផងនោះ, មានរស-

ជាតិឆ្ងាញ់ចម្លែក ។ វារស់នៅតាមវាលស្មៅ ស្រែចម្ការ ។

**២ - ចង្រិតដែក** : មានមាឌតូចជាងចង្រិតដូង, ច្រើនរស់នៅក្នុងរន្ធសសរផ្ទះ រងាវឮច្រេកៗ តិចៗ ។

**៣ - ចង្រិតប្រផល់** : មានពីរបែប, កំណត់សម្គាល់តាមពណ៌សម្បុរស្លាបរបស់វា :

ក- ចង្រិតភ្លើង : មានពណ៌ស្លាបរាងលឿងភ្លាវ

ខ- ចង្រិតព្រលួតល័ខ : មានស្លាបពណ៌ខៀវក្រមៅ

គឺចង្រិតទាំងពីរប្រភេទខាងក្រោយនេះហើយ, ដែលក្មេងៗ តែងតែយកមកប្រជល់គ្នាលេង ទុកជាការកម្សាន្ត ។ វារងាវឮសូរច្រេកៗ ខ្លាំងៗ, គេអាចស្តាប់សូររងាវបានចម្ងាយប្រមាណពី ៥០ ម ទៅ ១០០ ម ។

**៤ - តើចង្រិតរស់នៅទីណា ?** : សូមជម្រាបថា, ចង្រិតប្រជល់រស់នៅតាមវាលស្រែចម្ការ ឬតាមជាយភូមិ ។ នៅរដូវដើមឆ្នាំ, ពេលពីខែចេត្រ ពិសាខ, ពេលដែលភ្លៀងធ្លាក់ដំបូងៗ, ដីមានស្មៅគ្រប់ប្រភេទដុះពាសពេញ, ចង្រិតចាប់ផ្តើមបន្តពូជកើតជាកូនតូចជាចៅ ។ តាំងពីពេលព្រឹកព្រលឹម, វាតែងរងាវប្តូរពេញ ដើម្បីបន្តពូជពង្ស ។

**៥ - អំពីការចាប់ចង្រិត** : កូនចៅកសិករនៅតាមស្រុកស្រែចម្ការ, តែកាលណាចូលដល់រដូវដើមឆ្នាំហើយនោះ, ពួកវាខិតខំស្វែងរកចង្រិតពូកែៗ មកចិញ្ចឹមទុកប្រជល់គ្នាលេងកម្សាន្ត ។ កាលណាឮសូរសំឡេងចង្រិតរងាវរន្ថើនឮច្រេកៗ, ខ្លាំងៗ នោះ, ក្មេងៗ សម្គាល់ថា, ឬមួយវាបរមេ (គរមេ), ឬមួយវាកំពុងអួតឫទ្ធិដាក់គ្នា, មុននឹងប្រជល់គ្នាតាមភាពជាសត្វ ។ វារ៉ែ

ដើរតាមស្នូរងាវនេះ, រហូតទាល់តែដល់កន្លែងដែលចង្រិតរស់នៅ ។ ជួនកាលពួកវាឃើញចង្រិតឈ្មោលពីរកំពុងប្រខាំគ្នាដណ្ដើមញី ។ ជួនកាលឃើញវាកំពុងតៀងគរចង្រិតញីដើម្បីបន្តពូជ ។ ជួនកាលទៀត, ឮស្នូរវារងាវចេញពីក្នុងរន្ធ ។ ចំពោះចង្រិតការញី, ឬចង្រិតជល់គ្នា, គឺវាជាការងាយស្រួលបំផុត, អាចឱ្យក្មេងៗ ចាប់វាដាក់ក្នុងកំប៉ុងផ្សេងៗ គ្នា ព្រោះដើម្បីកុំឱ្យវាជល់គ្នា, ខាំគ្នាក្នុងកំប៉ុងមុនឆាកប្រជល់ ។

**៦ـ អំពីការចិញ្ចឹមថែទាំចង្រិត** : កាលណាវាចាប់ចង្រិតបានហើយ, ទោះជាចង្រិតភ្លើងក្ដី ចង្រិតព្រលួតល័ខក្ដី, ក្មេងៗ ដាក់វាទុកក្នុងកំប៉ុងផ្សេងៗ គ្នា, មានគម្របចោះប្រហោងទុកឱ្យមានខ្យល់ចេញចូលសម្រាប់វាដកដង្ហើម ។ រៀងរាល់ថ្ងៃ, វាតែងរកស្លឹកស្មៅខ្ចីៗ, ក្ដិចជាកង់ខ្លីៗ, ដាក់ក្នុងកំប៉ុងឱ្យចង្រិតស៊ី, ក្នុងរយៈពី ៥ ថ្ងៃទៅ ១ សប្ដាហ៍, ដើម្បីឱ្យវាធំធាត់ មានកម្លាំងខ្លាំងក្លា ។

## II. អំពីឆាកប្រជល់ចង្រិត :

**១ـ ការប្រជល់ចង្រិតនៅភ្នុំខគូមិ**[៥៥] : នៅពេលព្រឹកជាពិសេស ក្មេងៗ ដែលបានចិញ្ចឹមបំប៉នចង្រិតបានធាត់ធំ, មានកម្លាំងពលំមាំមួន, មានអាការៈសាហាវ, ក្លាក្លំ, បញ្ចេញឫកសង្ហា, ក្លាហាន, គ្រាន់តែម្ចាស់វា

---

[៥៥] ពេលក្មេងៗ ទៅឃ្វាលគោនៅឯវាលស្រែ វានាំគ្នាបង្កើតឆាកប្រជល់ចង្រិតនៅទីនោះ ដោយចដើរជីកចង្រិតនៅដោយរន្ធ យកមកប្រជល់ភ្លាមៗ ។ វាជីកកូនរណ្ដៅជម្រៅប្រមាណ ១ តឹកម្លេះ និងទំហំវិជ្ឈមាត្រប្រហាក់ប្រហែលគ្នានេះដែរ សម្រាប់ធ្វើជាសង្វៀនប្រជល់ ។

យកស្លឹកស្មៅទៅត្បារក្នុងកំប៉ុង, វាដេញខាំយ៉ាងសាហាវ, ព្រមទាំងបន្ថែមសំឡេងរងាវឮច្រេកៗ ស្ទើរសង្កៀរត្រចៀក ។ ឃើញអាការៈវាយ៉ាងដូច្នេះ, ម្ចាស់ចង្រិតយល់ថា, វាមានលក្ខណៈសម្បត្តិគ្រប់គ្រាន់សម្រាប់ប្រជល់ហើយ ។ ក្មេងៗ ម្ចាស់ចង្រិត, ចេញពីផ្ទះរៀងៗ ខ្លួន, ដៃកាន់កំប៉ុងចង្រិត ហើយស្រែកប្រកូកហៅគ្នាថា : **"មកហើយប្រជល់ចង្រិត ..... ! "** គ្រាន់តែឮពាក្យប្រកូកប្រកាស, បបួលបែបនេះហើយនោះ, ក្មេងៗ ទាំងឡាយដែលមានចង្រិត, បានកាន់សត្វសំណព្វរបស់ខ្លួន ចេញពីផ្ទះមកជួបជុំគ្នានឹងក្មេងឯទៀត, នាំគ្នាដើរពប្អូរឆ ទៅរកម្លប់ដើមស្វាយ, ឬទីណាមួយសមស្របសម្រាប់ផ្គួរចង្រិតមុនបើកឆាកប្រជល់ ។

**២- ការផ្គួចង្រិត :** មុនដំបូង, ក្មេងៗ ដាក់កំប៉ុងចង្រិតនៅទីពានប្រជល់, ដើម្បីផ្គូផ្គងមើលចង្រិតណាដែលមានទំហំប៉ុនគ្នា ។ កាលណាផ្គូរួចហើយ, បើម្ចាស់ចង្រិតរៀងៗ ខ្លួនយល់ព្រមប្រជល់ហើយនោះ, គេយកផ្តិលពិសេសមួយមកធ្វើជាសង្វៀនប្រជល់ ។ គេដាក់ចង្រិតគូប្រកួតទៅក្នុងផ្តិលសង្វៀន ។ គេពេញចិត្តនឹងឮវារងាវច្រេកៗ បំពងស្លាប, អួតខ្មែតចុះខ្មែតឡើងដាក់គ្នាដោយក្តីក្លាហាន ។ ភ្លាមនោះ, ចង្រិតគូបដិបក្សទាំងពីរស្ទុះប្រខាំគ្នាយ៉ាងរបូតខ្លួន ។ ជួនគេចឆ្វេងគេចស្តាំ, ដើម្បីរើសរកកន្លែងចំណាប់សម្រាប់ខាំគូប្រកួតឱ្យឈឺចាប់, ដើម្បីនឹងបានទទួលជ័យជម្នះ ។ ក្នុងរយៈពេលមួយនាទី ឬពីរនាទី, ចង្រិតដែលខ្សោយ, ហើយត្រូវគូប្រយុទ្ធខាំត្រូវយ៉ាងដំណំនោះ, ក៏ចាញ់ហើយដកខ្លួនរត់គេចចេញពីចង្កូមគូប្រយុទ្ធ ។ គប្បីជ្រាបថា, ការរត់ដោះខ្លួនចេញរបស់ចង្រិតនេះ, គេពុំទាន់រាប់ថាចាញ់ជាស្ថាពរនោះទៅ

ឡើយទេ ។ គេមានវិធីម្យ៉ាងសម្រាប់ប្តូរចិត្តចង្រិតចាញ់, ឱ្យហ៊ានតទល់ជល់ជាមួយចង្រិតដែលឈ្នះវាអម្បាញ់មិញនេះសាជាថ្មីទៀត ។

**៣_ ការគ្រវីចង្រិត :** វិធីដែលប្តូរចិត្តចង្រិតចាញ់ . ឱ្យហ៊ានជល់នឹងគូប្រយុទ្ធនោះ, គឺការគ្រវីចង្រិតចាញ់ ។ តើគេគ្រវីចង្រិតដូចម្តេចទៅ ? ម្ចាស់ចង្រិតចាញ់មិនទាន់យល់ព្រមចុះចាញ់ភ្លាមៗ ទេ, ដោយទម្លាប់នៃល្បែងនេះ បើកសិទ្ធិឱ្យម្ចាស់ចង្រិតចាញ់គ្រវីជាគម្រប់បីដង, ហើយបើនៅតែចាញ់ទៀតនោះ ទើបច្បាប់ល្បែងកំណត់ថា **"ចាញ់ជាស្ថាពរ"** ។

ចង្រិតដែលដកមាត់រត់ចេញពីគូប្រយុទ្ធ, ហើយដែលពុំទាន់មានរបួសធ្ងន់ធ្ងរប៉ុន្មានទេនោះ, អាចនឹងហ៊ានជល់ម្តងទៀត, បន្ទាប់ពីត្រូវគេគ្រវីរួចមក។ ដើម្បីគ្រវីចង្រិត, គេយកសក់មួយសរសៃយ៉ាង វែង, មកឆ្វាក់ទាក់-ក-ចង្រិត (ចាញ់) ហើយគ្រវីជាច្រើនដង ( អាចប្រមាណបានថា ៣០ ទៅ ៥០ ជុំ) ។ ក្រោយពេលគ្រវី, ចង្រិតវិលមុខ ឡប់វង្វេងស្មារតី, ភ្លេចថាខ្លួនបានជល់ចាញ់គេ, ភ្លេចឈឺចាប់នឹងមុខរបួស ហើយឃើញមុខគូសត្រូវ (ចង្រិតគូប្រយុទ្ធ) របស់ខ្លួនអម្បាញ់មិញ, ដូចជាចង្រិតថ្មីប្លែកមួយផ្សេងទៀត ។ លុះម្ចាស់វាដោះសរសៃសក់ចេញពី-ក-របស់វា, ហើយដាក់ទៅក្នុងផ្តិលសង្វៀនវិញនោះ, វាក៏ស្ទុះទៅខាំគូប្រយុទ្ធសាជាថ្មីម្តងទៀតជាមួយគូសត្រូវ ។ ចង្រិតគ្រវីម្តងរួចមកហើយ ដែលចូលជល់ជាលើកទី ២ នេះ, ជួនកាលត្រឡប់ជាឈ្នះគូប្រយុទ្ធវាវិញក៏សឹងមាន ។ ជួនកាល, ទោះគ្រវីវាគម្រប់ ៣ ដងហើយក្តី ក៏នៅតែចាញ់គេដដែលក៏មាន។ ប៉ុន្តែការអនុវត្តត្រឹមត្រូវតាមទម្លាប់ល្បែងដូច្នេះ, ម្ចាស់ចង្រិតចាញ់, គឺចាញ់ដោយអស់ចិត្ត ។ គួរឱ្យអាសូរចង្រិតណាស់, ជួនកាល

ក្រោយពីគ្រវីវាជាលើកទី៣ ហើយ, វាក៏ទន់-ក-, ចេញទឹកមាត់, សន្លប់ស្តូក, លែងខាំទៀតកើតក៏សឹងមាន ។ ចង្រិតគូខ្លះ ដែលក្លាបានមម៉ោម្មុះ, សុខចិត្តខាំគ្នាទាល់តែស្លាប់រៀង១ ខ្លួនជាអសារបង់ ។ ជួនកាលស្លាប់មួយរស់មួយ ។ ចង្រិតស្លាប់, រងរបួសត្រង់ក្បាល, ត្រង់-ក-, ហូរទឹករងៃចេញពីខ្លួនដោយត្រូវនឹងចង្កូមដ៏មុតស្រួចរបស់គូសត្រូវ ។ រីឯការឈ្នះឬចាញ់របស់ម្ចាស់ចង្រិតជាគូល្បែងវិញ ក៏គ្មានអ្នកណាខាត ឬអ្នកណាចំណេញនោះដែរ ព្រោះពួកវាលេងល្បែងនេះ គ្រាន់តែជាការកម្សាន្តប៉ុណ្ណោះ វាកម្រនឹងភ្នាល់គ្នាដាក់លុយដាក់កាក់ ឬដាក់របស់ផ្សេង១ ណាស់ ។ អ្នកឈ្នះអាចមានមោទនភាព ឬមានអំណួត ពីការពូកែរើសរកចង្រិតខ្លាំងពូកែ និងពូកែចិញ្ចឹមថែបំប៉នចង្រិតប៉ុណ្ណោះ ។

កាលណាគូទី ១ ជល់ចប់, មានឈ្នះមានចាញ់ហើយ, ពួកគេក៏ ចាប់ផ្គូចង្រិតក្លាបានជាបន្តបន្ទាប់ទៀត, រហូតទាល់តែអស់ចង្រិតដែលត្រូវប្រជល់ ។ គប្បីជ្រាបថា, កុមារម្នាក់១, អាមានចង្រិតពូកែ១ ២ ឬ ៣ ក្បាល ។ កាលណាជល់ចាញ់, គេយកចង្រិតរស់ទៅលែងនៅតាមទីវាលស្មៅឱ្យរស់នៅតាមធម្មជាតិដូចដើម ។ អ្នកជល់ចាញ់គេ, បើយអស់ចង្រិតសម្រាប់ត្រៀមប្រជល់នៅលើកក្រោយ, វាក៏ដើររកចាប់ចង្រិតមកចិញ្ចឹមសារជាថ្មី ទុកសម្រាប់ប្រជល់ នៅលើកក្រោយ១ ទៀត ។

## III. អត្ថន័យនៃការប្រជល់ចង្រិត :

**១. ប្រជល់ចង្រិតដើម្បីកម្សាន្ត :** ល្បែងប្រជល់ចង្រិតនេះ, ត្រូវ

បានផ្ទេរបន្តពីជំនាន់មួយ, ទៅជំនាន់មួយ, រាប់សតវត្សមកហើយ, បានន័យថា, ជំនាន់ក្រោយទទួលបន្តល្បែងនេះ ពីរៀមច្បងមក ។

នៅក្នុងធម្មជាតិ, អ្វី១ តែងកើតមានស្រាប់ ។ ពពួកមនុស្ស, នាំគ្នាច្នៃអ្វី១ នោះមកបង្កើតទៅជាឈុតឆាកកម្សាន្តប្បាយ, ទៅតាមមជ្ឈដ្ឋាន, តាមកាលវេលា ។ បើមនុស្សមិនចេះច្នៃធម្មជាតិមកបម្រើការសប្បាយ, ឬផ្តល់ជាអត្ថប្រយោជន៍ឱ្យខ្លួនទេនោះ, សង្គមមនុស្សក៏គ្មានអរិយធម៌, វប្បធម៌, គ្មានការវិវឌ្ឍរីកចម្រើនអ្វីដែរ ។

**២. ប្រជល់ចង្រិតដើម្បីសាកល្បងប្រាជ្ញា និងការឈ្លាសវៃ:** ក្នុងចំណោមក្មេងស្រុកបាល១ គ្នាក្នុងភូមិ, ពិតជាមិនអត់ទេ, ក្មេងដែលមានប្រាជ្ញាវៃឆ្លាតជាងក្មេងឯទៀត ។ គេរកឃើញក្មេងប្រភេទនេះ, នៅក្នុងល្បែងប្រជល់ចង្រិតនេះឯង ។ ក្មេងឆ្លាតចេះសង្កេតសម្គាល់ចង្រិតដែលមានលក្ខណៈសម្បត្តិពូកែ, ក្លាហាន, តស៊ូ, អត់ធ្មត់ ។ ឧទាហរណ៍ : វាអាចជ្រើសយកតែចង្រិតណាដែលមានក្បាលធំ, ចង្កូមមាំ ..... ។ ចង្រិតរបស់ក្មេងប្រភេទនេះច្រើនតែជល់បានជ័យជម្នះជាដរាប ។

តាមការកត់សម្គាល់, ទៅអនាគត, ក្មេងនេះច្រើនបានទៅជាមេគេនៅក្នុងមជ្ឈដ្ឋានដែលវារស់នៅ ។ ជាធម្មតា, គេតែងជ្រើសរើសមនុស្សចេញពីចលនាការងារ ចលនាល្បែង, ចលនារៀនសូត្រ ..... ។ សូមអស់លោកអ្នកអានពិនិត្យមើលជីវប្រវត្តិរបស់ **"ឧកញ៉ាតេជោមាស"** ក្នុងរឿង **"កំពូលវីរៈបុរស"** នោះ នឹងបានជ្រាបកាន់តែច្បាស់ ពីបញ្ហានេះ ។

**៣. ប្រជល់ចង្រិតដើម្បីវិភាគ និងទស្សន៍ :** ថាសត្វចង្រិតចុះ,

វាជាសត្វតិរច្ឆាន, វាពុំមានធម្មសញ្ញា, ពុំមានវិចារណញ្ញាណដើម្បីត្រិះរិះរកហេតុផល, អាក្រក់ល្អ, គួរ និងពុំគួរ, សូម្បីគេគ្រាន់តែដាក់គូប្រយុទ្ធ ដែលជាពូជចម្រិតដូចគ្នា មកក្នុងសង្វៀន, (ផ្តិល ឬរពេញ) ក៏ស្រាប់តែស្ទុះហោទៅប្រខាំ ..... ប្រហារគ្នាដោយឥតពិចារណា, ឥតគិតគ្រោះថ្នាក់, ឥតគិតឈឺចាប់, ឥតគិតស្លាប់រស់ ..... ។

ចុះចំណែកមនុស្សវិញ, ដែលមានវិចារណញ្ញាណ, មានប្រាជ្ញា ចេះថ្លឹងថ្លែងរកអាក្រក់ល្អ, រកចំណេញខាត, ម្តេចក៏ប្រខាំគ្នា, ប្រយុទ្ធគ្នា, ប្រហារគ្នា, យ៉ាងក្រពុលមុខ, ស៊ីសាច់ហុតឈាមគ្នា, ព្យាបាទគ្នា, សម្លាប់គ្នាពេញញៀតដៃ, ដូចសត្វតិរច្ឆាន នោះទៅវិញ ? នេះជាប្រការមួយគួរឱ្យអាម៉ាស់ណាស់, គួរអៀនខ្មាសណាស់ ..... ។ គួរតែមនុស្សទាំងអស់ខិតខំបំពាក់ឱ្យខ្លួននូវមនុស្សធម៌, គតិបណ្ឌិត, និងសេចក្តីថ្លៃថ្នូផង ។

**៤. ការប្រដល់ចរិត និងទ្រឹស្តីព្រះពុទ្ធសាសនា :** ការអប់រំតាមបែបទ្រឹស្តីព្រះពុទ្ធសាសនា, បានហាមឃាត់ការបៀតបៀនគ្នា[៦៥], វិវាទគ្នា, បង្កនូវទុក្ខលំបាក និងការឈឺចាប់ដល់អ្នកដទៃ ។ ធម៌ព្រះពុទ្ធទូន្មានឱ្យមនុស្សរួមទៅ ចេះផ្តល់សេចក្តីសុខឱ្យដល់គ្នានឹងគ្នា, ចែករំលែកនូវផលប្រយោជន៍ដល់អ្នកដទៃ, ជួយលើកស្ទួយដោះទុក្ខអ្នកដទៃ ។ នៅក្នុងសង្គមមួយមិនអាចមានអ្នកសើច, អ្នកសប្បាយរីករាយពីលើគំនរទុក្ខ ពីលើទឹកភ្នែកអ្នក

---

[៦៥] ក្នុងសិក្ខាបទទី ១ នៃសីល ៥ បានចែងថា: "បាណាតិបាតា វេរមណី សិក្ខាបទំ សមាទិយាមិ" ប្រែថា : ឱ្យវៀរចាកការបំបាត់ជីវិតមនុស្សសត្វ (les êtres vivants) គឺហាមមិនឱ្យសម្លាប់ ឬធ្វើឱ្យគេរងទុក្ខលំបាកវេទនា ឈឺចាប់ ។

ដទៃទៀយ ។ បែបនេះ សន្តិភាពនឹងពុំមានឡើយ ។ ចុះការប្រជល់ចម្រិតវិញ. តើអ្នកណារងគ្រោះ ? អ្នកណាសប្បាយព្រោះបាន ជ័យជម្នះ ? ហើយការសោយសុខលើទុក្ខអ្នកដទៃមានឈ្មោះថា មានសន្តិភាព ឬទេ តើមានការចែករំលែកសេចក្តីសុខ និងផលប្រយោជន៍ឱ្យគ្នាហើយឬនៅ ? ។

**៥. បើចម្រិតជាមនុស្ស** : ជូនជាពាក្យកាព្យ

១- បើចម្រិតជាមនុស្ស គួរគិតកិត្តិយស កេរ្តិ៍ឈ្មោះអាត្មា
ពូជឯងសាសន៍ឯង ប្រជែងប្រហារ ឈ្លុះចាញ់មរណា
ដោយសារមានះ ។
២- ចង់មានអំណួត ឈ្លុះដើម្បីអួត ចម្លួតពេកណាស់
ឱ្យគេប្រជល់ យកជ័យជម្នះ អ្នកភ្នាល់ជាម្ចាស់
ឈ្លុះចាញ់ធម្មតា ។
៣- ឯអ្នករងគ្រោះ ត្រូវស្លាប់ឬរស់ ឈឺចាប់អាត្មា
ធ្វើឧបករណ៍គេ បានត្រឹមសោកា គួរឱ្យអនិច្ចា
ចម្រិតកម្លៅ ។
៤- ដូចមាន់គួរមុខ ជល់រួចកើតទុក្ខ ស្លាប់យ៉ាងសាហាវ
ជល់បងប្អូនឯង មិនមែនអ្នកក្រៅ ស្លាប់តែពង្សផៅ
ពូជសាសន៍ដូចគ្នា ។

# តំណមផ្សេងៗ នៅតាមជនបទ

**ក.ក.ន.** ការលើកយករបៀបរបប, ទំនៀមទម្លាប់ពីអតីត មកលាតបង្ហាញក្នុងពេលនេះ, វាមិនមែនមានន័យថា, ចង់បង្វិលចលនាវិវឌ្ឍន៍របស់សង្គមលោក, ឬសង្គមខ្មែរ, ឱ្យវិលបញ្ច្រាសថយក្រោយ, ដើម្បីទៅភ្ជាប់ជាមួយនឹងអតីតកាលយូរលង់វិញនោះឡើយ ។ អ្នកនិពន្ធយល់ថា, ពិតជាមានប្រយោជន៍ច្រើនណាស់ដល់អ្នកស្រាវជ្រាវជាតិ និងអន្តរជាតិ, ដើម្បីស្វែងយល់អំពីចង្វាក់ឬល្បឿនរីកចម្រើនរបស់សង្គមនីមួយៗ ។ អ្នកណាក៏ដឹងដែរថា "**បច្ចុប្បន្ន**" គឺជាផ្នែកនៃសម័យកាលមួយ ដែលតភ្ជាប់មកពីអតីតកាល និងបន្តភ្ជាប់ទៅអនាគតកាល ។

យើងសូមអញ្ជើញលោកអ្នកអាន តាមដានទូវប្រពៃណី,ទំនៀម-ទម្លាប់របស់បណ្ដាជនទៅតាមស្រុកស្រែចម្ការ, ទាក់ទងទៅនឹង "**តំណមផ្សេងៗ នៅតាមជនបទ**"

អស់លោកគួរតែយល់ថា, នៅតាមស្រុកស្រែចម្ការ, ដែលយើងតែងតែយល់ថាពានកប្រព័ន្ធការដឹងទាបជាងអ្នកទីក្រុងនោះ, យ៉ាងហោចណាស់ ក៏គាត់មានប្រើនូវសញ្ញាខ្លះៗ, សម្រាប់ជាដំណឹងដល់អ្នកភូមិផងរបងជាមួយនោះផងដែរ ..... ។

**១. តំណមសម្រាប់ស្ត្រីឆ្លងទន្លេ** : នៅតាមជនបទ, គេតម្រូវឱ្យមនុស្សទូទៅ (លើកលែងតែសមាជិកជិតស្និទ្ធនៃគ្រួសារ) គោរពដល់ស្ត្រីឆ្លង

ទន្លេ ។ ចាប់ពីថ្ងៃដែលស្ត្រីណោមួយឆ្លងទន្លេនោះ, គេតែងយក **"ឆាងម្នាស់"** ទៅចងនៅត្រង់ផ្ទៃកខាងឆ្វេង ឬខាងស្តាំនៃមាត់ច្រករបង ។ ចំពោះសញ្ញានេះ, អស់អ្នកស្រុកទូទៅ, ពិតទាំងក្មេងៗ ដឹងក្តីផង, គេកត់សម្គាល់ថា, នៅផ្ទះនេះ មានស្ត្រីម្នាក់ឆ្លងទន្លេ ។ ជួនកាលអ្នកទទួលបានសញ្ញានេះ, ក៏បានផ្សព្វផ្សាយប្រាប់អ្នកភូមិផងឱ្យដឹងផងដែរ ។ ដូច្នេះ, ឆាងម្នាស់មួយទងចងនៅទ្វារច្រករបង, អាចប្រាប់អ្នកផងឱ្យដឹងអំពីគ្រួសារមួយនេះ ទើបនឹងមានធុរៈ ដែលជួនកាលប្រកបដោយភ័យអាសន្នផង, បើការឆ្លងទន្លេនេះពិបាក, តឹងតែង, ដែលជាទូទៅ ចំណេះ, ជំនាញ, បទពិសោធន៍របស់ឆ្មបជនបទនៅមានកម្រិតទាប ។ ដូច្នេះ ការឆ្លងទន្លេមិនប្រក្រតី, ពិតជាធ្វើឱ្យក្រុមគ្រួសារភិតភ័យស្លន់ស្លោជ្រួលច្របល់ ។

ប៉ុន្តែ បើនៅតំបន់ខ្លះទៀត ដែលពុំមានទម្លាប់នឹងប្រើសញ្ញានេះទេ ឆាងម្នាស់មួយដែលចងនៅតាមច្រកទ្វាររបងនោះ នឹងពុំមានន័យអ្វីទាល់តែសោះ, ដល់អ្នកដទៃ ។ ការចងសញ្ញាឆាងម្នាស់នេះ គេហៅថា **"តម"** ។

**២. ហេតុអ្វីបានជាតម ? :** ពិតមែនតែរបៀបរបបរស់នៅតាមជនបទ, មិនមានបែបផែនជឿនលឿនដូចនៅទីក្រុងក្តី, ក៏គេប្រកាន់នូវជំនឿ និងទម្លាប់មួយដោយឡែកសម្រាប់មជ្ឈដ្ឋានរបស់គេដែរ ។ ធម្មតាស្ត្រីឆ្លងទន្លេ, ត្រូវគេដាក់ឱ្យបិតនៅក្នុងករណីដោយឡែក ។ អ្នកផងទូទៅត្រូវតែយោគយល់ដល់អធ្យាស្រ័យរបស់ស្ត្រីដែលកំពុងឆ្លងកាត់ព្យុះភ័យ ។ ឆ្លងទន្លេបានប្រសូតបុត្រចេញផុតពីផ្ទៃហើយ, ក៏នៅតែមានឧបសគ្គ, មានគ្រោះភ័យតាមជាប់គ្រប់ជំហាន ។ ស្ត្រីឆ្លងទន្លេនៅជនបទ, ជាទូទៅមានអាការៈខ្សោយ,

អស់កម្លាំងល្ហិតល្ហៃ, ដោយប្រពៃណីហាមមិនឱ្យបរិភោគចំណីមួយចំនួន, ដែលគេយល់ថា នាំឱ្យ "**ទាស់**" ក្នុងចំណោមចំណីដែលត្រូវតមនេះ, មានចំណីខ្លះមានឱជារសចម្លែក មានជីវជាតិខ្ពស់ អាចផ្តល់នូវកម្លាំងពលំដល់ស្ត្រីដែលកំពុងខ្សោះខ្សោយកម្លាំងនេះ ។

សូមអនុញ្ញាតជម្រាបថា, ចំណីដែលស្ត្រីទើបឆ្លងទន្លេថ្មីៗ ត្រូវតមមានជាអាទិ៍ :

**ក- ប្រភេទសាច់** : សាច់ទន្សាយ, សាច់ក្របី, សេះ, ជ្រូកព្រៃ, ឈ្លូស, ក្បាលជ្រូក ។ល។

**ខ- ប្រភេទបន្លែ** : ផ្សិតកញ្ចូ, ផ្លែម្នាស់, សណ្តែកបណ្តុះ, ល្ពៅទុំ ប្រទុំ

**គ- ប្រភេទធម្មជាតិ** : មិនឱ្យត្រូវទឹកភ្លៀង, មិនឱ្យផឹកទឹកត្រជាក់-អៀ, មិនអោយខ្លួនឱ្យត្រូវធាតុអាកាសត្រជាក់

**ឃ- ប្រភេទចិត្តសាស្ត្រ** : មិនឱ្យខឹង, មិនឱ្យកើតទុក្ខ, មិនឱ្យយំ, មិនឱ្យឈ្លោះប្រកែកគ្នា, មិនឱ្យរំភើបខ្លាំងក្លា

**ង- ផ្នែកកាយសម្បទា** : ហាមផ្តាច់មិនឱ្យរួមរក្សមុនកាលកំណត់ ៤០ ឬ ៥០ ថ្ងៃ ក្រោយឆ្លងទន្លេ, មិនឱ្យធ្វើការធ្ងន់ មានរែកទឹក, ទូល, លីសែង, របស់ធ្ងន់ៗ ជាដើម ។

បានជាស្ត្រីឆ្លងទន្លេត្រូវតម, ពីព្រោះ នាងឋិតក្នុងសភាពខ្សោយខ្លាំងទាំងខាងផ្លូវកាយ និងផ្លូវចិត្ត ។ សុខភាពនាងកំពុងផុយស្រួយខ្លាំងណាស់, ដែលចាស់ៗ នៅជនបទ តែងតែពោលថា "**សរសៃខ្ចី**" ។ រាល់ការប៉ះទង្គិចខាង

ផ្លូវកាយ, និងផ្លូវចិត្ត, នឹងបណ្តាលឱ្យមានជំងឺធ្ងន់ធ្ងរ, ពិបាកព្យាបាល, ឬជួនកាលនាំឱ្យស្លាប់យ៉ាងឆាប់រហ័ស, ព្យាបាលមិនទាន់ ជាដើម ។

**៣. អំពីការតមមាត់ពាក្យ**[៤៦] : នៅក្នុងសង្គមខ្មែរ, ការតមមាត់ ធ្លាប់មានតាំងពីដើម រហូតមកទល់សព្វថ្ងៃ ។ តើការតមមាត់នេះ, បណ្តាល មកពីអ្វី ? ហើយការតមមាត់នេះ មានប៉ុន្មានប្រភេទ ? ជាបន្តទៅនេះ, ខ្ញុំនឹង សាកល្បងធ្វើអត្ថាធិប្បាយជាលំដាប់លំដោយ ដូចខាងក្រោម :

**ក. ការតមមាត់ ដោយមូលហេតុអៀនខ្មាស** : ស្ត្រីខ្មែរកាលពេលចូលដល់វ័យក្រមុំ, នាងតែងតែលួចគិតថា, ចាប់ពីពេលនេះទៅ, នាងអាចនឹងត្រូវប្រពៃណីរៀបចំឱ្យមានបុរសណាមកគ្រប់គ្រងនាង, ក្នុងនាមម្ចាស់ជីវិត ឬស្វាមីជន, គឺជនដែលត្រូវធ្វើជាម្ចាស់នាង ។ ក្នុងកាលៈទេសៈនេះ, នាងក៏កើតមានការអៀនខ្មាសដោយឯង១ ពីធម្មជាតិ, ដោយមិនចាំបាច់មានបងស្រី, ឬម្តាយនាងប្រាប់ឡើយ ។ ការអៀនខ្មាសនេះ, កើតឡើងពីសង្គមការខ្លះ (Fait Sociologique) និងដោយភាគច្រើន មកពីហេតុ សរីរការណ៍ខ្លះ (fait physiologique) ។ នេះជាចរិតពិសេសដោយឡែករបស់ស្ត្រីខ្មែរ ។ ចំពោះស្ត្រីជនជាតិឥស្លាមនៃប្រទេសខ្លះនោះវិញ, ដែលគេបិទបាំងខ្លួនប្រាណជិតទាំងអស់, ទុកតែមុខបន្តិច, នឹងចុងដៃចុងជើងបន្តិចនោះ, គឺជាការអៀនខ្មាសតាមបែបហេតុការណ៍សាសនា (fait religieux) ។ ស្ត្រីខ្មែរក្នុងវ័យនេះ, ច្រើនតែតមមាត់តម-ក-, មិននិយាយស្តីរកប្រុសកំលោះ, មិនមែនក្នុងន័យស្អប់ខ្ពើម, គុំគួននោះឡើយ, តែគឺក្នុងន័យអៀនខ្មាស ។ រឿងចម្លែកមួយ

[៤៦] ខ្មែរយើងនិយមហៅថា "តមមាត់" ឬ "តមមាត់ តម-ក-" ពោលគឺនិយាយស្តីរកគ្នា ។

ទៀត, ដែលស្ត្រីក្រមុំខ្មែរតមមាត់, មិនស្ដីតបតផងដែរនោះ, គឺ "**បុរសជាគូដណ្ដឹង**" ។ នាងមិនស្អប់បុរសនោះទេ, តែនាងខ្មាសនឹងបុរសនោះ, ដែលនៅពេលខាងមុខ, នឹងត្រូវមកគ្រប់គ្រងលើរូបនាងក្នុងឋានៈជាប្ដី ។ ទោះព្រះសង្ឃដែលនៅក្នុងវ័យជាយុវជន (កំលោះ), ក៏ស្ត្រីក្រមុំខ្មែរមិនស្ដីរកដែរ ។ មានម្ដាយៗ ជាច្រើន, បានណែនាំកូនស្រីឱ្យស្ដីរកគូដណ្ដឹង, ឬព្រះសង្ឃកំលោះដែរ, ប៉ុន្តែ នាងនៅតែមិនអាចប្ដូរចរិត[៤៧] នេះបានដដែល ។

**ខ. តមមាត់ដោយមូលហេតុកំហឹង និងគំនុំ** : មនុស្សខ្មែរដែលឈ្លោះទាស់ទែងគ្នា, មានទំនាស់ផលប្រយោជន៍ផ្ទុយៗ ជាមួយគ្នា, មានទំនាស់ខ្វែងគ្នាខាងទស្សនៈយោបល់, មានទំនាស់ដោយហេតុច្រណែនកោងកាច, ប្រព្រឹត្តល្មើស, មិនស្ដាប់បង្គាប់, មិនសម្របសម្រួលជាមួយក្រុមគ្រួសារ, ជាមួយពួកក្រុម ..... នោះរមែងនាំទៅដល់ការខឹងសម្បារ, គុំគួនប្រកាន់មានះ, មិននិយាយស្ដីរកគ្នា ។

**គ. របៀបដោះស្រាយទំនាស់តមមាត់គ្នា** : នៅក្នុងវង្ស-ត្រកូលគ្រួសារខ្មែរ, ទំនៀមហាមទំនាស់វិបត្តិ, រហូតដល់តមមាត់ មិននិយាយស្ដី-រកគ្នាបានយូរឡើយ ។ ចាស់ទុំក្នុងវង្សត្រកូលគ្រួសារ, ជាពិសេស, ត្រូវតែរវៀសរវៃ មើលការខុសត្រូវ និងត្រូវតែជំរុញឱ្យបានទាន់ពេលវេលា អំពី អ្វីៗ ដែលបង្កជាភាពកករល្អក់នៅក្នុងវង្សត្រកូលគ្រួសារ ។ ប្រសិនបើទុកទំនាស់

---

[៤៧] នាពេលបច្ចុប្បន្ននេះវិញ ស្ត្រីក្រមុំខ្មែរនៅទីក្រុង ទីប្រជុំជន ឬដែលបានរៀនសូត្រខ្ពង់ខ្ពស់ហើយ មិនមែនត្រឹមតែមិនគោរពពិធីនេះតួដណ្ដឹងទេ តែថែមទាំងហ៊ានបណ្ដោយខ្លួនប្រគល់គ្នាជាមុនទៀតផង កាលណាបានធ្វើពិធីភ្ជាប់ពាក្យរួចហើយ ។

នេះឱ្យនៅឆេះឆំក្នុងត្រកូលគ្រួសារ. បង្អួសពេលឱ្យបានយូរបន្តិចនោះ. នឹងអាចកើតឡើងនូវឧបត្តិហេតុផ្សេង ៗ ដូចជា :

- មានមនុស្សជាសមាជិកវង្សត្រកូលណាម្នាក់ធ្លាក់ខ្លួនឈឺ ដោយមិនដឹងមុខ, ជួនឈឺក្បាលវិលមុខ, ជួនគ្រើខ្លួនក្តៅរងារ, ជួនរសាប់រសល់, រសេះរសោះក្នុងខ្លួន, .... និយាយរួមគឺមានអាការៈរោគចម្លែកមករំខានដល់សុខភាព, មិនឱ្យងងុយដេក, មិនឱ្យឃ្លានអាហារចំណើ ។ ក្នុងករណីនេះ, គ្រួសារអ្នកជំងឺនឹងខំស្វះស្វែងរកគ្រូហោទស្សន៍ទាយរកប្រភពជំងឺ ។ គ្រូហោវាយលេខ, មើលគ្រោះ ជោគជតារាសីតាមទម្លាប់, ក៏បានប្រាប់ទៅតំណាងគ្រួសារថា ឈ្មោះ (...[៤៨]) នេះឈឺដោយសារ **"ខុសចាស់ទុំ[៤៩] មាត់ពាក្យ"**, ត្រូវអញ្ជើញចាស់ទុំក្នុងវង្សត្រកូល ក្រុមគ្រួសារមកធ្វើពិធីសែនចាស់ទុំ, សុំលន់តូ, អង្វរករ, ខ្មោចចាស់ទុំទៅនោះ, អ្នកជំងឺនឹងបានស្រាកស្រាន្ត ជាសះស្បើយជាមិនខាន ។ រណ្តាប់រណ្តាសំណែន, មានបាយស្ងួត, មាន់ស្ងោរ, ទៀនធូប, ចេកទុំ, នំបញ្ចុក, ភេសជ្ជៈ, ស្រា, ទឹកក្រូច, ស្លាម្លូ, តែ ..... ជាដើម, ជាពិសេស ស្រូវ ១ ល្អី ដាក់ព្យួរនឹងសម្រែក ពីលើភស្តុភារវត្ថុសំណែន ។ ចាស់ទុំចូលរួមប្រមាណ ៧ ទៅ ១០ នាក់, ចាប់ផ្តើមពោលពាក្យ **"រូបមន្ត"** នៃការសែនព្រេន ចំនួនបីដង ។ សុំព្រលឹងចាស់ទុំ, មេត្តាអធ្យាស្រ័យ អភ័យទោស, ដល់ពួកយើងខ្ញុំជា

---

[៤៨] គឺឈ្មោះអ្នកជំងឺក្នុងត្រកូលគ្រួសារដែលកំពុងមានជំងឺ ។

[៤៩] មានខុសចាស់ទុំ ៣ ប្រភេទ គឺ : ចាស់ទុំក្រមុំកំលោះ, ចាស់ទុំពំនាក់បំពង់, ចាស់ទុំមាត់ពាក្យ ។ ពិធីសែនចាស់ទុំទាំងប៉ុន្មានប្រភេទនេះ គឺជារូបភាពនៃជំនឿសាសនាបែប ព្រលឹងនិយម (Animism) ។

ចាស់ទុំក្នុងត្រកូល, ដែលមិនបានជួយមើលទូន្មានដាស់តឿនឱ្យបានជិតដល់ ។ នៅក្នុងចំណោមសមាជិកនៃត្រកូលគ្រួសារទាំងអស់, តួអង្គសំខាន់ដែលត្រូវវត្តមានជាចាំបាច់នោះ គឺគូទំនាស់ដែលបានតមមាត់, មិនទាក់ទង, មិននិយាយស្តីរកគ្នា, ព្រោះពួកគេនេះ ជាស្នូលបញ្ហា ។ ពេលដែលអង្គប្រជុំបានសំបួងសម្រួង អំពាវនាវ ហៅព្រលឹងមេបា ចាស់ទុំ មកជាអធិបតី, ព្រមទាំងសេពសោយអាហារភោជន៍ដែលបានសែនថ្វាយនេះ ចាស់ៗ ក្នុងត្រកូលគ្រួសារបាននិយាយស៊ើទៅព្រលឹងជីដូនជីតា, ឱ្យអត់ឱនអធ្យាស្រ័យដល់អ្នកជំងឺ, លែងធ្វើឱ្យគ្នាឈឺថ្កាត់តទៅទៀត, សូមជួយដកពិស-ពា- ឱ្យបានសះស្បើយល្ហើយពីថ្ងៃនេះទៅ ។ រួចគាត់ក៏ស៊ើទៅសាមីជនគូទំនាស់, ឱ្យអង្វរករព្រលឹងជីដូនជីតា, មេបាចាស់ទុំ, ឱ្យបាត់ខឹងសម្បារនឹងកូនចៅទៀត, កូនចៅសុខចិត្តជានានឹងគ្នា, និយាយស្តីរកគ្នា, ទាក់ទងរាប់អានគ្នាជាបងប្អូនតទៅ, និងសន្យាថា, ថ្ងៃក្រោយបើបានខុសទាស់យ៉ាងណាៗ ក្តី នឹងសុខចិត្តពិភាក្សាដោះស្រាយគ្នាតាមសន្តិវិធី, ក្នុងភាពជាបងប្អូន, ហើយប្តេជ្ញាលែងបង្កើតរឿងតមមាត់គ្នានេះជាថ្មីទៀតឡើយ ។ ក្រោយពីពិធីសែនព្រេនសុំទោសព្រលឹងមេបា ចាស់ទុំរវាង ៣-៤ ថ្ងៃមក, អ្នកគូទំនាស់ក៏និយាយស្តីរកគ្នាវិញ ។ គឺបែបនេះហើយ ដែលជាជំនឿខ្មែរពីបុរាណ, ដែលមានវិធីដោះស្រាយម្យ៉ាងឱ្យអ្នកជំងឺបានជាវិញ ជំនួសការព្យាបាល, ដោយចាក់ថ្នាំ, លេបថ្នាំ ។ នេះជាវិធីព្យាបាលតាមបែបចិត្តសាស្ត្រ តាមបែបអប់រំខាងសីលធម៌យ៉ាងមានកម្រិតខ្ពស់ ។ ការព្យាបាលបែបនេះ គឺជាឱសថទិព្វ, សម្រាប់ផ្សះផ្សាសាមគ្គីភាពក្នុងរង្វង់គ្រួសារ, ក្នុងសង្គម និងក្នុងកម្រិតជាតិ ។

អាស្រ័យដោយមានសិល្បវិធីបែបនេះហើយ, ទើបសង្គមខ្មែរពីបុរាណមានចលនាសមូហភាពរឹងមាំ, មានការឯកភាពគញ្ញនាជាធ្លុងមួយ ។ ហេតុនេះ, សង្គ្រាមការពារជាតិ, សង្គ្រាមពង្វាតទឹកដី, ក៏តែងតែមានជ័យជម្នះជាដរាប ។ សង្គមខ្មែរយើងគ្រប់កាលៈទេសៈ, គួរតែយកគំរូ បុព្វបុរសយើងមកធ្វើការដោះស្រាយទំនាស់ផ្ទៃក្នុង, នោះទើបជាតិយើងមានជោគជ័យក្នុងការអភិវឌ្ឍន៍ក៏ដូចការការពារជាតិដែរ ។

# ជីវិតក្មេងវត្ត

កាលបើគេនិយាយអំពីជីវិតក្មេងវត្តនៅសម័យបច្ចុប្បន្ន (២០១០) បើចំពោះយុវជន, យុវនារី នៅតាមអនុវិទ្យាល័យ, វិទ្យាល័យ, មហា-វិទ្យាល័យ, សកលវិទ្យាល័យជាច្រើន, គិតស្មានថាជារឿងព្រេង ឬរឿងនិទាន ដែលកម្រមានឃើញក្នុងការពិត ។ ប៉ុន្តែ, បើចំពោះតាៗ, អាយុពីជាងហុកសិបឡើងទៅ, គាត់យល់ស្របថា, នេះគឺជាការពិត ឥតមានប្រឌិតកែច្នៃដូចរឿងក្នុងប្រលោមលោកឡើយ ។

ខ្ញុំលើកយករឿងអនុស្សាវរីយ៍អតីតកាល, យកមកពណ៌នាក្នុងពេលនេះ, គឺពុំបានគំនិតធ្វើឱ្យរស់ពីកាល ៧០ ឬ ៨០ ឆ្នាំ នោះរស់រវើកឡើងវិញនៅក្នុងសង្គមខ្មែរស៊ីវិល័យនោះឡើយ, ព្រោះអ្នកណាក៏ដឹងដែរថា ចលនាវិវឌ្ឍន៍របស់សង្គមលោក តែងតែបានឆ្ពោះទៅមុខជាដរាប ។ ព្រឹត្តិការណ៍សង្គមនេះសំខាន់ណាស់, បើយើងទាំងអ្នកធ្លាប់ឆ្លងកាត់, ក៏គួរតែរំលឹកអំពីអតីតកាលនេះឡើងវិញផងដែរ ។ ហើយកាន់តែសំខាន់ណាស់ទៅទៀត, គឺយុវជនជំនាន់នេះនិងជំនាន់ៗ ទៅខាងមុខ ។ ជាការល្អដែរ, គេអាចយករឿងរ៉ាវសង្គមពីអតីតកាល, មកធ្វើការសិក្សាប្រៀបធៀបជាមួយសង្គមបច្ចុប្បន្ន, ដើម្បីរកឱ្យឃើញនូវចំណុចវិវឌ្ឍន៍ និងចំណុចនឹងថ្កល់ ឬចំណុច **"ធាក់ថយ"** ។ ដោយខ្ញុំមិនចង់ឱ្យព្រឹត្តិការណ៍សង្គមនេះ, ត្រូវបានផ្សព្វផ្សាយតែតាមការនិយាយតៗគ្នា ពីមាត់មួយទៅមាត់មួយ, ទើបខ្ញុំខំរំលឹកពី **"ប្រវត្តិជីវិតក្មេងវត្ត"** នេះយកមកសរសេរចងក្រង, ហើយបោះពុម្ពផ្សព្វផ្សាយ ក្នុងទម្រង់ទ្រាយមួយទូលំ

ទូលាយ, និងមានលក្ខណៈជាបាតុភូតនៃសង្គមវប្បធម៌ខ្មែរ ក្នុងសម័យកាលមួយ ..... ។

ពិតមែនហើយថា, ការពណ៌នារបស់ខ្ញុំនេះវាគឺជាព្រឹត្តិការណ៍អនុស្សាវរីយ៍, កើតឡើងក្នុងជ្រុងមួយ, ក្នុងតំបន់មួយនៃកម្ពុជា, ដែលខ្ញុំ និងខ្មែរឯទៀតខ្លះ, ធ្លាប់រស់នៅ, ក៏ប៉ុន្តែ ប្រវត្តិនៃជីវិតក្មេងវត្តនៅទូទាំងកម្ពុជាអាចមានចំណុចខុសប្លែកគ្នាខ្លះៗ, ទៅតាមតំបន់ខេត្តខណ្ឌក៏ពិតមែន, ប៉ុន្តែក៏តែងតែមាន ចំណុចរួមដូចគ្នាជាទូទៅផងដែរ ។

នៅពេលនេះ, យើងគួរលើកសំណួរមួយថា, តើក្មេងវត្តមានប្រភពចេញមកពីណា ? ឆ្លើយតបទៅនឹងសំណួរនេះ, ខ្ញុំសូមនាំអស់លោកអ្នកអានមេត្តាវិលត្រឡប់បកថយក្រោយ, ទៅរកអនុស្សាវរីយ៍ដ៏ចំណាស់មួយ, ដែលអាចមានតាំងពីសម័យលង្វែកមកទល់នឹងដើមសម័យភ្នំពេញ ។ អនុស្សាវរីយ៍ដែលខ្ញុំនឹងពណ៌នាជូននេះ, គិតរាប់ទាំងអនុស្សាវរីយ៍ផ្ទាល់ខ្លួនរបស់ខ្ញុំផងដែរ គួបផ្សំនឹងការនិទានប្រាប់ពីតាៗ, អ៊ំៗ, ពូៗ, បងៗ, ដែលធ្លាប់ធ្វើជាក្មេងវត្តជាបន្តបន្ទាប់គ្នាគ្រប់ជំនាន់ ។

**១. ប្រភពក្មេងវត្ត :** កាលពីសង្គមអតីតកាល ពិសេសមុនសម័យអាណានិគមបារាំង, នៅប្រទេសយើង គ្មានសាលាបឋមសិក្សា, ទាំងបឋមវិជ្ជា និងបំពេញវិជ្ជា ក៏ដូចជាគ្មានអនុវិទ្យាល័យ, វិទ្យាល័យ, មហាវិទ្យាល័យ ឬ សកលវិទ្យាល័យឡើយ ។ កាលណោះវត្តអារាម មានឋានៈស្មើនឹងសាលាបឋមសិក្សា, មធ្យមសិក្សា, ឬឧត្តមសិក្សានាសម័យនេះដែរ ។

ដូច្នេះយើងអាចឆ្ងល់ថា, តើការសិក្សាអប់រំ, កាលពីជំនាន់នោះ, មានការវិវឌ្ឍន៍ និងមានអត្ថន័យយ៉ាងណា ? ហើយអ្នកប្រាជ្ញពហុស្សុតពីសម័យមុន, តើលោកទទួលការអប់រំបណ្តុះបណ្តាលតាមរបៀបណាដែរ ?

គ្រប់ក្រុមគ្រួសារខ្មែរ យកចិត្តទុកដាក់អប់រំបណ្តុះបណ្តាលនូវចំណេះវិជ្ជាផ្សេងៗ ចំពោះតែបុត្រាប៉ុណ្ណោះ ។ រីឯបុត្រីវិញ, សង្គមជំនាន់នោះ, មិនទាន់យល់ឃើញថា មានការចាំបាច់ត្រូវបណ្តុះបណ្តាលឱ្យចេះដឹងខាងអក្សរ-សាស្ត្រនៅឡើយទេ. ព្រោះវិន័យនេះគ្រួសារខ្មែរបុរាណមិនចង់ឱ្យកូនស្រីឃ្លាតចេញពីរង្វង់នៃការគ្រប់គ្រងរបស់មាតាបិតាឡើយ ។ ឯការអប់រំបណ្តុះបណ្តាលកូនស្រី, គឺប្រព្រឹត្តឡើងតាមរយៈ "**ពិធីចូលម្លប់**"[៥០] ។

សូមវិលត្រឡប់មកពោលពណ៌នាអំពីការបណ្តុះបណ្តាលកូនប្រុសវិញ ។ កាលណាបុត្រាក្នុងគ្រួសារណាមួយមានអាយុចាប់ពី ៧ ឆ្នាំឡើងទៅដល់ថ្ងៃ ១៤ ឬ ១៥ ឆ្នាំ ហើយនោះ, មាតាបិតាបានតម្រោងយកកូនទៅឱ្យសិក្សានៅសាលាវត្តក្នុងភូមិ ។ ការនោះ, ឪពុកម្តាយបានហៅកូនមកប្រាប់ឱ្យដឹងជាមុនថា : "ព្រឹកស្អែកនេះ, ឪម៉ែនឹងយកឯងឱ្យទៅនៅវត្តហើយ !"
នៅព្រឹកថ្ងៃកំណត់, មាតាក្មេងក្រោកពីព្រលឹម, រៀបចំធ្វើម្ហូបចំណីជាបាយ និងសម្ល, ម្ហូបពិសេសៗ, រួចហើយដួសដាក់ឆ្នាំង, កញ្ជើដាក់ក្នុងកន្ត្រក, ដែលលោកឪពុកជាអ្នករែកធ្ងន់ជើង រួចទើបនាំគ្នាឆ្ពោះទៅវត្ត ។ រីឯកុមារវិញ, ថ្ងៃនេះ ក៏បានការតាក់តែងខ្លួនស្អាតបាតជាងពេលមុនៗ ដែរ, គឺការកាត់សក់ថ្មី, ទុកកំប៉ោយវែងទាញយកមកស៊កត្រចៀកខាងស្តាំ ។ ប្រដាប់ដោយ

---

[៥០] សូមអានព័ត៌មានក្នុងសៀវភៅ "**ក្រមុំចូលម្លប់**" ដែលបោះពុម្ពផ្សាយក្នុងឆ្នាំ ១៩៨៧ ។

អាវដៃខ្លីពណ៌ស, និងខោខ្លីពណ៌ខ្មៅ ព្រមទាំងមានក្រម៉ាពាទាពាក់ឆៀងទៀតផងនោះ. ថ្ងៃនេះ សាមីកុមារ ហាក់មានអារម្មណ៍រីករាយ, ព្រោះត្រូវបានពាក់តែងកាយដោយសម្លៀកបំពាក់ថ្មីៗ, ប្លែកពីសព្វដង ។

លុះទៅដល់វត្តហើយ, ទាំងបីនាក់ ក៏ដើរឆ្ពោះទៅកុដិលោកគ្រូសង្ឃរាជ[៥១], នាំមុខដោយលោកឪពុក ។ ទៅដល់ហើយ, បិតាដាក់អម្រែកចង្ហាន់ពីស្មា, ហើយនាំភរិយា និងកូន ថ្វាយបង្គំលោកគ្រូដោយពិធទូលព្រះអង្គថា :

ថ្ងៃនេះ យើងខ្ញុំព្រះករុណាប្ដីប្រពន្ធទាំងពីរនាក់ បាននាំកូនប្រុសឈ្មោះ (..... [៥២]) មកប្រគេនព្រះគុណម្ចាស់, សូមមេត្តាបង្ហាត់បង្រៀន, អប់រំតម្រង់ប្រដៅឱ្យចេះដឹងខាងផ្លូវលោក, ផ្លូវធម៌ឱ្យទាន, ដើម្បីបានសុខសប្បុរសគ្រួសារទៅអនាគត និងឱ្យបានក្លាយទៅជាមនុស្សចេះដឹង ស្គាល់ខុសត្រូវ, ល្អអាក្រក់, ខ្ពស់ទាប, ចេះរស់សម្របសម្រួលនៅក្នុងសង្គម ...... ខ្ញុំព្រះករុណាប្រគេនរូបកាយកូនទាំងស្រុង សុំតែភ្នែក និងឆ្អឹងប៉ុណ្ណោះ ..... ។

ចំពោះឃ្លាចុងក្រោយនេះ, ប្រសិនបើកុមារទាំងអស់, ទាំងរូបតេរូបខ្ញុំ, ស្ដាប់អត្ថន័យបានទាំងស្រុងនោះ, ពិតជាភ័យតក់ស្លុតមិនតិចឡើយ ..... ។ ប៉ុន្តែ, យើងខ្ញុំជាកុមារ ពេលនោះចាប់ន័យមិនទាន់បានទាំងស្រុងទេ, ដោយគិតស្មានថា នេះជារូបមន្ត, ជាពាក្យសម្ដីជាការទូត, ដែលគ្រប់ឪពុកម្ដាយធ្លាប់តែពោលយ៉ាងនេះ, នៅពេលដែលយកកូនឱ្យទៅនៅវត្ត ។ ទាល់តែពេល

---

[៥១] ហៅម្យ៉ាងទៀតថា "សង្ឃរាជ" គឺលោកគ្រូអធិវត្ត ឬចៅអធិការ ។

[៥២] ទូលប្រាប់ឈ្មោះកូន ដើម្បីព្រះសង្ឃទ្រង់បានជ្រាប ។

ក្រោយមក. ដែលខ្លួនបានប្រព្រឹត្តខុសឆ្គង, ហើយត្រូវលោកគ្រូវាយយ៉ាងអស់ទំហឹងនឹងរំពាត់ផ្តៅ. ឈាមពេញខ្លួន. ទើបបានដឹងច្បាស់ពីអត្ថន័យ "**សុំតែភ្នែក និងឆ្អឹង .....**" នេះ ។ មកដល់ត្រង់នេះ ខ្ញុំសូមអនុញ្ញាតបញ្ជាក់ថា. កាលពីជំនាន់ដើម. រាល់ការបង្ហាត់បង្រៀនអប់រំ, តែងតែមានអមដោយ "**ទណ្ឌកម្ម**" វាយវាត់នឹងរំពាត់ផ្តៅ. តិចឬច្រើនទៅតាមកម្រិតទោសកំហុសធ្ងន់ធ្ងរ ឬស្រាលជាដើម ។ នេះជាទណ្ឌកម្មម្យ៉ាងដែលសង្គមបុរាណយល់ថាមានប្រសិទ្ធភាពបំផុតសម្រាប់កែប្រែសិស្សវត្ត. ពី "**ខិលមកខូចស្ទាហ៍ ពីខិលខូចមកល្អត្រឹមត្រូវ**" ។ លោកគ្រូយល់ថា. ចង់ដំកាំបិតឱ្យមុត. ទាល់តែដុតដែកឱ្យក្រហម វាយដែកឱ្យអស់ច្រែះ ។ ប្រការនេះ, វាផ្ទុយទាំងស្រុងទៅនឹងអត្ថន័យគរុកោសល្យទំនើប ដែលកត់សម្គាល់ថា ការឈឺចាប់ទឹកភ្នែក នឹងការភិតភ័យខ្លបខ្លាច តក់ស្លុត. នាំឱ្យបាត់វិញ្ញាណ. នាំឱ្យពាត់ការចងចាំ. និងនាំឱ្យអារម្មណ៍ហួងហែងកករល្អក់ ។ ឯគរុកោសល្យបុរាណយល់ផ្ទុយស្រឡះពីនេះថា. ការឈឺចាប់. ទឹកភ្នែក. និងស្នាមរបួស គឺជាអនុស្សាវរីយ៍ធ្វើឱ្យក្មេងវត្តចងចាំអស់មួយជីវិត នូវកំហុសដែលខ្លួនត្រូវលះបង់, និងគំរូតម្រាប់ល្អៗ របស់គ្រូដែលបានស្តីប្រដៅណែនាំហើយចារឹក ឆ្លាក់ភ្ជាប់នឹងខ្លួនដោយស្នាមរំពាត់ផ្តៅ ។

**២‸ កម្មវិធីសិក្សារបស់ក្មេងវត្ត** : នៅក្នុងវត្តនីមួយៗ មានកូនសិស្ស (កូនសេក្ខ[៩៣]) ជាច្រើន ។ សិស្សទាំងនោះត្រូវបានចាត់ជាបីក្រុម :

**ក‸ ក្រុមសិស្សថ្មី** ដែលទើបចាប់ផ្តើមរៀននៅថ្នាក់ដំបូង មានរៀន

---

[៩៣] បា.សិក្ខ ក្លាយទៅជា សេក្ខ រួចទៅជា សេក ។ ចាស់ៗតែងហៅក្មេងវត្តថា កូនសេកេ កូនលេក (គឺកូនសេកលោក) ។

ន មោ ..... ឬរៀនព្យញ្ជនៈ ក ខ គ ឃ ង ..... និងក្រុមរៀនបំបែក ក កា កិ កី ..... រៀនផ្ញើជើង ក្ន. ក្រ. ក្វ. ក្ល ..... ក្រុមរៀនប្រកប អក. ចក. កង. តម ..... ហើយនិងក្រុមរៀនអានសាស្ត្រា. ឬអានសៀវភៅ ..... ។

**ខ. ក្រុមចេះអានអក្សរដាច់** គ្រាន់បើ. លោកគ្រូតម្រូវឱ្យអានសាស្ត្រាច្បាប់ ដូចជាច្បាប់ក្រម. ច្បាប់កេរកាល. ច្បាប់កូនចៅ ..... ក្រុមមើលសាស្ត្រាល្បែង ដូចជា សាស្ត្រាសុបិន. សាស្ត្រាអក. សាស្ត្រាវិរវង្សវង្សវរវង្ស. ជិនវង្ស. ហង្សយន្ត ..... ។

**គ. ក្រុមបិតក្នុងកម្រិតខ្ពស់** រៀនអានសាស្ត្រាទេស. ក្នុងប្រភេទបញ្ញាសជាតក. ទសជាតក. ដូចជា សុវណ្ណសាម. ព្រះជនក. ព្រះទេមិយ-កុមារ. ព្រះវេស្សន្តរជាតកជាដើម ..... ។

នៅពេលល្ងាច. សិស្សវត្តទាំងអស់នាំគ្នាបរិភោគបាយបាត ដែលសល់ពីព្រឹក ឬក៏យកអង្ករពីផ្ទះ ទៅដណ្តាំបាយហូបជុំគ្នា ។ ទោះបីថា. អាចមានសល់បាយបាតពីព្រឹក. ក៏ប៉ុន្តែ រីឯសម្លវិញ ពុំអាចរក្សាទុកពីព្រឹកសម្រាប់ស៊ីនៅពេលល្ងាចបានឡើយ. ព្រោះសម្លទឹកអាចទើងជូរ. លើកលែងតែម្ហូបក្រៀមក្រោះដូចជាចៀន ឆា ត្រីងៀត ត្រីឆ្អើរ ។ល។ ជាទូទៅ ការហូបបាយពេលល្ងាចរបស់ក្មេងវត្ត. ច្រើនតែរអាត់ខាត់ ដោយយកស្បៀងលាយនឹងសំពេះជ្រូកធ្វើជាអាហារ ឬអំបិលបុកក្រសាំង. អំបិលបុកអំពិលខ្ចី. បរិភោគចម្លងរាត្រី. ដោយសង្ខេបប៉ុណ្ណោះ ។

**៣. អំពីសម្លហោះ :** បើគិតតាមអាយុ គេអាចចាត់ថ្នាក់ក្មេងវត្តជាបីប្រភេទ :

- ក្មេងអាយុពី ៧ ឆ្នាំ ដល់ ១០ ឆ្នាំ (ច្រើនតែជាសិស្សថ្មី ទើបនឹងរៀនព្យញ្ជនៈ, ស្រៈ, បំបែក .....)

- ក្មេងអាយុពី ១១ ឆ្នាំ ដល់ ១៥ ឆ្នាំ (ពួកនេះរៀនបានចេះត្រឹមផ្ទើរជើង ឬប្រកប, អានរួចតិចៗ)

- ក្មេងជំទង់អាយុពី ១៦ ឆ្នាំ ដល់ ២០ ឆ្នាំ (ពួកចេះអានស្ទាត់, កំពុងអានសាស្ត្រាល្បែង ឬសាស្ត្រាទេសនី)

ក្មេងប្រភេទទី ៣ ខាងក្រោមនេះ, ច្រើនតែពួកបានរៀនចប់កម្មវិធីសិក្សាក្នុងវត្ត, ហើយត្រៀមខ្លួនទឹងបួសជា សាមណេរ **(នេន)**, ឬជាភិក្ខុ, ដោយពួកគេរស់នៅក្នុងវត្ត, ដើម្បីរៀនធម៌បួស ។ នៅពេលកាលព្រឹក ក្រៅពីប្រុងត្រៀមព្រះ គេរវល់ធ្វើម្ហូបសម្លទឹក ឬជ្រក់ក្រៅអាំង ដើម្បីបម្រើគុណភោជនាហារ ។ ច្រើនតែកូនសេកចាស់ៗ ទេ, ដែលតែងតែលេងសើច ធ្វើបាបក្មេងៗ តូចៗ ជាការណ៍ :

**ក. សម្លហោះ**

**ខ. សម្លក្អោ**[៥៤]

**ក. សម្លហោះ** : ក្មេងវត្តធំៗ លើកចានសម្លទឹក, ហុតរួចហុចឱ្យទៅក្មេងម្នាក់ទៀត, ឱ្យហុតទឹកសម្លតៗ គ្នា, ពុំមានដាក់ចានដល់នរណាឡើយ ។ ធ្វើយ៉ាងនេះ, កូនសេកតូចៗ ពុំបានឱកាសបានហូប ឬហុតសម្លនេះឡើយ, ព្រោះអាធំៗ គេហុចចានសម្លពីដៃមួយទៅដៃមួយ, រំលងពីលើក្បាលក្មេងតូច ៗ ។ គេធ្វើការនេះទាល់តែអស់សម្លពីចាន ទើបដាក់

[៥៤] សម្លដែលគេច្រេចម្ទេសឱ្យហឹរខ្លាំងទាល់តែក្មេងៗស៊ីមិនកើត ។

មកដល់រនាប ។ គួរអាសូរក្មេងអភ័ព្វតូចៗ ដែលបានឃើញកាយវិការក្បេរសង្កត់មកលើខ្លួនតាមរយៈកលល្បិច គួរឱ្យឈឺចាប់បែបនេះពន់ពេកណាស់ ។ លុះបុតសម្ពអស់, នៅសល់តែចានទទេហើយនោះ, ពួកក្មេងពាលចិត្តអាក្រក់, សប្បាយរីករាយនឹងជោគជ័យរបស់ខ្លួន, ដែលបានធ្វើបាបក្មេងតូចៗ, បានសមតាមបំណងរបស់គេ ។ ប៉ុន្តែ, បើយើងសាកល្បងយកទំហំនៃសេចក្តីរីករាយរបស់កូនសេកធំៗ មកថ្លឹង, ប្រៀបធៀបនឹងទំហំការឈឺចាប់របស់កូនសេកតូចៗ វិញនោះ, ឃើញថា, មានកម្រិតក្តៅនិងត្រជាក់ខុសគ្នាឆ្ងាយណាស់ ។ កំហឹងឈឺចាប់មានកម្តៅអាចធ្វើឱ្យទឹក នៃជោគជ័យរបស់កូនសេកធំៗ នោះពុះគគ្រឹកបាន ។ ប៉ុន្តែ ដោយយល់ឃើញថា, ខ្លួនតូចកម្លាំងខ្សោយជាង, ដូច្នេះពួកកូនសេកអភ័ព្វ, បានត្រឹមសម្រក់ទឹកភ្នែក, និងលួចចងគំនុំក្នុងចិត្តតែប៉ុណ្ណោះ ។ នៅមានល្បិចបែបទី ២ ទៀតដែលសិស្សធំៗ និយមហៅថា :

**ខ. សម្លក្តៅ** : ពាក្យក្តៅក្នុងទីនេះ មិនសំដៅយកក្តៅភ្លើង ក្តៅទឹក ឬក្តៅថ្ងៃនោះឡើយ ។ ដូច្នេះ, តើសម្លក្តៅនេះ, មានសារជាតិដូចម្តេចទៅវិញ ? ។ ជាទូទៅ, គេធ្លាប់ដឹងគ្រប់គ្នាហើយថា, ក្មេងៗ មិនចូលចិត្តសម្ល ឬមុខម្ហូបដែលមានរសជាតិហឹរនោះឡើយ ។ គេសុខចិត្តមិនស៊ី ជាជាងប្រថុយស៊ីទាំងទឹកភ្នែក, និងក្របល់ក្រហាយពេញមាត់ ។ សិស្សធំៗ ដឹងច្បាស់អំពីចំណុចខ្សោយរបស់កុមារតូចៗ ហើយនៅពេលដែលគេបានសម្លឆ្ងាញ់ខុសប្លែកពីធម្មតា, ហើយដើម្បីកុំឱ្យកូនសេកតូចៗ អាចស៊ីសម្លនេះបាន, ជាហេតុនាំឱ្យខាតបរិមាណនោះ, គេក៏យកម្ទេសទុំ ៣ ឬ ៤ ផ្លែ មកញោចបំបែក, គួរឱ្យរសជាតិហឹរនេះរលាយសព្វក្នុងចានសម្លទាំងមូល ។ ធ្វើបែបនេះ, ពួកកូនសេក

ធំ ៗ ដែលមានទម្លាប់ស៊ានឹងរសជាតិហឹរនៃសម្ល, ក៏នាំគ្នាស៊ីយ៉ាងញាប់មាត់, ដោយសារមានតែពួកគេ ពីរបីនាក់ប៉ុណ្ណោះ, ដែលស៊ីសម្លហឹរបាន ។ ដោយឡែក, កូនសេកតូចៗ ដែលទោះបីគ្មានការហាមឃាត់ពីបងៗ ធំៗ, ក៏ពុំមានអ្នកណាម្នាក់ហ៊ានលូកលាន់**សម្លក្តៅ**នេះ, សូម្បីតែមួយម៉ាត់ក៏មិនហ៊ានផង, ព្រោះខ្លាចហឹរជាងបានឆ្អាញ់មាត់ ។ ដូច្នេះ, គឺសម្លញ្ញេចម្ទេសទុំ ហឹរក្រហាយរោលរាលពេញមាត់, ធ្វើឱ្យហូរទឹកភ្នែករហាមនេះហើយ, ដែលយើងប្រសិទ្ធ-នាមក្នុងទីនេះថា **សម្លក្តៅនោះ** ។

**៤. ស្នូចត្រីឈើក្នុងដី :** នៅពេលយប់, កូនសេកពោកតូចៗ, នាំគ្នាចូលដេកតាំងពីក្បាលព្រលប់, ក្រោយពីបានរៀនធម្មញ្ញធម៌, ថ្វាយបង្គំព្រះ, បានបីបួនមាត់ក្រាប់រួចនោះមក ។ ពេលក្មេងតូចៗ ដេកលក់ស៊ប់, ក្មេងវត្តធំៗ, កញ្ចុំស្បៀងតាមត្រីហ៊ាងចម្លែកប្លែកប្រាង, ដែលគេចំណាំហៅថា "**ស្នូចត្រីឈើក្នុងដី**" ។ គេយកខ្សែស្ទូច ឬអំពោះអេរវិបិតមួយដុំធំ, ទ្រើសជាងមេជ្រៃបន្តិច, រួចរកកញ្ចាំខ្សែព្រៅអ្នៀតចេញភ្ជាប់នឹងដងសន្ទូចធ្វើពីឈើ, ឬឫស្សី, ប្រវែងប្រហែលមួយហត្ថ ។ ក្មេងធំៗ ២ ឬ ៣ នាក់, ដើរពិនិត្យមើលក្មេងតូចៗ ណាដេកហាមាត់ស្រឡុកព្រហុងៗ ។ លុះរកឃើញបានហើយ, គេយកនុយរវិកិលទៅដាក់ជន្លៗ នៅក្នុងមាត់ក្មេងដេកលក់ ។ ក្នុងគ្រាស្របើស្រាប់ពេលកំពុងដេកនោះ, វាបានអារម្មណ៍ហាក់ដូចបានចំណីអ្វីមកប៉ះមាត់វា, ហើយវាក៏ដេញត្របាក់ខ្ជាក់ៗ ទាំងមិនដឹងខ្លួន ។ អ្នកស្ទូចសប្បាយណាស់, គេដកនុយយ៉ាងរហ័សមិនឱ្យត្រី (ក្មេង) ខាំត្របាក់ជាប់ឡើយ ។ គេតែងតែដកចេញយ៉ាងរហ័ស, រួចដាក់ជន្លក្នុងមាត់ក្មេងដេកលក់ឱ្យដេញត្របាក់ឥតឈប់ឈរ ។ លុះតែ

ដឹងថាក្មេងរងគ្រោះនោះ, រៀបនឹងភ្ញាក់ដឹងខ្លួន គេក៏គេចទៅកន្លែងផ្សេង, ព្រាស ដេកធ្វើព្រងើយ, ដរាបទាល់តែសិស្សតូចៗ ដេកលក់ស៊ប់, ទើបបន្តស្ទូចទាល់ តែអស់ចិត្ត ទើបវាដេកលក់ដរាបដល់ភ្លឺ ។

**៥. ឆ្កែស៊ីនុយនំអន្សម**[៩៥] : ដើម្បីបន្តលេងសើចជាមួយក្មេងវត្ត តូចៗ, ពួកសិស្សព្រោស តែងតែប្រឌិតល្បែងប្លែកៗ, ដែលសប្បាយតែខ្លួនឯង, តែធ្វើឱ្យគេចំបែងឈឺចាប់ ។ ល្បែងចម្លែកមួយទៀតនោះ, ឈ្មោះហៅថា "**ឆ្កែស៊ីនុយនំអន្សម**" ។ ក្មេងធំៗ កំហូច, រិះរកវិធីរំខានក្មេងតូចៗ, ដោយយក នំអន្សមសំណល់មួយកំណាត់ខ្លី, យកមកចងទៅចុងម្ខាងខ្សែ រួចបន្លាយខ្សែវែង យកចុងម្ខាងទៅចង "**មេត្តរ**" សិស្សតូចណាម្នាក់ដែលដេកលក់ស៊ប់ ហើយ ដែលបានដំណេកធ្ងន់នៅឯលើកុដិ ។ មិនយូរប៉ុន្មាន ឆ្កែវត្តដែលធំក្លិនកន្ទុយ អន្សម, ក៏ខំប្រឹងរត់តម្រុកស្រង់ក្លិននំអន្សម ។ ក្រោយពីបានរត់តាមស្រង់ក្លិន មួយសន្ទុះនោះមក, វាក៏បានរកឃើញ, ហើយក៏ខាំពាំបម្រុងយកទៅពួនស៊ីនៅ ក្បែរគុម្ពោតមួយ, ឱ្យឃ្លាតឆ្ងាយពីឆ្កែដទៃ, ព្រោះខ្លាចគេដណ្តើម ។ លុះដើរបាន បន្តិចក៏តឹងខ្សែ, ហើយរបូតនំពីមាត់វា ។ ជាថ្មីម្តងទៀត, វាខាំកន្ទុយអន្សម យ៉ាងអាំការពារកុំឱ្យរបូតទៀត, រួចពោលទៅមុខ ប៉ុន្តែ ខ្សែក៏តឹងជាថ្មីទៀត ។ ឃើញដូច្នោះ វាក៏ខំទ្រោបជ្រែងជើងខំទាញនំអន្សមយ៉ាងរស់ទំហឹង, ធ្វើឱ្យ ក្មេងដែលគេចង "ក្តរ" នោះភ្ញាក់ក្រញាង, ហើយស្ទុះស្រែកខ្លាំងៗ ថា : "ជួយ ផងៗ ! " ។ លុះក្មេងដទៃទៀត ដែលដេកក្បែរគ្នានោះភ្ញាក់ឡើង, ក៏ឃើញ ក្មេងរងគ្រោះនោះ, ខំប្រទាញខ្សែដើម្បីកុំឱ្យតឹង "ពងក្តរ" វាពេក ។ ការប្រទង់

---

[៩៥] គេច្រើនលេងល្បែងនេះក្នុងឱកាសបុណ្យកាន់បិណ្ឌ ព្រោះមាននំអន្សម ។

ប្រទាញគ្នារវាងក្មេងវត្តនឹងឆ្កែនេះ គឺជាការកម្សាន្តសប្បាយរីករាយរបស់សិស្សធំៗ ដែលពេញចិត្តនឹងជោគជ័យនៃល្បែងរបស់ខ្លួន ដោយភ្លេចគិតពីការឈឺចាប់ "កន្ត្រៃខ្មាស" របស់ក្មេងរងគ្រោះនោះឡើយ ដោយប្រដាប់ភេទរបស់វាត្រូវខ្សែរូតឡើងក្រហម ព្រមទាំងមានស្នាមរលាត់បន្តិចផងនោះ ក្មេងរង-គ្រោះ ស្រែកយំគួរឱ្យអាណិត ។ ឃើញដូច្នោះ លោកគ្រូបៅវត្ត ក៏ដាស់ព្រះសង្ឃ ទាំងភិក្ខុ សាមណេរ ទាំងក្មេងវត្តតូច ទាំងក្មេងវត្តធំ មកដេញដោលសាកសួររកមុខអ្នកលេងល្បែងចង្រៃបែបនេះ ហើយវាយជេរស្តីប្រដៅ ឱ្យរាងចាលកុំឱ្យប្រព្រឹត្តអំពើកំប្លុកនេះតទៅទៀត ។

**៧. របៀបទុកអន្សមឱ្យបានយូរ** : បណ្ដុកទេសនេះ ការធ្វើជំនាន់មុន ត្រូវបានគេចាត់ទុកថាជាវិធីអស្ចារ្យ គួរឱ្យកោតសរសើរទៀតផង ។ គប្បីជ្រាបថា ក្រោយថ្ងៃបុណ្យភ្ជុំបិណ្ឌម្តងៗ វត្តអារាមទាំងឡាយ សឹងសម្បូរពោរពាសទៅដោយនំអន្សម នំគម នំជាល នំបាក ចេកទុំ .....។ នំចំណីក្រាស់ជួរទាំងនេះ បានលើសពីសេចក្តីត្រូវការក្នុងវត្តនីមួយៗ ។ ដូច្នេះ ចាប់ពីថ្ងៃ ១ កើត ខែអស្សុជទៅ ក្រោយពីទទួលបញ្ជាពីព្រះគ្រូចៅអធិការវត្ត លោកនេនៗ នឹងក្មេងវត្តព្រមទាំងចាស់ៗ ដែលនៅប្រចាំការក្នុងវត្ត បានចាត់ចែងរកស្លឹកចេកធ្វើជ្រើស និងរកឧសមកដុតសម្រាប់ឆ្អើរនំគ្រប់ប្រភេទ ដើម្បីរក្សាទុកឱ្យបានយូរកុំឱ្យផ្អូម ។ ការឆ្អើរនំគ្រប់មុខនេះ មិនអាចមានគុណភាពបានលើសពី ៥ ឬ ៦ ថ្ងៃឡើយ ។ ប៉ុន្តែ នៅមានរបៀបរក្សាអន្សមទុកបានយូរមួយខែទៀត ដែលខ្ញុំនឹងជម្រាបជូន ដូចតទៅនេះ :

គេយកនំអន្សមខ្នាតធំ និងខ្នាតមធ្យម ចំនួន ១ ដប ឬ ២ ដប

មករុំនឹងស្លឹកចេកងាប់ (ស្ងួត). ក្នុងមួយស្រទាប់គេរឹតដោយខ្សែចំហេងឱ្យបានតឹងណែន ។ គេរុំរបៀបនេះរហូតដល់ ៥ ឬ ៦ ស្រទាប់ ។ ដូច្នេះ អន្សម ដែលរុំស្រោបដោយស្លឹកចេកងាប់នីមួយៗ, មានទំហំធំ ៣ ឬ ៤ ដងលើសទំហំដើមរបស់វា ។ លុះរុំបានណែនល្អត្រឹមត្រូវហើយ, គេយកខ្សែប្រវែងល្មម, យកមកចងនំអន្សម, ហើយប្រឡាយខ្សែទម្លាក់វាទៅក្នុងទឹកស្រះ-អណ្តូង ..... ។ រីឯចុងខ្សែម្ខាងទៀត, គេយកមកចងនៅគល់ឈើ ឬដំបូកដែលមាននៅជិតខាងទីនោះ ។ នំអន្សមដែលរុំបានណែនល្អ, ត្រូវគេត្រាំទឹកទុកប្រមាណពី ១ ខែទៅ ២ ខែ, ឬលើសនេះក៏មាន ..... ។ លុះដល់គេស្រង់វាលើកពីទឹកមក, គេបើកស្លឹកចេក ២ ឬ ៣ ស្រទាប់ខាងក្រៅ មានរលួយតិចឬច្រើន, ទៅតាមរយៈពេលយូរឬឆាប់, ដែលគេត្រាំវាក្នុងទឹក ។ លុះគេបកវាបន្តបន្ទាប់ពីស្រទាប់ក្រៅ, ដល់ស្រទាប់ក្នុងចុងក្រោយ, គេឃើញនំអន្សមនៅរក្សាភាពដើមរបស់វាដដែល, ដូចកាលគេមិនទាន់រុំដូច្នោះដែរ ។ កាលណាគេយកអន្សមដើម្បីបរិភោគ គេទទួលបានរសជាតិ ដូចពេលទើបនឹងស្ងោររួចដូច្នោះដែរ ។ មកដល់ពេលសព្វថ្ងៃ, ដែលវិទ្យាសាស្ត្របច្ចេកទេស, មានដំណើរជឿនលឿនទៅហើយនោះ, ខ្មែរនៅទីក្រុងឈប់ធ្វើរ, លែងរុំស្លឹកចេកទម្លាក់ទឹកទៀតហើយ, គេគ្រាន់តែយកនំអន្សមទៅរៀបរាយដាក់ក្នុងទូទឹកកកទៅ, នោះវាជាការស្រេច ។ ពេលគេចង់បរិភោគ, គេយកនំអន្សមមកកាត់ជាកង់ហើយ, ចៀនឱ្យទន់នោះ, នំអន្សមនៅតែរក្សារសជាតិឆ្ងាញ់ដូចដើមដដែល ។ ប៉ុន្តែបើនៅជនបទស្រុកស្រែចម្ការ, ឆ្ងាយពីទីប្រជុំជនវិញ ប្រហែលជានៅអនុវត្តការរក្សានំអន្សមឱ្យមានគុណភាពដូចពេលស្ងោរឆ្អិន, ដូចពេលមុននៅឡើយ ? ។

**៧. សេចក្ដីសន្និដ្ឋាន** : ជាសេចក្ដីសន្និដ្ឋាន គេមិនត្រូវបន្ទាបតម្លៃបច្ចេកទេសខ្មែរពីជំនាន់មុនឡើយ. ព្រោះទោះបីវាមិនទំនើបក្ដី, ក៏វាអាចបម្រើសេចក្ដីត្រូវការនៃជីវភាពក្នុងសម័យនោះ បានជាធម្មតា ។ សូមមើលបច្ចេកទេសស្ថាបត្យកម្ម និងសំណង់នៃប្រាសាទរាប់ពាន់ ក្នុងសម័យមុនអង្គរ. និងសម័យអង្គរទៅមើល. តើគួរឱ្យស្ញប់ស្ញែងឬទេ ? ហើយគួរពិចារណាផងដែរ អំពីមូលហេតុដែលទេសចរបរទេសធ្វើដំណើរចូលមកមើលបុរាណប្រាសាទយើង ក្នុងមួយឆ្នាំៗ រាប់លាននាក់នោះ តើនេះគេមិនមកកោតសរសើរបច្ចេកទេសយើងទេឬអ្វី ?

ម្យ៉ាងវិញទៀត ការរំលឹកយករឿងរ៉ាវពីអតីតកាល របស់ខ្មែរយើង នៅក្នុងសម័យគង់វត្តភាព ដែលជាមជ្ឈមណ្ឌលអប់រំបណ្ដុះបណ្ដាលមនុស្សខ្មែរ យកមកពណ៌នាពោលត្រង់បង្ហាញខ្មែរសម័យទំនើបបច្ចុប្បន្ននេះ ពីធ្វើឡើងក្នុងពោលបំណង ធ្វើឱ្យរស់ឡើងវិញនូវអនុស្សាវរីយ៍ដែលរកបាត់ទៅជាច្រើនពេលវេលា អស់រយៈពេលរាប់រយឆ្នាំមកហើយ ដើម្បីឱ្យមនុស្សជំនាន់នេះត្រិះរិះពិចារណា ប្រៀបធៀប សម័យមុន និងសម័យបច្ចុប្បន្ននេះ ដែលតែងតែមានឧបាយកលខ្ជិលច្រអូស, យកទុក្ខវេទនា, ទឹកភ្នែករបស់អ្នកខ្សត់ខ្សោយ មកធ្វើជាខឿនដែររួ សម្រាប់បម្រើការកម្សាន្តដ៏ពាលសាហាវរបស់ខ្លួន ។ ទោះបីនៅសម័យបច្ចុប្បន្ន ដែលការអប់រំមានស្តង់ដាខ្ពស់, សីលធម៌ទាញយកមកពីគោលទ្រឹស្ដីដ៏ឧត្ដមពីព្រះពុទ្ធសាសនាក្ដី ក៏នៅតែមានសម្រែកទ្រហោយំ, ក៏នៅតែមានទឹកភ្នែកឈាម, ក៏នៅតែមានសម្រែកឈឺចាប់, លេចចេញមកពីអ្នកក្រខ្សត់, ទន់ខ្សោយជាដើម, ក្រោមស្បែកជើងរបស់អ្នកខ្លាំង,អ្នកមាន, ដូច

ពីជំនាន់កូនសេកលោក សម័យឧដុង្គ. សម័យភ្នំពេញដូច្នោះដែរ. គ្រាន់តែពេលនេះ គេដូររូបភាពមិនប្រើសម្ពួហោះ. សម្លក្តៅ. ស្ងួចត្រីលើកុដិ. យកអន្សមធ្វើនុយស្ទួចឆ្អែទៀតទេ តែគេមានប្រើល្បិចថ្មី. សាហាវជាងមុនពន់ពេកកន្លង ។ ខ្ញុំយល់ថា មានប្រយោជន៍ណាស់ ក្នុងការយកព្រឹត្តិការណ៍ពីជំនាន់មុនមកធ្វើការប្រៀបធៀបនឹងជំនាន់នេះ ..... ។

ម្ហូបអាហារ តើគេត្រូវការប្រើអម្ពិលសម្រាប់ធ្វើអ្វីទៀតដែរ ? ផ្លែអម្ពិលមានតួនាទីសំខាន់ ខាងផលិតកម្ម :

**ក. ឧស្សាហកម្មធ្វើសាប៊ូកែសម្រស់ ខាងសោភ័ណភាពស្បែក** : ជាក់ស្ដែងក្រុមហ៊ុនថៃ បានយកផ្លែអម្ពិលមកផលិតសាប៊ូដុះស្បែក ឱ្យ-ស-ម៉ដ្ឋរលោង ដែលស្ត្រីមួយចំនួនធំនៅអាស៊ីបាននិយមប្រើប្រាស់យ៉ាងសកម្ម នោះគឺសាប៊ូ "នួលអាពេុង" ដែលខ្មែរហៅក្លាយមកថា "នួនអាពពុង" ថៃបទាំងមានតួរូបផ្លែ អម្ពិលជាសញ្ញាសម្គាល់ទៀតផង ។

**ខ. ឧស្សាហកម្មផលិតស្រាបៀរ** : នៅប្រទេសវៀតណាម ក្រុមហ៊ុនផលិតកម្មស្រាបៀរ បានមកទិញផ្លែអម្ពិលទុំ រាប់រយពាន់តោនពីប្រទេសខ្មែរយើង ពិសេសពីតំបន់ខេត្តដែលនៅជាប់នឹងព្រំដែនជាមួយប្រទេសវៀតណាម ។ រសជាតិនៃស្រាបៀរធ្វើពីផ្លែអម្ពិលទុំនោះ មិនចាញ់គុណភាពស្រាបៀរនាំចូលមកពីប្រទេសនានាលើសកលលោកប៉ុន្មានឡើយ ។ ដោយបានដឹងអំពីសារប្រយោជន៍ដ៏សំខាន់របស់អម្ពិលយ៉ាងនេះហើយ គួរជាប្រជា-ពលរដ្ឋខ្មែរយើងគាប់ខិតខំដាំ និងថែរក្សាអម្ពិល សម្រាប់រកចំណូលក្នុងការផ្គត់ផ្គង់ គ្រួសារ ។

**គ. ការដាំអម្ពិល** : ខុសប្លែកពីដំណាំផ្សេងៗ ទៀត ដែលគេត្រូវប្រើបច្ចេកទេសក្នុងការដាំដុះនោះ ការដាំអម្ពិល និងការថែទាំមិនមែងមានការងាយស្រួលច្រើន ។ ចាស់ៗ ចំណាំតែងនិយាយលេងផង មែនផងថា "**អម្ពិលកើតពីអាចម៍**" ។ ពាក្យអំពីមទាំងនៀមដូចពោលមកហើយនេះ ជួនកាលក៏តែធ្លាប់និយាយផ្ទាញ់ផ្ទាល ឬផ្ដៃផ្ដា ឱ្យដឹងថាឱ្យមនុស្សដែលគេបានជួយលេខ្លុះបណ្ដាល

ទំនុកបម្រុងឱ្យមានតួនាទី បុណ្យសក្តិ ឬទ្រព្យសម្បត្តិហើយ. បែរជាវេយ្យើស រមិលគុណ បំភ្លេចគុណអ្នកផ្តល់ប្រយោជន៍ឱ្យខ្លួន. នោះអ្នកធ្វើគុណតែងតែពោលពាក្យថា : "អារម្ពិលកើតពីអាចម៍" បានន័យថា ខ្លួនដែលបានឡើងឋានៈមកប៉ុណ្ណេះ មិនមែនកើតឡើងដោយសមត្ថភាពឡើយ គឺកើតមកពីការឈឺឆ្អាលរបស់សប្បុរសជន ដែលអាណិតអាសូរខ្លួនប៉ុណ្ណោះ ។ បុគ្គលទាំងឡាយគួរគប្បីកុំបំភ្លេចគុណូបការៈរបស់សប្បុរសជននោះឡើយ ។ ដូចបានពោលខាងលើ អម្ពិលដុះឡើងពីគ្រាប់ទុំដែលជ្រុះចោលរាយប៉ាយនៅជិតខាងដើមអម្ពិលធំ ហើយចេះតែខំប្រឹងលូតលាស់តាមរយៈធាតុអាកាសអំណោយផល ដូចជាទឹកភ្លៀង ទឹកសន្សើមជាដើម ។ ឯការដុះដាលមួយបែបទៀតរបស់អម្ពិល គឺដុះតាមរយៈលាមករបស់មនុស្ស, ដែលបរិភោគអម្ពិលទុំ លេបដោយទាំងគ្រាប់ទៅផង លុះបន្ទោរបង់ចេញមក ក៏ដោយទាំងគ្រាប់អម្ពិលមកផង ។ គ្រាប់អម្ពិលនោះក៏ដុះចេញពន្លក លូតលាស់កើតជាដើមអម្ពិល តាំងពីនៅតូចរហូតដល់ធំមានផ្លែផ្កា ។ ពីយ៉ាងដូច្នេះហើយបានជាខ្មែរយើងតែងតែពោលដោយត្រង់ ឬដោយន័យធៀបថា "អម្ពិលកើតពីអាចម៍" នោះ ។

សូមអញ្ជើញអស់លោកអ្នកអាន, វិលមកចូលពាក្យស្លោកទាំងបួនឃ្លាខាងដើមវិញ បន្ទាប់ពីបានជ្រាបខ្លះៗ អំពីរុក្ខជាតិអម្ពិលនោះរួចមក ។

**២. អម្ពិលឯត្បូង :** ការតាំងទីភូមិករ និងសង់លំនៅឋាននោះ បុរាណពាក្យយើងលោកតែងប្រដៅទូន្មានថា ចៀសវាងកុំឱ្យមានដើមអម្ពិលនៅពីខាងត្បូងផ្ទះឱ្យសោះ នេះនិយាយចំពោះតែនៅក្នុងទីបរិវេណភូមិដែលខ្លួនសង់ផ្ទះរស់នៅប៉ុណ្ណោះ ។ ប៉ុន្តែមិនគិតចំពោះដើមអម្ពិលដែលនៅទិសខាងត្បូង

ដែរ ហើយឋិតនៅក្នុងដីភូមិអ្នកដទៃទៀយ ។ បុព្វបុរសយើងលោកបានកត់ចំណាំទុកជាបទពិសោធន៍ ហើយផ្សព្វផ្សាយប្រាប់កូនចៅជំនាន់ក្រោយឱ្យដឹងថា បើមានដើមអម្ពិលនៅពីខាងត្បូងផ្ទះ ក្នុងបរិវេណភូមិដូច្នេះ វានាំមកនូវឧបទ្រពចង្រៃ រស់នៅមិនបានសុខ រកស៊ីមិនបានល្អូតលាស់ចម្រុងចម្រើនឡើយ ។

**៣. អណ្តូងខាងលិច** : នេះជាពាក្យស្លោកទីពីរ ដែលដូនតាយើងបានផ្តាំទុកថា កុំឱ្យមានអណ្តូងនៅពីខាងលិចផ្ទះ, ក្នុងបរិវេណភូមិដែលខ្លួនរស់នៅ ព្រោះវានាំមកនូវអពមង្គល ឧបទ្រពចង្រៃ រស់នៅមិនបានសុខសាន្ត ។

**៤. គោក្រយៅក្រឡាច់** : ដែលហៅថាក្រយៅនោះ គឺជាស្នាមកួចវិលនៃរោមគោដែលមាននៅផ្នែកផ្សេងៗ នៃរូបគោ ។ ក្រយៅគោមានច្រើនយ៉ាងដូចជា : ក្រយៅក្របួចកន្ទុះ នៅពីលើកញ្ចឹបកគោ, ក្រយៅអមគាង, នៅសងខាងពោះគោ ក្រយៅក្រឡាច់, នៅត្រង់ប្រជុំស្មាគោខាងលើក្បែរបូក ក្រយៅរំភាយខ្នាត់ ក្រយៅឈ្នោកក្រោល ជាដើម ។ ក្នុងចំណោមក្រយៅដែលចាស់បុរាណចាត់ទុកថាចង្រៃនោះ គឺក្រយៅក្រឡាច់, ក្រយៅរំភាយខ្នាត់ ..... ដែលលោកបានផ្តែផ្តាំថា កុំឱ្យចិញ្ចឹមគោដែលមានភិនភាគអវិជ្ជមានដូចជប្រាបខាងលើ ព្រោះលោកធ្លាប់កត់ចំណាំថា នឹងនាំមកនូវឧបទ្រពចង្រៃ ធ្វើឱ្យរលស់រលាយ អន្តរាយទ្រព្យសម្បត្តិ និងមានទុក្ខទោសផ្សេងៗ ជាដើម ។

**៥. ប្រពន្ធដោះឡេ** : ខ្ញុំសូមអស់លោកស្រីៗ មេត្តាអភ័យទោសឱ្យខ្ញុំផង ប្រសិនបើខ្ញុំយកបញ្ហានេះមកបកស្រាយ ។ វាហាក់ដូចជាខ្ញុំបើកកកាយកេរ្តិ៍កោះរបស់ស្ត្រីភេទ លាតត្រដាងបង្ហាញដល់មហាជនអ្នកអាន ។ ប៉ុន្តែទោះបី

ខ្ញុំមិនលើកយកមកនិយាយក្នុងទីនេះក្ដី ក៏អស់លោកស្រីភេទខ្លួនឯង ក៏តែងតែបាននិយាយដល់ប្រភេទផ្សេងៗ នៃដោះស្រ្ដីមុនរូបខ្ញុំទៅទៀត ។ សន្មតថា អស់លោកមិនប្រកាន់ខ្ញុំទៅចុះ ព្រោះខ្ញុំនិយាយរឿងនេះ ក្នុងក្របខណ្ឌប្រពៃណីទំនៀមទម្លាប់ខ្មែរ ។ ដូចអ្នកផងធ្លាប់បានជ្រាបស្រាប់ហើយថា ដោះស្ត្រីមានច្រើនប្រភេទដូចជា :

**ក. ដោះត្នោត :** ជាប្រភេទដោះដែលមានទំហំធំជាងទំព្រក់បន្តិច តែ បោកដូចចាក់ឫសយ៉ាងរឹងមាំ មិនរង្គោះរង្គើ មិនធ្លាក់យារឡើយ ទោះម្ចាស់ដោះនេះមានវ័យចាស់យ៉ាងណា ក៏នៅតែបោកពែកនដដែល ។

**ខ. ដោះក្រោល :** យើងធ្លាប់បានឮពាក្យនេះនៅក្នុងរឿងព្រេងនិទាន ដែលបានជាប់ពាក់ព័ន្ធនឹងពិធីអាពាហ៍ពិពាហ៍ខ្មែរសព្វថ្ងៃ ។ នោះគឺរឿងនាង "ព្រហ្មដោះក្រោល" ដែលត្រូវជាគូនឹងចៅ "វឹងស៊ុង" ជាព្រាន "ពាញ់ព្រង់" ។ ហើយបួបផ្សេងទៀត រឿងនេះក៏មានទាក់ទងនឹងបទភ្លេង "កន្ទែនទ្រាំង" ទាក់ទងនឹងភូមិ "គុស", ទាក់ទងនឹងពាក្យសំណួរសុំសួរអ្នកស្រុកថា : "ផ្លូវណាទៅទ្រាំង ទៅក្រាំងជន្លួស ផ្លូវណាទៅគុស ទៅស្រែននោង" .....។

ដោះក្រោលគឺជាប្រភេទដោះដែលពុំបានហើបសាច់ ពើតពើងទុលចេញទៅមុខដូចដោះដទៃៗ ឡើយ ។ ដោះក្រោលគឺជាពពកប៉ុប្រគ្រាន់តែខ្ពស់ជាងសាច់ទ្រូងបន្តិច ហើយមានចុងដោះជាទីសម្គាល់ប៉ុណ្ណោះ ។ ដោះក្រោលមានភាពណែនភ្ជាប់នឹងដើមទ្រូង ហើយនៅតែរក្សាភាពបោកណែនឱ្យនៅដដែល មិនធ្លាក់យារ មិនរយីករយាកជារៀងរហូតដល់វ័យចាស់ ។

**គ. ដោះសណ្ដាយ :** ដោះប្រភេទនេះ ច្រើនតែមានសណ្ដាន

ទ្រង់ទ្រាយធំជាងដោះប្រភេទដទៃៗ ទៀត ។ កាលស្ត្រីនៅវ័យក្មេង ទោះបី ដោះនេះធំហើយរាងទុលហើបទៅមុខក្តី ក៏នៅតែហាប់ណែនទ្រលុកទ្រលន់ ។ លុះដល់ស្ត្រីនោះមានកូនកាន់តែច្រើន មានវ័យកាន់តែចាស់ ដោះនោះក៏ធ្លាក់ យារចុះក្រោម រយីករយាក យោលយ៉ិលយ៉ាល់ចុះឡើង មានសណ្ឋានប្រហាក់ ប្រហែលនឹងផ្លែល្ហុង ។ ជួនកាល ឆ្លៀតពេលដែលស្ត្រីជាម្ដាយជាប់រវល់រវៃ ស្ល្រូត-អម្បោះនោះ កូនតូចដែលចេះវារ ឬចេះដើរ ក៏មកចាប់ទាញដោះពី ប្រឡោះក្លៀកយកទៅបៅឯខាងក្រោយធ្វើព្រងើយ ។ ឯម្ដាយក៏ឥតមានក្ដីរំខាន ក្នុងការងាររវើអម្បោះរបស់គាត់ដែរ ។ ដូច្នេះ កូនក៏បានបៅ ព្រោះដោះវែង ស្រួលទាញ ហើយម្ដាយក៏បានធ្វើការដដែល ( សុំទោស ) ។ ស្ត្រីភាគច្រើនពុំសូវ ចង់បានដោះប្រភេទនេះទេ ប៉ុន្តែគ្មានអ្នកណាអាចធ្វើមេបញ្ជាការទៅលើសង្ខារ ឡើយ ។ សង្ខារគាត់តែងយ៉ាងណាគឺវាយ៉ាងនោះហើយ ។ ជាថៃដន្យ. ស្ត្រី ភាគច្រើនណាស់ដែលមានដោះសណ្ដោយ ។

**ឃ. ដោះញ្ញ :** គឺជាដោះមានទ្រង់ទ្រាយផ្សេងមួយបែបទៀត ។ បានជាគេឱ្យឈ្មោះថា ដោះញ្ញ ព្រោះដោះនេះមានរាងមូលឈ្លមវែង តែមាន ទំហំតូច ។ នៅត្រង់រង្វង់ពណ៌ក្រមៅជុំវិញចុងដោះ មានរាងពកកន្ទួលតូចៗ ដូច ផ្ទៃផ្លែញ្ញដូច្នោះដែរ ។ ស្ត្រីដែលមានដោះញ្ញនេះ មានតិចជាទីបំផុត ។

**៦. សេចក្តីសន្និដ្ឋាន :** បន្ទាប់ពីបានកត់ចំណាំ សង្កេតសម្គាល់ និង សាកពិសោធន៍អស់ជាច្រើនឆ្នាំ ច្រើនលើក-ច្រើនដងនោះមក អាចឱ្យបុព្វបុរស យើងចងក្រងបានជាក្បួនមួយ. បែប **"ពិសោធន៍និយម"** (Empirique) ហើយផ្សព្វផ្សាយប្រាប់គ្នីគ្នាទុកជាពាក្យស្លោក "អម្ពិលឯត្បូង អណ្ដូងឯលិច

គោក្របៅក្រឡាច់ ប្រពន្ធដោះញី" ទុកជាការដាស់សតិទូន្មាន និងជាការហាមប្រាមកូនចៅជំនាន់គាត់ និងជំនាន់ក្រោយៗ ឱ្យខំចៀសវាង កុំឱ្យមានអម្ពិលនៅខាងត្បូងផ្ទះ កុំឱ្យមានអញ្ចេងនៅខាងលិចផ្ទះ.កុំចិញ្ចឹមគោក្របៅ ក្រឡាច់. និងចៀសវាងដាច់ខាត កុំយកប្រពន្ធដោះញីឱ្យសោះ ប្រយ័ត្នកើតក្តីអន្តរាយ មានគ្រោះថ្នាក់ ឬមានទុក្ខអាសន្នដល់ខ្លួន និងដល់ក្រុមគ្រួសារ ។ ប៉ុន្តែតាមការពិនិត្យមើលទៅ. អ្នកអនុវត្តពាក្យស្លោកនេះ អាចចៀសវាងបាននូវពាក្យស្លោកបីខាងលើ ។ រីឯប្រពន្ធដោះញីវិញពិតជាអាចនឹងជួបដោយចៃដន្យជាមិនខាន ព្រោះថា តើមានស្ត្រីឯណាគេអនុញ្ញាតឱ្យយើងមើលដោះគេ មុនយើងសម្រេចចិត្តចូលដណ្តឹងគេនោះ ? អ្នកណាក៏ដឹងដែរថា គ្រប់តែស្ត្រីតែងតែលាក់បិទបាំងកេរ្តិ៍ខ្មាសដោយប៊ីងម៉ាត់ណាស់. មិនងាយបណ្តែតបណ្តោយឱ្យប្រុសណាដឹងឃើញនូវរាគិកំបាំងគេសោះឡើយ ។ ដូច្នេះ គ្រប់តែបុរស មុខជាត្រូវផ្សងព្រេងដើម្បីអាចគេចផុត ឬជួបនឹងប្រពន្ធដោះញី។ ហើយប្រសិនបើជួបដោយចៃដន្យនោះ ក៏ច្បាស់ជាពិបាកក្នុងការដកខ្លួនចេញពី ស្ត្រីដែលមានភិនភាគ "អវិជ្ជមាន" ហើយដែលក្លាយមកជាប្រពន្ធស្របច្បាប់ របស់ខ្លួន តាមរយៈពិធី "អាពាហ៍-ពិពាហ៍" ស្របតាមប្រពៃណីរបស់ខ្មែរនោះ ពន់ពេកណាស់ ។ យើងអាចសាកល្បងទស្សន៍ទាយថា បុរសអភ័ព្វ ដែលបានក្លាយជាប្តីរបស់ស្ត្រីដោះញី ដែលបានជាគូទួមជាចៅទៅហើយនោះ ពិតជាមិនដាច់ចិត្តលែងលះគ្នាដោយសារតែជំនឿ "អបូរី" នេះឡើយ ។ យើងជឿថា ពួកគេនឹងទ្រាំប្រឈមនឹងពាក្យស្លោកជាកេរមត៌កពីបុរាណ ដោយសាកល្បងប្រថុយផ្សងព្រេងមើល ក្រែងលោព្រេងវាសនា ឬព្រហ្មលិខិតបំបែរ បញ្ចៀសចេញពីគ្រោះថ្នាក់ជា

យថាហេតុ ។ ប្រុស១ មិនមែនត្រឹមតែប្រឈមផ្សេងព្រេងនឹងស្ត្រីដោះញមួយមុខប៉ុណ្ណោះឡើយ ប៉ុន្តែ បើផ្អែកតាមពាក្យស្លោក ខ្មែរបុរាណផ្សេងៗ ទៀតនោះ ប្រុស១ ត្រូវរងផលវិបាកនឹងពាក្យស្លោកដោយឡែកពីនេះខ្លះទៀត ដែលខ្ញុំគិតថា មិនគួរនឹងជម្រាបនៅពេលនេះឡើយ ។

ពិតសព្វៗ ទៅ បុរាណាចារ្យយើង លោកខិតខំបញ្ចៀសកូនចៅពីគ្រោះចង្រៃអវិជ្ជមានផ្សេងៗ ដោយការរកហោរគន់គូរមើលខែឆ្នាំ ផ្សំធាតុ ផ្សំពង្សទាល់តែមើលទៅល្អ ត្រូវគ្នា ប្រកបនឹងគ្នា ទើបសម្រេចចិត្តផ្សំផ្គុំកូនចៅឱ្យទៅជាប្តីប្រពន្ធតាមប្រពៃណី ។

ប៉ុន្តែបើវិលមកគិតតាមធម៌ព្រះវិញនោះ មនុស្សគ្រប់រូបត្រូវតែជួបចៀសមិនផុតពីធម៌ត្រៃលក្ខណ៍ គឺ **"អនិច្ចំ ទុក្ខំ អនត្តា"** ។ ប្រការដែលល្អបំផុត គឺត្រូវធ្វើបុណ្យ ធ្វើទាន រក្សាសីល និងតាំងសមាធិ ធ្វើចិត្តឱ្យស្ងប់ ....។ មានតែផ្លូវនេះទេ ដែលនាំយើងឱ្យបានសុខ ទាំងជាតិនេះ និងជាតិខាងមុខ ។

# រឿងសិទ្ធិជាម្ចាស់ផ្ទះ

ដើម្បីផ្លាស់បរិយាកាសពីអត្ថបទប្រពៃណី ទំនៀមទម្លាប់នោះ ខ្ញុំសូមអញ្ជើញអ្នកអានតាមដានកម្សាន្តជាមួយរឿងព្រេងបុរាណមួយ ដូចតទៅ ។

ក្នុងអតីតកាលដ៏យូរលង់ ព្រះរាជាមួយអង្គព្រះនាម វិសុទ្ធរាជសោយរាជ្យ សម្បត្តិគ្រប់គ្រងរាស្ត្រដោយទសពិធរាជធម៌ នៅក្នុងអាណាចក្រមួយឈ្មោះ វិបុលរដ្ឋា ។ រាស្ត្រប្រជានៅក្នុងព្រះនគរ មានជីវភាពសម្បូរសប្បាយ ដោយសារភោគផលកសិកម្ម ពាណិជ្ជកម្ម បានលូតលាស់ចម្រុងចម្រើនជាលំដាប់ ។

ថ្ងៃមួយព្រះរាជា, មួយអង្គើដោយសេនាបតី, រាជបរិវារ, បានចេញចាកពីវាំងជ័យ យាងយាត្រាឆ្ពោះទៅកាន់ព្រៃព្រឹក្សាដែលមានចម្ងាយប្រមាណ ៨ យោជន៍ ដើម្បីទ្រង់ក្រសាលបរបាញ់សត្វ ។ ដោយសារាជទីនាំងអស្សរុតរបស់ព្រះរាជា, មានល្បឿនលើសលុបសេះពួកសេនាយោធា, ព្រះអង្គចេះតែបរសេះយាងចូលព្រៃដាច់សង្វៀងតែមួយអង្គឯង ។ រីឯពួកពលរាជបរិវារ, រួមទាំងអ្នកល្បើកសព្វផង, តាមមិនទាន់, ក៏រសាត់តម្រិះ ហើយនាំគ្នាបោះជម្រំរង់ចាំព្រះអង្គនៅទីទួលមួយនៅចន្លោះព្រៃ និងភូមិអ្នកស្រុក ក្រែងបានជួបនឹងព្រះអង្គ, ក្នុងក្តីព្រួយបារម្ភពន់ប្រមាណ ។

ចំណែកព្រះរាជា, លុះបំផាយរាជទីនាំងរស់ពេលមួយរយៈមក, ទ្រាដែលទ្រង់ងាកព្រះភក្ត្រទតទៅខាងក្រោយ, ក៏ពុំប្រទះឃើញពលសេនារាជបរិពារ, សូម្បីតែម្នាក់ក៏មិនឃើញផង ។ ខណៈនោះព្រះអង្គទ្រង់វិតក្កព្រួយព្រះ

ហបូទ័យយ៉ាងខ្លាំង ។ ណាមួយស្បែរាត្រីក៏បានគ្របដណ្តប់ទីព្រៃឱ្យងងឹតម្តង បន្តិចៗ ។ ព្រះអង្គក៏សម្រេចព្រះហបូទ័យ, បញ្ឈរាជជំនិះទៅមុខបន្តិចទៀត ។ ជាកុសលល្អ, គាប់ជួនពេលនោះ, ព្រះអង្គទតឃើញខ្ទមកំសត់មួយនៅក្នុងទ្រូងព្រៃ ។ ពេលនោះព្រះអង្គទ្រង់សោមនស្សណាស់ ដោយសង្ឃឹមថា នឹងបានជួបមនុស្សជាមិនខាន ។ ព្រះអង្គក៏យាងចុះពីខ្នងអាជានេយ្យ ហើយស្រែកហៅម្ចាស់ផ្ទះ។ ភ្លាមនោះបុរសម្នាក់ ឋិតក្នុងសម្លៀកបំពាក់ចាស់ពណ៌ស្រអាប់ ចេញមកជួបភ្ញៀវចម្លែក តែគាត់ពុំបានស្គាល់ថា ជននោះជានរណាឡើយ, ព្រោះព្រះរាជាទ្រង់ព្រះពស្ត្រសាមញ្ញធម្មតា ដូចជាព្រានព្រៃទូទៅដែរ ។ បុរសម្ចាស់ផ្ទះសួរ :

- បងមានការអញ្ជើញទៅណាទាំងពេលពន់ព្រលប់ដូច្នេះ ?

- ខ្ញុំដើររកស្វែងបាញ់សត្វដូចពេលសព្វមួយដងដែរ, តែអកុសលថ្ងៃនេះ ខ្ញុំវង្វេងរកផ្លូវចេញពីព្រៃមិនឃើញ ( ព្រានព្រៃក្លែងខ្លួនឆ្លើយតប )

- មិនថ្វីទេ, បើដូច្នេះ សូមបងសម្រាកនៅពិសារបាយជាមួយខ្ញុំមួយយប់សិនចុះ ទម្រាំព្រឹកឡើង ខ្ញុំនឹងបង្ហាញផ្លូវបងឱ្យចេញទៅកាន់ទីវាល ។

សន្ទនាគ្នាដល់ត្រឹមនេះ, ម្ចាស់ផ្ទះយកសេះភ្ញៀវទៅចងក្បែរផ្ទះ, រួចក៏មកអញ្ជើញភ្ញៀវឱ្យចូលអង្គុយលើរានក្នុងផ្ទះ ។ ម្ចាស់ផ្ទះក៏ប្រញាប់ទៅដណ្តាំបាយ អាំងប្លបសាច់ម្រឹគផ្អិនសព្វគ្រប់, ក៏អញ្ជើញភ្ញៀវពិសារបាយរួមជាមួយគ្នា ។ ព្រានយកក្តារចាស់ពីរបន្ទះតភ្ជាប់គ្នា មកធ្វើជាតុស្តុកសម្រាប់ដាក់ចានម្ហូប, និងជើងម៉ាកញ្ចាស់មួយធ្វើពីដើមឈើអារកាត់ជាកង់, សម្រាប់ធ្វើជាកៅអីអង្គុយ ។ ពេលរៀបនឹងបរិភោគ ម្ចាស់ផ្ទះគិតថា : "កៅអីអញមានតែ

មួយ. សម្រាប់តែអញអង្គុយតាំងពីដើមរៀងមក ។ ប្រសិនបើអញឱ្យភ្ញៀវព្រាននេះអង្គុយ, តើអញនឹងត្រូវឈរហូបបាយឬយ៉ាងណា ? ម្យ៉ាងភ្ញៀវនេះគឺជាព្រានព្រៃសាមញ្ញម្នាក់ប៉ុណ្ណោះ មិនមែនជាជនមានឋានៈខ្ពង់ខ្ពស់ឯណា ? គិតមកដល់ត្រង់នេះ, ក៏សម្រេចចិត្តថាត្រូវអង្គុយខ្លួនឯងចុះ ដោយពោលពាក្យថា: "ដោយយោលទៅលើសិទ្ធិជាម្ចាស់ផ្ទះ, ហើយដោយអនុលោមទៅលើភាពសមហេតុសមផល, គួរតែខ្ញុំអង្គុយលើកៅអីធ្វើពីកំណាត់កង់ឈើនេះចុះ !" ។ ចំណែកព្រះរាជាក្លែងខ្លួន, ក៏ឥតមានប្រកែកប្រកាន់អ្វីឡើយ, ដោយអនុលោមទៅតាមកាលៈទេសៈ។ ទ្រង់ក៏ទៅយកកំណាត់ឈើ និងឧសខ្លះៗ យកមកត្រៀបតរលើគ្នា, រួចក៏គង់ទៅពីមុខស្លាកអាហារ, ទល់មុខនឹងម្ចាស់ផ្ទះនេះទៅ។ គួរឱ្យអស្ចារ្យណាស់, ម្ហូបរបស់ជនទុគ៌ត មានតែសាច់ឈ្លូសអាំង ៣-៤ ដុំ, ពងមាន់ព្រៃពីរគ្រាប់ និងអំបិលបុកម្ទេសមួយកូនចានប៉ុណ្ណោះ ។ ប៉ុន្តែព្រះរាជាទ្រង់សោយក្នុងអារម្មណ៍ថា ពេលនុះជារសឆ្ងាញ់ខ្លាំងណាស់, មិនចាញ់ព្រះក្រយាស្ងោយនៅក្នុងវាំងឡើយ ។ ព្រះអង្គសោយបាយមួយចានហើយមួយចានទៀត, ទាល់តែតឹងព្រះឧទរ ។ ចំណែកជនទុគ៌តរកលក់ឧស, ក៏នឹកចម្លែកក្នុងចិត្តណាស់ថា, ចុះហេតុអ្វីក៏ព្រានព្រៃវង្វេងផ្លូវនេះ ពិសារបានច្រើនអ្វីដល់ម្លឹង ? ។ មិនពិបាកយល់ទេ តែកាលណាគេឃ្លានខ្លាំងនោះ ម្ហូបសាមញ្ញធម្មតាក៏ឆ្ងាញ់ពិសេសដែរ ។ លុះបរិភោគអាហាររួច, ព្រានព្រៃចម្លែកក៏សួរទៅកាន់ម្ចាស់ផ្ទះថា :

- សព្វថ្ងៃនេះតើអ្នកប្រកបមុខរបរអ្វីដែរ ?
- ជម្រាបអ្នកព្រានតាមត្រង់ទៅចុះ ខ្ញុំមកតាំងខ្ទមនៅក្នុងព្រៃនេះ,

សព្វថ្ងៃគឺ មានមុខរបរជាអ្នកកាប់ឧសលក់ និងដុតធ្យូង ( ម្ចាស់ផ្ទះឆ្លើយដោយទឹកមុខស្មើ)

- តើមុខរបរនេះបានធ្វើឱ្យអ្នកមានការលូតលាស់ចម្រុងចម្រើនឬទេ?

- ឱ ! លោកព្រានអើយ, ជីវិតខ្ញុំទុគ៌តតោកយ៉ាកណាស់, ដោយរាជការឃុំ-ស្រុក កំណត់ព្រំដែនព្រៃយ៉ាងតូច ឱ្យខ្ញុំប្រកបរបរនេះប៉ុណ្ណោះ ។ ដូច្នេះហើយ, ខ្ញុំរកកំរៃបានបន្តិចបន្តួចបំផុត, គ្រាន់តែបានរស់ទាំងត្រដាបត្រដួស ។ ទាំងភ្ញៀវ, ទាំងម្ចាស់ផ្ទះ, និទ្រាលង់លក់ស្កប់ស្កល់រហូតដល់ថ្ងៃរះ ។ អ្នកកាប់ឧសកម្សត់, ក៏បានជូនដំណើរព្រានព្រៃក្លែងក្លាយមកដល់ផ្លូវដែលចេញពីព្រៃទៅកាន់ទីវាល, ហើយប្រាប់ភ្ញៀវថា : "សូមអ្នកអញ្ជើញជិះសេះតាមផ្លូវនេះចុះ, ប្រមាណជា ២០ សិន[៩៦] ទៀត អ្នកនឹងបានចេញទៅដល់វាល ។ នៅទីនោះមានវាលស្រែ និងភូមិនិគមអ្នកស្រុក, ហើយអ្នកអាចនឹងទាក់ទងសួររកផ្លូវទៅកាន់ស្រុករបស់អ្នកបានដូចបំណង ។ ជាកិច្ចតបវិញ ព្រានព្រៃចម្លែក ក៏បានឱ្យក្រដាសរឹងមួយសន្លឹកទៅជនលក់ឧស ហើយប្រាប់បន្ថែមថា, បីថ្ងៃទៀតចូរអ្នកឯងធ្វើដំណើរទៅកាន់រាជធានី, ហើយបង្ហាញក្រដាស[៩៧] នេះដល់អ្នកយាម ទ្វារក្រុងទៅនោះ គេនឹងជូនអេងឯងទៅជួបនឹងខ្ញុំជាមិនខាន ។

និយាយពីមន្ត្រីពលសេនារាជបរិពារ, ដែលជូនដំណើរព្រះរាជាទៅបរបាញ់សត្វនៅក្នុងព្រៃ, ក្រោយពីខំបំផាយសេះតាមមិនទាន់ព្រះមហាក្សត្រនោះ

---

[៩៦] ខ្នាតវង្វាស់ប្រវែងរបស់ខ្មែរបុរាណ ១ សិន = ២០ ព្យាម, ១ ព្យាម = ១,៥០ ម ។

[៩៧] ជាអកុសល អ្នកកាប់ឧសដុតធ្យូងមិនចេះអក្សរឡើយ ព្រោះគេជាអ្នកជនបទ រស់នៅរកស៊ីកាប់ឧសតែក្នុងព្រៃ ។ ក្រដាសនេះគឺជាព្រះរាជសារមានបណ្ណមានសញ្ញាព្រះសង្ហានៃព្រះមហាក្សត្រ និងព្រះនាមព្រះមហាក្សត្រផង ។

មក, គេភិតភ័យ ព្រួយបារម្ភជាខ្លាំង, មិនដឹងថា តើព្រះរាជាទ្រង់ជួបនឹងគ្រោះថ្នាក់យ៉ាងណា, បានសុខទុក្ខយ៉ាងណា, ទៅដល់ទីណា ..... ។ ក្នុងក្ដីអស់សង្ឃឹម ពួកគេក៏នាំគ្នាចេញពីព្រៃ ហើយមកបោះជម្រំនៅទីទួលធំមួយក្បែរភូមិ, ដើម្បីរង់ចាំដល់ថ្ងៃស្អែក, នឹងនាំគ្នាស្វះស្វែងតាមរកព្រះអង្គតទៅទៀត ។ ស្រាប់តែនៅវេលាព្រឹកថ្ងៃរះកម្ពស់ចុងឈើ, ពួកគេត្រេកអររកអ្វីប្រៀបគ្មាន, ដោយបានឃើញព្រះរាជាគង់អស្សរតវិលមកជួបនឹងពួកគេវិញ ។ ព្រះមហាក្សត្រ ព្រមដោយពួកសេនាមន្ត្រីបរិវារ, ក៏ទ្រង់និវត្តមកកាន់ព្រះរាជនគរវិញដោយសុវត្ថិភាព ។

នៅថ្ងៃបន្ទាប់ទៀត, បុរសទុគ៌តកាប់ឧសលក់, ក៏នាំផ្លែព្រានព្រៃសម្លាញ់ ហើយធ្វើដំណើរទៅកាន់ក្រុង ។ មកដល់ទ្វារនគរ, គាត់បានបង្ហាញក្រដាសសម្គាល់ទៅអ្នកយាម ។ ពួកគេបានឃើញប័ណ្ណមានព្រះរាជសង្ហា, ក៏ពាក់ទៅពីព្រះតេជគុណហោរាហៅពីបើកញ្ញាការច្រកទ្វារនគរ ។ សូមអនុញ្ញាតជាព្រះរាជា, ពេលដែលព្រះរាជាវិលចូលរាជវាំងតាមច្រកទ្វារនេះ, នោះព្រះអង្គបានបានព្រះរាជបញ្ជាឱ្យថ្នាក់ដឹកនាំនៅទ្វារនគរ មកជួបគាល់ព្រះអង្គ, បើអ្នកស្រុកបានព្រះរាជឱង្ការថា, ក្នុងរយៈពេល ៣ ថ្ងៃទៀត, បើបានឃើញបុរសទុគ៌តក្រោកកាន់ព្រះរាជលិខិតដែលមានសញ្ញាព្រះរាជសង្ហានោះ, សូមចាត់ឱ្យនាយនិរសារម្នាក់នាំបុរសនោះទៅចូលគាល់ព្រះអង្គភ្លាម ។ បុរសកាប់ឧសលក់ដែលមិនដែលស្គាល់ទីក្រុងរាជធានីសោះនោះ, គាត់ឃើញអ្វីៗ សុទ្ធតែប្លែក, សុទ្ធតែអស្ចារ្យទាំងអស់, ញ៉ោះបើគាត់ក្រឡេកមើលគេធ្វើឱ្យ-ក-របស់គាត់វិលស្ទើរដល់ ១៨០ អង្សា ។ ប៉ុន្តែនៅប៉ុមយាមចូលព្រះនគរក្ដី, នៅទីដទៃ

ទៀតក្តី, ទោះបីគាត់មានសម្លៀកបំពាក់ជាអ្នកព្រៃជនបទក្តី, ដោយសារគាត់ជាមនុស្សមានអភ័យឯកសិទ្ធិនោះ, ពុំមានអ្នកណាហ៊ានប្រមាថមាក់ងាយគាត់ឡើយ ។ ផ្ទុយទៅវិញ, គេហាក់ដូចជាយកចិត្តទុកដាក់នឹងគាត់ខ្លាំងណាស់ ។ ថ្ងៃនោះ, វេលាប្រមាណជាម៉ោងបីរសៀល, នាយនិរសារក៏នាំគាត់ទៅផ្ទុកផ្តាក់ជាមួយលោកមហាមាត្យម្នាក់, ទំនងជាមន្ត្រីវាំងមានឋានៈខ្ពស់ជាបង្អួរ ដើម្បីនាំអ្នករកស៊ីកាប់ឧសលក់ ទៅក្រាបថ្វាយបង្គំព្រះរាជាម្ចាស់ជីវិត ។ មកដល់ទីនេះ, ជនកម្សត់យើងគិតអ្វីលែងយល់, មិនដឹងថាទីនេះជាអ្វី, ព្រោះឃើញមាននាម៉ឺនសព្វមុខមន្ត្រី មានឋានន្តរសក្តិខ្ពង់ខ្ពស់អង្គុយត្រៀបត្រាតាមថ្នាក់, តាមលំដាប់បុណ្យសក្តិ, តាមនាទីរៀងៗខ្លួន ។ សម្តេច ឧកញ៉ាវាំងកាននាំចៅកាប់ឧស, ខោមិនខោ, អាវមិនអាវ, ទៅថ្វាយបង្គំព្រះមហាក្សត្រ ។ បុរសកម្សត់ ថ្វាយបង្គំ ៣ ដងតាមការបង្គាប់របស់សម្តេចឧកញ៉ាវាំងវរៈវៀងជ័យ ។ លុះថ្វាយបង្គំរួចហើយ, ជនកម្សត់ងើបមុខសម្លឹងទៅភក្ត្រារបស់អ្នកដែលគាត់ថ្វាយបង្គំអម្បាញ់មិញ, ឃើញប្រហាក់ប្រហែលនឹងមុខអ្នកបរបាញ់ ដែលទៅសុំសម្នាក់នៅផ្ទះគាត់, កាលពីប៉ុន្មានថ្ងៃមុន ។ អ្នកកាប់ឧសនឹកឆ្ងល់ស្ទើរផ្ទុះខួរក្បាលរកគិតមិនយល់ ។ ឆ្ងល់ថា, ហេតុអ្វីក៏គេនាំគាត់មកកាន់ទីនេះ ? ហេតុអ្វីក៏គេឱ្យគាត់គោរពថ្វាយបង្គំមនុស្សម្នាក់ដែលគាត់ហាក់ដូចធ្លាប់ស្គាល់នោះ ? កំពុងតែតប់ប្រមល់ក្នុងចិត្ត, ស្រាប់តែគាត់ឮព្រះសូរសីហនាទរបស់បុរសដែលគាត់ថ្វាយបង្គំថា : "អស់អ្នកឧកញ៉ា, ព្រះវរង្គម្ចាស់, អ្នកអង្គម្ចាស់ទាំងអស់, ថ្ងៃនេះខ្ញុំមានមោទនភាព និងមានហឫទ័យរីករាយជាទីបំផុត ដោយបានបង្ហាញមុខជនសប្បុរសម្នាក់, ដែលបានយកចិត្តទុកដាក់ទទួលខ្ញុំឱ្យស្នាក់នៅ ១ យប់,

និងសោយព្រះក្រយាយ៉ាងឆ្ងាញ់រកអ្វីប្រៀបគ្មាននៅខួមកម្សត់របស់គាត់ ។ នាពេលយប់ដែលយើងបែកពីអស់លោកពលសេនា មន្ត្រីបរិវារទាំងអស់, វង្វេងចូលព្រៃក្រាស់តែមួយអង្គឯងនោះ ប្រសិនបើមិនបានជួបនឹងចៅសប្បុរសនេះទេនោះ ជីវិតយើងនឹងជួបគ្រោះភ័យជាមិនខាន ។ ទាល់តែនៅពេលដែលពួបុរសព្រានព្រៃពោលពាក្យដូច្នេះទើបជនកម្សត់យើងដឹងថា ភ្ញៀវពិសេសរបស់គាត់កាលពីយប់មុននោះ មិនមែនជាព្រានព្រៃទេ, តែគឺជាតួអង្គព្រះមហាក្សត្រ, ជាស្ដេចផែនដីគ្រងរាជ្យនៅនគរនេះ, គឺជាសម្មតិទេព, ជាទេវតាដោយសន្មត, ជាមនុស្សអ្នកមានបុណ្យ មានអំណាចដ៏កំពូលនាផ្ទៃក្រោមនេះ ។ លុះគិតមកដល់ត្រង់នេះ, បុរសកម្សត់នឹកភ័យក្រៃលែង ដោយខ្លួនធ្វើបដិសណ្ឋារកិច្ចមិនសក្តិសមនឹងព្រះឋានៈរបស់ស្ដេចផែនដី, ដោយកាយក្ដី ដោយវាចាក្ដី និងដោយខ្លួនប្រព្រឹត្តអំពើមិនគប្បីជាច្រើនចំពោះអង្គក្សត្រា, ពិសេសពេលខ្លួនឡើងអង្គុយលើកៅអីគល់ឈើមានតែមួយគត់, ហើយបែរជាឱ្យព្រះអង្គគង់លើគំនរឧស និងកំណាត់ឈើទាស់ៗ ព្រមទាំងពោលវាចាឆ្គាំឆ្គងថា "ដោយខ្លួនខ្ញុំជាម្ចាស់ផ្ទះ និងដោយអនុលោមទៅលើភាពសមហេតុសមផល, ខ្ញុំមានសិទ្ធិអង្គុយលើកៅអីធ្វើពីកំណាត់គល់ឈើនេះចុះ ?" ។ បុរសកាប់ឧស, កាលបើគិតមកដល់ត្រង់នេះ, គាត់ក៏កើតមានវិប្បដិសារីយ៉ាងខ្លាំង, ហើយបាក់បន្ទោសខ្លួនឯងថា, និយាយអ្វី, ធ្វើអ្វីៗ, មិនបានការក្រែងរអែងទុកជាមុនសោះ...! ។

ព្រះមហាក្សត្រទ្រង់បន្តព្រះរាជឱង្ការទៅកាន់អស់មន្ត្រីសេនាបតី ដែលកំពុងគាល់ហៀបត្រៀបត្រា ក្នុងរាជរោងរម្យថា "ដូច្នេះ យើងយល់ថា, បដិសណ្ឋារកិច្ច, និងកាយវិការស្វាគមន៍របស់បុរសកាប់ឧសចំពោះយើង, គឺជាអំពើដ៏ថ្លៃថ្លា,

ប្រកបដោយសប្បុរសធម៌, និងទុកជាគុណបំណាច់យ៉ាងធំក្រៃលែងរបស់អាណោ
ប្រជានុរាស្ត្រដ៏កម្សត់ទុគិតម្នាក់, ចំពោះអង្គមហាក្សត្ររបស់ខ្លួន ។ កាយវិការ
ដ៏វិសេសវិសាលនេះ, តម្រូវឱ្យយើងធ្វើតបទៅវិញឱ្យបានសក្តិសមបំផុត ។
ឮព្រះបន្ទូលមកដល់ត្រង់នេះ, ទុគិតជនហាក់មានអារម្មណ៍ធូរស្បើយបន្តិច,
ដោយហេតុថា, ស្តេចមិនគ្រាន់តែមិនចាប់ទោសប៉ុណ្ណោះទេ, ប៉ុន្តែថែមទាំងផ្តល់
កិត្តិយស និងទទួលស្គាល់គុណូបការៈរបស់គាត់ទៀតផង ។ ព្រះអង្គបន្តមាន
ព្រះបន្ទូលទៀតថា: "យើងមានហឫទ័យសែនរីករាយពន់ពេកណាស់ ដោយបាន
ឃើញអាណាចក្ររបស់យើងរហូតទៅដល់ជនបទ, ព្រៃភ្នំ, មានសប្បុរសជន
សុភាពស្លូតបូត, រួសរាយរាក់ទាក់, ហើយមានចិត្តសន្តោស ចេះយកអាសារគ្នា
ក្នុងគ្រាក្រ ....." ។ មានបន្ទូលបានត្រឹមនេះ, ទ្រង់ក៏ត្រាស់ហៅឧកញ៉ាវរៈ
វៀងជ័យមក មានព្រះរាជបញ្ជាខ្សឹបៗ, ហើយឧកញ៉ាក៏ក្រាបបង្គំលាទៅ ។

នៅពេលយប់នោះ ប្រមាណជាពេលពន់ព្រលប់, ព្រះអង្គបានត្រាស់
ហៅចៅកាប់ឧសកម្សត់, ឱ្យទៅជួបព្រះអង្គក្នុងបន្ទប់ពិសេសមួយ, រំលេច
ដោយក្បាច់រចនា, មានលម្អជាពិសេស ដោយបាច់ផ្កាក្រអូបឈ្ងុយឈ្ងប់ និង
មានតុដ៏វិចិត្រមួយមានកម្រាលក្រណាត់ទិព្វមាស, ព្រមទាំងបំភ្លឺដោយទៀន
នៅតាមជញ្ជាំង និងនៅលើតុ, ភ្លឺព្រោងប្រុះតួរឱ្យរំភើបរីករាយពន់ប្រមាណ ។
ក្រោយពីបុរសទុគិតក្រាបថ្វាយបង្គំរួចហើយ, ព្រះរាជាក៏ដឹកដៃគេឱ្យទៅអង្គុយ
ទល់មុខនឹងព្រះអង្គ ។ ព្រះអង្គទ្រង់ធ្វើព្រះសិតការណ៍ (ញញឹម) បន្តិច រួចក៏
មានបន្ទូលបែបលែបខាយលេងសើចថា : "ដោយយោលទៅតាមអត្តភាព
យើងជាម្ចាស់នៃរាជអាណាចក្រនេះ ក៏ដូចជាម្ចាស់នៃរាជវាំងដ៏ធំស្កឹមស្កៃនេះ

ផង, និងក្នុងនាមយើងជាស្តេចរបស់ឯង, យើងមានកៅអីស្អាតប្រណីត១ សម្រាប់យើងជាម្ចាស់ផ្ទះគង់ផង, និងសម្រាប់ឯងជាភ្ញៀវកិត្តិយសអង្គុយស្មើមុខគ្នាផង ។ ដូច្នេះចូរចៅកុំមានក្ដីរង្កៀសក្នុងចិត្តឡើយ, ហើយនៅពេលនេះ, ចូរឯងចាត់ទុកយើងជាភ្ញៀវ, ជាព្រានព្រៃដូចរាត្រីថ្ងៃមុននោះអញ្ជើញចុះ...!" ។ នៅពេលដែលព្រះអង្គកំពុងមានព្រះបន្ទូល បែបចម្លែកចម្ងន់ក្រសាលលេងផងនេះ, ពួកស្រីស្នំក្រមការ, នាយពិសេស បានជញ្ជូនព្រះស្ងោយរួមមាន បាយសម្ល ឆា ស្ងោរ ខ្ទិះ បំពង ញាំ ភ្លា ការី ...... ច្រើនពោរពាស, ដាក់យ៉ាងមានរបៀបនៅលើតុ, ដ៏មានក្លិនឈ្ងុយឈ្ងប់ក្រអូបប្រហើរ ស្ទើរស្រក់ទឹកមាត់ ។ នៅខាងមុខព្រះរាជា, មានផ្តិលមាស ចានមាស ស្លាបព្រាមាស, កែវមាស, ពែងបាស ..... អ្វី១ ក៏សុទ្ធតែមាសភ្លឺរន្ទាលឆ្អិនឆ្អៅ ។ រីឯនៅពីខាងមុខចៅកាប់ឧស, ក៏បានគ្រឿងប្រណីត១ ធ្វើពីមាសដូចគ្នា ។ អ្វីដែលគួរជម្រាបមិត្តអ្នកអានឱ្យបានជ្រាបនោះគឺ, ថ្ងៃនេះ ព្រះបហាក្សត្រទ្រង់គ្រឿងអម្ពរពស្ត្រាជាស្តេចផែនដី, រីឯចៅមាណពកម្សត់វិញ, មានសម្លៀកបំពាក់សមសួនដូចជាបន្ទាត់ក្នុងវាំងព្រាក់ដូច្នោះដែរ ។ នាយកម្សត់មានអារម្មណ៍វើរវាយហាក់ដូចយិតក្នុងសុបិន ។ តែចេះតែគិតថា អញឬមិនមែនអញ ? ឥឡូវនេះ អញកំពុងឈរលើផែនដី ឬក៏នៅលើឋានសួគ៌ ? ។ កំពុងតែវើរវាយដូច្នេះ, ស្រាប់តែគេឮព្រះរាជាមានបន្ទូលថា : "ណែ ! មាណពសម្លាញ់, មកយើងបរិភោគអាហារជាមួយគ្នា ប្រសិនបើបានម្ហូបចំណីណាមិនឆ្ងាញ់ដូចនៅផ្ទះអ្នកពីថ្ងៃមុននោះ, ចូរអ្នកយោគយល់អធ្យាស្រ័យឱ្យយើងផង, ដោយហេតុថា, ទីនេះជារាជវាំង វាមិនមែនជាព្រៃព្រឹក្សានោះទេ !" ចៅកម្សត់មានអារម្មណ៍ថា, ព្រះ

រាជាទ្រង់ចំអកលេងសើច, នោះគេក៏ញញឹម ហើយទូលតបថា : "នៅទីនេះ, ទូលបង្គំហាក់ដូចបានទៅឋិតនៅឯឋានសួគ៌ មិនមែនឋានកណ្ដាលទេ ! រីឯម្ហូបអាហារវិញ, ទោះបីអំបិលបុកម្ទេស សាច់ឈ្លូសអាំង, និងពងមាន់ព្រៃ ១០០ ផង, ក៏ឆ្ងាញ់មិនស្មើនឹងអាហារទិព្វនេះដែរ ! ទូលបង្គំមានវាសនាខ្ពស់ណាស់, ដោយបានទទួលការប្រោសមេត្តាដ៏កក់ក្ដៅពីព្រះអង្គ .....!" ។ លុះសោយ និងបរិភោគអាហាររួចសព្វគ្រប់ហើយនោះ, ព្រះរាជាក៏នាំចៅកាប់ឧសទៅកាន់បន្ទប់មួយផ្សេងទៀត, តុបតែងលម្អយ៉ាងប្រណីតដូចបន្ទប់ភោជនីអម្បាញ់មិញនេះដែរ ។ នៅពេលដែលព្រះអង្គកំពុងសោយទឹកតែ និងទឹកថ្នាំក្រអូប ( ព្រះឱសថ) នោះ នាយព្រះអាលក្ស ( នាយរក្សាឃ្លាំងស្ដេច) ក៏បានយកសម្លៀកបំពាក់ ក្រណាត់ជាច្រើនផាប់, សំពត់ជាច្រើនកាឡីដាក់ក្នុងហិបធំ, ប្រាក់សុទ្ធចំនួន ១០ ណែន[៩៨], ព្រះលិខិត ១ ច្បាប់បោះត្រារាជវាំងទ្រង់ត្រាស់បញ្ជាទៅចៅហ្វាយស្រុកក្នុងតំបន់ ដែលចៅកាប់ឧសរស់នៅ, ឱ្យប្រគល់ព្រៃ[៩៩] ១ តារ៉ុតបួនជ្រុង សម្រាប់ចៅមាហោពធ្វើអាជីវកម្មកាប់ឧសលក់ និងធ្វើធ្យូង, ដោយមិនឱ្យរាជការស្រុកយកពន្ធដារអ្វីឡើយ ។ ព្រះរាជាប្រទានវត្ថុទាំងនេះដោយផ្ទាល់ព្រះហស្ត ហើយត្រាស់បង្គាប់ឱ្យមហាមាត្យនាំមាណពទៅដេកក្នុងបន្ទប់មួយដ៏សមរម្យ ។ ចៅមាណពនឹកអស្ចារ្យនឹងព្រេងសំណាងរបស់ខ្លួន ហើយលួចគិតតែក្នុងចិត្តថា : "ឯងភ័យស្ទើរលូសព្រលឹង, ក្រែងស្ដេចយកទោស ដោយបានធ្វើ

---

[៩៨] ប្រាក់ស្លឹក ១ ណែន = ១០ រៀលប្រាក់សុទ្ធ ដូច្នេះ ១០ ណែន = ១០០ រៀលប្រាក់សុទ្ធ គិតនឹងមាសសព្វថ្ងៃ អាចស្មើនឹង ៣០ តម្លឹង ។

[៩៩] ១ តារ៉ុត = ពីរពាន់ព្យាប = ៣ គីឡូម៉ែតបួនជ្រុង ។ ជារង្វាស់ចម្ងាយពីបុរាណស្មើ ៩ គ.ម$^{២}$ ។

អំពើមិនគប្បីចំពោះព្រះអង្គ, ស្រាប់តែទ្រង់ប្រទានប្រាក់ ព្រៃកាប់ឧស និងក្រណាត់សំពត់យ៉ាងសន្ធឹកសន្ធាប់នឹកស្មានមិនដល់ ។ លុះព្រឹកឡើង នៅពេលក្រោកពីដំណេក មានសេនាអាមាត្យមកជួយសែងហិបសំពត់ក្រណាត់ និងប្រាក់យកទៅដាក់រទេះសេះ ជូនដំណើរចៅមាណពត្រឡប់មកលំនៅឋានរបស់ខ្លួនវិញ ។

ចាប់តាំងពីពេលនោះមក ចៅមាណព លែងបិតនៅជាជនកម្សត់ដូចពីមុនទៀតឡើយ ។ គេសង់ផ្ទះថ្មី, រៀបអាពាហ៍ពិពាហ៍នឹងស្ត្រី ដែលខ្លួនពេញចិត្ត, ហើយញ៉ាំងជីវភាពគេឱ្យសម្បូរធូរធារតាមរយៈដើមទុនដ៏ច្រើនសម្បើមដែលព្រះមហាក្សត្រក្រោសប្រទាន ។ ទាំងនាម៉ឺនសព្វមុខមន្ត្រីក្នុងស្រុក, ក្នុងឃុំក៏សម្តែងនូវការគោរពរាប់អានចៅមាណព, ហើយទាំងអស់គ្នា បានស្ងើចសរសើរនូវភ័ព្វសំណាងរបស់មាណពនេះគ្រប់ៗ គ្នា ។

រឿងព្រេងដែលបាននិយាយរ៉ាប់ជូនមកខាងលើនេះ សរុបសេចក្តីបញ្ជាក់ថា : ព្រះមហាក្សត្រទុកដូចជាមេដ៏ជាឪរបស់ប្រជារាស្ត្រ ។ អាស្រ័យដោយព្រះហឫទ័យមេត្តាសន្តោសប្រណី របស់ថ្នាក់ដឹកនាំកំពូលនេះហើយ ដែលរាស្ត្រប្រជាក្នុងនគរបានជ្រកក្រោមម្លប់ដ៏ត្រជាក់ និងបានសុខកាយសប្បាយចិត្ត ប្រកបរបររគ្រប់យ៉ាងបានរីកចម្រើនល្អតណាស់, ធ្វើឱ្យជីវភាពរាស្ត្រ សម្បូរធូរធារ ធ្វើឱ្យរាស្ត្រគោរពស្រឡាញ់ថ្នាក់ដឹកនាំ ធ្វើឱ្យនគរទាំងមូល រស់នៅក្នុងភាពសុខដុមរមនាជារៀងរហូត ។

## "ទឹកត្រជាក់ត្រីកុះករ, ទឹកក្តៅខ្ញុំត្រីរត់ចេញ"

**កំណត់ចំណាំ :** រឿងព្រេងនេះ មិនមែនដកស្រង់ចេញពីប្រភពណាទេ គឺនិពន្ធដោយគតិប្រាជ្ញផ្ទាល់ខ្លួន ។

# ឆ្មបបុរាណនៅជនបទ

មិនដឹងជាប៉ុន្មានពាន់ឆ្នាំ មកហើយទេ ដែលសង្គមខ្មែរយើងមានសេចក្ដីត្រូវការខាងសេវាបង្កើតកូន ដែលជាចំណេះជំនាញមួយបែប, ខុសប្លែកពីសត្វ ដែលកើតកូនតាមលក្ខណៈធម្មជាតិនោះ ។ នៅជនបទ, គ្រប់តែភូមិខ្មែរ, សុទ្ធតែមានឆ្មបម្នាក់ឬពីរនាក់, សម្រាប់បម្រើសេចក្ដីត្រូវការខាងការបង្កើតកូន ។ ដោយហេតុថាក្បួនវេជ្ជសាស្ត្រទំនើប ទើបនឹងមានតែនៅទីក្រុងធំៗ ក្នុងរវាងដើមសតវត្សទី ២០ នោះ, នៅតាមជនបទស្រុកស្រែចម្ការ, ឆ្ងាយៗ ពីទីប្រជុំជន, ការបង្កើតកូននៅតែធ្វើតាមបែបបុរាណដដែល ។ សូម្បីតែនៅពេលបច្ចុប្បន្ននេះក្ដី, ក៏នៅតាមភូមិឆ្ងាយដាច់ស្រយាល របៀបបង្កើតកូន នៅតែធ្វើតាមបែបបុរាណដដែល ។ តើឆ្មបជាមនុស្សប្រភេទណា ? ហើយហេតុអ្វីបានជាគាត់ក្លាយទៅជាឆ្មប ? ។

១. **នាទីឆ្មប** : បើឆ្មបជាស្រីមានវ័យចំណាស់ចាប់ពី ៥០ ឆ្នាំឡើងទៅ, គេច្រើនហៅថា "ដូនមប ឬយាយមប" ។ ដូចយើងធ្លាប់ដឹងហើយថា, ឆ្មបពីជាស្ត្រីមានចំណេះជំនាញ មិនមែនត្រឹមតែការបង្កើតកូនមួយមុខប៉ុណ្ណោះឡើយ, ប៉ុន្តែគាត់មានភារៈត្រូវផ្ដល់យោបល់ដល់ស្ត្រីមានផ្ទៃពោះឱ្យយល់ដឹងក្នុងការថែរក្សាគភ៌ ជួយប្រាប់ឱ្យរកថ្នាំសម្បកឈើ ឬសឈើមកផឹក ដើម្បីឱ្យគភ៌មានសុខភាពល្អ, និងការពារកុំឱ្យកូនឆ្លោសពេក, សម្រាប់ស្រីទូទៅ, ហើយ ជាពិសេស, ស្ត្រីដែលទើបមានកូនដំបូង, ដើម្បីកុំឱ្យពិបាកកើត ។ ក្រៅពីនេះ ដូនមបតែងតែជួយមើលផ្ទៃពោះ ជួយតម្រែតម្រង់ទារកដែលនៅក្នុង

ផ្ទៃ, ឱ្យឋិតក្នុងស្ថានភាពត្រឹមត្រូវទៅតាមលក្ខណៈធម្មតា ។

**២. លក្ខណៈសម្បត្តិរបស់ឆ្មប** : គួរគប្បីជ្រាបថា មិនមែនគ្រប់តែមនុស្សស្រី សុទ្ធតែអាចធ្វើឆ្មបបានទាំងអស់នោះឡើយ ។ តាមពិត, ឆ្មបគឺជាមនុស្សម្នាក់មានបុព្វនិស្ស័យពីកំណើត, ដែលព្រហ្មលិខិតកំណត់ឱ្យមកជួយសង្គ្រោះ ស្ត្រីភេទដូចគ្នាក្នុងការឆ្លងទន្លេ ។ ដូច្នេះស្ត្រីដែលមានតួនាទីធ្វើជាឆ្មប, ត្រូវមានលក្ខណៈសម្បត្តិ, មានក្រមសីលធម៌ដូចខាងក្រោម :

- មានបេះដូងបើកទូលាយ មានអធ្យាស្រ័យល្អ មានមនោសញ្ចេតនាអាណិតអាសូរស្ត្រីដូចគ្នា ហើយត្រៀមខ្លួននឹងបម្រើគ្រប់ពេលវេលា គ្រប់កាលៈ-ទេសៈ មិនប្រកាន់ថាយប់, ថ្ងៃ ភ្លៀងព្យុះ ឆ្ងាយជិត ..... នោះឡើយ ។

- គ្មានចិត្តលោភលោភលន់ សម្លឹងឃើញផលប្រយោជន៍ជាចម្បងនោះឡើយ ។

- មានវត្តចរិតស្លូតបូត សុភាពរាបសា មិនប្រកាន់ឋានៈ មិនឆ្មើងឆ្មៃ, ស្រឡាញ់រាប់អានមនុស្សទូទៅស្មើៗគ្នា ។

- បំពេញភារកិច្ចរបស់ខ្លួន ក្នុងមនោសញ្ចេតនាប្រកបដោយមនុស្ស-ធម៌, មិនខ្លាចឬខ្ពើមពលាមឡើយ ។

- ជាមនុស្សមានឫកពាថ្លៃថ្នូរ គួរជាទីទួលការគោរពពីអ្នកផង ។

- ជាមនុស្សមានលក្ខណៈពិសេស ដែលមនុស្សក្នុងសហគមន៍គោរពដឹងគុណ[៦០] អស់មួយជីវិត ព្រោះបានចម្លងជីវិតគេឱ្យចេញចាកផុតពីគភ៌មាតា

---

[៦០] ឆ្មបមានតួនាទីរបស់ខ្លួនជាអ្នកស្រុកដូចអាចារ្យ ដូចព្រះគ្រូទៅអធិការដែលសឹកមកបានភេទជាគ្រហស្ថបរវាសដូច្នោះដែរ ។

រហូតដល់បានឃើញពន្លឺព្រះអាទិត្យ និងធំធាត់ លូតលាស់រីកចម្រើន ។ល។ និង ។ល។

**៣. ចំណេះជំនាញឯកទេសរបស់ឆ្មប:** និយាយមកដល់ចំណុចនេះ យើងគួរដាក់សំណួរថា តើឆ្មបចេញមកពីប្រភពណា ? ទទួលការបណ្តុះ-បណ្តាលដូចម្តេចខ្លះ មុននឹងក្លាយទៅជាឆ្មប ? សូមជម្រាបថា តួនាទីជាឆ្មប គឺមិនមែនជាមុខរបរសួរពូជបន្តគ្នាពីម្តាយទៅកូន ពីជីដូនទៅចៅនោះឡើយ ។ វាអាចថា ម្តាយជាឆ្មប ប៉ុន្តែកូនរបស់គាត់មិនចេះធ្វើឆ្មបក៏មាន ។ ការបណ្តុះ-បណ្តាលឆ្មបជនបទ គឺធ្វើឡើងតាមរយៈការពិនិត្យសង្កេតមើលនិស្ស័យ ។ បើយាយម៉បសម្គាល់ស្ត្រីណាមួយមានអត្តចរិត ឬមានលក្ខណៈសម្បត្តិអាចធ្វើឆ្មបបាន អាចបន្តតំណែងពីគាត់ ហើយអាចបំពេញតួនាទីភារកិច្ចជាឆ្មបបន្តវេនពីគាត់បាននោះ គាត់តែងតែហៅស្ត្រីនោះឱ្យទៅចូលរួមក្នុងការបង្កើតកូនជាមួយគាត់ ក្នុងនាមជាអ្នកជំនួយការ ឬជាឆ្មបកម្មសិក្សាការី ។ អាស្រ័យដោយការសង្កេតខ្លះ, ការជួយដោយផ្ទាល់ដៃខ្លះដដែលៗ ច្រើនដង, ច្រើនខែ, ច្រើនថ្ងៃ, និងអាស្រ័យដោយដូនម៉បចាស់ទុំផ្តល់នូវទ្រឹស្តីខ្លះ, ការអនុវត្តជាក់ស្តែងខ្លះ, យូរៗ ទៅស្ត្រីជំនួយការ ឬឆ្មបសិក្សាការីនោះ, នឹងមានការស្ទាត់ជំនាញ ហើយក៏ក្លាយទៅជាឆ្មបម្នាក់ទៀតនៅក្នុងភូមិ, ងាយស្រួលចែករំលែកគ្នាទៅជួយកិច្ចធុរៈបង្កើតកូន, នៅក្នុងករណីដែលមានស្ត្រីពីរនាក់ឈឺពោះឆ្លងទន្លេជាន់ពេលគ្នា ឬជួនពេលតែមួយ ។ ហើយម្យ៉ាងទៀត, បន្ទាប់ពីដូចម៉បស្លាប់លាចាកលោកទៅនោះ, ឆ្មបជំនួយក៏រ៉ាប់រងដើរតួនាទីជំនួសជាស្ថាពរតែម្តង ។

**៤. សកម្មភាពប្រតិបត្តិការរបស់ឆ្មប :** ការដែលខ្ញុំលើកយក

កិច្ចការ, សកម្មភាពរបស់ឆ្មបមកពិភាក្សានេះ, មិនមែនដោយសារខ្ញុំបានយល់, និងចេះដឹងពីការងាររបស់ឆ្មប ស្មើឬច្រើនជាងឆ្មបនោះឡើយ ប៉ុន្តែ, ដោយការធ្លាប់ឮធ្លាប់ស្តាប់ឆ្មបនិយាយប្រាប់អ្នកស្រុក អ្នកភូមិប៉ុណ្ណោះ ។ ហេតុនេះ ការបកស្រាយរបស់ខ្ញុំពិតជាពុំមានលក្ខណៈពេញលេញ ឬជាក់ស្តែងប៉ុន្មានឡើយ ។ អ្វីដែលយើងគួរដឹងនោះគឺ ចំណេះជំនាញរបស់ឆ្មបជនបទ, មានលក្ខណៈបុរាណខុសប្លែកពីឆ្មបទំនើប, ធ្វើតាមបែបវេជ្ជសាស្ត្រនាសម័យវិទ្យាសាស្ត្រជឿន-ជឿន ។ នៅជនបទស្រែចម្ការ, ការឈឺពោះឆ្លងទន្លេ, គឺផ្អែកទៅតាមយថា-ហេតុ, ព្រោះពុំមានពិនិត្យ វាស់ពោះ ដើម្បីដឹងពីអាយុគភ៌ និងដឹងពីថ្ងៃ-ម៉ោងដែលទារកកើតនោះឡើយ ។ ជាទូទៅ, ស្ត្រីសាមីជាអ្នកមានផ្ទៃ តែងតែកត់ចំណាំ[៦៧] ថ្ងៃ ខែ ខ្មែរយើងនិយាយប្រាប់ៗ គ្នាថា គម្រប់ទសមាសា គឺ ១០ ខែ ទើបប្រសូតចេញពីផ្ទៃពោះមាតា ។ បើផ្អែកតាមបក្រឹត្យក្រមឬជាតិ នោះមនុស្សគ្រប់គ្នាតែងបានអាយុគភ៌ស្មើៗ គ្នា មិនថាស្តេច មិនថារាស្ត្រឡើយ ។

គួរកត់សម្គាល់ថា, ការឈឺពោះឆ្លងទន្លេ, ច្រើនតែប្រព្រឹត្តទៅនៅពេលយប់ ។ កាលណាផ្ទៃពោះចូលដល់ដំណាក់កាលគ្រប់ខែហើយនោះ, បុរសជាស្វាមីតែងតែត្រូវតែរៀបរកសម្ភារៈចាំបាច់ទុកត្រៀមបម្រុងជាស្រេច, ដូចជាឧសសម្រាប់អាំងភ្លើងកក់ក្តៅស្ត្រីកូនខ្ចី, ចន្លុះ ឬចង្កៀងប្រេងកាត កន្ទេលសម្រាប់បិទបាំងកន្លែងសម្រាល ឆ្នាំងឬឆ្នាំងធំសម្រាប់ដាំទឹក... ជាដើម ។ ដូច្នេះការឈឺពោះ

---

៦៧ ការកត់ចំណាំនេះមិនសូវទៀងទាត់ឡើយ ជួនកាលភ្លេច ជួនកាលច្រឡំ ឯការកំណត់ពេលបរិច្ឆេទនៃការឆ្លងទន្លេ គឺពុំជាការពិតប៉ុន្មានទេ សូម្បីតែឆ្មបទំនើបតាមបែបវេជ្ជសាស្ត្រនៅទីក្រុង ក៏កំណត់មិនបានត្រឹមត្រូវទាំងស្រុងដែរ ។

ឆ្លងទន្លេមិនមែនជាចៃដន្យដែលកើតឡើងដោយមិនបានព្រាងទុកនោះឡើយ ។ នៅពេលដែលប្រពន្ធដាស់ប្ដីហើយត្អូញថា ឈឺពោះនោះ ប្ដីក៏អ៊ីម្មារៀបចំគ្រែសម្រាល ដោយចងកន្ទេលហ៊ុំព័ទ្ធជុំវិញ ដាស់សាច់ញាតិជិតខាង ឱ្យមកនៅកំដរប្រពន្ធ រួចក៏ពាក់អាវយ៉ាងប្រញាប់ ដោយទើបតែស៊កបានដៃម្ខាង ក៏ស្ទុះរត់អ៊ីម្មាទៅតំដៅផ្ទះដូនម៉បដែលនៅចម្ងាយប្រមាណជាងមួយគីឡូម៉ែត្រ ។ ជួនកាល, ជាចៃដន្យចំលើរាត្រីមេឃងងឹត មានភ្លៀងធ្លាក់តិចៗ ផង ក៏នៅតែស្ទូរត់ទៅផ្ទះឆ្មប, នៅដៃមានកាន់ឧសដែលមានរលើកភ្លើងឆេះកាត់ក្រហមរងាល, ធ្វើជាគ្រឿងបំភ្លឺផ្លូវ ។ ទៅដល់ភ្លាម, ក៏ស្រែកហៅដូនម៉បឱ្យភ្ញាក់ពីនិទ្រា, ហើយសំពះអង្វរសុំឱ្យមកជួយយកអាសារជាបន្ទាន់ ។ លោកយាយស្រវេស្រវាបានអាវមកពាក់ភ្លាមៗ កន្ទ្រាក់យកកន្ទ្រកស្លា កិលចុះមកជិតាមកាំជណ្ដើរ ។ កំពុងតែរាវរកណើត្រង់ ក៏បុរសកោនភ័យអាសន្ន, លើកយាយបង្អោប-ក-ហើយអៀវ[៦៦] រត់យ៉ាងលឿនសំដៅមកផ្ទះខ្លួន ។ យាយស្រែកហាមថា "អារពៅយាក៏ កុំរត់លឿនពេក រាក់អញហើយ !" ។ បុរសជាប្ដីមានអារម្មណ៍ត្រាប់តែហាក់ដូចឮសំឡេងស្រែកថ្ងូររបស់ប្រពន្ធ ដោយការឈឺចុកចាប់ក្នុងពោះផ្ទៃៗ ធ្ងន់ៗ ក៏ប្រឹងខំកោលឱ្យតែលឿនដៃ. ទីបរពានាំ យកដូនម៉បមកជួយឱ្យទាន់ពេល ។ ដូនម៉បក៏ឈឺភ្លៅ ពក់ធេង្កះមិនតិចដែរ, ដោយអុកទម្ពិច ឃ្លុកៗ នឹងខ្នងរបស់បុរសដែលអៀវគាត់ ។ ដោយក្ដីអាណិត ប្រណីដល់ប្រពន្ធបុរស

[៦៦] មិនមែនមានរឿងនេះទាំងអស់នោះទេ ប៉ុន្តែក៏គង់ប្រទះឃើញករណីបែបនេះជាញឹកញាប់ដែរ ទើបខ្ញុំបានលើកយកករណីនេះដើម្បីបញ្ជាក់ឱ្យឃើញថា ក្នុងគ្រាអាសន្នឆ្លងទន្លេនៅជនបទ ម្យ៉ាងដោយរឿងភិតភ័យពេកស់ ។

អៀវយាយមកដល់ផ្ទះ កាត់ត្រាប់ភ្លៀងស្រិបៗ ហាក់ ដូចជាពុំមានហេរហត់អ្វីបន្តិចឡើយ ។ ពេលដែលយាយទៅដល់ យកដៃស្ទាបផ្ទៃស្ត្រី, បុរសជាប្តីបានលើឧសមកតម្រៀបប្រជុំផ្តុំទុក ត្រៀមនឹងបង្កាត់ឱ្យឆេះនៅពេលចាំបាច់មកដល់ ។ ដោយមនោសញ្ចេតនាជួយឈឺឆ្អាលចំពោះអ្នកជិតខាងនោះ, ស្រីៗចំណាស់ចំនួនបួនប្រាំនាក់, រួមទាំងម្តាយបង្កើត និងម្តាយ ក្មេកផង, បានមកជួយរវាសន្ធុរៈ, ខ្លះដាំទឹក, ខ្លះវេញខ្សែចងផ្ចិត, ខ្លះជូតសម្អាតកន្ត្រៃ ឬកាំបិតកោរ, ខ្លះត្រៀមក្រណាត់កន្ទបសម្រាប់រុំទារក ។ រីឯបុរសជាប្តី, ក្រោយពីចាត់ការចាំបាច់ដូចជម្រាបខាងលើរួចហើយ, គាត់ក៏រត់ទៅរកគ្រូហ្មមកឱ្យជួយ "ធ្វើភ្លើង[៦៣]" ។ នៅជនបទ, តួអង្គដែលមានចំណែក ក្នុងពិធីឆ្លងទន្លេ, ពីជាងរាទី, ពោនឆ្មប, គ្រូហ្មធ្វើភ្លើង, អ្នកបង្កាត់ភ្លើងរាំងកម្តៅ, ម្តាយបង្កើត ឬម្តាយក្មេករបស់ស្ត្រីតពោះ, និងអ្នកជិតខាង .....។ កាលណាទារកក្រកើត (ប្រសូត), ទាំងរស់គ្នាភិតភ័យសស្លើតសស្លក់ ខ្លះអុជធូបបើរបន់ខ្មោចជូរជីបួរ អារក្ស អ្នកតា ខ្លះដើរហើកអ្នកដប ..... ក្នុងន័យឱ្យជួយធ្វើអន្តរាគមន៍, ឱ្យទារកកើតមកបានសុខ, មិនមានឧបសគ្គធំដុំប៉ុណ្ណោះ ។ ប្រសិនបើមានហេតុភេទមិនប្រក្រតី, ដូចជាទារកកើតបញ្ច្រាសជើង ឬមកទទឹងខ្លួន, ស្មុគស្មាញពេកនោះ, វាពិជាគ្រោះអាសន្នមួយដែលនឹងប៉ះពាល់ដល់អាយុជីវិតស្ត្រីមានផ្ទៃពោះជាមិនខាន ។ ព្រោះតែដូច្នេះហើយ បានជាទំនៀមទម្លាប់ប្រពៃណីខ្មែរយើងគេតែងហៅការ "កើតកូន" នេះថា "**ឆ្លងទន្លេ**" ។ ទូកតូច

---

[៦៣] ដើម្បីការពារព្រាយក្រឡាភ្លើង នៅជនបទស្រុកស្រែ គេតែងហៅគ្រូហ្មមកធ្វើភ្លើង ត្រង់កន្លែងដុតភ្លើងឱ្យស្ត្រីកូនខ្ចីរាំងកម្តៅខ្លួន ។

មួយអំឡុងទន្លេមានរលកធំៗ បោកគ្រាំគ្រេង មានព្យុះបោកបក់យ៉ាងខ្លាំង តើអាចប្រឈមនឹងគ្រោះលិចលង់ ..... យ៉ាងណា ? ការប្រសូតកូន ក៏មានឧបមាដូចទូកតូចអុំកាត់រលក និងព្យុះសង្ឃរាដូច្នោះដែរ ។ ទោះបីនៅទីក្រុងដែលមានឆ្មបជំនាញ ៗ មានវេជ្ជបណ្ឌិតពូកែ ៗ មានគ្រឿងសម្ភារៈបរិក្ខារទំនើប ៗ មានវិធីប្លែកៗ ទាន់សម័យយ៉ាងណាក្តី ក៏នៅតែមានការភ្លាំងភ្លាត់ខ្លះដែរ ។ នៅពេលដែលដូនម៉ប និងស្ត្រីជំនួយម្នាក់ ឬពីរនាក់ជួយរិតពោះបន្ទើរៗ គេឱ្យស្ត្រីឆ្លងទន្លេដេកបញ្ឈរជង្គង់ ហើយខំជួយប្រឹងបញ្ចេញ ទារក. តាមចង្វាក់ដង្ហើមដែលដូនម៉បជាអ្នកបញ្ជា។ ពេលដែលឮសម្រែក "វ៉ា ! វ៉ា !" បន្លឺឡើងយ៉ាងខ្លាំងនោះ. ប្តី. មាតាបិតា. និងញាតិមិត្តដែលមកជួយនោះ នាំគ្នាត្រេកអរស្ទើរបោះ គេនាំគ្នាប្រៀបធៀបថា "បានធូរស្បើយ ដូចដកបន្លាចេញពីដើមទ្រូង" ។ គ្រូបុរធ្វើភ្លើង ក៏បំពេញតួនាទីរបស់ខ្លួនទៅតាមជំនាញដែលធ្លាប់ធ្វើជាញឹកញយមកហើយ ។ ឯប្តីវិញ. ក៏តម្រៀបឧសត្រង់ចំណុចដែលគ្រូព័ទ្ធសីមា បោះដែកគោល ។ យាយៗ ខាងលើវិញ. ខ្លះយកទឹកក្តៅមកចាក់លាយឱ្យល្មមសម្រាប់លាងសម្អាតទារក. ខ្លះជួយដូនម៉បក្នុងការកាន់ផ្ទុំមទារក ទុកឱកាសឱ្យដូនម៉បរិតក្បែតពោះស្ត្រីឆ្លងទន្លេ ដើម្បីទម្លាក់សុកឱ្យចេញមកខាងក្រៅ ។ លុះអ្វីៗ គ្រប់បែបយ៉ាងបានដំណើរការស្រួលហើយ. ឆ្មបក៏យកអំបោះមកចងទងផ្ចិតជាពីរកន្លែង ក្រោយពីបានបូតខ្យល់ក្នុងទងផ្ចិតបញ្ចូលមកក្នុងខ្លួនទារក. ដរាបទាល់តែឃើញមុខទារកឡើងឈាមក្រហមទើបឈប់ ។ នៅពេលរៀបនឹងកាត់ផ្ចិត. ឆ្មបពិនិត្យមើលចំណងទាំងពីរកន្លែងនោះតើតឹងណែនហើយឬនៅ. ព្រោះគាត់បារម្ភក្រែងខ្យល់ចូលតាមទងផ្ចិតទៅក្នុង

ទោះនៅពេលបច្ចុប្បន្នដែលវិទ្យាសាស្ត្រ, វេជ្ជសាស្ត្របានលូតលាស់រីកចម្រើនហើយក្តី, ក៏នៅស្រុកស្រែជនបទ, គេនៅតែឱ្យស្ត្រីឆ្លងទន្លេអាំងភ្លើងដដែល ។ កាលពីដើម, ស្ត្រីឆ្លងទន្លេដំបូង តម្រូវឱ្យអាំងភ្លើងក្នុងរយៈពេល ៧ ថ្ងៃ ទើបសរសៃឆ្អឹងល្អ ។ ឯស្ត្រីដែលធ្លាប់មានកូនចាប់ពីពីរឡើងទៅ, គេឱ្យអាំងភ្លើងតែ ៣ ថ្ងៃទេ ។ ទម្រាំកិច្ចការបង្កើតកូននេះបានចប់សព្វគ្រប់, ជួនកាលក៏ដល់ពេលភ្លឺស្រាង ។ ជួនកាលកិច្ចការបង្កើតកូននេះ បានចប់រួចរាល់នៅពេលទៀបភ្លឺ, ជួនកាលទៀត ទាល់តែភ្លឺស្រឡះ ។ ទោះចប់ទាំងយប់ក្តី, នៅពេលភ្លឺហើយក្តី, ប្តីមានភារកិច្ចជូនដំណើរជូនម៉បដោយថ្មើរជើង, ដោយបររទេះជូន, ដោយឱបកប់, ទៅតាមលទ្ធភាពរបស់ម្ចាស់ផ្ទះដែលមានធុរៈ ។ គួរបញ្ជាក់ផងដែរថា, ប្តីរបស់ស្ត្រីកូនខ្ចី តែងតែសំពះក្រាបលើលើតន៍យាយម៉បដោយក្តីគោរព និងក្នុងអារម្មណ៍ពេញដោយសេចក្តីដឹងគុណជាអនេក ចំពោះជូនម៉បដែលបានជួយសង្គ្រោះជីវិត ទាំងប្រពន្ធទាំងកូន, ឱ្យបានរួចរស់សុខសប្បាយ ។

**៥. ពិធីបង្គក់ឆ្អប :** នៅថ្ងៃចុងក្រោយនៃការអាំងភ្លើង ប្តីបានទៅអញ្ជើញជូនម៉បដែល បានបកបង្កើតកូន, ឱ្យមកជាអធិបតីក្នុងពិធីបង្គក់ឆ្អបនេះ ។ របស់ខ្លះៗ[១] ដែលត្រូវរៀបក្នុងពិធីបង្គក់ឆ្អបមាន :

- ត្រាវពន្លៃមួយព្រឹ

លេខ១ អ្នកដៅស្គាល់ក្តៅដូចជាបងប្អូនជ្រូក រួចយកអង្ក្រងអង្កាមខ្សាច់ដុតដាក់ស្ពៀងមកដាក់លើផ្ទៃ ដើម្បីកក្តៅដែលបិតនៅពីក្រោមគ្រែតាមក្រោយលៃលេខតែឱ្យក្តៅខ្ទាំបាន ។ នៅពេលដុតភ្លើង ប្តីតែងសួរប្រពន្ធថាក្តៅល្មមឬនៅ ? គេយកកើងឱ្យស្ត្រីឆ្លើយថាក្តៅណាស់ទេ ! ប្រពន្ធប្រាប់ថាឱ្យ អ្នកស្ពាលបើមិនខ្លួនឯងទៅ ទោះនឹងដឹងហើយ ។

- ស្លាធមិដើមចេក ១ គូ
- ដូងទុំមួយគូ
- អំបិល ១ ចាន
- អង្ករ ១ ចាន ( ជូនមានដាក់លុយ ១ កាក់ផង )
- ស្លា ម្លូ ថ្នាំ
- ទៀន ធូប
- បាយស្អក សម្លស្អក បង្អែម ចង្កាប[៦៦] . ស្រា. ទឹកតែ .....

ឪពុកម្ដាយទាំងសងខាង ( ជន្លង់ ) និងចាស់ទុំជិតខាងដែលបានមកជួយក្នុងកិច្ចការនេះ, ពិសេស អាចារ្យ ឬអ្នកធ្វើភ្លេង, ត្រូវតែមានវត្តមានក្នុងពិធីនេះជាចាំបាច់ ។ មុនដំបូងលោកអាចារ្យដឹកនាំពិធីសែនព្រេន ជាតម្រប់ ៣ ដង, ជម្រាបដល់ព្រលឹងជីដូនជីតា, មេបា, ខ្មោចជួរជីបូនឱ្យបានដឹងថា នៅក្នុងគ្រួសារនេះ មានបន្ថែមសមាជិកម្នាក់ទៀតហើយ, សូមអញ្ជើញព្រលឹងមេបា ចាស់ទុំ ដូនតា ខ្មោចជួរជីបូរទាំងសងខាង មេត្តាទទួលស្គាល់ហើយ ជួយបីបាច់ថែរក្សាឱ្យបានចំរាត់សុខសប្បាយផង ។ លុះចប់ពិធីសែនព្រេនហើយ ប្ដីនិងប្រពន្ធអង្គុយលុតជើងនៅពីមុខដូនមប ថ្វាយបង្គំគាត់ ហើយពោលពាក្យថ្លែងអំណរគុណចំពោះគាត់ ដែលបានមកជួយអាសន្នចុះ, ជួយស្រោចស្រង់អាយុជីវិត ទាំងម្ដាយទាំងកូន, ឱ្យបានសុខសប្បាយរួចរស់ជីវិត ។ ទាំងពីរនាក់ក៏លើកស្រូវពន្លី និងនំចំណី ផ្លែឈើ មួយកាក់ អង្ករ ជូនទៅយាយមប មុកជា

[៦៦] ការរៀបរណ្ដាប់ក្នុងពិធីបង្កក់ឆ្អឹងនេះមិនដូចគ្នា មិនត្រូវគ្នា របៀបដូចគ្នាក៏ពុំមានឡើយ គឺតែងតែប្លែកគ្នាទៅតាមតំបន់ស្រុកខេត្តជាដើម ។ នៅស្រុកខ្លះគេហៅថា ពិធីសំពះឆ្អឹង ..... ។

សក្ដីកម្មនៃការដឹងគុណ និងតបគុណ ។ នៅតំបន់ខ្លះ នៅក្នុងពិធីបង្កក់ឆ្អបនេះ ដូនមបក៏ជួយដាក់ឈ្មោះឱ្យទារក ឬទារិកាផងដែរ ។ ប៉ុន្តែនៅតំបន់ខ្លះទៀត តាមសំណូមពររបស់មាតាបិតា អាចារ្យ ក៏បានជ្រើសរើសឈ្មោះណាមួយសមស្របដាក់ឱ្យកូនងាំ, ដោយសរសេរឈ្មោះ បី ឬ បួន យកមកក្រឡុកក្នុងត្រឡោក ហើយឱ្យម្ដាយ ឬឪពុកចាប់ឆ្នោត, បើចំលើឈ្មោះអ្វី ក៏ដាក់តាមឈ្មោះក្នុងឆ្នោតនោះទៅ ។ល។ ខ្លះទៀត, បើកូនស្រីដាក់ឈ្មោះឱ្យជួននឹងឈ្មោះម្ដាយ ឧ. ម្ដាយឈ្មោះ ចាន់ កូនស្រីឱ្យឈ្មោះ ចឿន, បើឪពុកឈ្មោះ មួង កូនប្រុសឱ្យឈ្មោះ ម៉ែន ។ល។ អ្នកស្រុកខ្លះឱ្យឈ្មោះពិធីបង្កក់ឆ្អបនេះថា ពិធីទម្លាក់ចង្ក្រាន ។ រៀបរាប់មកប៉ុណ្ណេះ, យើងឃើញថា ប្រពៃណី ទំនៀមទម្លាប់របស់សាសន៍ខ្មែរយើង មានការខុសប្លែកគ្នាពីតំបន់មួយ, ទៅតំបន់មួយទៀតផង និងខុសប្លែកគ្នា រវាងសម័យមុន និងសម័យបច្ចុប្បន្ន ។

មនុស្សមានអាយុប្រមាណពី ៧០ ឆ្នាំឡើងទៅ, មិនឃើញថាមានអ្វីសំខាន់ក្នុងរឿងឆ្អបជនបទ, កើតកូនទៅតាមតំបន់ស្រុកស្រែចម្ការឡើយ ។ ប៉ុន្តែផ្ទុយទៅវិញ, ជនបរទេស ពិសេសពួកសង្គមវិទូ, គេចង់ដឹង, គេចង់ស្រាវជ្រាវរំពីការសម្រាលកូនរបស់សាសន៍ខ្មែរនៅជនបទ, ដើម្បីយកទៅសិក្សាប្រៀបធៀបជាមួយសង្គមរបស់គេ, ជាមួយប្រពៃណីវប្បធម៌របស់គេ ។ មួយចំណែកទៀត ក្មេងៗ ស្រករក្រោយ, គឺសម័យបច្ចុប្បន្ននេះ, មុខជាជក់ចិត្តចង់អាន ចង់ដឹងអំពីប្រពៃណីជាតិខ្លួនពីអតីតកាល, ដែលបើធ្វើការប្រៀបធៀប នឹងសម័យបច្ចុប្បន្ន ឃើញថាខុសគ្នាឆ្ងាយណាស់ ហើយក្មួយៗ ចៅៗ, អាចធ្វើការប្រៀបធៀប រកឱ្យឃើញការវិវឌ្ឍន៍រីកចម្រើនរបស់ជាតិសាសន៍

របស់ខ្លួន ពីជំនាន់មួយទៅជំនាន់មួយ ។ មនុស្សគ្រប់រូប, បើមិនឆ្ងល់, មិនចង់ដឹងទេនោះ, គឺគ្មានទេការអាន, ហើយបើគ្មានការអាន, ក៏គ្មានការចេះដែរ, ចង់និយាយថា, ចំណេះចេះដឹងរបស់គេ, បើមិនទៅដដែលទេ, គឺថយក្រោយ, តាមគេមិនទាន់, បៅគេមិនឮ .....។ សូមជម្រាបថា ការទ្រាំរស់នៅក្នុងអវិជ្ជមាន គឺពិបាកណាស់ អាចប្រៀបបាននឹងរុក្ខជាតិក្រៀមក្រិនមិនព្រមលូតលាស់ដូច្នោះដែរ ។

**៦. សេចក្តីសន្និដ្ឋាន** : ការលើកយកពុតភាគ, សកម្មភាពរបស់អ្នកបង្កើតរឿងខ្មែរពីសម័យបុរាណ យកមកពណ៌នាបកស្រាយនេះ គឺដោយចង់ឲ្យពួកកូនខ្មែរសម័យបច្ចុប្បន្ន និងអ្នកស្រាវជ្រាវជាតិ - អន្តរជាតិ បានការយល់ដឹងអំពីចំណេះ ជំនាញ បច្ចេកទេស ទេពកោសល្យរបស់ខ្មែរក្នុងវិស័យបង្កើតរឿង ដែលខុសពីសម័យបច្ចុប្បន្ន ដែលខុសប្លែកពីរឿងរបស់ជនបរទេស ពិសេសប្រទេសនៅលោកខាងលិច ដែលមានវិទ្យាសាស្ត្រ បច្ចេកទេសលឿនលឿន ។ ពីសម័យបុរាណ, ខ្មែរយើងប្រើប្រាស់វត្ថុ និងសម្ភារៈផ្សេងៗក្នុងការបង្កើតរឿង ពិសេស និងព្យាការ ដូចជា :

- យកខ្ទុរអញ្ច្រះមកផាត់ផ្ចិតទារក
- យកកាំបិតឫស្សីកាត់ក្រណាត់, កាត់សក់, កាំបិតកោរ យកមកកាត់ផ្ចិតទារក
- យកក្រណាត់កន្ទបចាស់ៗ មករុំដណ្តប់ទារកឲ្យកក់ក្តៅ
- យកស្លឹកឈើបកមកដុសលាងខ្លួនទារក ឲ្យបាត់ក្លិនឆ្អាប
- យកកាកពន្លែបកមកចិញ្ច្រាំបញ្ចៀតទារក ដែលទៅទន់ ណោតប៉ក់

ប៉ើក ៧ ឱ្យឆាប់រឹង

- យកស្រាមកត្រាំជាមួយថ្នាំឫសឈើ សម្បកឈើ, ឆ្អឹងសត្វ ..... ធ្វើជាឱសថព្យាបាលស្ត្រីកូនខ្ចី ឱ្យឆាប់សះរបួស និងឆាប់មានកម្លាំង រឹងដើរងដើង

- យកឱសមកដុតបង្កាត់ជាភ្លើង កម្តៅស្ត្រីកូនខ្ចីឱ្យឆ្អិនសរសៃ ជៀសវាង ជំងឺទាស់គ្រប់យ៉ាង

- គ្រូហ្មព័ទ្ធសីមាធ្វើភ្លើងការពារព្រាយក្រឡាភ្លើង កុំឱ្យវាមកព្យាបាទស្ត្រីកូនខ្ចី ។ល។

យើងគប្បីធ្មេចភ្នែកគិតមួយភ្លែតទៅមើលថា ជនជាតិខ្មែរយើងតាំងពីសម័យ **នគរភ្នំ** តរៀងមក គិតទាំងស្តេច នាម៉ឺនធំៗ សេនាបតី សេដ្ឋី រាស្ត្រ-ប្រជា សុទ្ធតែប្រសូត - បង្កើតមកដោយឆ្មបបុរាណ និងថែរក្សា ព្យាបាល និងទទួលការអប់រំតាមរបៀបខ្មែរពីជំនាន់នោះទាំងអស់ ។ ប៉ុន្តែប្រការដែលគួរឱ្យយើងមានមោទនភាពនោះគឺ ព្រះមហាក្សត្របានដឹកនាំគ្រប់គ្រងប្រទេសមិនគ្រាន់តែរីកចម្រើនរុងរឿងដល់កំពូលប៉ុណ្ណោះឡើយ ប៉ុន្តែថែមទាំងបានពង្រាតពង្រីកទឹកដីឱ្យធំទូលាយមហាសាល រហូតដល់ស្រុកខ្មែរជំនាន់នោះបានក្លាយទៅជាចក្រភពវាទិន ជាមហាអំណាចដែលគេគោរពកោតខ្លាចនៅអាស៊ីអគ្នេយ៍ ។ បញ្ញាញាណរបស់ខ្មែរសម័យមហានគរ បានសង់ប្រាសាទរាជដ្ឋានរាប់ពាន់បន្សល់ទុកជាកេរមតិកវប្បធម៌ឥតគូប្រៀប ដែលធ្វើឱ្យជនបរទេសភ្ញាក់ផ្អើលមកទស្សនារាប់លាននាក់ក្នុងមួយឆ្នាំៗ ។ លុះមកដល់សម័យក្រោយៗ មកទៀត ព្រះមហាក្សត្រ សម្តេច មន្ត្រី សេនាបតី វរជន មេទ័ព ឧកញ៉ា ឯកឧត្តម បញ្ញាវ័ន្ត អ្នកអក្សរសាស្ត្រ អ្នកនិពន្ធ ដូចជារូបខ្ញុំជាដើម មានវាសនាបានរីក

លូតលាស់ ធំធាត់រហូតដល់អាយុ ៨០ ឆ្នាំ បានសរសេរ បង្កើតស្នាដៃ ផ្ញើរ រំលែកចំណេះចេះដឹងទៅឱ្យសង្គម ..... ក៏ត្រូវបានបង្កើតដោយឆ្មបបុរាណទៅជនបទផងដែរ ។ ដូច្នេះ នៅសម័យទំនើបនេះ យើងក៏មិនត្រូវបំភ្លេចគុណឆ្មបបុរាណ មិនត្រូវបង្អាប់ឆ្មបបុរាណថាមិនទាន់សម័យ មិនត្រូវលើកឥទ្ធិពលឆ្មបសម័យទំនើប យកទៅលុបបង្គ្របលើជំនាញឯកទេសឆ្មបបុរាណនោះឡើយ ។ យើងត្រូវតែគិតថា បច្ចេកទេស, ទេពកោសល្យ, នៃសម័យណា, វាសមស្របនឹងកាលអាកាស អត្តភាពសង្គមសម័យនោះ ។ ឆ្លៀតក្នុងឱកាសនេះ ខ្ញុំសូមប្រគេនការធ្វើអភិវន្ទនកិច្ចចំពោះលោកយាយ "**មាស**" ដែលបានបង្កើតរូបខ្ញុំឱ្យបានឃើញពន្លឺព្រះអាទិត្យ ហើយបានរស់នៅបម្រើប្រទេសជាតិ តាមសមត្ថភាពដ៏សាមញ្ញរបស់ខ្ញុំ ។ សូមវិញ្ញាណក្ខន្ធរបស់លោកយាយ បានទៅសោយទិព្វសម្បត្តិនៅឋានទេវលោក ដោយអំណាចនៃអំពើល្អរបស់លោកយាយ ក្នុងការបង្កើតរូបកាយមនុស្សរាប់រយនាក់ទៅក្នុងសហគមន៍ ។

# អំពីបទជ័យ

**ក. ក. ន.** កាលពីថ្ងៃទី ១៨ ខែមិថុនា ឆ្នាំ ២០០២ ក្រុមស្រាវជ្រាវនៃក្រុមជំនុំទំនៀមទម្លាប់ខ្មែរ ដឹកនាំដោយសាស្ត្រាចារ្យ មៀច ប៉ុណ្ណ រួមសហការដោយលោក ម៉ម ឈុំ លោក សោម វណ្ណៈ និងលោក កែវ រតនៈ បានចុះទៅធ្វើប្រតិបត្តិការស្រាវជ្រាវ អំពីប្រពៃណីទំនៀមទម្លាប់ នៅវត្តប្រើសមាស ឃុំត្រប់សណ្តែក ស្រុកបាធាយ ខេត្តកំពង់ចាម ។ ក្រុមស្រាវជ្រាវបានចូលទៅថ្វាយបង្គំធ្វើវន្ទនកិច្ច ចំពោះព្រះគ្រូ **ថោ ឡៀប** ជាចៅអធិការ មានព្រះជន្ម ៥៥ វស្សា ។ ព្រះអង្គមានក្បួនស្ដីពីធម៌ជ័យនេះ និងគម្ពីរក្បួនខ្នាតដទៃទៀត ។ ដោយអំណោចទឹកព្រះទ័យជឿជាក់ចំពោះព្រះពុទ្ធសាសនា ស្រឡាញ់វប្បធម៌ប្រពៃណីជាតិ ទោះមានការកៀបសង្កត់ គំរាមកំហែងពីសំណាក់ អាជ្ញាធររបប ប៉ុល ពត យ៉ាងណា ក៏ព្រះអង្គនៅតែខិតខំរក្សាទុកគម្ពីរដីកាជាច្រើន រួមទាំងក្រាំងធម៌ជ័យនេះផងដែរ ឱ្យបានគង់វង្សនៅរហូតដល់សព្វថ្ងៃ ។ នេះជាកាយវិកាប្រកបដោយវីរភាពគួរឱ្យកោតសរសើរក្រៃលែង ។

កាលខ្ញុំនៅពីកុមារ ខ្ញុំធ្លាប់ឮព្រះសង្ឃសូត្រធម៌ **"ជ័យ"** នេះក្នុងពិធីលើករាសី ឡើងផ្ទះ ឬចម្រើនពរជ័យសិរីមង្គល ចំពោះជនណាដែលទើបនឹងបានជាសះស្បើយពីរោគាព្យាធិ ។ ការសូត្រដោយមានបទបែបពិរោះ ទាំងសំឡេងទាំងអត្ថន័យនេះ, ធ្វើឱ្យរូបខ្ញុំមានការចាប់អារម្មណ៍យ៉ាងខ្លាំង ។ នៅពេលដែល

ាទាទីជាអ្នកស្រាវជ្រាវ ប្រពៃណី ទំនៀមទម្លាប់ខ្មែរ នៅពុទ្ធសាសន-

ភាៈបីទៅធ្វើប្រតិបត្តិការស្រាវជ្រាវតំបន់ខេត្តខ័ណ្ឌណាក៏ដោយ ក៏ខ្ញុំខំ

ពុះពារសោកសូរចាស់ព្រឹទ្ធាចារ្យ ក្រែងមាននៅសេសសល់ក្បួនបុរាណនេះ ហើយក្រែងមានអស់លោកចាស់ទុំណាក៏នៅចេះចាំ និងចេះសូត្រធ្វើបទជ័យនេះ តាមលំនាំចាស់បុរាណ ។ ប៉ុន្តែជាអកុសល ការស្វះស្វែងរបស់ខ្ញុំនេះ ពុំបានទទួលលទ្ធផលសមតាមបំណងឡើយ ។ លុះមកដល់ថ្ងៃ ១៩ - ០៦ - ២០០២ ក៏មានវាសនាបានជួបនឹងព្រះគ្រូចៅអធិការវត្តប្រើសមាស ដែលព្រះអង្គមិនគ្រាន់តែមានក្បួនធម៌ជ័យប៉ុណ្ណោះទេ ប៉ុន្តែប្រការដែលគួរឱ្យរំភើបរីករាយនោះ គឺព្រះអង្គថែមទាំងចេះសូត្រធ្វើបទធម៌ជ័យនេះផងទៀត ។ ព្រះអង្គមានថេរដីកាថា: បណ្ដាភូមិទាំងឡាយចំពោះជើងវត្តប្រើសមាសនេះ តែងតែនិមន្តព្រះសង្ឃសូត្រធម៌ជ័យនេះ ដើម្បីចម្រើនមង្គល សិរីសួស្តី រាល់ពេលធ្វើបុណ្យទាន ឬពិធីផ្សេងៗ ជាដរាបពុំដែលអាក់ខាន ។ ព្រះអង្គមានសង្ឃដីកាទៀតថា ធម៌ជ័យនេះ បានច្រើនបែបច្រើនយ៉ាង ឯការសូត្រធម៌នេះក៏មានបែបបទខុសៗគ្នាដែរ ។ គឺចែកចេញជា :

**ក. ជ័យជញ្ជាំងកែវ** : សម្រាប់សូត្រដេញឧបទ្រពចង្រៃ រោគាព្យាធិ

**ខ. ជ័យទិស** : សម្រាប់សូត្រសុំពរពីទេវតាទាំង ៨ ទិស

**គ. ជ័យពរ ១០** : សម្រាប់ប្រសិទ្ធិពរបវរសួស្តី ចម្រើនសិរីសួស្តីជ័យមង្គល ជល់ជនានុជនទូទៅ ..... ។

នៅទីបំផុតព្រះអង្គក៏សព្វព្រះទ័យ សូត្រធម៌ជ័យនេះដោយមានព្រះសង្ឃពីរអង្គទៀតជាសិស្សគណព្រះអង្គជួយសូត្ររមជាមួយផង ។ បទសូត្រលាន់ឮក្រងក្រអៅ ពីរោះលន្លង់លន្លោច មិនចាញ់បទធម្មចក្រ មហាសម័យ

ធម៌យ៉ោក ឬថ្ពាំនាគ (ក្នុងពេលបំបួស) ឡើយ ។ ព្រះអង្គសូត្រត្រឹមតែក្បាលបទ "ជ័យជញ្ជាំងកែវ" និងជ័យទិសប៉ុណ្ណោះ ដើម្បីក្រុមស្រាវជ្រាវយើងខ្ញុំបានថតរក្សាទុកជាឯកសារ នៅក្រុមជំនុំទំនៀមទម្លាប់ខ្មែរតទៅ ។

ព្រះអង្គបានសន្យាថា នៅពេលក្រោយ ព្រះអង្គ និងសព្វព្រះទ័យសូត្របទធម្មចក្រ មហាសម័យ ឥសីគិលី និងបទថ្ពាំនាគ ឱ្យក្រុមយើងថតទុកជាឯកសារទៀត ។

## សេចក្តីសន្និដ្ឋាន

តាំងពីសម័យដើមមកដល់បច្ចុប្បន្ន សាសនាទាំងពីរ គឺ ព្រហ្មញ្ញសាសនា និងពុទ្ធសាសនា ដើរតួនាទីជាចម្បងសម្រាប់តម្រង់ទិសសង្គមខ្មែរយើងក្នុងការអប់រំវិស័យសីលធម៌ ក៏ដូចជារួមចំណែកកសាងវប្បធម៌ អរិយធម៌ខ្មែរ ឱ្យបានថ្កុំថ្កើងរុងរឿង ។ ពេលណាសង្គមមានការឈឺចាប់ខាងផ្លូវចិត្តក្នុងជំនើរមិនទៀងទាត់ពិតថេរ ក្នុងក្របខ័ណ្ឌព្រះត្រៃលក្ខណ៍នោះ មានតែព្រះធម៌ទេ ដែលបានជួយលួងលោមបង្ហាញមាគ៌ានាំទៅរកសេចក្តីសុខស្ងប់ ។ ដូច្នេះហើយ បានជានៅគ្រប់គ្រាលំបាក ក្នុងគ្រោះអាសន្នទុរ្ភិក្សរាំងស្ងួតយ៉ាងណាក្តី ក៏ពុទ្ធបរិស័ទខំលះបង់ចែករំលែកបាយមួយវែក សំណែកបួយក្លូ អំបិលបុកប្រហុកចិញ្ច្រាំ តស៊ូប្តូរផ្តាច់បេះពីមាត់ពង្រាត់ពីក យកទៅប្រគេនព្រះសង្ឃដើម្បីទ្រទ្រង់ពុទ្ធសាសនាឱ្យគង់វង្សនៅជារៀងរហូត ។ ការកសាងកុដិវិហារ ការលើកកម្ពស់លទ្ធិសាសនា ដោយខិតខំសម្ពិតសម្ពាង កសាងរចនាឱ្យល្អប្រណីត ឱ្យធំស្កឹមស្កៃ ឱ្យសម្បើមអស្ចារ្យនោះ សុទ្ធតែត្រូវមានចំណែកចូលរួម

ពីពុទ្ធបរិស័ទជើងវត្ត. ដែលស៊ូអត់ធ្មត់រស់នៅផ្ទះខ្ទមស្បូវ រខេករខាកចុះ. ឱ្យតែសំណង់ក្នុងអារាមបានល្អល្អះ ស្អកស្អម្ភរុងរឿង ។

ប្រការទាំងនេះ អាចឱ្យយើងយល់បានថា សង្គមនិងសាសនា ត្រូវអត្ថិភាពនៅជាគូ មួយអាស្រ័យមួយ មានខាងណោ អត់ខាងណោក៏មិនបាន ឧបមាដូចរថដែលត្រូវតែគោចរទៅមុខ អាស្រ័យដោយកង់ទាំងពីរជាចាំបាច់ ។

# ប្រវត្តិក្រុមជំនុំទំនៀមទម្លាប់ខ្មែរ

## I. ប្រភព :

ក្រុមជំនុំទំនៀមទម្លាប់ ត្រូវបានចាត់តាំងឡើងដោយរាជក្រឹត្យលេខ ១២ ចុះថ្ងៃទី ២៥ ខែមករា ឆ្នាំ ១៩៣៤ ។ គឺជាស្ថាប័នយ៉ាងសំខាន់មួយ ផ្សារភ្ជាប់វាសនាជាមួយ វិជ្ជាឋានពុទ្ធសាសនបណ្ឌិត្យ ។

### ១. តួនាទីរបស់ក្រុមជំនុំទំនៀមទម្លាប់ :

ក្រុមជំនុំមានភារៈ ត្រូវសរសេរចងក្រងឯកសារ ស្តីពី ប្រពៃណី ទំនៀមទម្លាប់ ប្រមែប្រមូលរក្សាទុក ហើយនឹងផ្សព្វផ្សាយបន្ត នូវឯកសារទាំងឡាយពាក់ព័ន្ធដល់វប្បធម៌ អរិយធម៌ខ្មែរបុរាណ ទុកជាប្រយោជន៍ដល់ការសិក្សាស្រាវជ្រាវ ខាងជាតិពន្ធុវិទ្យា ។

### ២. ការគ្រប់គ្រងដឹកនាំ នៅក្រុមជំនុំទំនៀមទម្លាប់ :

ក្រុមជំនុំដឹកនាំគ្រប់គ្រងដោយ :

- អធិបតី (ប្រធាន) មួយនាក់

- អធិបតីរង (អនុប្រធាន) ម្នាក់ មានជំនាញឯកទេសខាងអក្សរ-សាស្ត្រខ្មែរ

- លេខាធិការ មួយចំនួន សម្រាប់ធ្វើជាជំនួយការ

នៅពេលទើបនឹងចាប់បង្កើតឡើងនោះ ក្រុមជំនុំបានការជួយឧបត្ថម្ភខាងបច្ចេកទេសពីអ្នកស្រី Porée Maspéro ( ប៉ូរេម៉ាស្ប៉េរ៉ូ ) មកពីមជ្ឈមណ្ឌល

ជាតិស្រាវជ្រាវខាងសង្គមវិជ្ជា នៃប្រទេសបារាំង ។ អ្នកស្រីបានមកសហការជាមួយក្រុមជំនុំ មានជំនាញឯកទេសខាងជាតិពិន្ទុវិទ្យា (Ethnologie) ។ ក្រៅពីនេះ ក្រុមជំនុំមានសហការីជាច្រើនទៀតនៅតាមបណ្ដាខេត្ត ទាំងប៉ុន្មាននៃព្រះរាជាណាចក្រកម្ពុជា ។ គេទាំងនេះ គឺជាសមាជិកឆ្លើយឆ្លង ដែលតាំងតែសរសេរអត្ថបទប្រពៃណី ទំនៀមទម្លាប់ ផ្ញើមករក្សាទុកនៅក្រុមជំនុំ ដោយមានទាំងចុះកាលបរិច្ឆេទ លេខកូដ ទុកជាឯកសារស្រាវជ្រាវទៀតផង .....

## ៣. ការប្រឡងប្រជែងជ្រើសរើសអត្ថបទ :

ក្នុងការជ្រើសរើស សម្រិតសម្រាំងរកអត្ថបទពាក់ព័ន្ធ និងប្រពៃណី ទំនៀមទម្លាប់ ដែលមានគុណភាពខ្ពស់ ដែលមកស្រាយរំពឹងចិត្ត និងលក្ខណៈជាក់ស្ដែងប្រចាំតំបន់នីមួយៗ ១ ផង[៦៧] ។ ចលនាប្រឡងប្រជែងនេះ តែងតែបានប្រកាសលទ្ធផលក្រោយពីគណៈកម្មការបានពិនិត្យ និងវាយតម្លៃបានត្រឹមត្រូវរួចហើយ ។ បេក្ខជនដែលត្រូវបានប្រកាសថាជាប់ចំណាត់ថ្នាក់ពីលេខ ១ ទៅដល់លេខ ៣ នឹងត្រូវបានទទួលរង្វាន់ដ៏សមរម្យពីក្រុមជំនុំ ។ រីឯកសារដែលជ្រើសរើសបានពីការប្រឡងប្រជែងនេះ ត្រូវបោះពុម្ពទុកជាសៀវភៅ ជាក្បួនច្បាប់សម្រាប់តម្កល់ទុកនៅបណ្ណាល័យ ដើម្បីបម្រើដល់ការស្រាវជ្រាវរបស់ សាធារណជនទូទៅ ។ ចំណែកឯឯកសារដែលមិនបានទទួលចំណាត់ថ្នាក់ ក៏ត្រូវបានចុះលេខកូដ និងរក្សាទុក សម្រាប់បម្រើដល់តម្រូវការស្រាវជ្រាវផងដែរ ។ ការធាត់ចែងប្រមែប្រមូលឯកសារតាមរបៀបនេះ ដើម្បីឱ្យក្រុមជំនុំមានឯកសារតម្កល់ទុកយ៉ាងច្រើន និងចងក្រងបោះពុម្ពសៀវភៅក្បួនខ្នាតបានមួយចំនួនផង

---

[៦៧] ការប្រឡងប្រជែងនេះត្រូវបានធ្វើឡើងក្នុង ១ ឆមាសម្ដង ។

ដែរ ។ ក្រៅពីនេះ ក្រុមជំនុំបានទទួលភ្ញៀវជាអ្នកស្រាវជ្រាវជាតិ និងអន្តរជាតិខ្លះមកសុំសម្ភាសន៍ ដើម្បីដកស្រង់គំនិត និងចំណុចខ្លះយកទៅពង្រីកអត្ថាធិប្បាយ សរសេរ ចងក្រងជាស្នាដៃចម្រុះរបស់គេ ។

ក្នុងប៉ុន្មានឆ្នាំជាបន្តបន្ទាប់នេះ ក្រុមជំនុំបានបំពេញកិច្ចការសំខាន់ៗ ខ្លះដូចតទៅ :

១- ប្រមូលឯកសារស្តីពីជាតិពិន្ទុវិទ្យាខ្មែរ ប្រវត្តិការណ៍ បច្ចេកទេស ទំនៀមទម្លាប់ ជំនឿ .....។ល។ ដែលមានធ្វើអត្ថាធិប្បាយបានយ៉ាងហ្មត់ចត់ ។

២- ផ្សាយជាភាសាខ្មែរ នូវប្រពៃណី ទំនៀមទម្លាប់ ជាពួកជាក្រុម ដូចមានចែងក្នុងសៀវភៅ រាជពិធីទ្វារទសមាស ដែលបានបោះពុម្ពផ្សាយចំនួន ៣ ភាគរួចមកហើយ ។

៣- ផ្សព្វផ្សាយជាភាសាបារាំង និងភាសាអង់គ្លេស នូវសៀវភៅទំនៀមទម្លាប់ជនជាតិខ្មែរ ដែលបានចេញជាសៀវភៅ ពិធីទ្វារទសមាស ១ ក្បាល ពិធីក្នុងគ្រួសារខ្មែរ ១ ក្បាល ជាភាសាបារាំងរួចហើយ ។ ឯសៀវភៅឯកសារជាភាសាបារាំង ១ ក្បាលទៀត ស្តីពី ជីវភាពប្រជាជនខ្មែរ បានចេញផ្សាយជាបន្តបន្ទាប់ ។

## ៤- រៀបចំជាសារមន្ទីរមួយទុកនៅការិយាល័យទំនៀមទម្លាប់

សម្រាប់តម្កល់ទុកនូវសំណាកវត្ថុ ជាកេរដំណែលរបស់ខ្មែរ ព្រមទាំងមានផ្ទាំងគំនូរ រូបភាពជាតំណាងទំនៀមផ្សេងៗ ជាជំនួយឱ្យងាយយល់ជំនួសការធើអត្ថាធិប្បាយ ។

ក្រៅពីកិច្ចការចុះស្រាវជ្រាវស្រង់យកពត៌មាន ការពិនិត្យអត្ថបទដែលសមាជិកឆ្លើយឆ្លងផ្ញើមក ក្រុមជំនុំបានតាក់តែងអត្ថបទ ចុះផ្សាយតាមវិទ្យុ និងសារពត៌មាន បកស្រាយពន្យល់អំពីទំនៀមផ្សេងៗ ដែលមានមកតាំងពីអតីតកាល ក៏ដូចជាផ្សព្វផ្សាយអំពីសកម្មភាពក្រុមជំនុំរាល់ពេលវេលាកំណត់ ។

## ៥. ក្រុមជំនុំទំនៀមទម្លាប់ ក្រោមរបប លន់ ណុល:

តួនាទីភារកិច្ច និងសកម្មភាពដូចបានពោលជម្រាបខាងលើ គឺបានប្រព្រឹត្តទៅដោយល្អប្រពៃ តែក្នុងពេលដែលមានសុខសន្តិភាពគ្រប់គ្រាន់ក្នុងរបបសង្គមរាស្ត្រនិយម ។ ចាប់ពីឆ្នាំ ១៩៧០ រហូតដល់ឆ្នាំ ១៩៧៥ រាល់សកម្មភាពរបស់ក្រុមជំនុំត្រូវបានចុះអន់ថយជាលំដាប់ អាស្រ័យដោយប្រទេសមានសង្គ្រាម ការផ្តាច់ទំនាក់ទំនងរវាងក្រុមជំនុំ និងសមាជិកឆ្លើយឆ្លងនៅបណ្តាខេត្តខ្លះ ។ ពេលឆ្នាំ ១៩៧៤ និង ១៩៧៥ សកម្មភាពបំពេញភារកិច្ច ក៏ដូចជាការប្រឡងប្រជែងជ្រើសរើសអត្ថបទ ក៏ត្រូវបានរាំងស្ទះស្ទើរទាំងស្រុង ព្រោះខេត្តភាគ ៗ មួយចំនួនធំបានត្រូវកាត់ផ្តាច់ផ្លូវគមនាគមន៍ ។ ម្យ៉ាងទៀត សមាជិកមួយចំនួនក៏បានភៀសខ្លួនទៅបរទេស ដោយបញ្ហាសន្តិសុខផ្ទាល់ខ្លួន ។

## ៦. ក្រុមជំនុំទំនៀមទម្លាប់ក្រោមរបបប្រល័យពូជសាសន៍:

ចាប់ពីក្រោយថ្ងៃ ១៧ មេសា ដែលរបបប្រល័យពូជសាសន៍មានជ័យជម្នះលើរបប លន់ - ណុល ក្រុមជំនុំទំនៀមទម្លាប់ ក៏ដូចមន្ទីរក្រសួងស្ថាប័នផ្សេងៗដែរ ត្រូវទទួលរងនូវការផ្តួលរំលំពីបដិវត្តន៍វប្បធម៌របស់ប៉ុល - ពត ។ ទាំងរូបភាព ទាំងសកម្មភាពត្រូវតែរលាយសូន្យឈឹងតែម្តង ។ គឺជាសម័យខ្មៅងងឹត និងជាគ្រោះមហន្តរាយដ៏ធ្ងន់ធ្ងររបស់វប្បធម៌ ប្រពៃណីជាតិ

ព្រមជាមួយនិងសោកនាថកម្មឈាមលាយទឹកភ្នែក របស់ប្រជាជាតិខ្មែរទាំងមូលតែម្តង ។

## ៧. ក្រុមជំនុំទំនៀមទម្លាប់ក្នុងរបបរដ្ឋកម្ពុជា :

សូម្បីកម្ពុជាបានរំដោះផុតពីរបប ប៉ុល - ពត ប្រល័យពូជសាសន៍ នាថ្ងៃ ៧ មករា ឆ្នាំ ១៩៧៩ ហើយក្តី ។ ក៏ក្រុមជំនុំទំនៀមទម្លាប់ នៅពុំទាន់មានជីវិតរស់ឡើងវិញនៅឡើយ ។ នៅគ្រានោះទីតាំងដ៏ស្កឹមស្កៃរបស់ពុទ្ធសាសនបណ្ឌិត្យ ដែលមានក្រុមជំនុំទំនៀមទម្លាប់ធ្វើខ្លួននៅក្នុងនោះផងដែរ ត្រូវបានក្លាយជាទីស្តីការរដ្ឋមន្ត្រីក្រសួងការបរទេស។ ដូច្នេះ សៀវភៅក្បួនខ្នាតឯកសារទាំងអម្បាលម៉ានដែលនៅមានសេសសល់ខ្លះ ៗ ដែរនោះ ក៏ត្រូវរើរុះខ្ចាត់ខ្ចាយបាត់បង់ជាបណ្តើរ ៗ រហូតដល់អស់រលីង នៅរវាងឆ្នាំ ១៩៩២ ។ គឺនៅក្នុងឆ្នាំនេះហើយ ដែលរដ្ឋាភិបាលជំនាន់នោះ បានផ្តួចផ្តើមបង្កើតពុទ្ធសាសនបណ្ឌិត្យឡើងវិញ ដោយផ្តើមចេញពីបាតដៃទទេស្អាត។ សូម្បីតែអាគារសម្រាប់ធ្វើជាទីតាំង ស្នាក់ការក៏ត្រូវស្នើសុំកុដិពីក្នុងវត្តឧណ្ណាលោមចុងខាងកើតដើម្បីបានមូលដ្ឋានផ្តួចផ្តើមជីវិតថ្មី។ ពេលនោះ លោក **ខិម.ខែម** ត្រូវបានចាត់ឱ្យមកធ្វើជានាយកពុទ្ធសាសនបណ្ឌិត្យ ដែលទើបចាប់ជាតិសារជាថ្មី ។ បណ្ណាល័យ ក៏មានតែបន្ទប់ទទេ ឥតមានសៀវភៅឯកសារអ្វីទាំងអស់ ។ រីក្រុមជំនុំទំនៀមទម្លាប់ក៏នៅពុំទាន់កើតចេញជារូបរាងនៅឡើយដែរ ដោយចាត់តាំងឱ្យមានត្រឹមតែការិយាល័យរដ្ឋបាល សម្រាប់ជំនួយការឱ្យលោកនាយកប៉ុណ្ណោះ ។ ទន្ទឹមនឹងការរស់រានមានជីវិតសាជាថ្មីនេះ បុគ្គលិកមន្ត្រីរាជការ សម្រាប់ដំណើរការក្នុងពុទ្ធសាសនបណ្ឌិត្យ ក៏ចាប់ផ្តើមធ្វើការជ្រើសរើសយកមកពីមន្ទីរក្រសួង

ផ្សេងៗ ។ ទាល់តែដល់ឆ្នាំ ១៩៩៤ ទើបក្រុមជំនុំទំនៀមទម្លាប់ត្រូវបានយកកំណើតឡើង ដោយមានរូបខ្ញុំ **(មៀច ប៉ុណ្ណ)** ជាអធិបតី តែពេលនោះតម្រូវឱ្យហៅថា ប្រធានការិយាល័យក្រុមជំនុំទំនៀមទម្លាប់ខ្មែរ ដែល មានបុគ្គលិកតែ ៣ – ៤ នាក់ប៉ុណ្ណោះ ។

## ៨. សកម្មភាពរបស់ក្រុមជំនុំទំនៀមទម្លាប់ :

ក្នុងនាមជាអធិបតីក្រុមជំនុំ ដែលត្រូវចេញដំណើរពីចំណុចសូន្យដូច្នេះ ខ្ញុំគិតថាគឺជាការលំបាកមួយដ៏ធ្ងន់ធ្ងរណាស់ ក្នុងការស្តារស្ថានភាពពីចំណុចសូន្យបែបនេះ ។ សកម្មភាពជាដំបូងរបស់ក្រុមជំនុំ គឺត្រូវដើរប្រមូលសៀវភៅ ឯកសារ ក្បួនខ្នាតពីគ្រប់ទិសទី ទោះជាត្រូវទិញក៏ដោយ ដើម្បីយកមកដាក់បំពេញឡើងវិញ នៃបណ្ណាល័យដ៏សែនកម្សត់របស់ពុទ្ធសាសនបណ្ឌិត្យ ។ កាលណោះ មូលនិធិ ហៃនរិចប៊ល អាល្លឺម៉ង់ បានធានារ៉ាប់រងថវិកាសម្រាប់ដំណើរការការងារប្រមូលសៀវភៅ ឯកសារ ក្បួនខ្នាត ។ ទន្ទឹមនឹងនេះដែរ ចាប់ពីឆ្នាំ ១៩៩៤ មកដល់ ១៩៩៩ សកម្មភាពស្រាវជ្រាវបែបសួរយកព័ត៌មានពីប្រពៃណី ទំនៀមទម្លាប់ខ្មែរ ត្រូវបានដំណើរការយ៉ាងមមាញឹក ក្រោមកិច្ចឧបត្ថម្ភថវិកាពីមូលនិធិ ហៃនរិចប៊ល ដែលមានអ្នកស្រី **ហោឃឹះ ឡូស្ទីន** ជាតំណាងនៅកម្ពុជា ។ ក្នុងរយៈពេល ៥ ឆ្នាំ នៃការស្រាវជ្រាវ នៅបណ្តាខេត្ត តាកែវ, កំពង់ធំ, កំពង់ចាម ក្រុមជំនុំបានពិនិត្យសរសេរចងក្រង បានសៀវភៅមួយក្បាលធំមានចំណងជើងថា "**កម្រងឯកសារស្តីពីប្រពៃណី ទំនៀមទម្លាប់ខ្មែរ**" ដែលមានប្រមាណជាង ៤០ អត្ថបទ ឬប្រធានបទ ។ ទន្ទឹមនឹងនេះបានចុះផ្សាយអត្ថបទប្រពៃណី ទំនៀមទម្លាប់ក្នុងទស្សនាវដ្តីរៀងរាល់លេខ តាំងពី

ឆ្នាំ ១៩៩៩ មកដល់ពេលនេះ ។ ការស្រាវជ្រាវនេះសំដៅចងក្រងអត្ថបទ ដែលធ្លាប់មាន ហើយដែលបាត់បង់អន្តរាយក្នុងគ្រាសង្គ្រាមនោះឱ្យមានឡើងវិញផង, និងសរសេរចងក្រងអត្ថបទ ឬប្រធានបទថ្មី ៗ ទៀតផង ដើម្បីបំពេញឱ្យបណ្ណាល័យ ។ ចាប់ពីឆ្នាំ ២០០០ មកទល់បច្ចុប្បន្ន ទោះបីខ្លួនខ្ញុំបានចូលនិវត្តន៍ហើយក្តី ក៏ប្រធានថ្មី ដែលរ៉ាប់រងក្រុមជំនុំនេះ បានបន្តសកម្មភាពពីក្រុមជំនុំមុន ដោយស្រាវជ្រាវអត្ថបទ សាស្ត្រាស្លឹករឹត ពាក់ព័ន្ធដល់ក្បួនមើលជំងឺ បាលីគាថាស្តោះផ្លុំព្យាបាលជំងឺ ទស្សន៍ទាយ សាស្ត្រាធម៌ និងប្រវត្តិសាស្រ្ត យកមកចងក្រងទុក បម្រើដល់ការងារស្រាវជ្រាវ ។ ចំណែករូបខ្ញុំ ក៏នៅតែមានសកម្មភាពអមដំណើរក្រុមជំនុំថ្មីនេះ ដោយបន្តចុះធ្វើការស្រាវជ្រាវឯកសារពាក់ព័ន្ធដល់ប្រពៃណី ទំនៀមទម្លាប់ខ្មែរ ។ ក្រៅពីនេះ ខ្ញុំនៅបានជួយអមដំណើរក្រុមជំនុំទំនៀមទម្លាប់ថ្មី ដែលនៅមានបទពិសោធន៍ខ្ចីនៅឡើយនោះ ឱ្យមានជំហររឹងប៉ឹងតទៅថ្ងៃមុខ ។ ស្ទើរតែរៀងរាល់ថ្ងៃ ទន្ទឹមនឹងសកម្មភាពកាន់តែទំនើប ក្នុងភារកិច្ចថ្មីរបស់ខ្លួន ខ្ញុំបានជួយគាំពារក្រុមជំនុំថ្មីនេះ ដោយបានជួយផ្តល់បទសម្ភាសន៍ដល់អ្នកកាសែតជាតិ អន្តរជាតិ ទស្សនាវដ្តី វិទ្យុ ទូរទស្សន៍ ទាក់ទងដល់ប្រពៃណី ទំនៀមទម្លាប់ខ្មែរ ។

## សេចក្តីសន្និដ្ឋាន :

ក្នុងរយៈពេល ៧១ ឆ្នាំនៃសកម្មភាពរបស់ក្រុមជំនុំទំនៀមទម្លាប់ បានសរបញ្ជាក់ឱ្យយើងដឹងថា ពម្រោយផ្លូវដ៏វែងឆ្ងាយនេះ បានចារឹកទុកក្នុងប្រវត្តិសាស្ត្រ នូវភារកិច្ច កាតព្វកិច្ចរបស់ក្រុមជំនុំ ដែលមានភារកិច្ចដ៏សំខាន់

ក្នុងការអភិរក្ស ថែរក្សាមត៌កវប្បធម៌ ប្រពៃណីខ្មែរយើងឱ្យនៅគង់វង្សជារៀងរហូត ហើយរាល់ការខិតខំប្រឹងប្រែងរបស់យើងខ្ញុំជាបច្ឆាជនជំនាន់ក្រោយនេះ ទោះបីមិនបានស្មើនឹងអស់លោកជារៀមច្បង ដូចយ៉ាង ឧត្តមប្រីជា ចាប - ពិនក្តី ក៏ក៏យើងនៅតែខំតស៊ូរក្សាឱ្យបាននូវនិរន្តរភាពរបស់ក្រុមជំនុំមិនដាច់រយៈឡើយ ។

# ត្បាល់ក្លឿង និង ត្បាល់ដៃ

## I- អំពីត្បាល់ក្លឿង

ត្បាល់ក្លឿងមានពីរប្រភេទគឺ

### ១. ត្បាល់ក្លឿងចល័ត

ក- ធ្វើពីឈើ[៦៨] ដែលមានវិជ្ឍមាត្រធំ រហូតដល់ ៧០ ឬ ៨០ cm ។ ដើម្បីរចនាចេញជារាងត្បាល់ក្លឿង គេត្រូវកាត់ប្រវែង ៦០ cm ឬ ៧០ cm សម្រាប់ធ្វើជាកម្ពស់ ។ គេចាំងដុំឈើដែលកាត់ត្រឹមត្រូវតាមខ្នាត ឱ្យចេញ (ដំបូង) ជារាងគូប រួចហើយចាំងឱ្យចេញជារាង ៤ ជ្រុងរីកលើតូចក្រោម ។ ផ្នែកខាងលើត្រូវចោះប្រឡង់ប៉ុនកញ្ជើល្អី សម្រាប់ដាក់អង្ករសំរូបដើម្បីបុកឱ្យម៉ដ្ឋទៅជាអង្ករសម្រិត ។ ផ្នែកខាងក្រោម តូចជាងខាងលើមានរាង ៤ ជ្រុង ។ ដើម្បីបុកត្បាល់ក្លឿង គេប្រើអង្រែម្យ៉ាងធ្វើពីឈើរាងដូចញញួរ ។ គេអាចបុកអង្ករដោយប្រើអង្រែមួយ ឬពីរ ឬបី ឬបួន ដោយឈរតាមមុមឈមមុខទល់គ្នា ។ ប្រើមានពិធីមង្គលការ ឬបុណ្យធំ ៗ ក្នុងគ្រួសារដែលត្រូវមានអង្ករច្រើនសម្រាប់ទទួលភ្ញៀវ ឬធ្វើចង្ហាន់លោកនោះ គេត្រូវបុកអង្ករជាទ្រង់ទ្រាយធំ ដោយប្រើអង្រែ ៤ រហូតដល់ ៨ ហើយត្រូវធ្វើក្នុងរយៈច្រើនយប់ ។ ក្នុងករណីដែលត្បាល់ក្លឿងមួយមានចំណុះអ្នកបុកចាប់ពី ៦ នាក់ដល់ ៨ នាក់ នោះសិល្បវិធីក្នុងការមុខគេច្នៃជាចង្វាក់ ។ យកអង្រែទៅបុកអង្ករក្នុងរណ្តៅផង

---

[៦៨] ច្រើនតែធ្វើពីឈើ ចំបក់ ឬ ផ្ចឹក ឈើទាល ពង្រ ។

រួចឆ្មៀតយកអង្រែទៅគោះផ្ដេកទៅលើមាត់ត្បាល់ ឆ្លាស់គ្នាពីអង្រែមួយទៅអង្រែមួយទៀត ។ ដូច្នេះចង្វាក់គោះរបស់អង្រែនីមួយ ៗ អាចមានដល់ទៅពីរដង ឬបីដង អាស្រ័យដោយអ្នកបុកចេះលៃច្នៃសូរអង្រែឱ្យឆ្លើយឆ្លងគ្នាយ៉ាងពីរោះ ពីអង្រែមួយទៅអង្រែមួយ ។ បើគេឈរស្ដាប់សូរអន្លូងអង្រែដែលគោះបណ្ដាក់គ្នាជាសូរចង្វាក់ភ្លេងនេះ គេពិតជាចាប់អារម្មណ៍ ព្រោះសូរចង្វាក់ភ្លេងមួយកើតឡើងពីការគោះអង្រែបណ្ដាក់គ្នា កើតបានទៅជាសំឡេងឆ្លើយឆ្លងពិរោះរណ្ដំរកស្ថានមិនត្រូវ រហូតដល់គេមិនចង់ជឿថាជាសូរអង្រែបន្លឺចេញពីការបុកអង្ករបំភ្លៃនេះសោះឡើយ ។

គួរឱ្យកោតសរសើរដល់គំនិតច្នៃប្រឌិតរបស់បុព្វបុរសយើង ដែលចេះលៃផ្សំផលប្រយោជន៍ និងទម្រង់សិល្បៈមួយគួរឱ្យចាប់អារម្មណ៍ ។ គំនិតច្នៃប្រឌិតការបុកអង្ករឱ្យចេញជាបទចង្វាក់ភ្លេងពិរោះសណ្ដំនេះ ធ្វើឱ្យគេទទួលបាននូវអត្ថប្រយោជន៍ពីរគឺ :

១- ផលិតចេញជាអង្ករមានបរិមាណច្រើន សម្រាប់បម្រើសេចក្ដីត្រូវការក្នុងពិធីអាពាហ៍ពិពាហ៍, ពិធីបុណ្យទ្រង់ទ្រាយធំផ្សេងៗ ផង និង

២- បង្កលក្ខណៈគំជរបរិយាកាសការងារឱ្យបាត់អស់នូវការនឿយហត់ ហើយអាចស៊ូទ្រាំបន្តការងារយូរឥតនឿយណោយ ។

## ២. ត្បាល់គ្រឿងអចល័ត ចែកចេញជាពីរទម្រង់ :

### ក- ត្បាល់គ្រឿងជាន់ ឬត្បាល់ជាន់

ត្បាល់នេះមានទម្រង់សណ្ឋាន ទ្រង់ទ្រាយ ប្លែកពីត្បាល់ចល័ត ដោយគេកប់ផ្ចិតត្រឹមចង្កេះត្បាល់ទៅក្រោម ទៅក្នុងដីរួចចាក់ស៊ីម៉ងត៍ក្រៀកឱ្យរឹង ។

ចំពោះអង្រែវិញ គឺជាឈើសណ្ដូកវែង ដែលខាងចុងមានដាប់បណ្ដុះឈើប្អូរោ ប៉ុនចុងភ្លៅ មួយផ្នែកទៀត គឺផ្ទោះមានបង្គោលបួនសម្រាប់ធ្វើបង្កាន់ដៃផ្អែកខាងលើ និងឬងក្រោម ៤ ជ្រុង ធ្វើជា ឈើសម្រាប់ជាន់ទប់ខ្លួនពេលដែលអង្រែជាន់ឱ្យបះឡើង ។ ក្រៅពីនេះ នៅមានអង្រែ ដាប់ភ្ជាប់នឹងដងវែងសណ្ដូកទៅក្រោយតាមចន្លោះឃ្លុងក្រោមទាំងពីរ ត្រង់ចន្លោះសសរមុខទាំងពីរ គេចោះដាក់កន្លាស់អង្រែដាប់ភ្ជាប់នឹងដងអង្រែ ធ្វើយ៉ាងណាពេលជាន់អង្រែឱ្យបះនោះស្ទុលទទឹងវិលឡើងលើចុះក្រោម កាលណាអង្រែធ្លាក់ទៅចំថ្នក់ត្បាល់ដែលដាក់អង្ករសម្រួបសម្រាប់បុក ។ ពេលមនុស្សជាន់ដងអង្រែ ផ្លែអង្រែក៏ងើបឡើងលាន់ស្នូរឮឌឹត ១ បន្តិច ១ ។ លុះអ្នកបុកអង្ករដកជើងចេញពីកន្ទុយអង្រែ ផ្លែអង្រែក៏ធ្លាក់ឮគ្រាំងទៅក្នុងរណ្ដៅត្បាល់ ។ ជាន់ដក ជាន់ដកយ៉ាងនេះឮយ ១ ឋិតក្រោមទម្ងន់អង្រែយ៉ាងធ្ងន់ មិនយូរប៉ុន្មាន អង្ករក៏ម៉ដ្ឋ គឺជ្រុះសម្បកកន្ទក់ចេញពីគ្រាប់អង្ករ ។ ការជាន់សម្រិតអង្ករដោយត្បាល់ជាន់ គឺទទួលផលល្អ រហ័សជាងការបុកអង្រែក្បៀងដោយដៃ ។ ប៉ុន្តែ ត្បាល់ជាន់ត្រូវការមនុស្សពីរនាក់ ទើបជាន់បាន, ព្រោះអង្រែធ្វើពីឈើខ្លឹម (កកោះ) ធ្ងន់ខ្លាំង ។ បើក្នុងគ្រួសារខ្វះជើងចំណុះនោះ ក្មេងស្រីអ្នកស្រិតអង្ករត្រូវជាន់អង្ករប្រវាស់គ្នានឹងកូនស្រីអ្នកជិតខាង ។ ជួនកាល ប្ដីប្រពន្ធនាំគ្នាស្រិតអង្ករដោយជាន់ត្បាល់ទាំងពីរនាក់ ។ កាលណាអង្ករម៉ដ្ឋហើយ គេយកចន្ទល់មកទល់ចុងអង្រែ ឱ្យងើបផុតពីមាត់ ត្បាល់ ដើម្បីងាយកាយអង្ករដាក់កញ្ជើ ។

**ខ- ត្បាល់អចល័ត បែបធម្មជាតិ (ត្បាល់ជាប់ឫស)**

គេច្រើនសង្កេតឃើញត្បាល់ប្រភេទនេះ នៅគ្រប់ផ្ទះជនជាតិព្នង កួយ

សំរែ ស្ងួច ..... ដែលតាំងភូមិនៅក្នុងព្រៃ. ដោយកាប់ឈើចេញឱ្យមានចន្លោះសម្រាប់ធ្វើកន្លែងផ្ទះ ។ គេកាត់ដើមឈើធំ ៗ ដូចជា ដើមចំបក់ ដើមពង្រ ដើមផ្ចឿកធំ. កម្ពស់ពីដីត្រឹមលើជង្គង់ ហើយយកពូថៅ ឬពន្លាកដាប់ ចោះ លុង ឱ្យចេញជារាងរណ្ដៅត្បាល់សម្រាប់ចាក់អង្ករបុក ។ ការបុកស្រិតអង្ករមិនខុសគ្នាពីត្បាល់ក្តឿងចល័តខាងលើប៉ុន្មានឡើយ ។ កាលពីសម័យបុរាណមកទល់នឹងសតវត្សទី ២០ នេះ ការស្រិតអង្ករគឺប្រព្រឹត្តឡើងតាមបែបដូចជម្រាបខាងលើ ។ ក្នុងសម័យទំនើបនេះ ការស្រិតអង្ករ គឺប្រព្រឹត្តទៅតាមរយៈម៉ាស៊ីនដែលដើរដោយកម្លាំងចរន្តអគ្គិសនី ។ របៀបទំនើបនេះងាយស្រួលច្រើនជាង ហើយស្រិតអង្ករបានច្រើនរាប់តោន ។

### ៣. ត្បាល់ដៃ

ត្បាល់ដៃមានរាងមូលពីក្រោមដល់លើ តែគន្លាក់តូចត្រង់កណ្ដាល ត្បាល់ដៃមានទំហំវិជ្ឈមាត្រ ប្រមាណពី ៣ តឹកកន្លះ ទៅ ៤ តឹក ធ្វើពីឈើចំបក់ ឬឈើអ្វីផ្សេងទៀត ដែលមានទំហំល្មមធ្វើបាន នឹងជាប់ស្វិតធន់បានយូរ ។ នៅផ្នែកខាងលើ គេចោះដាប់លុងរាងរីកលើរួមក្រោម ដែលអាចមានចំណុះកន្លះតៅ ។ អង្រែរាងមូលវែងទំហំប៉ុនចុងកំភួនជើង ប្រវែងប្រមាណ ១ ម ៦០ ធ្វើពីឈើពព្លា ភ្លួង មៀនព្រៃ ឬគគីខ្សាច់ ។ ត្បាល់ដៃប្រើសម្រាប់ស្រិតអង្ករបរិមាណតិច ។ ត្បាល់នេះ ច្រើនតែបុកតែម្នាក់ឯងប៉ុណ្ណោះ ។ កាលណាគេបុក អាចបន្លឺសូរ "ច្រុប ! ច្រុប !" ។ ក្រៅពីស្រិតអង្ករសំរូបឱ្យទៅជាសម្រិត ត្បាល់ដៃមានតួនាទីសម្រាប់ដាល់អំបុក ។ ក្នុងករណីដាល់អំបុក ត្រូវមានជើង

ចំណុះពីរនាក់ជាចាំបាច់ ដោយម្នាក់ជាអ្នកបុក ឯម្នាក់ទៀត បុកផងឆ្កៀល[៦៩] ផង ។ កាលណាដាល់អំបុកជើងអង្រែបន្លឺសូរ តុបតឹង ! តុបតឹង ! ញាប់យ៉ាងរន្ថើន ។ ត្បាល់ក្បឿងអាចមានម៉ាស៊ីនកិនស្រូវជំនួសបាន ។ រីឯត្បាល់ដៃដែលសម្រាប់ដាល់អំបុកវិញនោះ គ្មាន "ម៉ាស៊ីន" ឯណាមកជំនួសបានឡើយ ។ ត្បាល់ក្បឿងនាសម័យកុំព្យូទ័រនេះ បានត្រាន់តែបង្ហាញមនុស្សជំនាន់ក្រោយឱ្យឃើញ ត្រាន់ចាត់ទុកជា "សារមន្ទីរ" ប៉ុណ្ណោះ ។

---

[៦៩] អ្នកស្រុកខ្លះគេហៅថា ឆ្កៀសអំបុក ។

**ក. ក. ន.** ចម្ងាយពីរយៈពេលពីដំណើររបស់ទូតគោចរជាជាតិចិន ឈ្មោះ ជីវតាក្វាន់ (Chiou Ta Quan) មកទល់ពេលនេះ យើងមានរយៈពេលជិត ១000 ឆ្នាំទៅហើយ ។ អ្វី ៗដែលកើតក្នុងសម័យនោះ ពិតជាចម្លែកណាស់សម្រាប់យើងជាខ្មែរក្នុងសម័យបច្ចុប្បន្ន ។ ខ្ញុំមើលឃើញមានការចាំបាច់បំផុត ដើម្បីយករឿងរ៉ាវ ព្រឹត្តិការណ៍ប្រពៃណី ទំនៀមទម្លាប់ វប្បធម៌ខ្មែរ ពីជំនាន់នោះមកជម្រាបអស់លោកអ្នកអាចឱ្យបានជ្រាប អំពីស្រមោលដ៏វែងឆ្ងាយនៃអតីតកាលរបស់ប្រទេសយើង របស់បុព្វបុរសយើង ដែលខ្ញុំលើកយកប្រធាន-បទខ្លះ ៗ ជាលំដាប់លំដោយមកជម្រាបអស់លោកអ្នកអាន ដើម្បីបានជាពន្លឺនិងឆ្លុះបញ្ចាំងមើលពីសង្គមបុព្វបុរសពីអតីតកាល ប្រៀបធៀបទៅនឹងសង្គមខ្មែរនាជំនាន់នេះ ។

**១. ប្រពៃណីអ្នកស្រុកចេនឡា** : បរិយាយពីដំណើររបស់ទូតគោចរពីស្រុកចិនមកកម្ពុជាដោយឆ្លងកាត់ទឹក "ចាម្ប៉ា" អំពីទេសភាព និងទិដ្ឋភាពនានា ដែលជីវតាក្វាន់បានឃើញក្នុងការធ្វើដំណើរឆ្លងកាត់ -អំពីទិដ្ឋភាពបន្ទាយ និងកំពែងប្រាកាទនានាក្នុងក្រុងអង្គរ ។

**២. រាជដំណាក់ និងលំនៅឋានប្រជារាស្ត្រ** : មានសេចក្តីពិពណ៌នាអំពីអាថ៌កំបាំង និងអច្ឆរិយហេតុផ្សេង ៗ ដែលប្រាប់ពីប្រវត្តិនិង "ព្រះនិព្វាន" - អំពីគ្រឿងអលង្ការដ៏មានតម្លៃ ដែលព្រះរាជាទ្រង់ពាក់លើខ្លួន - អំពីលក្ខខណ្ឌនៃជីវភាពប្រជារាស្ត្រ ..... ។

**៣. អំពីមន្ត្រី** : ពិតតាំងពីមន្ត្រីថ្នាក់ខ្ពស់រហូតដល់មន្ត្រីតូចតាច -អំពីសម្លៀកបំពាក់ ឋានៈ និងគ្រឿងប្រដាប់ប្រើប្រាស់នៅជំនាន់នោះ ស្ត្រីឆ្លង

ទន្លេមិនអាំងភ្លើងដូចសម័យយើងនេះទេ គឺគេពូតដុំបាយក្តៅឧណ្ហ ១ ស៊កចូល ទៅក្នុងប្រដាប់ភេទ ទុកនៅទីនោះមួយសន្ទុះទើបយកចេញវិញ ។ សម័យ នោះ អ្នកមានធនធាន គេមានខ្ញុំកំដរជនជាតិព្រៃ តិចឬច្រើនទៅតាមកម្រិត ធនធាន ..... ។

ដោយឡែកពីនេះ អស់លោកអ្នកអាននឹងបានឃើញអំពីការប្រតិបត្តិ គោរពព្រះពុទ្ធសាសនានៅសម័យអង្គរ តើមានការខុសប្លែកគ្នាយ៉ាងណាខ្លះ អំពី ពិធីពុទ្ធបូជានាសម័យបច្ចុប្បន្ន ។ អស់លោកអ្នកអានពិតជាមានសំណាងធំ ណាស់ ដែលបានអាន បានយល់អំពីរឿងរ៉ាវប្លែក ១ នាសម័យមុន ។ អស់ លោកនឹងពេញចិត្ត ដោយបានសិក្សាស្រាវជ្រាវស្គាល់យល់ដឹងអំពីប្រពៃណីខ្មែរ យើង ពីសម័យជិត ១០០០ ឆ្នាំមុន តាមរយៈការអង្គុយអានតាមរយៈ សៀវភៅដែលចងក្រង រៀបរៀងដោយខ្ញុំ ដែលបានអានសៀវភៅជាភាសា បរទេស ហើយយកមករ៉ាយរ៉ាប់ជូនអស់លោកជ្រាប សមដូចភាសាបារាំងបាន ពោលថា "Nous avons lu pour vous"

អរគុណដោយពេញចិត្តនឹងការទិញទិន្នរបស់ខ្ញុំ ។

ជួបគ្នានៅលេខក្រោយ ១ ទៀត ។

ដោយមនោសញ្ចេតនាមេត្រីរាប់អានដ៏ស្មោះអំពីខ្ញុំ

មៀច ប៉ុណ្ណ

# ប្រពៃណីអ្នកស្រុកចេនឡា

## សេចក្តីផ្តើម

រឿងរ៉ាវទាំងនេះ លោក **ជីវ តាក់គន់**[៧០] បាននិពន្ធឡើងក្នុងសម័យរាជសន្តតិវង្ស **ខន់**[៧១] គឺនៅស្រុកវេងតា[៧២] ហើយក្រោយមក លោក **ហ្វូច គន់** បានកែសម្រួលក្នុងរវាង រាជសន្តតិវង្ស **ម៉េង**[៧៣] ក្នុងស្រុកសេងអាន[៧៤] ។

សេចក្តីអធិប្បាយទាំងស្រុងមានដូចតទៅ :

ចេនឡា ឬចាកឡា អ្នកប្រទេសនេះហៅខ្លួនឯងថា "កាន់ផៃចឺ" តាមកំណត់ខ្លះរបស់ពួកបស្ចិមប្រទេស បានហៅថា កាំពូចឺ ដែលមានសម្លេងស្រដៀងនឹង "កាំពូចេ" ដែរ ។

ខ្ញុំចាប់ធ្វើដំណើរចេញពីស្រុកវ៉ូជីវ[៧៥] ពាមផ្លូវទឹក តាមទន្លេស្រុកម៉ាំងគួយ និង

---

[៧០] នេះអានតាមសម្លេងចិនទាជីវ បើអានតាមសម្លេងកុកងឺ : ចូវតាក្វាន់ តែយើងធ្លាប់ហៅបកថា ជីវ តាក្វាន់ ។

[៧១] សន្តតិវង្ស ងន់ នេះ មានស្តេចច្រើនអង្គ តែនេះ ក្នុង គ. ស. ១២៩៥ ។ គឺត្រូវលើស្តេចឈ្មោះ ងន់ សេងចុង នាមសម្រាប់រាជ្យ ងន់ ចេង ។

[៧២] ស្រុកវេងតា នៅក្នុងខេត្តជាក់កាង ( ចិនខាងត្បូង ) ។

[៧៣] សន្តតិវង្សម៉េង ចូលមកក្នុងសតវត្សទី ១៣ - ១៤ នៃ គ. ស ។

[៧៤] នៅក្នុងខេត្តហោណាំ ( ហូណាន់ ) ។

[៧៥] នៅខេត្តជាក់កាងដែរ ។

គង់តុង កាត់សមុទ្រ "ឈិតជីវ" ទៅដល់សមុទ្រ "ការជីវ" ក៏បានទៅដល់ទីក្រុង "ចាម្ប" បន្តដំណើរបណ្តោយខ្យល់ ចេញពីក្រុង "ចាម្ប" ទៅ អស់រយៈពេល កន្លះខែទៀត ក៏បានទៅដល់ស្រុក ចេងផូវ (ជម្ពូ ? ) ដែលជាព្រំដែននៃ ប្រទេសនោះ ។ លុះចេញពីចេងផូវទៅទៀត ឆ្លងផុតសមុទ្រឃុនលុន ក៏ដល់ ទៅមាត់ពាម គឺបែកចេញពីមាត់សមុទ្រទៅជាដៃទន្លេច្រើនច្រកណាស់ ។ ក្នុង បណ្តាច្រកទាំងនោះ មានតែច្រកទី ៤ ទេ ទើបអាចចូលទៅបាន ក្រៅពីនេះ គេដឹងថា មានទឹករាក់ណាស់ នាវាធំ ៗ មិនអាចធ្វើដំណើរបានឡើយ ។ ត្រង់ ពាមជាមាត់ច្រកនោះ ឃើញមានព្រៃស៊ុបទ្រុប ហើយក្រៅពីនេះមានវាលខ្សាច់ ពណ៌លឿង និងមានដើមបបុសនិងដើមអំពៅព្រៃ ដុះបែកផ្កាសសំព្រុស ម្ល៉ោះ ហើយ អ្នកដំណើរពិបាកចំណាំផ្លូវរកច្រកចូលទៅណាស់ ។

ចូលផុតពីមាត់ពាម ធ្វើដំណើរទៅតាមដងទន្លេឆ្ពោះទៅទិសខាងជើង អស់រយៈដំណើរប្រមាណកន្លះខែទៀត ទើបបានទៅដល់ស្រុកមួយឈ្មោះ ឆេណោំ (ឆ្នាំង ?) ដែលជាខែត្រមួយនៃប្រទេសនេះ ។ លុះធ្វើដំណើរពីឆេណោំ បណ្តោយតាមទឹកហូរទៅជើង អស់ពេល ១០ ថ្ងៃទៀត កាត់ភូមិពូឡូវឈឹង (ប្រែថាភូមិកណ្តាលផ្លូវ) ហ៊ុតឈឹង (ភូមិព្រះពុទ្ធ)[៧៦] ឆ្លងកាត់សមុទ្រទឹក សាប[៧៧] ទៅទៀត ទើបបានដល់ទីក្រុងកាងពាងឈ្យូ (កំពែងជួរ ?) ។ ក្រុងនេះ មានទំហំ ៥០ លី (១ លី ប្រវែង ១.៨០០ ហត្ថ) បើតាមសៀវភៅពូកបស្ទិម

[៧៦] លោក Pelliot សង្ស័យថា ពោធិសាត់ តែពិតគឺភូមិ "ព្រៃភព" ព្រោះជាពាក្យសម្គាល់នាម ព្រះពុទ្ធដែរ ។

[៧៧] ពាក្យ ទលេ បាលីប្រែថាសមុទ្ទ សព្វថ្ងៃក្លាយជា ទន្លេសាប វិញ ។

ប្រទេសសរសេរថា ប្រទេសនេះ មានទំហំដី ៧.០០០ លី និងមានព្រំប្រទល់ខាងជើងទល់នឹងក្រុងចាម្ប៉ា គឺត្រូវធ្វើដំណើរអស់ពេលកន្លះខែ ខាងនិរតីនៅឃ្លាតពីស្រុកសៀមចម្ងាយផ្លូវកន្លះខែដែរ នៅខាងត្បូងឃ្លាតពីទីក្រុង "ប៉ូងអ៊ូ" ចម្ងាយផ្លូវ១០ថ្ងៃ ឯខាងកើតប្រទេសនេះគឺមហាសមុទ្រ ហើយដែលជាប្រទេសមួយធ្លាប់ទាក់ទង ខាងសេដ្ឋកិច្ចជាមួយស្រុកយើង តាំងពីដើមរៀងមកផង ។

នៅគ្រាដែលប្រទេសចិន ( ក្នុងរាជសន្តតិវង្សម៉ុងហ្គោល ) បានត្រួតត្រាលើមហាសមុទ្រក្នុងទ្វីបលោកហើយ លោកចមពល ( មេទ័ពធំ ) ឈ្មោះ **ជុន តូច** ដែលនៅឈរប្រចាំការ ត្រួតត្រាទីក្រុងចាម្ប បានចាត់បន្ត្រីពីរនាក់គឺលោក ប៉ូ ហ៊ើកហ្វូវ អ្នកមានតំណែងបាស ១ និងលោក ឆាយ ហ្វូវ ឱ្យទៅកាន់ប្រទេសចេនឡា តែត្រូវប្រទេសនេះចាប់ឃុំមិនឱ្យមកវិញ ។ លុះមកដល់រជ្ជកាលស្តេច **ចន់ ចេង** ( គ. ស. ១២៩២ ) ខែទី ៦ ព្រះរាជាអង្គនេះ ទ្រង់ចាត់បេសកកម្មតួមួយមកប្រទេសចេនឡា ហើយពេលនោះ ខ្លួនខ្ញុំក៏ត្រូវចាត់មកជាមួយដែរ ។ គឺនៅក្នុងខែទី ២ នៃឆ្នាំបន្ទាប់មក យើងបានចាកចេញពីស្រុកមេងជីវ នោះមកទៀត ។ លុះថ្ងៃ ១៥ ខែទី ៣ ទើបដល់ទីក្រុងចាម្ប ។ នៅកណ្តាលផ្លូវ ជួបនឹងខ្យល់បក់បញ្ច្រាសពីមុខមកវិញ ដែលជាហេតុនាំឱ្យមានការរអាក់រអួលក្នុងដំណើរ ។ ដល់មកខែ ៧ ដែលជាសរទះរដូវ ទើបបានមកដល់ប្រទេសនេះ ព្រមចំណោះចុះចូលទៅ ។

លុះដល់មករជ្ជកាលស្តេច **តាយ តេក** ( គ. ស. ១២៩៧ ) ខែទី ៦ ខ្ញុំជិះនាវាត្រឡប់មកវិញ ហើយដល់ថ្ងៃ ១២ ខែ ៨ ទើបនាវាចូលចតដល់កំពង់ផែស្រុកស៊ីម៉េង ។

ចំពោះរឿងប្រពៃណី និង កិច្ចការនៃប្រទេសចេនឡានេះ ខ្ញុំមិនបាន ដឹងល្អិតល្អន់អស់សេចក្ដីសព្វគ្រប់មែន តែខ្ញុំបានដឹងដោយគ្រួស ៗ អាចនឹង ជម្រាបបានដែរ ។

## ១. បរិវេណនៃទីក្រុង

បរិវេណនៃទីក្រុងនេះ មានទំហំ ២០ លី មានទ្វារ ៥ ។ ទ្វារទាំងនោះ សុទ្ធតែសាងកម្រាស់ជាពីរជាន់ក្នុងក្រៅ គឺនៅទិសខាងកើតមានទ្វារពីរ ។ ក្រៅពីនេះ ក្នុងមួយទិសមានទ្វារតែមួយទេ ។ នៅក្រៅកំពែងក្រុង សុទ្ធតែមានប្រឡាយទឹកធំ ៗ ពីក្រៅប្រឡាយនោះ មានផ្លូវដើរទៅកាន់ស្ពានធំ ៗ ហើយនៅសងខាងស្ពានទីមួយ ៗ មានទេវរូបថ្ម ៥៤ ដូចជារូបមេទ័ពថ្មដ៏ធំ ៗ ដូច្នោះដែរ ។ រូបទាំងនោះដូច ៗ គ្នា នៅតាមច្រកទាំងប្រាំ ។ បង្កាន់ដៃស្ពានទាំងនេះ គេធ្វើអំពីថ្ម ហើយមានឆ្លាក់ជារូបពស់ដ៏ធំ[៧៨] ដែលមានក្បាល ៩ ឯរូបថ្មទាំង ៥៤ នោះ សុទ្ធតែយកដៃចាប់ទាញពស់នេះឯងហាក់ដូចជាមិនចង់ឱ្យស្ទុះទៅរួច ។ នៅខាងលើខ្លោងទ្វារ មានពុទ្ធរូបថ្មប្រាំអង្គ បែរភ័ក្ត្រទៅទិសខាងលិច ហើយមួយអង្គដែលស្ថិតនៅចំកណ្ដាលគេ មានទឹកមាសល្អស្រស់ផង ។ នៅសងខាងទ្វារ មានឆ្លាក់រូបដំរីថ្មទៀត ។

កំពែងទីក្រុង គេធ្វើពីថ្មទាំងអស់ មានកំពស់ ២០ ហត្ថ តម្រៀបថ្មយ៉ាងជិតហើយមាំណាស់ ។ នៅពីលើគ្មានស្មៅដុះឡើយ តែនៅចន្លោះបួយដុំ ៗ

---

[៧៨] ពស់ធំនេះ បើខ្មែរគឺជា នាគ ។ ជីវ តាក្វាន់ ធ្លាប់ស្គាល់នាគចិន មានរូបផ្សេងពីពស់ បានជាហៅនាគខ្មែរថា ពស់ ។

មានដាំដើមជ្រៃ ។ ឯផ្ទៃក្នុងដីកំពែង ដែលមានចន្លោះពីគ្នាដល់ទៅជាង ១០០ ហត្ថនោះ ស្ថិតនៅជាដីជម្រាលនៃភ្នំ រលីងស្អាតណាស់ ។ លើកំពែងដែលមានផ្ទៃជាដីជម្រាលនោះ មានទ្វារធំ ៗ ដែលបិទជិតនៅពេលយប់ ហើយបើកចំហនៅពេលថ្ងៃតាំងពីព្រលឹម នឹងមានអ្នកយាមប្រចាំការជានិច្ច ។ សត្វឆ្កែគេមិនឱ្យចូលក្នុងទ្វារនេះទេ ។ ជនណាដែលធ្លាប់មានទោស ត្រូវគេកាត់ម្រាមជើងក៏មិនឱ្យចូលដែរ ។ កំពែងព័ទ្ធជុំវិញនោះ មានជ្រុងជ្រោយល្អណាស់ ហើយនៅត្រង់ជ្រុងនីមួយ ៗ សឹងមានប្រាង្គថ្មមួយខ្ពស់នៅប្រចាំគ្រប់ជ្រុង ។

នៅកណ្តាលទីក្រុងនេះ មានប្រាសាទមាសមួយ[៧៩] និងនៅជិតខាងនេះ មានប្រាង្គប្រាសាទជាង ២០ ទៀត ព្រមទាំងមានបន្ទប់ថ្មចំនួនច្រើនរយបន្ទប់ផង ។ នៅប៉ែកខាងកើតមានស្ពានមាសមួយ មានរូបតោមាស ២ ស្ថិតនៅអមខាងឆ្វេងនិងខាងស្តាំស្ពានមាស ។ មានព្រះពុទ្ធរូបមាស ៨ អង្គ តម្កល់នៅតម្រៀបគ្នាចំពីក្រោមប្រាង្គសិលា ។ នៅខាងជើងប្រាសាទមាសចម្ងាយប្រមាណជាងមួយលី មានប្រាសាទស្ពាន់មួយទៀត ដែលមានកម្ពស់ខ្ពស់ជាងប្រាសាទមាស គួរឱ្យគេគយគន់ណាស់ ។ ចំពីក្រោមប្រាសាទស្ពាន់នេះ ឃើញមានបន្ទប់ថ្មប្រហែលជាដប់ដែរ ។ ចេញពីនេះទៅខាងជើងថែមមួយលីទៀត គឺជាព្រះរាជដំណាក់ដែលស្តេចគង់នៅ ។ នៅក្នុងល្វែងដែលជាព្រះរាជដំណាក់នោះ មានប្រាង្គមាសមួយទៀត ។ ទំនងជាដោយហេតុនេះហើយ ដែលពួក

---

[៧៩] លោក P Pelliot ចុះសេចក្តីយល់ថា ប្រាសាទនេះ គឺជាប្រាសាទបាយ័ន ។ តាមសេចក្តីប្រែរបស់ (Pelliot ថា Lou-Pan) ហើយលោកចុះសេចក្តីយល់ថាជាប្រាសាទអង្គរវត្ត ។ តាមចិន លូប៉ាន ជាឈ្មោះមេជាងរចនាក្នុងរឿងព្រេង ( ដូចខ្មែរយើងនិយាយពីពិស្ណុការ អ្នកសាងប្រាសាទដែរ ) ។

ឈ្មួញបរទេសតែងដំណាលថា ប្រទេសចេនឡា ថ្កុំថ្កើងរុងរឿងណាស់ ។ ចេញពីកំពែងមានទ្វារខាងត្បូងទៅ ចម្ងាយប្រមាណជាជាងកន្លះលី តាមពាក្យចចាមអារាមគេនិយាយថាមានចេតិយ **លូប៊ូន**[៨០] សង់តែមួយយប់ ។ ផ្នូរសពឬចេតិយ លូប៊ូន ស្ថិតនៅក្រៅកំពែងខាងត្បូងជាងកន្លះលី ហើយមានបរិវេណព័ទ្ធជុំវិញប្រមាណជាងដប់លី និងមានបន្ទប់ថ្មជាច្រើនរយទៀតផង ។ នៅស្រះខាងកើតកំពែងនគរប្រមាណចម្ងាយដប់លី មានប្រាសាទថ្មីមួយទៀត[៨១] ដ៏មានបរិវេណព័ទ្ធជុំវិញប្រវែង ១០០ លី ។ នៅក្នុងប្រាសាទនេះ មានព្រះពុទ្ធរូបមួយអង្គទ្រង់ផ្ទំធ្វើពីស្ពាន់ ហើយមានទឹកចេញជានិច្ចពីត្រង់ផ្ចិត ហូរធ្លាក់ទៅក្នុងស្រះធំមួយនៅពីខាងជើងប្រាសាទនេះ ។ នៅទិសខាងជើងកំពែងនគរ ចម្ងាយប្រមាណ ៥ លី មានប្រាសាទមាសរាងបួនជ្រុង[៨២] និងមានបន្ទប់ថ្មជាច្រើនរយ ហើយនៅក្នុងនោះគេឃើញមានព្រះពុទ្ធរូបមាស រូបសិង្ហមាស រូបដំរី រូបគោ រូបសេះ និងវត្ថុដទៃទៀតធ្វើពីស្ពាន់ ច្រើនឥតគណនា ។

## ២. ដំណាក់ - លំនៅ

ព្រះដំណាក់ ផ្ទះនាម៉ឺនមន្ត្រី និងផ្ទះអ្នកមានទាំងអស់ សុទ្ធតែបែរមុខ

---

[៨០] តាមសេចក្តីប្រែរបស់ (Pelliot ថា Lou-Pan) ហើយលោកចុះសេចក្តីយល់ថាជាប្រាសាទអង្គរវត្ត ។ តាមចិន លូប៊ូន ជាឈ្មោះមេជាងរចនាក្នុងរឿងព្រេង (ដូចខ្មែរយើងនិយាយពីពិស្ណុការអ្នកសាងប្រាសាទដែរ) ។

[៨១] លោក Pelliot យល់ថាជាប្រាសាទមេបុណ្យខាងលិចដែលគាត់បន្ថែមថា ប្រហែលជាគេច្រឡំ ជាទិសខាងកើតទៅវិញ ។

[៨២] ទំនងជាប្រាសាទនាគព័ន្ធ ។

ទៅកើត ។ ព្រះរាជដំណាក់ ស្ថិតនៅខាងជើងប្រាសាទមាស ហើយនៅជិតមាត់ទ្វារដំមាន បន្ទាយព័ទ្ធជុំវិញប្រវែង ៥ ឬ ៦ លី ។ ក្បឿងប្រក់តួប្រាសាទកណ្តាលធ្វើពីសំណ ឯអគារផ្សេងទៀត សឹងប្រក់ក្បឿងធ្វើពីដីដុតពណ៌លឿង ។ សសរ និង ស៊ុមទ្វារសុទ្ធតែឆ្លាក់ ឬគូររចនារូបផ្សេង ៗ តែភាគច្រើនគឺរូបព្រះពុទ្ធ ។ ដំបូលទាំងនោះល្អមើលណាស់ ។ របៀងប្រាសាទ និងថែវយ៉ាងវែងអាចដើរ បានជា ផ្លូវខ្វាត់ខ្វែង ហើយដំបូលនោះក៏ខ្ពស់ ៗ សម្បើមណាស់ ។ ទីនេះជាកន្លែងព្រះរាជវាំងដែលស្តេចគង់ប្រកបកិច្ចការផែនដី មានបង្អួចមាសមួយនៅខាងស្តាំ និង ខាងឆ្វេងនៃកន្លែងស្តេចគង់ប្រថាប់ មានសសរបួនជ្រុងតម្កល់កញ្ចក់តម្រៀបគ្នាប្រមាណជាសែសិប ឬ ហាសិបផ្ទាំង ដាក់ដង្ហែតាមជ្រុងបង្អួចនេះ កំរាលក្រោមរូបរាងជាដំរី[៥៣] ។

ខ្ញុំឮគេនិយាយថា ទីក្នុងនេះ មានរបស់ប្លែក ៗ ច្រើនណាស់ ប៉ុន្តែហាមឃាត់តឹងតែងពេក មិនអាចអនុញ្ញាតឱ្យចូលបាន ។ ក្នុងបណ្តារឿងប្លែកទាំងនោះ គេនិយាយល្បីថា នៅកណ្តាលប្រាសាទ មានប្រាង្គមាសមួយ ហើយថារាល់យប់ ស្តេចតែងឡើងទៅផ្ទំលើប្រាង្គមាសនោះ ។ អ្នកស្រុកគេមានជំនឿលើកនាំគ្នានិយាយថា នៅក្នុងប្រាង្គមាសនោះឯងមានបិសាចមួយ មានរូបជាពស់ក្បាលប្រាំបួន[៥៤] ។ បិសាចនោះជាព្រះភូមិរក្សាព្រះនគរ ។ រាល់យប់ បិសាចតែងតែបែរខ្លួនជាមនុស្សស្រី ហើយស្តេចត្រូវរួមផ្ទំផ្ទិតនឹងនាងនោះសូម្បីតែ

---

[៥៣] ត្រង់នេះពុំជាច្បាស់លាស់ ដែលមានសសរបួន និងក្បាច់តែងដោយកញ្ចក់ជើងទ្រធ្វើជារូបដំរី តែលោក ប៉ែរ -ពេល្លីយ៉ូ សរសេរថា ជាស៊ុមបង្អួច ព្រោះពេលមិញមានតែបង្អួចគ្រប់ជុំវិញ ។

[៥៤] ពស់ក្បាលប្រាំបួននេះ គឺជានាគ ព្រោះនាគខ្មែរមានខ្លួនជាពស់ ឯនាគចិនមានជើងក្បាលតូចឥតពពារទេ ។

មហេសី ឬ ស្នំស្និទ្ធព្រះអង្គ ក៏មិនហ៊ានចូលទៅក្នុងទីនោះដែរ ។ លុះដល់មជ្ឈិមយាម ទើបស្តេចចេញមកពីនាងពស់នោះ មករួមរ័ក្សនឹងមហេសី ឬស្រីស្នំដទៃទៀតបាន ។ បើបាត់ពស់នោះមិននិម្មិតមកទេ នោះថាគ្រោះថ្នាក់នឹងមកដល់អាយុស្តេចហើយ រឿងរ៉ាវអាក្រក់នឹងកើតឡើង ។ បើស្តេចមិនបានយាងចូលទៅទីនេះមួយយប់ណាហើយ ពេលនោះអពមង្គលនឹងពិតជាកើតឡើងភ្លាមមិនខានដែរ ។

បន្ទាប់មក ដំណាក់ព្រះញាតិវង្ស ឬ លំនៅនាម៉ឺន-មន្ត្រីធំ ៗ សង់យ៉ាងធំទូលាយស្តុកស្តម្ភប្លែកពីផ្ទះអ្នកស្រុកសាមញ្ញ ។ ផ្ទះទាំងនោះសុទ្ធតែប្រក់ស្លឹក បានតែផ្ទះអ្នកធំ និងវិហារទេដែលប្រក់ក្បឿង ។ ហើយទំហំផ្ទះទាំងនោះត្រូវសង់ទៅតាមលំដាប់យសសក្តិនៃម្ចាស់ផ្ទះផង ។

ចំណែកផ្ទះប្រជារាស្ត្រវិញ សុទ្ធតែប្រក់ស្លឹក (ឬស្បូវ) គេមិនហ៊ានប្រក់ក្បឿងទេ ឯទំហំសោត សង់នៅតាមធនធានខ្លួន តែមិនហ៊ានសង់ឱ្យដូចលំនៅអ្នកធំឡើយ ។

## ៣. សម្លៀកបំពាក់ និង គ្រឿងអលង្ការ

អ្នកស្រុកទាំងអស់ ចាប់តាំងពីស្តេចចុះទៅ ទាំងស្រីទាំងប្រុសសុទ្ធតែបួងសក់ទាំងអស់ ហើយគេលែងខ្លួនទទេស្អាត មានតែសំពត់មួយផ្ទាំងតូចរំព័ទ្ធជុំវិញខ្លួន របៀបគេចងពុង ហើយបើត្រូវការចេញទៅណាមកណា គេយកសំពត់ក្រណាត់មួយផ្ទាំងទៀតធំជាងមុន មករុំស្រោបថែមពីលើ ។ ការស្លៀកពាក់នេះ មានល័ក្ខខ័ណ្ឌទៅតាមឋានៈទៀត ។ ព្រះពស្ត្ររបស់ស្តេច មានតម្លៃ ៗមាសបីឬបួនតម្លឹង គឺល្អដាច់ពីសម្លៀកបំពាក់អ្នកផងទាំងពួង ។ អ្នកស្រុក

នេះ ចេះត្បាញសំពត់ប្រើហើយ តែមានប្រើសំពត់មកពីស្រុកសៀម និងចាម្ប ផងដែរ ។ សំពត់ពិសេសមកពីបស្ចិមប្រទេសដែលមានសាច់ម៉ដ្ឋល្អ មានតែស្ដេចទេដែលមានប្រើ គឺជាសំពត់ផ្កាសរសៃសូត្រឆ្មារ ។ ស្ដេចពាក់មកុដមាស បើជួនកាលមិនពាក់មកុដទេ គឺពាក់កម្រងផ្កាដូចជាផ្កាម្លិះជាដើម ព័ទ្ធជុំវិញព្រះសិរ ។ នៅលើកំពូលព្រះកេស មានស្បៀតសក់ដាំត្បូងពេជ្រយ៉ាងធំទៀតផង ។ គ្រាន់តែគ្រឿងអលង្ការ ដែលពាក់នៅនឹងព្រះបាទនិងព្រះហស្ត មានទម្ងន់ដល់ទៅជាងបីនាឡិ ។ នៅត្រចៀកមានពាក់ចិញ្ចៀនដែលមានដាំពេជ្រភ្នែកឆ្មា ។ បាតព្រះហស្ត និងបាតព្រះបាទមានលាបពណ៌ក្រហម ហើយនៅពេលដែលទ្រង់យាងចេញមកម្ដង ៗ តែងកាន់ព្រះខ័នមាសមួយជានិច្ច ។

ចំណែកប្រជារាស្ត្រវិញ មានតែស្ត្រីភេទទេ ដែលអាចលាបថ្នាំក្រហមនៅបាតដៃបាតជើងបាន ឯប្រុស ៗ មិនហ៊ានលាបទេ ។ ព្រះញាតិវង្ស និងមន្ត្រីធំអាចប្រើកំណាត់ផ្ការង្វើល ១ បាន ឯមន្ត្រីធម្មតា ប្រើបានត្រឹមតែផ្កាចុងជាយប៉ុណ្ណោះ ចំណែករាស្ត្រសាមញ្ញ បើស្រី ១ អាចប្រើសំពត់ផ្កាបានខ្លះដែរ ។

ជនជាតិចិនដែលទើបនឹងមកដល់ប្រទេសនេះថ្មី ១ ទោះបីប្រើសំពត់មានផ្កានៅជាយទាំងសងខាង ក៏គេមិនថាអីដែរ ព្រោះគេសន្មតថាជាពួកមិនទាន់ដឹងទំនៀមស្រុក ហៅថា ពួកអ៉ានទីង ប៉ា ឆា ( មិនដឹងភាសា ) ។

## ៤. អំពីមន្ត្រី

ប្រទេសនេះមានរដ្ឋមន្ត្រី មេទ័ព និងហោរា ហើយមន្ត្រីក្រោមពីនោះមានច្រើនឋានៈទៀត ដូចជានៅប្រទេសចិនដែរ ប្លែកគ្នាតែឈ្មោះហៅ មន្ត្រីទាំងនេះ ភាគច្រើនជាពូជពង្សរបស់ស្ដេច បើមានអ្នកក្រៅចូលធ្វើជាមន្ត្រីផង

ទាល់តែអ្នកនោះយកកូនទៅថ្វាយឱ្យធ្វើជាស្នំស្ដេច។ ការធ្វើដំណើរនៃមន្ត្រីទាំងនោះ គេសម្គាល់តាមគ្រឿងហែហមតាមឋានៈ ។ អ្នកធំជាងគេអង្គុយលើគ្រែស្នែងមាស មានបាំងក្លស់ដងមាសបួន ។ អ្នកបន្ទាប់មកទៀត គ្រែស្នែងមាស ក្លស់ដងមាសពីរ ចុះមកទៀតមានគ្រែស្នែងមាសដែរ តែក្លស់ដងមាសមួយ ។ អ្នកតូចមកទៀតគ្រែស្នែងប្រាក់ មានក្លស់ដងមាសមួយ ។ អ្នកតូចបន្តមកចេះតែថយមកក្លស់ដងមាសតែមួយ រួចក្លស់ដងប្រាក់មួយ ឥតមានគ្រែស្នែង ។

ចំពោះមន្ត្រី ដែលត្រូវជិះគ្រែស្នែងប្រាក់ និងក្លស់ដងមាសមួយឡើងទៅ សុទ្ធតែហៅថា ប៉ាតេង (ម្រតេង) ឬ អាំតេង (អម្តែង ? ) ។ អ្នកដែលមានតែក្លស់ដងប្រាក់ ហៅថា "ស៊ីឡាត់ទី" (ស្រិស្ទិន ? ) ។ ក្លស់នោះ គេយកសំពត់ជាតិសូត្រដែលធ្វើមកពីប្រទេសចិនពាស ហើយទម្លាក់ចុងរំភាយចុះស៊ើងដល់ដី ។ ឯឆ័ត្រតាំងយូ គេយកសំពត់សូត្រពណ៌ខៀវមកពាស ហើយទំលាក់រំភាយខ្លីបន្តិចដែរ រួចយកប្រេងមកលាបយ៉ាងរលើបទៀតផង ។

## ៥. អំពីលទ្ធិសាសនាបីបែប

អ្នកចេះដឹង (ពួកព្រាហ្មណ៍ ?) គេហៅថា **ប៉ាន់ឃាប**[៨៥] លោកសង្ឃគេហៅថា **ជូគូ**[៨៦] ពួកតាបសគេហៅថា **ប៉ាស៊ីវី**[៨៧] ។

ដែលហៅថា **ប៉ាឃាប** នេះ មិនដឹងជារៀនពីកន្លែងណាទេ ខ្ញុំមិនដែល

[៨៥] តាមសេចក្តីប្រែរបស់លោក Pelliot ថា ប៉ាឃី ។ ពាក្យនេះទំនងជាមកពីពាក្យ "បណ្ឌិត" ។
[៨៦] លោកសង្ឃខាងពុទ្ធសាសនា ប្រហែលមកពីពាក្យចៅគូ ។
[៨៧] លោក Pelliot ប្រែថាប៉ាស៊ីវី ។ ប្រហែលមកពីពាក្យ "បស្វៈ" ឬ "បស្វិ" ។

ឃើញសាលា ឬទីកន្លែងរៀនសោះ ខ្ញុំឃើញតែរូបពួកនេះឯងដែលស្លៀកពាក់ដូចតែជនធម្មតាដែរ ប៉ុន្តែមានប្លែកត្រង់ពាក់អំបោះស វេញមួយខ្សែនៅក ហើយអំបោះនេះ ពាក់ជាប់នឹងក អស់មួយជីវិត ។ គេតែងរើសយកពួក **ឆាំនឃាង** នេះឯង ធ្វើជាមន្ត្រី ព្រោះគេទុកជាអ្នកចេះដឹងជាន់ខ្ពស់ហើយ ។

ចំណែកលោកសង្ឃវិញ កោរព្រះកេស ក្រងចីវរពណ៌លឿងបញ្ចេញស្មាខាងស្តាំ ហើយនិមន្តដោយជើងទទេ ឥតពាក់ស្បែកជើងឡើយ ។ ព្រះវិហារមួយ គេអនុញ្ញាតឱ្យប្រក់ក្បឿងបាន ហើយនៅកណ្តាលព្រះវិហារនោះមានតម្កល់ព្រះពុទ្ធរូប មួយព្រះអង្គ ដែលមានភិនភាគ ដូចជាព្រះសក្យមុនីដែរ[៨៨] គេហៅថា "ពុតឡៃ" លាបពណ៌ក្រហម ដោយគេយកដីសបកសូនធ្វើហើយ លាបពណ៌ផ្សេង ៗ គ្មានភិនភាគអ្វីក្រៅពីនេះទេ ។ មានព្រះពុទ្ធរូបតូច ៗ ច្រើនអង្គទៀតមានព្រះភក្ត្រមិនដូចគ្នាទេ ច្រើនតែកសាងអំពីស្ពាន់ ហើយគ្មានជួង ស្គរ រគាំង អស់អ្វីទាំងអស់ ។ ព្រះសង្ឃឆាន់ត្រីសាច់បាន តែមិនឆាន់ស្រាទេ ហើយគេរាចរៀបបូជាត្រីសាច់ទាំងនេះថ្វាយព្រះផង ។ ក្នុងមួយថ្ងៃលោកនិមន្តទៅបិណ្ឌបាតពីផ្ទះឧបាសកតែមួយដងទេ ហើយគ្មានរៀបដណ្តាំស្លនៅក្នុងវត្តឡើយ ។ លោកឆាន់មួយដងក្នុងមួយថ្ងៃ ។

គម្ពីរដែលលោកសូត្រមានច្រើនណាស់ គេចងក្រងនៅនឹងស្លឹកតាល-ព្រឹក្ស[៨៩] ជិតស្អាតអង្គុយពណ៌ខ្មៅ តែមិនមែនសរសេរដោយជក់ឬខ្មៅដុស

---

[៨៨] តាមលទ្ធិមហាយាន គេជឿថា មានព្រះពុទ្ធពីរអង្គ គឺព្រះពុទ្ធដើមនៅឋានសួគ៌ ឈ្មោះ "អាមិតាភៈ" និងព្រះពុទ្ធដែលត្រាស់ដឹងនៅស្ថានមនុស្សលោក ‹ សក្យមុនី › ។

[៨៩] បានជាខ្ញុំប្រែថា តាលព្រឹក្ស ព្រោះពាក្យដើម គេពុំទាន់បញ្ជាក់ឲ្យច្បាស់ថាស្លឹកអ្វីនៅឡើយទេ ។

ឡើយ ។ ខ្ញុំមិនដឹងគេសរសេរដោយអ្វីទេ[៥០] ។ គេមានយកគ្រែស្នែង និងក្លស់ដងមាស ឬដងប្រាក់ មកសែងមកបាំងលោកសង្ឃដែរ ព្រោះស្ដេចតែងពិគ្រោះនឹងព្រះសង្ឃ ចំពោះបញ្ហាណាដែលធំ ៗ របស់ស្រុកទេស ។ ប៉ុន្តែពុំឃើញមានដូនជីនៅក្នុងវត្តទាំងនោះទេ ។

រីឯពួកតាបសដែលហៅ **ប៉ាស៊ីវី** នេះ ស្លៀកពាក់ជាអ្នកស្រុកធម្មតាដែរ តែមានជូតក្បាលកំណាត់ពណ៌ស ឬពណ៌ក្រហម របៀបដូចពួកស្រីតារតានៃជាតិម៉ុងហ្គោលដែរ តែទាបជាងបន្តិច ។ ពួកនេះ មានវត្តដូចព្រះសង្ឃពុទ្ធសាសនានាដែរ តែមានទំហំតូចជាង ។ លទ្ធិតាបសនេះ គ្មានឥទ្ធិពលខ្លាំងដូចសាសនាព្រះពុទ្ធទេ ។ ពួកនេះគេគោរពចំពោះតែថ្មមួយដុំធំ[៥១] ដូចថ្មរូបអ្នកតាព្រះស្រុកដូច្នោះដែរ ។ ប្រភពក្តី របៀបប្រតិបត្តិនៃពួកនេះក្តី ខ្ញុំពុំបានដឹងទេ ។ ពួកនេះមានដូនជី ហើយវិហារក៏ត្រូវអនុញ្ញាតឱ្យប្រក់ក្បឿងបានដែរ ។ ពួក **ប៉ាស៊ីវី** មិនបរិភោគរបស់អ្នកដទៃទេ ហើយមិនបរិភោគនៅចំពោះទីសាធារណៈផង ហើយមិនសេពសុរាជាដាច់ខាត ។ ខ្ញុំមិនដែលឃើញតាបសសូត្រធម៌ឬក៏ធ្វើអំពើអ្វីជាប្រយោជន៍អ្នកផងឲ្យច្បាស់នឹងភ្នែកម្តងណាឡើយ ។

ចំណែកក្មេង ៗ កូនអ្នកស្រុកវិញ ដែលត្រូវការរៀនសូត្រ គេតែងយកទៅទុកដាក់រៀនជាមួយព្រះសង្ឃហើយបួសជាសង្ឃផង លុះដល់អាយុច្រើនក៏វិលត្រឡប់មកកាន់ជីវភាពជាជនធម្មតាវិញ ។ ឯការល្អិតល្អន់ជាងនេះទៅទៀត ខ្ញុំមិនបានដឹងឱ្យច្បាស់លាស់ឡើយ ។

---

[៥០] ការពិតគេចារដោយដែកចារ ហើយយកធ្យូងលាយប្រេងមកលុប ទើបបានជាស្នាមខ្មៅនេះ ។
[៥១] លោក Pelliot ចុះសេចក្តីយល់ថាជា លិង្គ ។

## ៦_ អំពីអ្នកស្រុក

តាមទម្លាប់របស់ពួកមនុស្សដែលមិនទាន់ស៊ីវិល័យ ច្រើនតែមានរូបឆោមខ្មៅគម្រើងគម្រាំង មិននិយមទៅនៅលើកោះដែលសម្បូណ៌ដោយទឹកទេ ចូលចិត្តតែនៅក្នុងភូមិឆ្ងាយដាច់ស្រយាលពីគេ ។ ទម្លាប់បែបនេះជាការពិតណាស់ ។

ចំណែកស្ត្រីក្នុងវាំង ឬស្ត្រីក្នុងត្រកូលថ្កុំថ្កើងវិញ មានសាច់សដូចចាន ព្រោះគេមិនងាយប្រទះនឹងកំដៅថ្ងៃឡើយ ។ តាមធម្មតាទាំងស្រី ទាំងប្រុស គ្មានស្លៀកដណ្ដប់អ្វីក្រៅពីសំពត់មួយផ្ទាំងរុំព័ទ្ធភ្ជាប់នឹងចង្កេះនោះទេ។ គេពែងខ្លួនទុកដើមទ្រូងនៅកណ្ដាលវាល ឯសក់បួង ជើងទទេ គ្មានស្បែកជើងឡើយ ទោះជាស្ត្រីមហេសីស្ដេចក៏ដោយ ។ ព្រះបរមក្សត្រមានមហេសីប្រាំអង្គគឺ អគ្គ-មហេសីមួយ និងមហេសីតាមញ្ញបួនប្រចាំទិសចំទាំងបួនដែរ ។ ចុះពីនោះមក ខ្ញុំឮថាមានស្ត្រីស្នំ បួនពាន់ ឬ ប្រាំពាន់នាក់ ហើយមានចែកជាជាន់ថ្នាក់ និងមិនឱ្យចេញដើរទៅណោមកណាផ្ដេសផ្ដាសឡើយ ។ ខ្ញុំចូលទៅក្នុងវាំងពេលណា ក៏ឃើញស្ដេចខ្មែរចេញមកជាមួយអគ្គមហេសី ហើយគង់ប្រថាប់នៅក្នុងស៊ុមមាស[៥៣] នាំល្វែងកណ្ដាលធំទូលាយ ។ ចំណែកមន្ត្រីអ្នកក្នុងវាំងវិញ នាំគ្នាទៅអង្គុយក្នុងផែរព័ទ្ធជុំវិញតាមលំដាប់ថ្នាក់ យសសក្តិរៀងខ្លួន ហើយនាំគ្នាលបមើលពីក្រោមស៊ុមមាសនោះមក ។ ខ្ញុំបានចូលទៅឃើញម្ដង គឺឱ្យតែនរណាមានកូនក្រមុំល្អ ច្បាស់ជាត្រូវគេហៅឱ្យនាំចូលទៅក្នុងវាំង ។ ពួកស្រីនៅខាង

---

[៥៣] ស៊ុមមាសនេះហើយ ដែលយើងស្គាល់ម្ដងមកហើយ ហើយយើងសន្មតថាជាបុស្បុកដែលជាទីប្រថាប់ក្នុងក្រឡាព្រះតំនាល់ ។

ក្រោយនេះ ដែលដើរច្រវាត់ចេញចូលបម្រើគេ ហៅថា "តាំងគេឡាង" (ស្រីង្គារ ?) ពួកនេះមានចំនួនមិនតិចជាងមួយពាន់ ឬពីរពាន់នាក់ទេ តែអាចយកប្ដីរស់នៅជាមួយអ្នកធម្មតាបាន ។ ស្ត្រីទាំងនេះសុទ្ធតែកោរសក់ពីលើថ្ងាសបន្តិច ហាក់ដូចជាពួកអ្នកបើកផ្លូវទឹកនៅស្រុកចិនខាងជើង ហើយគេលាបជាតិហិង្គុលនៅត្រង់សក់ ក្បែរគុម្ពត្រចៀកទាំងសងខាង ។ នេះហើយជាសញ្ញាសម្គាល់ពួកតាំងគេឡាង ឬ ជេនតាឡាង គឺមានតែពួកនេះហើយដែលអាចចូលក្នុងវាំងបាន ឯអ្នកថយថោកពីនេះទៀត ចូលទៅកាន់ផ្លូវខ្មែងខ្ទាត់ខាងក្រោមប្រាសាទនោះមិនបានទេ ។

ស្ត្រីអ្នកភូមិធម្មតា ក៏បួងសក់ដែរ ប៉ុន្តែគ្មានសៀតស្មៀតសក់ និងតុបតែងលំអលើសក់ក្បាល ឬ លំអមុខឡើយ ។ នៅកដៃ មានពាក់កងមាសនៅនឹងម្រាមដៃ មានពាក់ចិញ្ចៀនមាស ។ ម្យ៉ាងទៀត ពួកជេនតាឡាង និងអ្នកនៅក្នុងវាំង ទាំងប្រុសទាំងស្រី សុទ្ធតែលាបប្រេងក្រអូបដែលផ្សំធ្វើឡើងពីជាតិឈើក្រអូប និងក្រលៀនប្រើស ។

គ្រប់គ្រួសារទាំងអស់សុទ្ធតែគោរពប្រណិបតន៍ព្រះពុទ្ធ ។ ក្នុងប្រទេសនេះ មានមនុស្សស្រីភេទខ្លះស្អាត ១ រាល់ថ្ងៃតែងដើរជាក្រុមដប់នាក់ ឬលើសពីនេះ ទៅពាសពេញទីផ្សារជាញឹកញយណាស់មានបំណងទាក់ទងពួកចិន ១ ដូរយករបស់មានតម្លៃ ដែលជាទម្លាប់មួយមិនល្អ មិនថ្លៃថ្នូរសោះ ។

## ៧. អំពីស្ត្រីសម្រាលកូន

ស្រីអ្នកស្រុកនេះ ក្រោយដែលសម្រាលកូនរួចទៅ គេយកបាយក្ដៅប្រឡាក់លាយអំបិល ហើយញាត់ចូលទៅក្នុងទ្វារមាស លុះដល់បានមួយយប់មួយថ្ងៃ

ទើបគេយកចេញមកវិញ ។ ការធ្វើដូច្នេះ ជាហេតុនាំឱ្យមិនសូវមានជម្ងឺ និងឱ្យបានរូបទ្វារមាសតូចដូចជាស្ត្រីក្រមុំទៀតផង ។ កាលខ្ញុំទើបនឹងដឹងរឿងនេះដំបូងឆ្ងល់ថា ក្រែងមិនពិតដូច្នោះទេដឹង ? ព្រោះថា បើបានជាមានប្តី និងមានកូនទៅហើយ ចុះម៉េចខ្លាចគេដឹងរឿងនេះទៀត ? ប៉ុន្តែនៅនឹងផ្ទះដែលខ្ញុំសំណាក់នៅ មានស្រីម្នាក់សម្រាលកូន ដែលជាហេតុនាំឱ្យខ្ញុំដឹងរឿងនេះច្បាស់-លាស់ នៅក្រោយពេលសម្រាលកូនហើយ មួយថ្ងៃទៀត ស្រីនោះពកូនខ្ចីទៅមុជទឹកទន្លេ ដែលជាការចំឡែកមិនដែលជួបប្រទះទេ ។

នៅពេលដែលខ្ញុំទៅជួបនឹងគេម្តងណា គេតែងពោលថា ស្រីស្រុកនេះក្រាស់ដោយកាមតណ្ហាណាស់ ។ ក្រោយពេលដែលសម្រាលកូនហើយមួយថ្ងៃ ឬ ពីរថ្ងៃប៉ុណ្ណោះ គេក៏រួមដំណេកជាមួយប្តីទៀតហើយ ។ បើប្តីនោះបំពេញចំណង់ខ្លួនមិនបានទេ នឹងត្រូវគេបោះបង់ចោលដូចពួកបួយឆេង[៩៣] មិនខាន ។ ប្រសិនបើប្តីនោះបានចុះទៅស្រុកឆ្ងាយអស់ពេលច្រើនយប់ ចាប់ពីដប់យប់ឡើងទៅ ច្បាស់ជាត្រូវប្រពន្ធស្តីឱ្យថា "ខ្ញុំមិនមែនស្រីខ្មោចទេ តើឱ្យខ្ញុំដេកម្នាក់ឯងម្តេចនឹងបាន ?" ។ ខ្ញុំឮថាមានស្ត្រីច្រើនណាស់រក្សាទុកសេចក្តីបរិសុទ្ធរបស់ខ្លួន ។ ស្រី ១ ច្រើនតែឆាប់ចាស់ណាស់ ពីព្រោះតែគេឆាប់បានប្តី ឆាប់មានកូនពេក ។ មនុស្សដែលបានអាយុ ២០ ឬ ៣០ គឺប្រហែលគ្នានឹងជនជាតិចិនដែលបានអាយុ ៤០ ឬ ៥០ ឆ្នាំដូច្នោះដែរ ។

---

[៩៣] បួយឆេង ប្រែថា មន្ត្រីទិញ គឺពួកដែលគេទិញដាច់ មិនឱ្យឱ្យទៅនៅមានប្រពន្ធកូនឡើយ ។

## ៨. អំពីស្ត្រីក្រមុំ

ពួកឪពុក ម្ដាយដែលមានកូនស្រី តែងឱ្យពរកូនថា "សូមឱ្យឯងទៅអនាគតបានជាស្រីដែលមានប្ដីរាប់រយពាន់"[៥៤] ។

កូនស្រីក្នុងគ្រួសារអ្នកមាន ចាប់ពីអាយុ ៧ ទៅ ៩ ឆ្នាំ គ្រួសារអ្នកក្រខ្សត់រហូតដល់អាយុ ១១ ឆ្នាំ គេនិមន្តលោកឬតាបសមកបើកមុខកូនស្រី ហៅថា ឆឹនថាន់[៥៥] ។

ពិធីនេះ រាជការដាក់កម្រិតឱ្យធ្វើមួយឆ្នាំម្ដង នៅក្នុងខែដែលត្រូវនឹងខែទី ៤ របស់ចិន ដោយរើសយកថ្ងៃណាមួយធ្វើតែម្ដង ។ អ្នកមានកូនស្រីដែលត្រូវធ្វើពិធីនេះ ពោងជម្រាបរាជការជាមុន ហើយអ្នករាជការ គេក៏ឱ្យទៀនធំមួយដើមមកទុកមុន និងហានគូសគំនូសមួយជាកំណត់សញ្ញាផង ថាដល់ពេលយប់ធ្វើពិធីនេះ បើដុតទៀនអស់ត្រឹមគន្លាក់នោះហើយ ត្រូវចាប់ពិធី ឆឹនថាន់ឡើង ។

នៅមុនពេលដែលធ្វើពិធីនេះមួយខែ ឬ កន្លះខែ ឪពុកម្ដាយ ត្រូវជ្រើសរើស លោក ឬ តាបសណាមួយ ប្រកាន់ទុកជាមុន ទោះបីនៅវត្តណាក៏ដោយក៏តែងតែមានទៅនិមន្តដែរ ។

លោកគ្រូអង្គណាដែលសំខាន់ ១ ជាងគេ តែងតែត្រូវពួកមន្ត្រី ឬអ្នកមានគេនិមន្តទុកអស់ហើយ ឯអ្នកក្រ ពុំអាចជ្រើសរើសរកលោកបានតាម

---

[៥៤] ពរនេះ បានន័យថាឱ្យមានគេស្រឡាញ់ច្រើន ដូចទម្លាប់ពួកកូយ-ពួង បើមានកូនក្រមុំ គេឱ្យដេកនៅផ្ទះបាយ ទុកឱកាសពេលយប់ឱ្យកំឡោះ ១ ទៅស្ទាបលលួងចុះ ។

[៥៥] ឆឹនថាន់ នេះ មិនដឹងជាពាក្យដើមថាអ្វី រកប្រែឱ្យជាន័យច្បាស់ពុំទាន់ឃើញ ។

ចំណាប់ឡើយ ។ មន្ត្រី ឬអ្នកមាន គេបូជាលោកនូវសុរា អង្ករ កំណាត់សំពត់ ស្លាមូ និងគ្រឿងប្រាក់យ៉ាងច្រើនរហូតដល់ទៅ ១០០ អម្រែកផង ហើយមាន តម្លៃប្រមាណមិនតិចជាងសាច់ប្រាក់ចិន ២០០ ឬ ៣០០ តម្លឹងឡើយ ។ អ្នក មានរបស់របរតិច ក៏គង់ ៣០-៤០ ឬ ១០-២០ អម្រែកដែរ ។ ដូច្នេះគ្រួសារ អ្នកក្រត្រូវរង់ចាំដល់កូនស្រីអាយុ ១១ ឆ្នាំទើបចាប់ធ្វើពិធីនេះ មកពីពិបាករក របស់របរទាំងនេះឯង ។

មានអ្នកខ្លះគេជួយលុយដល់កូនអ្នកក្រឱ្យធ្វើពិធីនេះ ដែលគេទុកជា ការសាងកុសលមួយដែរ ។ ក្នុងមួយឆ្នាំ លោក ឬតាបសមួយអង្គ អាចទទួល និមន្ត ធ្វើពិធីនេះ ឱ្យក្មេងស្រីបានតែមួយនាក់ទេបើលោកយល់ព្រមនឹងអ្នកណា មួយហើយ មិនអាចទទួលអ្នកដទៃទៀតបានទេ ។

នៅពេលយប់ដែលធ្វើពិធីនេះ គេមានរៀបចំគ្រឿងស៊ីផឹក និងភ្លេង ភ្លាត់ទ្រហឹងអឺងកង ។ ក្រៅពីការជួបជុំញាតិមិត្តជិតឆ្ងាយ គេមានសង់ធ្វើជា រោងមួយ តម្កល់រូបមនុស្ស រូបសត្វដែលសូទ្យធ្វើអំពីដី ។ អ្នកមានយសសក្តិ ធ្វើ រូបនេះដល់ទៅជាងដប់ ឯអ្នកហោចមក ក៏មានបី ឬបួនដែរ ។

ចំពោះអ្នកដែលទាល់ក្រខ្លាំងវិញ គ្មានធ្វើរូបនេះទេ គិតតែរៀបពិធីតែ ម្តងទៅ លុះដល់គ្រប់ពេលប្រាំពីរថ្ងៃទើបគេរុះរោងនោះចេញ ។ នៅយប់ដែល ធ្វើពិធីនោះទៀត គេយកគ្រែស្នែងទៅនិមន្តលោក ហើយបាំងក្លស់ និងលេង ភ្លេងដង្ហែនាំយកទៅ ។ គេមានកូនតូបពីរដូចគ្រែស្នែងដែរ ដែលបិទបាំងលំអ ដោយព្រែពណ៌ភ្លឺច្រាល ។ តូបមួយសម្រាប់ឱ្យកូនស្រីនោះអង្គុយ ឯតូបមួយ ទៀតសម្រាប់លោក ឬ តាបសគង់សូត្រធម៌ តែខ្ញុំមិនដឹងជាលោកសូត្រអ្វី

ឡើយ ។ ពេលនោះភ្លេងក៏ប្រគំឮតឹកកងរំពងដែរ ។ ខ្ញុំឮថាយប់នេះគ្មានត្រណម អ្វីទេ គ្រាន់តែដឹងថា ដល់ពេលវេលាភ្លាម លោក ឬតាបសនោះក៏ចូលទៅក្នុង បន្ទប់ ជាមួយកូនស្រី ហើយលូកដៃរបស់លោកផ្ទាល់ទៅយករបស់កូនស្រី ដាក់ ទៅក្នុងស្រា[៩៦] ។ ខ្លះថាឪពុកម្ដាយ និងញាតិមិត្ត យកទៅផ្ដិតទឹងថ្ងាស ឬ មុខរៀងខ្លួន ។ ខ្លះទៀតថា យកមកភ្លក្សគ្រប់គ្នា ហើយខ្លះថា លោកក៏រួមរ័ក ជាមួយកូនស្រីក្នុងពេលនោះ តែខ្លះថា ឥតមានទេ ។ រឿងនេះ គេមិនឱ្យពួក ចិនបានឃើញផ្ទាល់ទេ ហេតុនេះ ទើបខ្ញុំមិនអាចបានដឹងនូវការពិតឡើយ ។

លុះដល់ពេលទៀបភ្លឺទើបគេដង្ហែលោកដោយ គ្រែស្នែង មានភ្លេងនឹង បាំងក្លស់ នាំយកទៅវិញ ហើយគេយករបស់ល្អ ៗ មានព្រៃពណ៌ជាដើម ទៅធ្វើ ជាថ្នូរលស់យកកូនស្រីនោះមកវិញ ។ បើពុំធ្វើដូច្នេះទេ កូនស្រីនេះ មិនអាច យកទៅឱ្យមានប្ដីដទៃទៀតបានឡើយ ព្រោះនៅជាកម្មសិទ្ធិរបស់លោកនៅ ឡើយ ។

ពេលដែលខ្ញុំបានឃើញរឿងរ៉ាវនេះ គឺនៅថ្ងៃ ៦ ខែទី ៤ នៃឆ្នាំ **តេខអ៊ីច** ក្នុងរជ្ជកាលស្ដេច **តាឃេតេក** ( ត. ស. ១២៩៧ ) ។

នៅពេល ដែលមុនធ្វើពិធីនេះ កូនស្រីត្រូវនៅដេកក្នុងបន្ទប់ជាមួយ ឪពុកម្ដាយ លុះដល់ធ្វើ ពិធីនេះរួចហើយ កូនស្រីត្រូវបែកទៅដេកបន្ទប់ដទៃ

---

[៩៦] ត្រង់នេះ អត្ថបទដើមក៏និយាយមិនច្បាស់សេចក្ដីដែរ យើងប្រែឱ្យនៅន័យត្រឹមតាមឃ្លា ដើមថា : ............. ។ ត្រង់នេះ ឯលោក Pelliot ប្រែថា Il la déflore avec la main et recueille ses prémices dans du vin អ្នកបកប្រែសុំបញ្ជាក់ថា : រឿងរ៉ាវក្នុងវគ្គនេះ ពុំ ដែលឮក្នុងទំនៀមខ្មែរទេ ប៉ុន្តែយើងប្រែតាមតែអត្ថបទដើមប៉ុណ្ណោះ មិនហ៊ានបំបាត់ចោល ឡើយ ។

ហើយនាងចង់ទៅដេកកន្លែងណាក៏បាន តាមចិត្តចង់ឥតមាននរណាតាមមើលគយឃ្លាំឡើយ ។

ចំពោះរឿងរៀបអាពាហ៍ពិពាហ៍វិញ ពិតមែនតែមានតម្រូវឱ្យជូនលុយកាក់ជាច្រើន ប៉ុន្តែគេមានអនុគ្រោះច្រើនដែរ ។ មានខ្លះគេអាចដេកនៅរួមរ័កនឹងគ្នាជាមុនទៅហើយ ទើបរៀបការជាក្រោយក៏បាន ។ តាមប្រពៃណីគេមិនមានចាត់ទុកការណ៍នេះជាការគួរខ្មាសអៀនឬជាចម្លែកឡើយ ។

នៅយប់ដែលធ្វើពិធី "ភិនថាន" នោះ ជូនកាលនៅតែតាមផ្លូវមួយមានដល់ទៅដប់ផ្ទះឯនោះ រៀបធ្វើពិធីនេះ ។ នៅតាមទីក្រុង អ្នកណាបានដើរកាត់ប្លង់ពិធី ពីមុខលោក ឬតាមបសទាំងនេះច្បាស់ជាវង្វេងវង្វាន់ផ្លូវហើយ ណាមួយឮពីកកងរំពងស្គរភ្លេងគ្មានចន្លោះត្រង់ណាទេ ។

**សូមរង់ចាំអានភាគបន្ត (ទី ៥) ដោយមេត្រី**

# ឯកសារពិគ្រោះ

- វចនានុក្រម សម្ដេចព្រះសង្ឃរាជ ជួន ណាត
- កម្រងឯកសារ ស្ដីពីប្រពៃណី ទំនៀមទម្លាប់ខ្មែរ ភាគ I មៀច ប៉ុណ្ណ
- ឯកសារ មហាបុរសខ្មែរ អេង សុត
- ពង្សាវតារខ្មែរ ត្រឹងងា
- ប្រជុំរឿងព្រេងបុរាណខ្មែរ
- កំណេត់ហេតុរបស់ ជីវ តាក្វាន់
- កំពូលវីរៈបុរស មៀច ប៉ុណ្ណ
- បទពិសោធន៍ផ្ទាល់ខ្លួន



# ជីវប្រវត្តិសង្ខេប

ខ្ញុំ **មៀច ប៉ុណ្ណ** កើតថ្ងៃពុធ ខែអស្សុជ ឆ្នាំវក ព.ស.២៤៧៥ គ.ស.១៩៣២ នៅភូមិខ្វាវ ឃុំព្រៃអំពក ស្រុកគីរីវង្ស ខេត្តតាកែវ ឪពុកឈ្មោះ **មៀច អ៊ុច** ម្ដាយឈ្មោះ **អ៊ុង នាង** ជាពូជពង្សកសិករ ។ កាលពីកុមារសិក្សានៅវត្ត **ព្រះធាតុ** រួចបន្តទៅសាលាបឋមសិក្សាគីរីវង្សទន្ទាប់ខេត្តតាកែវ ។គ្រាបន្ទាប់បានបញ្ចប់ការសិក្សានៅមធ្យមសិក្សាភ្នំពេញ បានបម្រើការជាគ្រូបង្រៀន រួចជាសាស្ត្រាចារ្យមធ្យមសិក្សាភាសាបារាំង-ខ្មែរ ។

ក្នុងមួយជីវិត ពេញចិត្តតែនឹងការសិក្សាស្រាវជ្រាវ និពន្ធសរសេរចងក្រងសៀវភៅ ឯកសារទាក់ទងនឹងវប្បធម៌ប្រពៃណីអក្សរសាស្ត្រ... ។ ស្នាដៃ និងសកម្មភាពមាន:

-ឆ្នាំ១៩៥៧ និពន្ធរឿង "**កំហុសរួមគណា**" និង "**ក្រមុំចូលម្លប់**"

-ឆ្នាំ១៩៩៤ - ១៩៩៩ និពន្ធចងក្រងសៀវភៅ កម្រងឯកសារ "**ស្ដីពីប្រពៃណី និងទំនៀមទម្លាប់ខ្មែរ ភាគ ១**" ចេញផ្សាយពី **វិទ្យាស្ថានពុទ្ធសាសនបណ្ឌិត្យ**

-ឆ្នាំ១៩៩៤ ជាសមាជិកគណកម្មការនិពន្ធ ទស្សនាវដ្ដី "**កម្ពុជសុរិយា**"

-ឆ្នាំ២០០២ និពន្ធចងក្រង "**ការសិក្សាប្រៀបធៀបអាពាហ៍ពិពាហ៍បូរាណបែបរបស់ខ្មែរ**"

-ឆ្នាំ២០០៤ និពន្ធចងក្រង **រឿងខ្លីៗសម្រាប់កុមារ ភាគ ១** និង សរសេរភាគ **២** បញ្ចប់

-ឆ្នាំ២០០៧ **សមាជិកក្រុមប្រឹក្សាជាតិភាសាខ្មែរ** តាមស្មារតីអនុក្រិតលេខ ១៨អនក្រ/បក ចុះថ្ងៃ៩ ខែមិនា ឆ្នាំ២០០៧

-ឆ្នាំ២០០៧ និពន្ធសៀវភៅរឿង "**កំពូលវីរៈបុរស**" ចេញផ្សាយពី គ្រឹះស្ថានបោះពុម្ពផ្សាយ **អង្គរ**

-ឆ្នាំ២០០៧ ចេញផ្សាយជាថ្មី កម្រងឯកសារស្ដីពី "**ប្រពៃណី និងទំនៀមទម្លាប់ខ្មែរភាគ ១**" បោះពុម្ពលើកទី ៣ ពីគ្រឹះស្ថានបោះពុម្ពផ្សាយ **អង្គរ**

-ឆ្នាំ២០០៨ និពន្ធសៀវភៅ កម្រងឯកសារស្ដីពី "**ប្រពៃណី និងទំនៀមទម្លាប់ខ្មែរ ភាគ ២ និង ៣**" ចេញផ្សាយពី គ្រឹះស្ថានបោះពុម្ពផ្សាយ **អង្គរ**

-ឆ្នាំ២០១១ និពន្ធសៀវភៅ កម្រងឯកសារស្ដីពី "**ប្រពៃណី និងទំនៀមទម្លាប់ខ្មែរ ភាគ ៤**" ចេញផ្សាយពី គ្រឹះស្ថានបោះពុម្ពផ្សាយ **អង្គរ**

**គ្រឿងឥស្សរិយយស:** មេដាយមាសការងារ (២៦ ០៩ ២០០១)

**អាសយដ្ឋាន:** ទីប្រឹក្សាអមក្រុមជំនុំ ទំនៀមទម្លាប់ខ្មែរនៃវិជ្ជាស្ថានពុទ្ធសាសនបណ្ឌិត្យ ផ្ទះលេខ ៥៦A ផ្លូវ៦០៨ សង្កាត់បឹងកក់ ២ ខណ្ឌទួលគោក ក្រុងភ្នំពេញ ។

---

**គ្រឹះស្ថានបោះពុម្ពផ្សាយ អង្គរ** *Editions* **Angkor**

អាស័យដ្ឋាន : ផ្ទះលេខ 143E0 ផ្លូវខេមរភូមិន្ទ (St. 130) ភ្នំពេញ



